

ក្រសួងអប់រំ យុវជន និងកីឡា

សម្រាប់លក់

# ភាសាខ្មែរ

៧




គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ



ក្រសួងអប់រំ យុវជន និងកីឡា

# ភាសាខ្មែរ

## ថ្នាក់ទី ៧




បោះពុម្ពផ្សាយដោយ

គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ

អគារ ១៤៨ មហាវិថី ព្រះនរោត្តម ភ្នំពេញ

**គណៈកម្មការនិពន្ធ** លោកជំទាវ ទន់ សាអ៊ីម លោកស្រី ម៉ៅ តាន់ណារី
លោក យិន ធី លោក ព្រៃ សំបូរ

**អ្នកវាយអត្ថបទ** លោក ខែម ម៉ារី

**វិចិត្រករ** លោក ឃុន សុវណ្ណារិទ្ធ

**អ្នករៀបរៀង** លោក ឆន ឈាង

**អ្នករចនាទំព័រ** លោក ខែម ម៉ារី

**អ្នកឯកទេស** លោក ងួន ច័ន្ទឫទ្ធី

**គណៈកម្មការពិនិត្យ** លោកស្រី ខៀវ ស៊ុនរ៉ាណ លោកស្រី ញេប ពិដោរ
លោកស្រី ឡុង ធារិន

បានទទួលការអនុញ្ញាតឱ្យបោះពុម្ពផ្សាយពី **ក្រសួងអប់រំ យុវជន និងកីឡា** តាមប្រកាសលេខ ២២០៨ អយក.ប្រក. ចុះថ្ងៃទី ១៥ ខែ កក្កដា ឆ្នាំ ២០០៩ ដើម្បីប្រើប្រាស់នៅតាមសាលារៀន ។

**ហាមថតចម្លងសៀវភៅនេះ**



**គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ**

បោះពុម្ពឆ្នាំ២០១៦

ISBN 9-789-995-000-790

# អារម្ភកថា

សៀវភៅភាសាខ្មែរថ្នាក់ទី៧នេះ បានតាក់តែងឡើងតាមកម្មវិធីសិក្សាថ្មី ។ សៀវភៅនេះបន្តពង្រឹងពង្រីក សមត្ថភាព អាន ស្ដាប់ និយាយ និងសរសេរ ឱ្យកាន់តែល្អប្រសើរថែមទៀត ។ មេរៀនក្នុងសៀវភៅនេះនឹងជួយអ្នកឱ្យយល់កាន់តែច្បាស់ពីសេចក្ដីស្រឡាញ់កេរដំណែលរបស់ជាតិ ការតស៊ូ អំណត់ ព្យាយាម ការជួយទុក្ខធុរៈគ្នាទៅវិញទៅមក ការកសាងសេចក្ដីសង្ឃឹម ភាពជោគជ័យ និងកាតព្វកិច្ចរបស់ពលរដ្ឋក្នុងគ្រួសារ សហគមន៍ និងសង្គមជាតិ ។ អ្នកនឹងរីករាយជាមួយអត្ថបទទេវកថា ព្រេងកថា ល្ខោន សុភាសិត ពាក្យបណ្ដៅ និងអត្ថបទផ្សេងៗទៀត ដែលផ្ដល់ដំបូន្មាននិងបទពិសោធល្អៗដល់អ្នកដើម្បីអភិវឌ្ឍខ្លួនឱ្យក្លាយជាកូនល្អ សិស្សល្អ និងពលរដ្ឋល្អ ។ ក្រៅពីផ្ដល់ចំណេះដឹង និងបំណិនផ្នែកភាសា អត្ថបទទាំងនោះនឹងជួយពង្រីកគំនិតប្រាជ្ញា ស្មារតីរបស់អ្នកឱ្យកាន់តែទូលំទូលាយ ។ ម្យ៉ាងទៀត នៅចុងបញ្ចប់នៃផ្នែកនីមួយៗ ( ស្ដាប់ និយាយ អាន សរសេរ បំណិនវេយ្យាករណ៍ ) នៃមេរៀនមានសំណួរលំហាត់ និងតែសសម្រាប់វាស់ស្ទង់ បំណិន និងសមត្ថភាពរបស់អ្នកដែលបានសិក្សារួចទៀតផង ។

គណៈកម្មការនិពន្ធសង្ឃឹមថា សៀវភៅភាសាខ្មែរថ្នាក់ទី៧ថ្មីនេះនឹងក្លាយជាមិត្តដ៏ល្អរបស់អ្នកជាពុំខាន ។

សូមឱ្យការសិក្សារបស់អ្នកប្រកបដោយជោគជ័យ!

គណៈកម្មការនិពន្ធ

# បញ្ជីអត្ថបទ


មេរៀនទី ១ : សេចក្តីស្រឡាញ់.......................................................១

មេរៀនទី ២ : ការជួយគ្នាទៅវិញទៅមក.......................................២៣

មេរៀនទី ៣ : កេរដំណែលរបស់ជាតិ ........................................ ៤៩

មេរៀនទី ៤ : សេចក្តីថ្លៃថ្នូរ..................................................... ៦៩

មេរៀនទី ៥ : ពលរដ្ឋល្អ ........................................................ ៩១

មេរៀនទី ៦ : សេចក្តីប្រាថ្នារបស់យើង.................................... ១១១

មេរៀនទី ៧ : តម្លៃនៃការងារ................................................ ១២៥

មេរៀនទី ៨ : សេចក្តីព្យាយាម................................................១៤៥

មេរៀនទី ៩ : សេចក្តីសង្ឃឹម ................................................. ១៦៧

មេរៀនទី ១០ : បំណងប្រាថ្នាដើម្បីជោគជ័យ................................១៨៣

បទានុក្រម : ...........................................................................២០១




# សេចក្ដីស្រឡាញ់




សេចក្ដីស្រឡាញ់ជាប្រភពនៃសេចក្ដីរីករាយនិងសន្តិភាព ។ សេចក្ដីស្រឡាញ់ផ្ដើមចេញពីការស្រឡាញ់ខ្លួនឯង គ្រួសារ មិត្តភក្ដិ ជនរួមជាតិ ទឹកដី និងប្រជាជាតិ ។ ប្រទេសជាតិរុងរឿងនិងរីកចម្រើន ដោយសារប្រទេសមានសន្តិភាព ពលរដ្ឋមានស្មារតីស្រឡាញ់ជាតិ រួមចំណែកការពារនិងអភិវឌ្ឍជាតិ ។

ក្នុងមេរៀននេះ អ្នកនឹងបានសិក្សាស្វែងយល់អំពីមោទនភាព សេចក្ដីស្រឡាញ់ និងមនសិការជាតិខ្ពស់របស់បុព្វបុរសខ្មែរយើង ។

ជាពិសេស អ្នកនឹងបានសិក្សាបន្ថែមទៀតដែរអំពី ៖

- លក្ខណៈសម្គាល់នៃព្រេងកថា
- តម្លៃអប់រំរបស់អត្ថបទ
- ចំណុចរាយ
- ល្បះបញ្ជាក់
- ការណែនាំនិងផ្ដល់ព័ត៌មានអំពីខ្លួនឯង
- សំណេរអត្ថបទព័ត៌មានពណ៌នាព្រឹត្តិការណ៍ ។



# ព្រេងកថា

ដូចម្ដេចដែលហៅថាព្រេងកថា? តើព្រេងកថាមានលក្ខណៈសម្គាល់ដូចម្ដេចខ្លះ?

- ចូរអ្នកអានរឿងខាងក្រោម ៖

## រឿង ប្រាសាទតាព្រំ នៅខេត្តតាកែវ

ស្ដេចព្រះនាមព្រះកេតុមាលា សោយរាជ្យនៅមហានគរ ជាស្ដេចមានបុណ្យអស្ចារ្យណាស់ ។ វេលាមួយ ទ្រង់អផ្សុកក្នុងព្រះរាជហឫទ័យ គង់នៅប្រាសាទពុំបាន ទ្រង់ក៏យាងកំសាន្តព្រះរាជហឫទ័យជាមួយរេហ៍ពល ដោយផ្លូវនាវាតាមឆ្នេរសមុទ្រត្រើយខាងត្បូង ។ លុះយាងទៅដល់ទន្លេបាទី ទ្រង់ចតព្រះទីនាំងនាវាដោយសោមនស្ស ហើយទ្រង់បោះព្រះពន្លាជ័យសម្រាកព្រះអង្គនៅក្នុងទីនោះ ។ អ្នកស្រុកប្រុសស្រីទាំងអស់បានឮដំណឹងថា ស្ដេចយាងមកពីនគរវត្តក៏នាំគ្នាជាច្រើនអ្វីអែមកថ្វាយបង្គំគាល់ យកស្លួយអាករមកថ្វាយព្រះអង្គគ្រប់គ្នា។ កាលនោះ មានយាយម្នាក់មានភោគសម្បត្តិស្ដុកស្ដម្ភជាងអ្នកស្រុកទាំងអស់ ។ គាត់មានកូនក្រមុំម្នាក់ឈ្មោះ " នាងពៅ " មានរូបឆោមលោមពណ៌ល្អជាងស្រីទាំងពួង ។ គាត់នាំកូនក្រមុំមកគាល់ស្ដេចរាល់ថ្ងៃ ។ ព្រះមហាក្សត្រទ្រង់ទតឃើញរូបនាងនោះ ក៏មានព្រះរាជហឫទ័យប្រតិព័ទ្ធ ។ យាយដឹងថា ស្ដេចសព្វព្រះរាជហឫទ័យនឹងកូនក្រមុំរបស់ខ្លួន ក៏លើកនាងថ្វាយជាព្រះទេពី ។ ស្ដេចបាននាងពៅធ្វើជាអគ្គមហេសី ទ្រង់សព្វព្រះរាជហឫទ័យនឹងនាងពៅពន់ពេក ។ ស្ដេចគង់នៅក្នុងទីនោះបានបីខែ នាងក៏មានគភ៌ ។ លុះនាងមានគភ៌បាន៣ខែ ព្រះរាជាទ្រង់មានព្រះបន្ទូលថា " ចូរប្អូននៅក្នុងទីនេះចុះ ពីព្រោះមានមាតានៅថែរក្សា ឯបងសូមលាត្រឡប់ទៅមហានគរវិញ" ។ ហើយទ្រង់ព្រះរាជទានព្រះទម្រង់មួយទុកជាកេរ រួចមានបន្ទូល ៖ " បើព្រះរាជបុត្រប្រសូតមក ធំដឹងក្ដីឡើងកាលណា ចង់ទៅសួររកបង ចូរនាងឱ្យពាក់ព្រះទម្រង់នេះយកទៅជាសាក្សី " ។ ព្រះរាជាទ្រង់ផ្ដាំស្រេចហើយ ទ្រង់ស្ដេចយាងទៅកាន់ព្រះមហានគរវិញ ។

ក្រោយមក នាងពៅក៏ប្រសូតព្រះរាជបុត្រាមួយអង្គមានរូបល្អពិសិដ្ឋ ទ្រង់ទ្រាយដូចព្រះវរបិតា ។ មាតាឱ្យនាមថា “ អង្គព្រំកុមារ ”ដោយហេតុថា ព្រះរាជកុមារប្រសូតនៅព្រំដែនទន្លេនោះ ។ លុះព្រះរាជបុត្រនោះធំឡើងបានព្រះជន្ម១៦ព្រះវស្សា ទ្រង់សួររកបិតា ។ នាងពៅដំណាលប្រាប់បុត្រសព្វគ្រប់ ។ ដោយព្រះរាជកុមារចង់ទៅតាមព្រះបិតាឯមហានគរ មាតាក៏បានដោះព្រះទម្រង់ឱ្យទៅព្រះរាជបុត្រពាក់នៅម្រាមព្រះហស្តខាងស្តាំ ។ ព្រះរាជបុត្រក៏ថ្វាយបង្គំលាមាតា ឡើងគង់លើសេះយាងតាមឆ្នេរសមុទ្រទៅ ។ លុះបានទៅដល់ខ្លោងទ្វារព្រះមហានគរ ទ្រង់សួរអ្នកចាំទ្វាររកព្រះវរបិតា ។ នាយឆ្មាំទ្វារបានចាត់មន្ត្រីឱ្យទៅក្រាបបង្គំទូលស្តេច ។ ព្រះអង្គទ្រង់ជ្រាបហើយក៏មានព្រះតម្រាស់ឱ្យចូលទៅ ។ អង្គព្រំក៏ចូលទៅក្រាបថ្វាយបង្គំព្រះវរបិតា ហើយ ដោះព្រះទម្រង់ថ្វាយ ។ ស្តេចទ្រង់ស្គាល់ច្បាស់ជាព្រះរាជបុត្រពិតមែន ដោយទ្រង់ទតឃើញព្រះទម្រង់ ហើយទ្រង់ចាត់អង្គព្រំឱ្យមកធ្វើជាចៅហ្វាយស្រុកនៅត្រើយទន្លេនោះ ។ ព្រះអង្គឈ្វេងយល់ថា អង្គព្រំប្រសូតក្នុងទីនោះផង ហើយទីនោះពុំទាន់មាននាម៉ឺនណាឈរត្រួតត្រាផង ទើបព្រះអង្គទ្រង់ព្រះរាជសារមានត្រា តាំងអង្គព្រំជាស្តេចត្រាញ់មួយអង្គជាធំក្នុងស្រុកនោះ ។ ដោយហេតុអង្គព្រំជាស្តេច ជាមេបានៅស្រុកនោះមុនគេ បានជាស្រុកនោះឈ្មោះស្រុកបាទី ទន្លេនោះឈ្មោះទន្លេបាទី គឺទីរបស់ស្តេចជាបា ពីត្រឹមនោះមក ។ លុះអង្គព្រំបានជាស្តេចត្រាញ់នៅស្រុកនោះហើយ ទ្រង់បានចាត់ឱ្យសាងប្រាសាទពីរ គឺមួយជូនមាតា ឯមួយទៀតគង់នៅផ្ទាល់ព្រះអង្គ ហើយទ្រង់ចាត់ចែងធ្វើបន្ទាយព័ទ្ធជុំវិញផង ។ ដំណាក់ឯទៀតជាច្រើននៅក្បែរប្រាសាទនោះជាទីក្រសាល និងជាទីធ្វើការរាជការផ្សេងៗតាមមុខក្រសួងនាម៉ឺនសព្វមុខមន្ត្រី ។

*(ដកស្រង់និងសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ៥ ទំព័រ៩៦-៩៩)*

រឿងខាងលើបង្ហាញប្រវត្តិនៃការដាក់ឈ្មោះទន្លេ ស្រុក និងឈ្មោះប្រាសាទ គឺទន្លេបាទី ស្រុកបាទី ប្រាសាទតាព្រំ ហើយឈ្មោះទាំងនេះមានពិតប្រាកដ នៅក្នុងខេត្តតាកែវរហូតមកដល់សព្វថ្ងៃ ។

 *ព្រេងកថាជារឿងប្រឌិតដែលដំណើររឿងទាក់ទងនឹងជំនឿ ទំនៀមទម្លាប់ប្រពៃណី ឈ្មោះមនុស្ស ប្រវត្តិភូមិ ស្រុក ទីកន្លែង ឬប្រវត្តិសាស្ត្ររបស់ប្រទេស ។ ព្រេងកថាមានលក្ខណៈសំគាល់ដូចតទៅ ៖*

*- ដំណើររឿងច្រើនទាក់ទងនឹងប្រវត្តិសាស្ត្រ ទីកន្លែងនៅក្នុងប្រទេស ជំនឿ ទំនៀមទម្លាប់ ប្រពៃណីរបស់ប្រជាជន ហើយរហូតមកដល់បច្ចុប្បន្នក៏នៅតែអាចបញ្ជាក់បាន ។*

*- តួអង្គជាមនុស្សធម្មតា ឬជាបុគ្គលអស្ចារ្យនៅក្នុងប្រវត្តិសាស្ត្រ ។*

## លំហាត់

- ចូរអានរឿងនីមួយៗខាងក្រោម ។ តើរឿងណាជាព្រេងកថា ? ចូរបញ្ជាក់ ។

### ១. រឿង បុរសម្នាក់និងស្ការ

ភរិយាបុរសម្នាក់ទើបតែមានកូនខ្ចីជាទីស្រលាញ់ ។ ថ្ងៃមួយ ភរិយាប្រគល់កូនឱ្យបុរសជាប្ដីមើល ព្រោះខ្លួនឯងមានធុរៈចេញទៅខាងក្រៅ ។ ក្នុងខណៈនោះ ស្ដេចប្រើអាមាត្យឱ្យហៅបុរសនោះមកជួយរៀបចំពិធីបុណ្យជាបន្ទាន់ ។ បុរសឮហើយ ប្រញាប់ប្រញាល់ទៅ តែគិតក្នុងចិត្តថា តើមានអ្នកណាមើលកូនខ្ចីនេះ ។

ពេលនោះ បុរសនឹកឃើញដល់ស្ការ ដែលខ្លួនចិញ្ចឹមហើយស្រឡាញ់ដូចកូនបង្កើត ក៏ប្រគល់កូនឱ្យស្ការមើលជាបណ្ដោះអាសន្នសិន ។

បុរសចេញផុត ពស់វែកមួយក្បាលវារចូលមកជិតកូនង៉ែត ។ ស្ការឃើញពស់ ក៏ស្ទុះទៅខាំដាច់ជាពីរបីកំណាត់ភ្លាម ។

មុខមាត់ ដៃជើងស្ការប្រឡាក់ឈាមក្រហមច្រាល ។ វាអង្គុយចាំមើលផ្លូវម្ចាស់វាត្រលប់មកវិញ ។ បុរសមកដល់ ស្ការស្ទុះទៅទទួលកន្ត្រាងម្ចាស់ដោយរីករាយ ។ វាខំសម្ដែងអាការៈត្រេកអរ ព្រោះវានឹកថា បានបម្រើសងគុណម្ចាស់ដោយប្រពៃ ។ បុរសយល់ច្រឡំ ឃើញឈាមប្រឡាក់មុខមាត់ស្ការ ក៏កំណត់ក្នុងចិត្តថា ស្ការនេះប្រាកដជាស៊ីកូនហើយ ។

គាត់ក៏រត់ទៅយកដំបងសំពងស្ការយ៉ាងដំណំ រួចបណ្តេញស្ការចេញពីផ្ទះដោយកំហឹង ។ បុរសរត់ចូលទៅមើលកូន ឃើញកូនកំពុងដេកលក់យ៉ាងស្កប់ស្កល់ក្នុងអង្រឹង ។ គាត់ឃើញពស់ដាច់ជាពីរបីកំណាត់ នៅរាត់រាយក្បែរអង្រឹង ទើបនឹកគុណស្ការ ។ បុរសនោះស្តាយក្រោយនូវកំហុសខ្លួន ។ គាត់ស្ទុះមករកហៅស្ការវិញ តែស្ការបានរត់ចូលព្រៃបាត់ទៅហើយ ។

*(ដកស្រង់ពីសៀវភៅរឿងនិទានក្រសួងអប់រំ ឆ្នាំ១៩៨២)*

## ២. រឿង ទីក្រុងភ្នំពេញ

ក្នុងកាលកន្លងទៅហើយ(គ. ស. ១៣៧២) មានយាយចាស់ម្នាក់ឈ្មោះ "ពេញ" ជាអ្នកមានភោគសម្បត្តិបរិបូរ មានទីលំនៅក្បែរមាត់ទន្លេបួនមុខ ។ ផ្ទះគាត់សង់នៅលើទួលខាងកើតកូនភ្នំមួយ ។ ថ្ងៃមួយ ទីនោះមានភ្លៀងខ្លាំង ទឹកជន់លិចល្ហាចល្ហឹម ដូនពេញឃើញដើមគគីរមួយដើមអណ្តែតមកក្បែរច្រាំង ។ ដោយអំណាចទឹកហូរសងចុះឡើង ដើមគគីរនោះក៏អណ្តែតវិលវល់ក្បែរច្រាំងនោះ ។ ដូនពេញក៏ប្រញាប់ប្រញាល់រត់ទៅអំពាវនាវ ហៅអ្នកជិតខាងឱ្យមកជួយទាញដើមគគីរ ។ អ្នកជិតខាងនាំគ្នាយកពួរទៅចង ហើយអូសរំកិលបន្តិចម្តងៗ ទាល់តែវាមកដល់លើមាត់ច្រាំង ។ ពេលដែលដូនពេញយកកំណាត់ឈើទៅកោសកៀរសម្អាតភក់ គាត់បានឃើញក្នុងប្រហោងដើមគគីរនោះ មានព្រះពុទ្ធរូបបួនអង្គធ្វើអំពីសំរឹទ្ធ និងទេវរូបមួយអង្គធ្វើអំពីថ្ម ទ្រង់ឈរដៃម្ខាងកាន់ដំបងនិងម្ខាងទៀតកាន់ស័ង្ខដោយព្រះកេសាបួង ។

ដូនពេញបានចាត់ចែងសង់ខ្ទមតូចមួយតម្កល់ព្រះពុទ្ធរូបជាបណ្តោះអាសន្ន ។ ថ្ងៃក្រោយមក គាត់អំពាវនាវឱ្យអ្នកជិតខាងជួយលើកដីពូនភ្នំ នៅខាងលិចលំនៅគាត់ឱ្យបានកាន់តែធំនិងខ្ពស់ ។ គាត់រកគេឯងអារឈើគគីរនោះ បម្រុងទុកធ្វើសសរវិហារ ។ ក្នុងគ. ស. ១៣៧២ ដូនពេញនិងអ្នកស្រុកជាច្រើននាក់ ស្រុះស្រួលគ្នាកសាងវិហារមួយខ្នងប្រក់ស្បូវភ្លាំង នៅលើកំពូលភ្នំនោះ ហើយគាត់ដង្ហែព្រះពុទ្ធរូបសំរឹទ្ធបួនអង្គទៅតម្កល់ទុកក្នុងវិហារនោះ ។ ចំណែកឯទេវរូបមួយអង្គ គាត់តម្កល់ទុកលើអាសនៈមួយនាជើងភ្នំខាងកើត ។ ក្រោយមក ទីភូមិនោះគេហៅថា "ភ្នំពេញ"តាំងពីពេលនោះមករហូតដល់សព្វថ្ងៃនេះ ។ ចំណែក " វត្តភ្នំ" ជាពាក្យហៅកាត់ខ្លី ពី " វត្តភ្នំដូនពេញ " ។

*(ដកស្រង់និងសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ៥)*



# ចំណុចរាយ [...]

នៅក្នុងសំណេរ យើងឃើញមានចំណុចរាយ[...] នៅក្នុងល្បះខ្លះ ដែលពេលខ្លះ គេដាក់នៅខាងដើម ពេលខ្លះដាក់នៅខាងចុងល្បះ និងជួនកាលគេដាក់នៅខាងដើម ឬខាងក្រោយអត្ថបទ ។ល ។ តើចំណុចរាយ ឬចុចរាយសម្រាប់ប្រើដូចម្ដេចខ្លះ?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖
  - សំ និងបុប្ផាជជែកគ្នា៖ " យើងលេងនៅជិតបន្ទប់រៀននេះហើយ ព្រោះ... " បុប្ផាតបយ៉ាងម៉ឺងម៉ាត់៖ " ទេ! យើងមិនត្រូវលេងរំខានមិត្តយើងសិក្សាទេ ។ " (បង្ហាញសម្ដីមិនទាន់ចប់ ហើយត្រូវម្នាក់ទៀតនិយាយកាត់)
  - នៅឯបណ្ណាល័យមានសៀវភៅច្រើនណាស់ដូចជា រឿងនិទាន សៀវភៅលំហាត់ សៀវភៅភាសាអង់គ្លេស... ។ (បង្ហាញថានៅមានទៀត)
  - [...]ពួកប្រេតឮសំណើនាយឈ្មួញដូចនេះ ក៏គិតគ្នាមួយសន្ទុះ ទើបព្រមដោះលែងពួកឈ្មួញហើយផ្ដាំ ៖ "កាលបើពួកអ្នកបានទៅដល់ស្រុកទេសខ្លួនហើយ កាលណាមានខ្យល់ជំនោរធ្លាក់មកពីទិសខាងជើង អ្នកទាំងអស់គ្នាត្រូវធ្វើក្បូនផ្ទុកគ្រាប់ធញ្ញជាតិនិងអាហារគ្រប់យ៉ាង មានលាជ សណ្ដែក ល្ង ដូង អំបុក ចេក ជាដើម បណ្ដែតតាមខ្សែទឹកមកឱ្យយើងចុះ មិនបាច់មកផ្ទាល់ទេ ។ ជំនោរខ្យល់នឹងបញ្ជូនរបស់ទាំងនោះមកដល់យើងហើយ" ។ [...] (បង្ហាញពីអ្វីដែល គេលើកយកមកនិយាយតែត្រឹមនេះ ចំណែកខាងដើមមកនិងបន្តទៀត គេមិនលើកយកមកនិយាយទេ)
  - សព្វនាមចង្អុលចែកជា...ក្រុមគឺ... និង... ។ (បង្ហាញកន្លែងដែលត្រូវបំពេញ)
  - ម៉ែ!...មកហើយ!...ស្ងុងៗនោះ... ។ កុំមាត់!... កុំមាត់!... " ម្ដាយឆ្លើយកាត់ដោយយកដៃខ្ទប់មាត់កូន" ។ (បង្ហាញការភ័យខ្លាចក្នុងស្ថានភាពណាមួយ)

តាមឧទាហរណ៍ខាងលើ ចំណុចរាយ(...) សម្រាប់បញ្ជាក់សេចក្ដីមិនទាន់ចប់ ឬសេចក្ដីដែលត្រូវបង្គ្រប់ ឬបំពេញ ។ រីឯចំណុចរាយ ([...]) វិញបញ្ជាក់សេចក្ដីដែលគេមិនបានលើកយកមកនិយាយ ទោះនៅដើមកថាខណ្ឌក្ដី ឬចុងកថាខណ្ឌក្ដី ។



*ចំណុចរាយ ឬចុចរាយប្រើសម្រាប់ ៖*

- *([...]) ដាក់នៅខាងដើម ឬខាងចុងកថាខណ្ឌ ដើម្បីបញ្ជាក់ថាមានសម្ដី ឬ សេចក្ដីផ្សេងទៀត ប៉ុន្តែគេមិនលើកយកមកប្រាប់ ។*
- *(...) ដាក់នៅខាងចុង បង្ហាញសម្ដី ឬសេចក្ដីដែលនៅមានបន្តទៀត ឬដាក់នៅកន្លែងចន្លោះ ដែលត្រូវបំពេញ ឬបង្គ្រប់ និងដាក់មិនចំពោះទីកន្លែងណាមួយទេ ដោយគេចង់បកស្រាយការភ័យខ្លាច តក់ស្លុត ញាប់ញ័រ រន្ធត់...ទៅតាមស្ថានភាពតម្រូវ ។*

## លំហាត់

តើគេប្រើចំណុចរាយខាងក្រោមដើម្បីបង្ហាញអ្វីខ្លះ ?

១. កុំអាលសិន! ឯនោះខាងឆ្វេង ខ្ញុំមើលឃើញ... ។ ឯណា? ខ្ញុំមើលមិនច្បាស់សោះ !

២. កាលពីដើម មានបងប្អូនពីរនាក់ ម្នាក់ឈ្មោះ ពញាជ័យនិងម្នាក់ទៀតឈ្មោះពញាស្ងួស ។ ពួកគាត់មានទីលំនៅប៉ែកខាងនិរតីភ្នំប្រសិទ្ធិ៍ ។ ពួកគាត់ប្រកបរបរដាំត្រសក់លក់ ។ [...]

៣. គ្រួសាររបស់បុប្ផាមានសមាជិក...នាក់គឺ...និង... ។

៤. ព្រៃលិចទឹកនៃបឹងទន្លេសាបផ្ដល់ប្រយោជន៍ច្រើនយ៉ាងណាស់ ដូចជាឈើសម្រាប់គ្រឿងសំណង់ គ្រឿងសង្ហារិម ឬជារបាំងការពារព្យុះ ជាជម្រករបស់ជីវៈចម្រុះ (ត្រី បក្សាបក្សី) ... ។

៥. ខ្យល់បក់វូៗ! ភ្លៀងចាប់ផ្ដើមស្រក់ស្រិបៗ! ផ្លេកបន្ទោរឆ្វូតបន្ទាត់ភ្លែតៗ ពុះជ្រែកស្បៃរាត្រីងងឹតសូន្យសុង ។ សានដើរទ្រេតទ្រោត ព្រោះទប់នឹងកម្លាំងខ្យល់បក់បោកនិងភាពងងឹតមើលអ្វីមិនយល់ ។ គ្រាន់តែដើរហួសដើមពោធិ៍បន្តិចស្រាប់តែសំឡេងប៉ុង!...ប្រាវ!... សានងាកមើលក្រោយ ស្រាប់តែស្រមោលខ្មៅធំមួយនៅជិតបង្កើយ!ពុទ្ធោ!...ស្អីគេ? (សានស្រែកភ្លាត់មាត់) ។



# រឿង ប្រាសាទស្វាយអង្គ



នៅឃុំស្វាយអង្គ ស្រុកស្វាយរៀង ខេត្តស្វាយរៀង មានទួលមួយខ្ពស់មិនដែលលិចទឹកទេ ។ អ្នកស្រុកជំនាន់មុនបានសន្មតហៅថា ទួលស្វាយអង្គ ។

នៅលើទួលនោះ មានកំពែងប្រាសាទបុរាណមួយ ដែលសង់ឡើងដោយឥដ្ឋខ្លះ ថ្មបាយក្រៀមខ្លះ មានបណ្ដោយប្រមាណ៨៣ម៉ែត្រ ទទឹង៤៤ម៉ែត្រ ។ នៅកណ្ដាលទួល មានដើមជ្រៃមួយដើមធំ ឯខាងមុខ មានលិង្គព្រះឥសូរ ឬសិវលិង្គ ។ ចំណែកតួប្រាសាទវិញបាក់បែកអស់នៅសល់កម្ទេចថ្ម ឥដ្ឋ បន្តិចបន្តួចតែប៉ុណ្ណោះ ។ រឿងព្រេងនិទាន ដែលទាក់ទងនឹងឈ្មោះប្រាសាទស្វាយអង្គ មានដូចតទៅ ៖

កាលពីរាជធានីនៅលង្វែក មានបុរសម្នាក់ឈ្មោះ សរិទ្ធ ជាអ្នកខ្លាំងពូកែណាស់ ហើយមានទីលំនៅនៅលើទួលនោះ ។ ពេលស្រុកកើតចម្បាំងជាមួយសៀម ព្រះរាជាទ្រង់បានអំពាវនាវដល់ប្រជានុរាស្ត្រគ្រប់ខេត្តថា បើនរណាមានសមត្ថភាពខ្លាំងពូកែ សូមឱ្យចូលខ្លួនបម្រើក្នុងកងទ័ព កម្ចាត់ពួកសៀម ដែលចូលមកលុកលុយរាតត្បាតអាណាខេត្តខ្មែរ នៅតាមព្រំដែន ត្រង់ខេត្តបាត់ដំបងនិងសៀមរាប ។

បុរសសិរិទ្ធ បានសម្រេចចិត្តចូលបម្រើជាតិយ៉ាងស្មោះស្ម័គ្រ ហើយក៏រៀបប្រដាប់ប្រដាសម្រាប់ធ្វើសឹក ចេញដំណើរពីស្រុកកំណើតទៅលង្វែក ដោយថ្មើរជើង ដើម្បីបម្រើកងទ័ព ។

ឯលោកមេទ័ពខ្មែរជំនាន់នោះបានតែងតាំងបុរសសិរិទ្ធជាមេទ័ពធំ ឱ្យលើកព្យុហយាត្រា ឆ្ពោះទៅខេត្តបាត់ដំបង សៀមរាប ដើម្បីបំបាក់សត្រូវ ។ ពេលនោះបុរសសិរិទ្ធនិងរេហ៍ពលទាំងអស់ ប្រយុទ្ធបានជ័យជំនះលើទ័ពសៀម ហើយក៏សុំព្រះរាជានុញ្ញាតត្រលប់ទៅស្រុកកំណើត នៅឯខេត្តស្វាយរៀងវិញ ។

ពេលមកដល់ផ្ទះ បុរសសិរិទ្ធបានស្រាយសម្ពាយមើល ទើបដឹងថាសម្ពាយនេះមិនមែនជារបស់ខ្លួនទេ ព្រោះនៅក្នុងនោះ មានតែសំពត់មួយនិងផ្លែស្វាយពីរបីប៉ុណ្ណោះ ។ ឃើញដូច្នោះហើយទើបគាត់ដឹងថា ពិតជាច្រឡំគ្នា ក្នុងពេលដែលគាត់ត្រលប់ពីច្បាំង ព្រោះខណៈនោះគាត់បានទៅស្នាក់នៅឯអង្គរមួយយប់ដែរ ។ ឯផ្លែស្វាយគឺបានមកពីអង្គរនោះហើយ ។

ប្រពន្ធឃើញដូច្នោះ ក៏យកផ្លែស្វាយទៅកប់ដាំតាមជាយរបង ។ មិនយូរប៉ុន្មានស្វាយក៏ដុះ មានផ្កាផ្លែជាហូរហែរហូតមក ។ ស្វាយនោះ អ្នកស្រុកនាំគ្នាហៅថា ស្វាយអង្គរ ព្រោះបានពូជមកពីអង្គរ ។ ក្រោយមក ពាក្យនេះហៅកាត់ត្រឹមតែ "អង្គ" ទៅវិញ ។

លុះបុរសសិរិទ្ធ ព្រមទាំងភរិយាធ្វើមរណកាលទៅ នៅសល់កូនចៅ តែពួកគេមានប្តីប្រពន្ធហើយបែកខ្ញែកគ្នាអស់ ទើបទីនោះគ្មានមនុស្សនៅ ។ អ្នកស្រុកបាននាំគ្នាកសាងវត្តមួយដាក់នាមថា " វត្តស្វាយអង្គ" ដោយមានលោកគ្រូចៅអធិការគ្រប់គ្រងនិងមានភិក្ខុសាមណេរបួសរៀនសូត្រជាច្រើន ។

កន្លងមកយូរឆ្នាំ ដើមស្វាយនោះ មានសត្វស្លាបទំនៅច្រើនពេកនាំឱ្យពិបាកសម្អាត ។ម្យ៉ាងទៀត ដោយខ្វះគ្រឿងសេនាសនៈផង ទើបលោកគ្រូចៅអធិការឱ្យភិក្ខុ សាមណេរកាប់រំលំដើមស្វាយនោះ ដើម្បីយកមកប្រើប្រាស់ ។ ដោយឫទ្ធិដើមស្វាយធំនោះ ភិក្ខុ សាមណេរកាប់មួយថ្ងៃបានតែពាក់កណ្តាលដើមប៉ុណ្ណោះ ។

លុះព្រឹកឡើង ស្រាប់តែស្នាមកាប់ទាំងប៉ុន្មានរលុបបាត់អស់ បែរជាដុះសំបកគ្របជិតដូចដើមវិញ ។ ថ្ងៃមួយ លោកគ្រូចៅអធិការបានឱ្យភិក្ខុសាមណេរយ៉ាងច្រើន រកពូថៅ ដឹងគ្រប់ដៃ ហើយឱ្យកាប់រំលំដើមស្វាយធំនោះ ក្នុងមួយថ្ងៃឱ្យរលំតែម្ដង ។ ទីបំផុតដើមស្វាយក៏រលំ ប៉ុន្តែស្លឹកវាមិនស្វិតស្រពោនទេ បែរជាដុះមែកបែកខ្នែកចេញជាផ្កាផ្លែដូចធម្មតា ។

នៅពេលយប់ គេឮសូរស័ព្ទភ្លេងពិណពាទ្យប្រគុំយ៉ាងលន្លង់លន្លោច ធ្វើឱ្យអ្នកស្រុកស្ងើចអស្ចារ្យ ។ មិនយូរប៉ុន្មាន លោកគ្រូចៅអធិការមានជំងឺជាទម្ងន់ រហូតដល់ឆ្កួតវង្វេង ។ ឯភិក្ខុសាមណេរឃើញដូច្នោះក៏នាំគ្នារត់ចោលអស់ ។ ចំណែកឧបាសក ឧបាសិកាបាននាំគ្នាទៅកសាងវត្តថ្មីទៀត នៅចម្ងាយមួយគីឡូម៉ែត្រពីវត្តស្វាយអង្គចាស់នេះ ។ សព្វថ្ងៃ គេឱ្យឈ្មោះថាវត្តស្វាយផ្អែមវិញ ។ ឯវត្តចាស់សព្វថ្ងៃ មានដើមស្វាយធំៗ ក្រោយមកមានដើមឈើទាលនិងកូនឈើឯទៀតដុះស៊ុបទ្រុបជាច្រើន ។ [...]

*(ដកស្រង់ ពីរឿងព្រេងខ្មែរទាក់ទងនឹងប្រាសាទ ម.ត្រាណេ ក្រសួងវប្បធម៌និងវិចិត្រសិល្បៈ គ.ស.១៩៩៤)*

## សំណួរ

១. តើបុរសសរិទ្ធ មានស្រុកកំណើតនៅឯណា ? គាត់មានលក្ខណៈដូចម្ដេច ?

២. ហេតុអ្វីបានជាបុរសសរិទ្ធ ស្ម័គ្រចិត្តចូលបម្រើកងទ័ព ?

៣. ហេតុអ្វីបានជាដើមស្វាយ ដែលប្រពន្ធបុរសសរិទ្ធដាំមានឈ្មោះ "ស្វាយអង្គ" ?

៤. ចូរបង្ហាញប្រវត្តិនៃពាក្យ "ស្វាយអង្គ" ។

៥. តើអត្ថបទនេះមានប្រើចំណុចរាយឬទេ ? ចូរបង្ហាញ ។

៦. ហេតុអ្វីបានជាគេចាត់ទុករឿងនេះជាព្រេងកថា ?



# តម្លៃអប់រំនៅក្នុងរឿង

ក្នុងខ្លឹមសារនៃរឿងនីមួយៗ អ្នកនិពន្ធតែងតែបង្កប់តម្លៃអប់រំ ។ អ្នកនិពន្ធម្នាក់ៗមានសិល្បវិធីអប់រំប្លែកៗគ្នា ។ ចូរអានរឿងខាងក្រោមនេះ ។

## រឿង ស្វាន់ ទីទុយ និងអណ្តើក

មានស្វាន់មួយ ទីទុយមួយ អណ្តើកមួយ យកគ្នាជាសម្លាញ់ តែងពឹងពាក់គ្នាទៅវិញទៅមក ។ ថ្ងៃមួយ ស្វាន់ចេញទៅរកស៊ីក៏ជាប់អន្ទាក់ព្រានព្រៃ ។ ទីទុយនិងអណ្តើកបាត់ស្វាន់យូរពេក នាំគ្នាដើររក ។ លុះដល់ជាយព្រៃ ក៏ស្រាប់តែឃើញស្វាន់ជាប់អន្ទាក់ ទើបស្ទុះចូលទៅសួរ ៖

- សម្លាញ់ ! ហេតុអ្វីបានជាអ្នកដើររកស៊ីមិនមើលអន្តរាយមកឱ្យជាប់អន្ទាក់គេនេះ?

ស្វាន់ឆ្លើយ ៖

- ឱ! សម្លាញ់អើយ អញនេះបានជាខុសហើយ ។ ចូរសម្លាញ់គិតកែខៃយ៉ាងណាឱ្យអញផងចុះ ។

ទីទុយនិងអណ្តើកស្ម័គ្រទទួលជួយដោះទុក្ខមិត្ត ។ ទីទុយហើរទៅពាំនាំទឹកមកស្រោចខ្សែអន្ទាក់ឱ្យទន់ ឯអណ្តើកប្រឹងខាំខ្សែអន្ទាក់នោះ ។ ទីទុយនិងអណ្តើកព្យាយាមខាំកាត់អន្ទាក់តាំងពីព្រលប់ ដរាបដល់វេលាទៀបភ្លឺបានតែពីរធ្លុង នៅសល់មួយធ្លុង ក៏ជួនពេលព្រានព្រៃមកមើលអន្ទាក់ ទើបទីទុយនិងអណ្តើកតឿនស្វាន់៖ “ សម្លាញ់អើយ! ពេលនេះម្ចាស់អន្ទាក់មកជិតដល់ហើយ យើងជួយកាត់បានតែពីរធ្លុង នៅសល់មួយធ្លុង ចូរសម្លាញ់ខំបោលកន្ត្រាក់ដោយខ្លួនឯងឱ្យដាច់ផងចុះ” ។

ខណៈសត្វទាំងបីកំពុងនិយាយគ្នា នាយព្រានក៏មកដល់ ។ ទីទុយនិងអណ្តើកក៏ចេញចាកពីទីនោះ ចូលទៅពួនក្នុងព្រៃចាំមើលដំណើរស្វាន់ ។ ឯស្វាន់សោត កាលបើនាយព្រានមកដល់ជិតខ្លួន ក៏ស្ទុះកន្ត្រាក់ផ្តាច់អន្ទាក់នោះបាន ហើយបោលចូលព្រៃទៅហោង ។[...]

*(ដកស្រង់ និងសម្រួលពីសៀវភៅគតិលោកភាគ៥)*

យើងឃើញថា ក្នុងរឿងនេះ ទីទុយនិងអណ្តើកមិនព្រងើយកន្តើយឡើយ នៅពេលដែលស្មាន់ទៅជាប់អន្ទាក់ ។ គេទាំងពីរនាក់រកមធ្យោបាយគ្រប់បែបយ៉ាង ដើម្បីជួយសង្គ្រោះអាយុជីវិតមិត្តរបស់គេ រហូតរួចផុតពីមហន្តរាយ ។

ខ្លឹមសារនៃរឿងនេះ បានអប់រំឱ្យមិត្តភក្តិចេះស្រឡាញ់គ្នារួមសាមគ្គីគ្នា ជួយយកអាសាគ្នានៅពេលមានអាសន្ន ។

*តម្លៃអប់រំជាគំនិតខ្ទង់ទ្រៀនប្រដៅរបស់អ្នកនិពន្ធ តាមរយៈស្នាដៃរបស់ខ្លួន ។ អ្នកនិពន្ធមានវិធីអប់រំប្លែកៗដូចជា បង្ហាញអំពើល្អឱ្យអ្នកអាន អ្នកសិក្សាយកតម្រាប់តាម ឬយកជាបទពិសោធ ឬបង្ហាញអំពើអាក្រក់ឱ្យអ្នកអាន អ្នកសិក្សាស្អប់ខ្ពើម ចៀសវាងលះបង់ ។*

## លំហាត់

- ចូរប្រាប់តម្លៃអប់រំរបស់រឿងនីមួយៗខាងក្រោម ៖

### ១. រឿង ចង្កឹះមួយបាច់

យូរលង់ណាស់មកហើយ មានគ្រួសារមួយមានតែឪពុកចាស់ជរានិងកូនប្រុសបួននាក់ ។ បន្ទុកក្នុងការចិញ្ចឹមគ្រួសារ បានធ្លាក់ទៅលើឪពុកទាំងស្រុង ។ ខ្លួនកាន់តែចាស់ កម្លាំងទ្រុឌទ្រោម ។ ណាមួយបញ្ហាជីវភាពលំបាក ណាមួយកូនទាំងបួននាក់មិនសូវចេះស្រឡាញ់គ្នា តែងតែឈ្លោះប្រកែកគ្នាស្ទើររាល់ថ្ងៃ ។ មិនយូរប៉ុន្មាន ឪពុកក៏ធ្លាក់ខ្លួនឈឺជាទម្ងន់ ។ ថ្ងៃមួយឪពុកបានហៅកូនទាំងអស់មកជិតគាត់ រួចគាត់ហុចចង្កឹះទៅឱ្យកូនម្នាក់មួយៗ ។ គាត់បង្គាប់ឱ្យកូនទាំងបួនកាច់ចង្កឹះនោះ ចង្កឹះក៏បាក់យ៉ាងងាយ ។ បន្ទាប់មក គាត់ហុចចង្កឹះមួយបាច់ទៅឱ្យកូនគាត់កាច់ម្តងម្នាក់ តែកូនៗកាច់មិនបាក់ឡើយ ។ ឃើញដូចនេះ ឪពុកនិយាយថា “ កូនមើល! ចង្កឹះមួយគេអាចកាច់បាក់យ៉ាងងាយ តែចង្កឹះច្រើនរួមគ្នា គេមិនអាចកាច់បាក់ទេ” ។

ក្រោយមក ឪពុកក៏លាចាកលោកទៅ ។ កូនទាំងបួននាក់យំសោកស្ដាយឪពុក ហើយមានវិប្បដិសារីយ៉ាងខ្លាំងចំពោះកំហុសរបស់ខ្លួន ។ ចាប់ពីពេលនោះមក ពួកគេឈប់ឈ្លោះប្រកែកគ្នា ហើយស្រឡាញ់គ្នា មើលថែរក្សាគ្នា រួមកម្លាំងគ្នាកសាងជីវភាពសមតាមបំណងរបស់ឪពុក ។

*(ដកស្រង់និងសម្រួលពីសៀវភៅរឿងនិទានក្រសួងអប់រំ ១៩៨២)*

## ២. រឿង ខ្លានិងភេពីរ

មានថ្ងៃមួយ ភេពីរចាប់បានត្រីមួយពីក្នុងបឹង ។ វាចែកគ្នាមិនដាច់ស្រេចសោះ ។ ភេទាំងពីរសុទ្ធតែចង់បានចំណែកខាងក្បាលដូចគ្នា ព្រោះគេយល់ថា ខាងក្បាលមានសាច់ច្រើន ។ ពេលនោះ ខ្លាមួយដើរមកដល់ ហើយសួរពីដំណើរដែលភេទាំងពីរឈ្លោះគ្នា ។ ពេលស្ដាប់ភេទាំងពីររៀបរាប់រឿងរ៉ាវនៃជម្លោះរួចហើយ ខ្លាធានាខ្លួនជាអ្នកចែកត្រី ។ ខ្លាកាត់ត្រីជាបីចំណែក គឺក្បាល ខ្លួន និងកន្ទុយ ។ កំណាត់ខាងខ្លួនមានសាច់យ៉ាងច្រើន ។ ខ្លាហុចក្បាលទៅឱ្យភេទីមួយ ហុចកន្ទុយត្រីទៅឱ្យភេទីពីរ ហើយស្រដី ៖ “ អ្នកខាងនេះបានខាងក្បាល ហើយអ្នកខាងនោះបានកន្ទុយ ចំណែកខ្ញុំយកកំណាត់ខ្លួននេះហើយ ” ។ ពោលរួច ខ្លាកាន់ចំណែកខ្លួនដើរចេញទៅបាត់ ។ ភេទាំងពីរនឹកស្ដាយក្រោយគ្រប់គ្នា ។

*(ដកស្រង់ និងសម្រួលពីសៀវភៅអក្សរសិល្ប៍ថ្នាក់ទី៥ ក្រសួងអប់រំ ១៩៨៨)*

## ៣. បឹងទន្លេសាបជាតំបន់ដីសើមមួយយ៉ាងសំខាន់

ដីប្រហែល៧០% នៃតំបន់នេះជាព្រៃលិចទឹកមានរុក្ខជាតិដុះច្រើនប្រភេទ ។ ស្ថានប្រព័ន្ធនេះជាសំបុកនិងជម្រកយ៉ាងសំខាន់សម្រាប់បក្សាបក្សីទឹក និងត្រីគ្រប់ប្រភេទ ។ ម្យ៉ាងទៀតដោយស្ថានប្រព័ន្ធនេះសម្បូរព្រៃលិចទឹក ទើបធ្វើឱ្យតំបន់នេះអាចចៀសផុតពីព្យុះនានា ព្រមទាំងអាចទប់ស្កាត់ការហូរច្រោះដី ។ ព្រៃលិចទឹកនៃបឹងទន្លេសាបមានសារៈសំខាន់ណាស់សម្រាប់កំណើតជីវចម្រុះ ដូចជាត្រី បក្សីទឹក និងផ្ដល់ឈើសម្រាប់ជាប្រយោជន៍ច្រើនយ៉ាង ។

*(ដកស្រង់ និងសម្រួលពីឯកសារណែនាំគ្រូបង្រៀន ស្ដីពីការអប់រំបរិស្ថានបឹងទន្លេសាបឆ្នាំ២០០៦)*



# ល្បះបញ្ជាក់

ល្បះមាន៤បែបគឺ ល្បះបញ្ជាក់ ល្បះសំណួរ ល្បះបញ្ជា និងល្បះឧទាន ។

ដូចម្ដេចដែលហៅថា ល្បះបញ្ជាក់?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម៖
  - សាននិងសំ ជាបងប្អូនបង្កើតនឹងគ្នា ។
  - ម្សិលមិញ មិត្តរួមថ្នាក់ទាំងអស់បានទៅសួរសុខទុក្ខបុប្ផាដែលកំពុងសម្រាកព្យាបាលជំងឺនៅឯមន្ទីរពេទ្យ ។
  - ការស្រាវជ្រាវរបស់លោកសឺដេសបានបញ្ជាក់ថា ប្រាសាទបន្ទាយឆ្មារ កសាងឡើងក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ។
  - អាទិត្យក្រោយនេះ វត្តយើងនឹងប្រារព្ធធ្វើបុណ្យផ្កាសាមគ្គីមួយ ។



*ល្បះបញ្ជាក់ គឺល្បះប្រាប់ព័ត៌មាន ឬព្រឹត្តិការណ៍ផ្សេងៗ ។ ល្បះបញ្ជាក់ បញ្ចប់ដោយសញ្ញាខណ្ឌ " ។ "*

## លំហាត់

ក. តើល្បះណាខ្លះជាល្បះបញ្ជាក់ ?

១. កុំលេងភ្លើងផ្ដេសផ្ដាសកូន ប្រយ័ត្នឆេះព្រៃ !

២. ដោយសារប្រឡាយនេះ ឆ្នាំក្រោយឃុំយើងនឹងមានទឹកធ្វើស្រែបរិបូណ៌ ។

៣. ហេតុអ្វីបានជាមីងមិនយកកូនទៅចាក់ថ្នាំ ?

៤. យុវជនជាសសរទ្រូងនៃប្រទេសជាតិ ។

៥. ស្អែកនេះ យើងនឹងធ្វើសំណួរសរសេរ ។

ខ. ចូរតែងល្បះបញ្ជាក់ឱ្យបាន៥ល្បះ ។



# យើងត្រូវគោរពទង់ជាតិ



ទង់ជាតិខ្មែរជានិមិត្តរូបនៃព្រលឹងនិងដួងវិញ្ញាណក្ខន្ធរបស់ប្រជាជនខ្មែរយើងគ្រប់ជំនាន់ ។

ទង់ជាតិខ្មែរមានរាងបួនជ្រុងទ្រវែង ។ ផ្នែកសងខាងមានពណ៌ខៀវជាំ ជានិមិត្តរូបទឹកដីដ៏ធំទូលាយ និងសម្បូរស្តុកស្តម្ភទៅដោយសម្បត្តិធម្មជាតិ និងសម្បត្តិវប្បធម៌ ។ ឯផ្នែកកណ្តាលមានពណ៌ក្រហមឈាម ជានិមិត្តរូបនៃសេចក្តីអង់អាចក្លាហានរបស់ជាតិខ្មែរក្នុងកិច្ចការពារនិងកសាងមាតុភូមិ ។ នៅចំកណ្តាលផ្ទៃពណ៌ក្រហម មានរូបប្រាសាទកំពូលត្រីសូល៍ពណ៌សដែលមានក្បាច់រចនាល្អវិចិត្រ ជានិមិត្តរូបនៃសម្បត្តិវប្បធម៌ កេតនភណ្ឌជាតិ និងសេចក្តីរុងរឿងល្បីល្បាញរបស់ជាតិខ្មែរ តាំងពីបុរាណកាលមកម្ល៉េះ ។

ទង់ជាតិជាបណ្ដុំដួងវិញ្ញាណក្ខន្ធរបស់បុព្វបុរសខ្មែរគ្រប់ជំនាន់ ដែលបានធ្វើពលិកម្មគ្រប់បែបយ៉ាង ដើម្បីបម្រើបុព្វហេតុប្រទេសជាតិ ។

យើងម្នាក់ៗជាខេមរបុត្រ មិនត្រូវមើលស្រាលព្រលឹងរបស់ជាតិខ្លួនទេ ។ ប្រសិនបើយើងមើលស្រាលទង់ជាតិ មិនបានគោរពតំនាប់ជាបុព្វហេតុធ្វើឱ្យបរទេសមើលងាយជាតិខ្មែរយើង ។

ដូចនេះ យើងកូនខ្មែរត្រូវតែគោរពទង់ជាតិ ដែលជាព្រលឹងរបស់ជាតិ ហើយបញ្ចេញថាមពលហ៊ានលះបង់គ្រប់បែបយ៉ាង រួមសាមគ្គីគ្នាដើម្បីការពារទង់ជាតិ និងទឹកដីដ៏ប្រសើររបស់យើង ។

*(ដកស្រង់ និងកែសម្រួលពីសរសេរតាមសូត្រខ្មែរ ជាំ វណ្ណា)*

## សំណួរ

១. តើទង់ជាតិខ្មែរយើងមានសណ្ឋានដូចម្ដេច ?
២. តើអ្នកឃើញរូបអ្វីនៅចំកណ្ដាលផ្ទៃពណ៌ក្រហមរបស់ទង់ជាតិខ្មែរ ? តើរូបនោះតំណាងឱ្យអ្វីខ្លះ ?
៣. ហេតុអ្វីបានជាយើងត្រូវគោរពទង់ជាតិ ?
៤. តើអ្នកបានគោរពទង់ជាតិរាល់ថ្ងៃឬទេ ? ព្រោះអ្វី ?
៥. ចូរស្រង់ល្បះបញ្ជាក់ក្នុងអត្ថបទឱ្យបាន ២ ល្បះ ។



# រឿង បងប្អូនពីរនាក់



- ចូរអ្នកស្តាប់អត្ថបទ ដែលគ្រូរបស់អ្នកអាន រួចឆ្លើយនឹងសំណួរខាងក្រោម ៖

## សំណួរ

១. តើបងប្អូនប្រុសទាំងពីរនាក់នោះរស់នៅសភាពដូចម្តេច ?

២. តើនរណាទទួលភារកិច្ចទៅការពារជាតិ ?

៣. នៅពេលឃើញបងមានគ្រោះអាសន្ន តើបុរសប្អូនធ្វើដូចម្តេចខ្លះ ?

៤. តើទង្វើរបស់បុរសទាំងពីរបង្ហាញស្មារតីស្រឡាញ់អ្វីខ្លះ ?

៥. បើអ្នកស្ថិតក្នុងស្ថានភាពនោះ តើអ្នកហ៊ានធ្វើដូចបុរសប្អូនឬទេ ? ព្រោះអ្វី ?



# រឿង ក្អុកនិងក្អែក



មានតំណាលថា ក្អែកនិងក្អុកបានធ្វើសម្បុកពងនៅជិតគ្នា លើដើមស្រឡៅដ៏ខ្ពស់មួយ មិនឆ្ងាយប៉ុន្មានពីភូមិអ្នកស្រុក ។ រាល់ថ្ងៃ សត្វទាំងពីរតែងចេញរកចំណីទីទៃពីគ្នា ។ ក្អុកតែងហើរទៅឆ្ងាយៗរកទីកបឹងបួ ស្ទឹង ព្រែក ដើម្បីរកចំណីជារៀងរាល់ថ្ងៃ ។ ចំណែកឯក្អែក វាមិនហើរទៅណាឆ្ងាយពីភូមិអ្នកស្រុកទេ វាតែងចាំមើលឱ្យតែមនុស្សណាហាលសាច់ ឬឃើញពងមាន់ ពងទា និងអ្វីៗផ្សេងទៀតដែលអ្នកស្រុកទុកប្រហែស វាបោះពួយទៅឆក់យកបានជាចំណីមកចម្អែតក្រពះ ។

ពេលមួយ ក្រោយពេលត្រឡប់មកពីរកចំណី សត្វទាំងពីរសាកសួរគ្នាអំពីរបរចិញ្ចឹមជីវិតរាល់ថ្ងៃ ។ គេទាំងពីរក៏បាននិយាយប្រាប់គ្នាពីរបររៀងៗខ្លួន ។ ក្រោយពេលបានដឹងពីរបររបស់ក្អែក ក្អុកនិយាយទៅកាន់ក្អែក ៖ " បងក្អែក! ល្មមឈប់ទៅរកចំណីឯភូមិអ្នកស្រុកទៀតទៅ ការលួចឆក់គេមិនមែនជារបរល្អសម្រាប់ជីវិតទេ ខ្លាចក្រែងថ្ងៃណាមួយជួបគ្រោះថ្នាក់ ។ គួរណាស់តែបងស្វែងរកចំណីតាមសម្មាអាជីវោ ទើបជាការប្រសើរ" ។ ឮសម្ដីក្អុកដាស់តឿនដូចនេះ ក្អែកខឹងណាស់ រួចពោលទាំងកំហឹងថា៖ "នែបងក្អុក! ការរកចំណី ឬប្រកបមុខរបរបែបណានោះ វាជារឿងរបស់យើងម្នាក់ៗទេ មិនទាក់ទងនឹងការរកចំណីរបស់បងទេ!ខ្ញុំ

មិនទៅដណ្ដើមចំណីរបស់បងឯណា"? កុកតបៈ " ការនិយាយបែបនេះមិនមែនមានន័យថា ខ្ញុំខ្លាចបងក្អែកឯងដណ្ដើមចំណី ឬមុខរបររបស់ខ្ញុំនោះទេ ។ ខ្ញុំនិយាយបែបនេះ ក្នុងនាមជាអ្នកជិតខាងគ្នា រាប់អានគ្នា ខ្ញុំខ្លាចក្រែងបងមានគ្រោះថ្នាក់ " ។ ក្អែកឮកុកនិយាយបែបនេះ ក៏តបទៅវិញទាំងកំហឹងថា យើងនៅជិតគ្នា ជាអ្នកភូមិផងរបងជាមួយគ្នាមែន តែការរកស៊ីវាជារឿងផ្សេងគ្នា បងកុំបាច់ចេះដឹង... ។

កុកឈប់មាត់ ហើយសត្វទាំងពីរក៏សម្ងំដេករៀងៗខ្លួនទៅ ។ ក្រោយមក ក្អែកនៅតែប្រកបរបរដូចមុនដដែល ។ រសៀលថ្ងៃមួយ ក្អែកហើរទៅឃើញបុរសម្នាក់កំពុងហាលសាច់លើពំនូកចម្បើងក្បែរផ្ទះ ។ បុរសនោះមិនទាន់ទាំងដើរចេញទៅណាឆ្ងាយផង ក្អែកក៏ហើរក្រឡឹងធ្វើឱ្យបុរសនោះដឹងពីបំណងរបស់ក្អែក ព្រោះខ្លួនបាត់សាច់ហាលស្ទើរតែរាល់ថ្ងៃ ។ បុរសនោះកាន់ដំបងពួនចាំគប់ក្អែក ។ ក្អែកល្ងង់ខ្លៅក៏ចុះទំចឹកសាច់ពាំ ហៀបតែទទះស្លាបហើរ ក៏ត្រូវនឹងដំបងរបស់បុរសបាក់ជើងម្ខាងនាពេលនោះទៅ ។ ក្អែកខំប្រឹងហើរយ៉ាងត្រដាបត្រដួសគេចពីការប្រហាររបស់បុរសទាំងឈឺចាប់ សំដៅទៅលំនៅរបស់ខ្លួន ។

ពេលល្ងាច កុកត្រឡប់មកពីរកចំណីវិញ ឃើញក្អែកត្រូវរបួសដេកថ្ងូរក្នុងសម្បុក ។ កុកក៏សួរក្អែកពីមូលហេតុ ដែលបណ្ដាលឱ្យមានរឿងហេតុកើតឡើង ។ ក្អែកក៏រ៉ាយរ៉ាប់ដំណើររឿងប្រាប់កុក ។ កុកនិយាយ ៖ " នេះមកពីបងមិនស្ដាប់ខ្ញុំ! បើបងស្ដាប់ខ្ញុំ មិនមានរឿងបែបនេះឡើយ " ។ ក្អែករស់នៅយ៉ាងត្រដាបត្រដួស ទម្រាំដល់ពេលជើងរបស់ខ្លួនជាសះស្បើយវិញ ។

## សំណួរ

១. តើកុកនិងក្អែកមានមុខរបរចិញ្ចឹមជីវិតដូចម្ដេច ?
២. តើកុកដាស់តឿនក្អែកដូចម្ដេចខ្លះ ?
៣. តើក្អែកឆ្លើយតបទៅកុកវិញដូចម្ដេចខ្លះ ?
៤. តើរឿងនេះអប់រំដូចម្ដេចខ្លះ ?
៥. ចូរបង្ហាញទីកន្លែងប្រើចំណុចរាយក្នុងអត្ថបទ ដោយប្រាប់ន័យរបស់វាផង ។
៦. ប្រសិនបើអ្នកវិញ ក្រោយឮសម្ដីរបស់កុក តើអ្នកធ្វើដូចក្អែកដែរឬទេ ? ព្រោះអ្វី ?



# ការណែនាំនិងផ្ដល់ព័ត៌មានអំពីខ្លួនឯង

ថ្ងៃនេះជាថ្ងៃទីមួយនៃឆ្នាំសិក្សាថ្មី ។ អ្នកគ្រូបានហៅសិស្សម្នាក់ម្ដងៗធ្វើការណែនាំខ្លួនឱ្យមិត្តរួមថ្នាក់បានស្គាល់ ។ ចូរពិនិត្យការណែនាំខ្លួនរបស់ដារិន ខាងក្រោមនេះ ៖

ជម្រាបសួរអ្នកគ្រូ ...! សួស្ដីមិត្តទាំងអស់គ្នា! ខ្ញុំឈ្មោះ ដារិន ជាសិស្សមកពីសាលាបឋមសិក្សាសុភមង្គល ។ សព្វថ្ងៃខ្ញុំរស់នៅភូមិប៉ប្រកខាងជើង សង្កាត់កាកាប ខណ្ឌដង្កោ រាជធានីភ្នំពេញ ។ ឪពុកខ្ញុំជាគ្រូបង្រៀន ម្ដាយខ្ញុំជាមេផ្ទះ ។ ខ្ញុំមានបងប្អូនបីនាក់ ខ្ញុំជាកូនទីពីរ ។ កាលនៅថ្នាក់ទី៦ ខ្ញុំជាសិស្សពូកែម្នាក់ដែរ ពិសេសមុខវិជ្ជាភាសាខ្មែរ ។ ខ្ញុំសុំបញ្ចប់តែត្រឹមនេះ សូមអរគុណអ្នកគ្រូ... ។

## សំណួរ

១. តើដារិនជាសិស្សមកពីសាលាណា ?

២. តើសព្វថ្ងៃ គេរស់នៅឯណា ?

៣. តើឪពុកម្ដាយរបស់គេប្រកបរបរអ្វី ?

៤. តើដារិនមានបងប្អូនប៉ុន្មាននាក់ ? គេជាកូនទីប៉ុន្មាន ?

៥. ក្នុងការណែនាំខ្លួន ដារិនបង្ហាញចំណុចសំខាន់ៗអ្វីខ្លះ ?

## លំហាត់

• ចូរអ្នកណែនាំខ្លួនអ្នកឱ្យមិត្តភក្ដិរបស់អ្នកបានស្គាល់ តាមលំនាំនៃការណែនាំរបស់ដារិនខាងលើ ។

នៅពេលបង្ហាញនិងណែនាំខ្លួន អ្នកគប្បី ៖

- បង្ហាញឥរិយាបថឱ្យបានសមរម្យ
- លើកដៃជម្រាបសួរគ្រូជាមុននិងជម្រាបសួរមិត្តរួមថ្នាក់
- ប្រើសម្ដីច្បាស់លាស់សមរម្យទន់ភ្លន់
- បង្ហាញព័ត៌មានផ្ទាល់ខ្លួនឱ្យបានច្បាស់លាស់ ។



# សំណេរអត្ថបទព័ត៌មាន ពណ៌នាព្រឹត្តិការណ៍

សំណេរនេះតម្រូវឱ្យអ្នកសរសេររៀបរាប់ឡើងវិញពីព្រឹត្តិការណ៍ រឿងហេតុ ឬហេតុការណ៍ ដែលកើតឡើងក្នុងរឿងដែលបានអានរួច ឬព្រឹត្តិការណ៍ដែលបានជួបជាក់ស្តែង ឱ្យទៅជាអត្ថបទផ្តល់ព័ត៌មានមួយ ដោយធ្វើយ៉ាងណាឱ្យអ្នកអានបានដឹងនិងយល់ហេតុការណ៍ដែលកើតឡើងនោះបានត្រឹមត្រូវនិងច្បាស់លាស់ ។

- ចូរអានឧទាហរណ៍ខាងក្រោម៖

## សេនាមឿងហ៊ានបូជាជីវិត ដើម្បីទៅកេណ្ឌទ័ពខ្មោចមកជួយធ្វើសង្គ្រាម

ដំណើររឿងអ្នកតាឃ្លាំងមឿងក្នុងសៀវភៅប្រជុំរឿងព្រេងខ្មែរភាគ៥ បានបញ្ជាក់ថា នៅពេលដែលទ័ពព្រះចៅសៀមដេញតាមជ័យអស្តារ្យ ហើយជ័យអស្តារ្យមានទ័ពតិច និងអាវុធយុទ្ធភណ្ឌមិនសូវសម្បូរផងនោះ ក៏មានសេនាម្នាក់ឈ្មោះមឿងបានផ្តល់យោបល់ថា ខ្លួនហ៊ានតតាំងនឹងទ័ពសៀម ដោយប្រើឧបាយដ៏ចម្លែកមួយ គឺហ៊ានប្តូរជីវិត ដើម្បីទៅកេណ្ឌទ័ពខ្មោចមកជួយច្បាំងតតាំងនឹងទ័ពសៀម ។ សេនាមឿងបានបង្គាប់ឱ្យគេជីករណ្តៅរួចដោតចម្រូងនៅបាតរណ្តៅនោះ ។ លោកលោតចុះទៅក្នុងរណ្តៅ ប្រពន្ធនិងកូនពីរនាក់ទៀតក៏លោតទៅតាមដែរ ។

លុះគម្រប់ប្រាំពីរថ្ងៃ នៅថ្ងៃពេញបូណ៌មី គេឮសូរសន្ធឹកកក្រើកមេឃកក្រើកដី ។ ទ័ពខ្មោចបានដង្ហែជ័យអស្តារ្យលើកទ័ពទៅឡោមព័ទ្ធបន្ទាយទ័ពសត្រូវ ។ ឯទ័ពសៀម កាលបើឮសូរសន្ធឹកកក្រើកចម្លែក ក៏ភ័យស្លន់ស្លោរត់នាំគ្នារត់ប្រាសអាយុ ចោលអាវុធនិងស្បៀង វិលត្រឡប់ទៅស្រុកសៀមវិញអស់ ។

## សំណួរ

១. តើអត្ថបទនេះនិយាយពីអ្វី ?

២. តើហេតុការណ៍នេះដកស្រង់ពីរឿងណា ?

៣. តើហេតុអ្វីបានជាសេនាមឿងប្រើឧបាយដ៏ចម្លែកនេះ ?

៤. តើការលះបង់ជីវិតរបស់ក្រុមគ្រួសារសេនាមឿង ពិតជាទៅកេណ្ឌទ័ពខ្មោចមែន ឬយ៉ាងណា? ចូរបញ្ជាក់ ។

៥. តើឧបាយកលរបស់សេនាមឿងទទួលបានលទ្ធផលបែបណា ?

## លំហាត់

១. ចូរអ្នកសរសេរអត្ថបទព័ត៌មាន ដែលពណ៌នាហេតុការណ៍មួយគឺ "អណ្តើក និងទីទុយជួយសង្គ្រោះស្មាន់ជាសម្លាញ់" ដែលដកស្រង់ចេញពីរឿង ស្មាន់ ទីទុយ អណ្តើក ។

២. ចូរអ្នកសរសេរអត្ថបទព័ត៌មាន ដែលពណ៌នាព្រឹត្តិការណ៍ ឬហេតុការណ៍ណាមួយដែលអ្នកបានដឹង ឬជួបប្រទះជាក់ស្តែង ។

## សម្គាល់

សំណេររបស់អ្នកត្រូវធ្វើតាមលំនាំខាងលើ និងអនុវត្តតាមការណែនាំខាងក្រោម ៖

- ដាក់ចំណងជើង (ប្រធានបទ) របស់ហេតុការណ៍ ឬព្រឹត្តិការណ៍
- ប្រាប់ប្រភពនៃហេតុការណ៍ ឬព្រឹត្តិការណ៍
- ប្រាប់មូលហេតុ
- ប្រាប់ភាពសាំញ៉ាំនៃហេតុការណ៍ ឬព្រឹត្តិការណ៍
- ប្រាប់ដំណោះស្រាយ
- បញ្ជាក់លទ្ធផល
- បង្ហាញចំណាប់អារម្មណ៍ផ្ទាល់ខ្លួន ។




# ការជួយគ្នាទៅវិញទៅមក



មនុស្សម្នាក់ៗមិនអាចរស់នៅឯកឯងបានទេ គឺត្រូវប្រាស្រ័យទាក់ទងជាមួយមជ្ឈដ្ឋានជុំវិញ ជាពិសេសសហគមន៍ និងសង្គម ។ ការជួយគ្នាទៅវិញទៅមកកាន់តែបង្កើនសេចក្ដីស្រឡាញ់និងសាមគ្គីភាព ។ យើងគប្បីថែរក្សាស្មារតីចែករំលែក ក្នុងន័យជួយចែករំលែកបទពិសោធ និងផ្ដល់ផលប្រយោជន៍គ្នាទៅវិញទៅមក ។ ក្នុងមេរៀននេះអ្នកនឹងយល់ដឹងថែមទៀតពីសារៈសំខាន់នៃការជួយគ្នាដើម្បីផលប្រយោជន៍រួមមួយចំនួន ។

**ជាពិសេស ក្នុងមេរៀននេះ អ្នកនឹងសិក្សាបន្ថែមទៀតអំពី ៖**

- លក្ខណៈសម្គាល់នៃទេវកថា
- តួអង្គឯកនិងតួអង្គរង
- ល្បះសំណួរ
- សញ្ញាសម្ព័ន្ធ “តង្កៀប ”
- ការសង្ខេបឡើងវិញ
- តម្លៃអប់រំនៃអត្ថបទ
- សំណេរអត្ថបទព័ត៌មាន ពណ៌នាព្រឹត្តិការណ៍ ។



## ទេវកថា

ជាទូទៅ គេអាចបកស្រាយបញ្ហា ឬបាតុភូតណាមួយស្របទៅតាមកម្រិតយល់ដឹងរបស់គេប៉ុណ្ណោះ ។ កាលពីដើម មនុស្សសម័យបុរាណច្រើនយល់ថា អ្វីៗ ដែលបានកើតឡើងលើលោកនេះ សុទ្ធតែដោយសារវត្ថុសក្ដិសិទ្ធិ ទេវៈ អ្នកតាជាដើម ជាអ្នកបង្កើត ។

- ចូរអ្នកអានអត្ថបទដកស្រង់ក្នុងរឿងដើមកំណើតសត្វមូសខាងក្រោមនេះ ៖

[...] នាងបានទៅជួបនឹងអ្នកស្រុក ដែលត្រូវវេនទៅឱ្យមូសស៊ី ហើយនិយាយ ៖" បើអ្នករាល់គ្នាចង់គេចឱ្យរួចពីសេចក្ដីស្លាប់ ចូរអ្នកធ្វើតាមខ្ញុំ ។ អ្នកប្រាកដជាគេចរួចពីសេចក្ដីស្លាប់ពុំខាន ។ ដំបូង អ្នកទាំងអស់គ្នាទៅរកប្រមូលស្លឹកឈើងាប់ៗស្ងួតៗឱ្យបានច្រើនយកមកទីនេះ ។ ពេលណាសត្វមូសហើរមកជិត យើងត្រូវដុតភ្លើងឱ្យឆេះហុយផ្សែងទ្រលោមឡើង ។ បន្ទាប់មកពួកយើងនាំគ្នានៅក្នុងរង្វង់ភ្នក់ភ្លើងនោះ ។ ធ្វើដូច្នេះ សត្វមូសមិនហ៊ានហើរឆ្លងភ្លើង ផ្សែងមកស៊ីយើងទេ" ។

មនុស្សទាំងឡាយយល់បំណងនាង ហើយព្រមធ្វើតាមនាងទាំងអស់ ។ លុះវេលាយប់ពួកសត្វមូសក៏មកដល់តាមទម្លាប់ ដើម្បីស៊ីមនុស្ស ។ នៅពេលនោះ ពួកអ្នកស្រុកក៏ដុតភ្លើងឆេះសន្ធោសន្ធៅឡើង មិនឱ្យរលត់ តាមបង្គាប់បុត្រីសេដ្ឋី ។ សត្វមូសឃើញដូច្នោះ ពុំហ៊ានហើរឆ្លងកាត់ភ្លើងផ្សែងទៅខាំស៊ីមនុស្សឡើយ ។ វាក៏ប្រមូលគ្នីគ្នាមកកកកុញជំនុំគ្នា៖" បើយើងនៅតែមានខ្លួនធំដូចនេះតទៅទៀតនោះ យើងប្រាកដជាខាំមនុស្សលោកស៊ីពុំបាន ពីព្រោះកាលណាគេដុតភ្លើងឱ្យឆេះឡើងដូចនេះ យើងពុំអាចចូលទៅជិតគេបានឡើយ ។ អាស្រ័យហេតុនេះ ចូរយើងទៅទូលព្រះឥសូរ ដែលជាអ្នកបង្កើតយើងមក សូមឱ្យព្រះអង្គធ្វើខ្លួនយើងឱ្យទៅជាតូចៗវិញ ទើបស្រួលលបផ្អក់ខាំមនុស្សបាន កុំឱ្យមនុស្សលោកមើលយើងឃើញ បើធ្វើដូចនេះឃើញថាស្រួលជាង" ។ [...]

[...] នៅពេលនោះ ព្រះឥសូរក៏ធ្វើខ្លួនសត្វមូសឱ្យតូចៗដូចជាសត្វមូសសព្វថ្ងៃនេះ ។ កាលបើបានខ្លួនតូចដូចបំណងហើយ សត្វមូសក៏ថ្លែងអំណរគុណព្រះឥសូរ រួចលាព្រះអង្គ

ត្រឡប់មកស្ថានមនុស្សលោកវិញ ។ វាក៏ហើរត្រាច់ពីភូមិមួយទៅភូមិមួយ ស្វែងរកខាំមនុស្សលោក ។ ប៉ុន្តែ មនុស្សលោកចេះតែយកដៃទះវាស្លាប់ ឯខ្លះក៏នៅរស់តែបាក់ស្លាប បាក់ជើង ។ មនុស្សលោកក៏ធូរចិត្ត ហើយមានសេចក្ដីសប្បាយច្រើនលើសមុន ។

ពួកមូសក៏ប្រជុំគ្នាសាជាថ្មីទៀត ៖ " ឥឡូវមនុស្សលោកធ្វើបាបយើងខ្លាំងណាស់ គេទះគេវាយយើង ហើយគេនឹងសម្លាប់យើងអស់ជាមិនខាន ។ ហេតុដូច្នេះ យើងត្រូវនាំគ្នាទៅរកព្រះឥសូរម្ដងទៀត ដើម្បីសុំព្រះអង្គធ្វើមាត់យើងឱ្យស្រួចៗដូចម្ជុល ងាយស្រួលខាំមនុស្សលោកបានឆាប់រហ័ស កុំឱ្យមនុស្សលោកដឹងថាយើងខាំគេ " ។

កាលជំនុំបានមតិជាឯកច្ឆន្ទ សត្វមូសបបួលគ្នាហើរទៅកាន់ស្ថានសួគ៌ ។ លុះទៅដល់ស្ថានសួគ៌ សត្វមូសក៏ទូលសុំព្រះឥសូរឱ្យធ្វើមាត់ខ្លួនឱ្យតូចៗ ដើម្បីស្រួលខាំមនុស្សលោក ។ ព្រះឥសូរក៏ទ្រង់ឆ្លើយតបមកវិញ ៖ " នែមូស! មាត់ដែលយើងបានធ្វើឱ្យអ្នកឯងនេះ វាស្រួចល្មមណាស់ទៅហើយ ប៉ុន្តែបើអ្នកឯងចង់ខាំមនុស្សលោកឱ្យបានរហ័ស ហើយមុតទៀតនោះ ចូរអ្នកឯងទៅរកព្រនង់មួយៗម្នាក់ ដើម្បីជួយសំពងពីលើថែមទៀត ប៉ុន្តែចូរអ្នកដឹងថា មនុស្សលោកគេមានព្រនង់នេះស្រេចហើយ ដូច្នេះចូរអ្នកត្រឡប់ទៅវិញចុះ" ។ [...]

*(ដកស្រង់ និងកែសម្រួលចេញពីប្រជុំរឿងព្រេងខ្មែរភាគ៤)*

អត្ថបទដកស្រង់នេះ បានបង្ហាញដើមហេតុ ដែលនាំឱ្យកើតជាសត្វមូស ខ្លួនតូច ហើយតែងតែប្រើម្ជុលចាក់ទម្លុះស្បែកមនុស្ស ដើម្បីបឺតយកឈាមជាអាហារ ។

តើអ្វីទៅជា "ទេវកថា"?



***ទេវកថា គឺជារឿងរ៉ាវស្ដីពីការយល់ដឹងដំបូងរបស់មនុស្ស ពីប្រភពកំណើតនៃអាទិទេព ទេវៈ អ្នកតា មនុស្ស សត្វ រុក្ខជាតិ បាតុភូតធម្មជាតិនិងប្រភពពិធីគោរពបូជាផ្សេងៗ ។***

## លំហាត់

• ចូរអ្នកអានអត្ថបទខាងក្រោមនេះ ហើយបញ្ជាក់ថា ណាមួយជាទេវកថា ណាមួយមិនមែនជាទេវកថា និងប្រាប់លក្ខណៈសម្គាល់ផង ។

ក. [...] តាបសជបទឹកសន្សើមនោះឱ្យកើតទៅជាកែវមនោរាហ៍ ប្រគល់ទៅឱ្យនាងមេខលាដោយបញ្ជាក់ ប្រាប់ ៖ " កែវនេះមានគុណភាពខ្លាំងពូកែណាស់ ។ បើអ្នកចង់បានអ្វីមួយគ្រាន់តែលើកកែវនេះគ្រវីឡើង នោះមួយរំពេចសេចក្ដីប្រាថ្នារបស់អ្នកនឹងបានសម្រេចភ្លាម ។ មួយទៀត ដោយអានុភាពនៃកែវនេះ អ្នកអាចហោះកាត់អាកាស កប់ពពកជ្រកអាចម៍ជន្លេន ឬទៅកាន់កន្លែងណាក៏បានទាំងអស់ " ។

នាងអារក្ខទេវីក៏ទទួលយកកែវនោះ ហើយលើកគ្រវីឡើង ស្រាប់តែហោះរឹងទៅលើមេឃតម្រង់ទៅមហាសាគរ ។

ចំណែកឯរាមាសូរ អាស្រ័យដោយការព្យាយាមដ៏យូរ ក៏រកបានទឹកសន្សើមដាក់ពេញកែវ ហើយយកទៅថ្វាយមហាឫសី ។ ពេលនោះតាបសពោល៖ " ចៅឯងយករបស់នេះមកយឺតយូរពេក ។ ឥឡូវតាបានប្រគល់រតនវត្ថុនោះទៅនាងមេខលាហើយ ។ ឯមន្តអាគមគាថារបស់តាអាចជបបានវត្ថុបែបនេះតែម្ដងគត់ " ។

កាលបើបានឮមហាតាបសថាដូច្នេះ រាមាសូរកើតសេចក្ដីទោមនស្សពន់ប្រមាណ ហើយក៏ស្រែកយំអណ្ដើតអណ្ដកយ៉ាងខ្លាំង ។

ដើម្បីលួងចិត្តបិសាច តាបសក៏ប្រាប់៖ " ចូរចៅកុំកើតទុក្ខខ្លាំងពេក ចាំតាឱ្យពូថៅមួយនេះ ។ អ្នកអាចយកទៅឈ្លោះដណ្ដើមយកកែវ ពីនាងអារក្ខទេវីមេខលាបាន ។ នាងមេខលានេះចូលចិត្តហោះហើរលេងនៅលើអាកាស ដើម្បីមុជទឹកភ្លៀង ។ នៅពេលដែលមានភ្លៀងម្ដងៗ ចូរអ្នកចោលពូថៅនេះទៅលើវា ។ វានឹងបោះចោលកែវដ៏មានតម្លៃនោះ ។ នៅពេលឃើញវាលើកកែវឡើងគ្រវី ចូរចៅបិទភ្នែកភ្លាម មុននឹងចោលទៅលើវា " ។

រាមាសូរ កាលបើបានពូថៅមកកាន់នឹងដៃហើយ ក៏ហោះស្វែងរកនាងមេខលា ដើម្បីដណ្ដើមយកកែវមនោរាហ៍ ។ ប៉ុន្តែកាលបើនាងបានឃើញកាលណា នាងក៏យល់ឃើញភ្លាមថា បិសាចនេះប្រាកដជាមកដណ្ដើមកែវមនោរាហ៍ពីនាងពុំខាន ទើបនាងលើកកែវគ្រវីឡើង ហើយហោះទៅលើអាកាសវេហាស៍ខ្ពស់ក្រៃលែង ។

កាលបើក្រឡេកឃើញពន្លឺចាំងនៃកែវសិល្ប៍ភ្លាម បិសាចក៏បិទភ្នែកជិត រួចគ្រវែងអាវុធទៅ ។ អាវុធនោះក៏ហោះយ៉ាងលឿន ឮសូរសម្បើមក្រៃលែង ប៉ុន្តែឥតត្រូវនាងអារក្ខទេវីទេ ។

ចាប់តាំងពីពេលនោះមក ទើបនៅពេលមានភ្លៀងផ្គរ គេឃើញចាំងពន្លឺកែវ ហើយឮសូរសំឡេងយ៉ាងខ្លាំងនៃអាវុធនោះ ។

អាស្រ័យហេតុនេះហើយបានជាក្នុងភាសាខ្មែរ យើងហៅឈ្មោះដុំថ្មទាំងឡាយណា ដែលមានរាងដូចផ្លែពូថៅ ឬចបកាប់ ក្បាលស្រួច ឬដូចកាំបិត ថា “ កាំរន្ទះ” ហើយសន្មតថា របស់ទាំងនោះជាព្រួញរបស់យក្សបាញ់នៅលើមេឃធ្លាក់មកដី ។

*(ដកស្រង់ចេញពីប្រជុំរឿងព្រេងខ្មែរភាគ៤ ទំព័រ៦៧-៦៨ បោះពុម្ពដោយពុទ្ធសាសនបណ្ឌិត្យព.ស.២៥៤៧ គ.ស.២០០៣)*

ខ. ក្រឡេកមើលទង់ជាតិបក់រវិចៗ កណ្ដាលរលកអាកាសវេហាស៍ ប្រជាជនតែងតែនាំគ្នាបណ្ដែតអារម្មណ៍ទៅកាន់ប្រាសាទបុរាណដ៏មានកំពូលស្រួចត្រដឹម បង្ហាញអរិយធម៌ត្រចះត្រចង់របស់ខ្មែរនាសម័យកាលដ៏រុងរឿងបំផុត ។ អង្គរវត្តជាប្រាសាទមួយ ដែលបុព្វបុរសបានប្រើពេលវេលាដ៏យូរនិងបូជាជីវិតដ៏ថ្លៃថ្លា ក្នុងការកសាងស្នាដៃទុកឱ្យកូនចៅជំនាន់ក្រោយ ។ ប្រជាជនទូទាំងសាកលលោកតែងសរសើរស្នាដៃខ្មែរ ពីការរចនាវត្ថុ និងការកសាងបុរាណដ្ឋានទាំងឡាយ ។ [...]



# រឿង សង្គ្រាមរវាងគីង្គក់និងតាព្រហ្ម



សម័យព្រេងនាយ មានវេលាមួយនោះ ពិភពលោកកើតទុរភិក្ស ក្តៅហួតហែងគ្រប់ទិសទី ។ ព្រះពិរុណមិនបង្អុរភ្លៀងសោះ ។ ស្ទឹង ត្រពាំង បឹង ព្រែក ទន្លេស្ទើររីងស្ងួតទឹកអស់ ។ សត្វទាំងឡាយស្លាប់គរផ្អឹងលើគ្នា ។ រុក្ខជាតិនានាក្រៀមស្វិតក្រញង់ ។ ពួកមណ្ឌុកសត្វមានគីង្គក់ ហ៊ីង កង្កែបជាដើម ដែលជាសត្វពូកែអត់ធន់ក៏ស្គមនៅតែស្បែក និងឆ្អឹង ។ ថ្ងៃមួយគីង្គក់ជាមេប្រកាសដល់ក្រុមញាតិ និងហ៊ីង កង្កែបជាមិត្តៈ “ នែមិត្តទាំងអស់គ្នា! តាព្រហ្មមិនបង្អុរភ្លៀងមកឱ្យយើងទេ បើយើងនៅស្ងៀម មុខជាដាច់ពោះស្លាប់ ។ មករ៉ុយមិត្តយើង! គេណ្ឌគ្នាទៅតយុទ្ធនឹងតាព្រហ្មយកភ្លៀងឱ្យបាន ។ អាសន្នដល់ហើយ បើនៅស្ងៀមក៏ស្លាប់ បើច្បាំងក៏ស្លាប់ បើម្ល៉ឹងនឹងស្លាប់ គួរតែស្លាប់ក្នុងចម្បាំង ដើម្បីយកជ័យឱ្យក្រុមញាតិនិងមិត្តប្រសើរជាង ។ មក! ទៅប្រយុទ្ធ!” ។ ក្រោយពេលគីង្គក់ប្រកាសយ៉ាងនេះ ពលមណ្ឌុកសត្វ និងមិត្តទាំងអស់លើកព្យុហយាត្រាទៅតយុទ្ធនឹងតាព្រហ្ម ក្នុងវិមានលោកឰដ៏អាកាស ។ កងទ័ពមណ្ឌុកសត្វដើរហួសទីវាលបន្តិចមក ស្រាប់តែប្រទះនឹងទ័ពមួយហ្វូងធំទៀត គឺពលត្រីអណ្តែងធំៗខ្លាន់ខ្លាប់ ខ្លួន

ប្រឡាក់ស្រមក ដោយធូលីនិងផេះ ។ មេទ័ពគីង្គក់សួរៈ “ នែទ៊ីយ តើពួកឯងទៅណា បានជាប្រមៀលខ្លួនហុយដីទ្រលោម កាត់មុខឱ្យរំខានដល់កងទ័ពយើងដូចនេះ ” ។ ត្រីអណ្ដែងជាមេទ័ពតបៈ “ មិត្តអើយ ពួកមច្ឆជាតិបានបញ្ជូនយើងឱ្យមកជាមួយបងក្រាញ់ ដ៏ប៉ិនប្រសប់ខាងរត់ឆ្លងភ្នំនិងបារាយណ៍ ដើម្បីច្បាំងនឹងតាព្រហ្ម យកភ្លៀងមកបំពេញស្ទឹងយើង ” ។ គីង្គក់ឮដូច្នោះអរណាស់ក៏ប្រាប់កងទ័ពខ្លួន ។ មួយរំពេចនោះ ស័ព្ទជយឃោសលាន់ឮចេញពីទ័ពទាំងពីរក្រុម ពួកគេប្រមូលគ្នាជាក្បួនទ័ពមួយ យាត្រាតាមវាលក្ដៅហួតហែង ។ មិនយូរប៉ុន្មាន ពួកគេឃើញភមរជាតិមួយហ្វូងធំ ហើរខ្មៅខ្មាប់ ។ ពេលនោះឃ្មុំ និងឱម៉ាល់ជាមេទ័ពបន្លឺមកៈ “ នែបងគីង្គក់ ហ៊ីង កង្កែប ត្រីអណ្ដែង ត្រីក្រាញ់អញ្ជើញទៅណា ខ្លួនស្រមកយ៉ាងនេះ? ” ។ គីង្គក់តបៈ “ មកទ៊ីយ! បងឃ្មុំ! យើងដឹងថា ក្រុមបងលើកទ័ពទៅច្បាំង ព្រោះអត់ភ្លៀង ខ្វះឈើព្រៃផ្ដល់ផ្កាធ្វើសំបុកដល់ក្រុមបង ។ យើងព្រួតគ្នាតយុទ្ធនឹងតាព្រហ្មកុំខ្លាចស្លាប់! តុះទៅ! ” ។ ទ័ពគោកនិងទ័ពអាកាសនាំគ្នាធ្វើដំណើរតទៅទៀត ។ លុះដល់ជិតចម្ការស្លួតមួយ ស្រាប់តែប្រទះនឹងផ្លែត្រសក់ស្រូវរដូករណែលលើផែនដី ខ្លះដាច់របេះចាកទងគួរឱ្យអាសូរ ។ ត្រសក់មួយស្រែកដោយមានសង្ឃឹមៈ “ ភឿនអើយ ឱ្យគ្នាយើងដោយសារទៅផង ។ តែភឿនទៅច្បាំងយើងក៏ស៊ូស្លាប់ជំនួសគ្រួសារយើងដែរ មិនឱ្យរស់នៅវេទនាទេ ” ។ មេទ័ពទាំងបី ក៏យល់ព្រមឱ្យត្រសក់ស្រូវប្រមៀលខ្លួនទៅតាមក្បួន ។ លុះផុតពីវាលក៏បានដល់ព្រៃមួយ ដែលរុក្ខជាតិទាំងឡាយក្រៀមរញូមស្លាប់ជិតអស់ ។ ក្បួនកងទ័ពក៏បានទៅជួបនឹងវល្លិផ្ដៅធំៗពីរដើម នៅនឹងគល់ឈើងាប់មួយ ។ ផ្ដៅសួរៈ “ នែភឿន! ទៅណាហ្នឹងក៏សន្ធឹកសន្ធាប់ម្ល៉េះ ភឿនមិនអាសូរមិត្តរុក្ខជាតិគ្នាយើងទេឬ ? ឃើញឬទេ ពួកគេដេកស្លាប់ពពូនអស់ហើយ ដោយដៃតាព្រហ្ម ។ យើងសូមទៅច្បាំងផង ។ យើងនៅយ៉ាងនេះវេទនាណាស់ ។ យើងស៊ូទៅស្លាប់ក្នុងសង្គ្រាមដើម្បីដណ្ដើមយកជ័យមកផ្ដល់ជីវិតសត្វលោក ” ។ ទ័ពទាំងអស់ក៏យល់ព្រមឱ្យផ្ដៅគោចរទៅតាមផងដែរ ។

ក្រោយមក ទ័ពទាំងអស់បានទៅដល់ឋានតាព្រហ្ម ។ គីង្គក់បានបញ្ជាឱ្យឃ្មុំប្រុងប្រៀបវាយសម្រុកនៅខ្លោងទ្វារខាងមុខនិងខាងក្រោយ ឯត្រីអណ្ដែងនិងត្រីក្រាញ់ដែលខ្លួនប្រឡាក់ទៅដោយក្បុងនិងផេះ ឱ្យចូលទៅក្នុងពាងនិងផើងទឹកនៅមាត់ទ្វារក្រោយ និងពាងផ្សេងៗ

ដែលមានទឹក ហើយឱ្យផ្ដៅធំៗទាំងពីរឈរប្រុងនៅមាត់ទ្វារប្រាសាទ ។ ដោយឡែក ត្រសក់ស្រូវត្រូវប្រមៀលខ្លួនទៅទៀបជើងក្រោមអាសនៈដែលតាព្រហ្មគង់ ។ ឯក្រុមគីង្គក់ ហ៊ីង កង្កែបជាទ័ពស្រួចជាអ្នកចូលវាយលុក ។លុះចាត់ចែងស្រេចហើយ ទ័ពមណ្ឌកសត្វក៏ចូលស្រ តម្រង់ទៅអាសនៈតាព្រហ្ម ដោយស្រែកហ៊ោសន្ធាប់យ៉ាងខ្លាំង ធ្វើឱ្យពលរេហ៍អស់ទាំងទេវតា មេនំ មេនាងចៅជិត ចៅចម ម៉ម ខុនណាង ជំទាវរត់ស្លន់ស្លោចេញពីប្រាសាទទៅត្រូវទឹកផេះទឹកក្បុងដែលត្រីអណ្ដែង ត្រីក្រាញ់បាចមកលើភ្នែក ផ្សាស្រវាំងរកទិសតំបន់ពុំឃើញ ។ មិនតែប៉ុណ្ណោះថែមទាំងត្រូវពួកឃ្មុំឪម៉ាល់ទិចចុករមួលស្រែកយំរំពង ។ តាព្រហ្មរកច្រកចេញពុំទាន់ស្រែកសួរៈ នែអ៊ីយ! អាពួកគីង្គក់ ហ៊ីង កង្កែបចង្រៃទៅណា?" ។ ពួកមណ្ឌកសត្វតបៈ" យើងមកច្បាំងៗ" ។ តាព្រហ្មចុះចាកអាសនៈដោយមិនបានមើលក្រោមក៏ជាន់លើត្រសក់ស្រូវ រអិលដួលផ្ងារហើយត្រូវផ្ដៅទាំងពីរបន្ទន់ខ្លួនដេញប្រជាប់សង្កត់ជាប់ ។ ឃ្មុំក៏ទិចឈឺផ្សា ។ តាព្រហ្មក៏ស្រែកចុះញ៉មៈ" យើងសុំចាញ់ហើយ!" ។ ឮដូចនោះ មេបញ្ជាការគីង្គក់ក៏ឃាត់ទ័ពឱ្យឈប់ដើម្បីដោះស្រាយបញ្ហាជាមួយតាព្រហ្ម ។ គីង្គក់សួរទៅតាព្រហ្មៈ" ម៉េចក៏លោកមិនបង្អុរភ្លៀងឱ្យសត្វលោក ធ្វើឱ្យគេស្លាប់គ្រប់កន្លែងដូចនេះ! ឥឡូវគ្នាយើងមិនសុខចិត្តទេ ។ បើលោកមិនបង្អុរភ្លៀងចុះទេនោះយើងនឹងកម្ទេចវិមានលោក សម្លាប់ទាំងពលលោក ទាំងលោកពុំខាន" ។ តាព្រហ្មនឹកភ័យ ក៏និយាយអង្វរអស់ពលសត្វ និងរុក្ខជាតិៈ" សូមពួកព្រះស្ដែងកុំខឹង យើងដឹងខុសហើយ យើងនឹងផ្ដល់ភ្លៀងឱ្យឥឡូវនេះ ។ សូមអស់លោកអ្នកអញ្ជើញទៅវិញចុះ កុំខឹងអី" ។គីង្គក់តបៈ" ទេ! ពួកយើងមិនព្រមទេ បើយើងទៅ នោះលោកនឹងផ្ដល់ភ្លៀងឱ្យយើងតែមួយមេប៉ុននោះ លុះពេលក្រោយមកនឹងព្រងើយកន្តើយដដែល នាំឱ្យពិបាកយើងលើកទ័ពឡើងមកទៀត ។ ដូចនេះ សូមលោកសន្យាឱ្យពរពិសេសដល់យើងសិន ទើបពួកយើងសុខចិត្ត" ។លុះសញ្ជឹងមួយសន្ទុះ តាព្រហ្មក៏ពោលៈ" អើ! យើងព្រមឱ្យពរដល់ពួកឯងហើយ ។ បើពេលណាអ្នកត្រូវការភ្លៀងគីង្គក់ ហ៊ីង កង្កែបត្រូវសង្កៀតធ្មេញ បន្លឺសំឡេងពីក្រោមមក ។ពេលនោះយើងនឹងបង្អុរភ្លៀងឱ្យអ្នកភ្លាម " ។ កាលសន្យារួចស្រេច ទ័ពមណ្ឌកសត្វបាណកសត្វ និងរុក្ខជាតិក៏ថយចុះមកលំនៅរៀងៗខ្លួន ។ តាំងពីពេលនោះមកពេលណាគីង្គក់ហ៊ីង កង្កែប ត្រូវការភ្លៀង ក៏សង្កៀតធ្មេញបន្លឺសំឡេងក្រតៗ! អែបៗ! អោកៗ! ភ្លៀងក៏ធ្លាក់មក ។

*(ដកស្រង់ និងកែសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ៤)*

## សំណួរ

១. តើអត្ថបទនេះជាប្រភេទអត្ថបទអ្វី(ព្រេងកថា ទេវកថា និទានកថា) ? ចូរបញ្ជាក់ ។

២. ហេតុអ្វី ទើបនាំឱ្យមានទំនាស់នេះកើតឡើង ?

៣. តើក្រុមគីង្គក់មានគោលបំណងចង់បានអ្វី ? តើទង្វើនោះចាំបាច់ឬទេ ?

៤. តើទង្វើនោះបានផ្ដល់ផលប្រយោជន៍យ៉ាងណាចំពោះក្រុមសត្វនិងរុក្ខជាតិ ?

៥. តើកត្តាអ្វីខ្លះដែលនាំឱ្យពួកគេទទួលបានជ័យជំនះ ?

៦. ចូរអ្នកបង្ហាញតម្លៃអប់រំ តាមរយៈសកម្មភាពនៃតួអង្គទាំងនោះ ។



## ល្បះសំណួរ

អ្នកបានសិក្សារឿង សង្គ្រាមរវាងគីង្គក់និងតាព្រហ្មរួចហើយ ក្នុងនោះតាព្រហ្មបានសួរទៅក្រុមមណ្ឌុកសត្វនិងក្រុមបាណកសត្វ ដើម្បីទទួលបានព័ត៌មានផ្សេងៗ អំពីការធ្វើសង្គ្រាមជាមួយតាព្រហ្ម ។ ទាំងអស់នោះជាមធ្យោបាយ ដើម្បីស្វែងរកព័ត៌មានតាមរយៈល្បះសំណួរ ។

- ចូរអ្នកសង្កេតល្បះសំណួរខាងក្រោមនេះ ៖

  ១. ល្បះសំណួរបញ្ជាក់មានសំនៀងសួរ (?) ⇨ពួកបាណកសត្វទៅធ្វើសង្គ្រាម?

  ២. តើ + ល្បះបញ្ជាក់ ? ⇨តើពួកបាណកសត្វទៅធ្វើសង្គ្រាម ?

  ៣. ល្បះបញ្ជាក់ + ឬទេ ?

    - ពួកបាណកសត្វទៅធ្វើសង្គ្រាមឬទេ ?
    - គាត់ស្ដាប់បានឬទេ ?
    - បាទ ! គាត់ស្ដាប់បាន ។
    - ទេ ! គាត់ស្ដាប់មិនបានទេ ។

  ៤. ប្រើសព្វនាមសំណួរ ⇨ វាជានរណា ?

៥. ប្រើគុណនាមសំណួរ ⇨ ឯងទៅថ្ងៃណា?

៦. ប្រើគុណកិរិយាសំណួរ ⇨ ហេតុអ្វីបានជាពួកបាណកសត្វទៅធ្វើសង្គ្រាម?

៧. ល្បះសំណួរបែប“ បញ្ជាក់”(សម្រាប់សួរបញ្ជាក់សេចក្ដី ព្រោះអ្នកសួរដឹងពុំច្បាស់ ) ពីរកញ្ចប់ ?

- បាទ! ពីរកញ្ចប់ ។

- ទេ! មួយកញ្ចប់ទេ ។

៨. ល្បះសំណួរបែប “ ដណ្ដឹង” (សម្រាប់ដណ្ដឹងសួរដោយអ្នកសួរពុំដឹងសោះ)៖

ឯងហៅអ្នកណា ?

- បងសំ ។

- ខ្ញុំហៅបងសំ ។

អ្នកណាធ្វើមុន ?

- ខ្ញុំ ។

- ខ្ញុំធ្វើមុន ។

៩. ល្បះសំណួរស្រប :

- តើឯងទៅផ្ទះដែរឬទេ ?

- ឯងបានរៀនហើយឬនៅ ?

១០. ល្បះសំណួរមិនស្រប :

- តើឯងមិនទៅផ្ទះទេឬ ?

- ឯងមិនទាន់បានរៀនទេឬ ?

១១. ល្បះបញ្ជាក់ + មែនទេ ? ⇨ មេឃចង់ភ្លៀងមែនទេ ?

នៅក្នុងឧទាហរណ៍ខាងលើ គេឃើញថាល្បះទាំងនោះសុទ្ធតែបញ្ចប់ដោយសញ្ញាសួរ“ ? ”

 *ល្បះសំណួរ ជាល្បះសម្រាប់សួររកដំណឹង ឬព័ត៌មានផ្សេងៗដែលគេចង់ដឹង ហើយល្បះនេះបញ្ចប់ដោយសញ្ញាសួរ "?" ។*

## លំហាត់

១. ចូរអ្នកឆ្លើយនឹងល្បះសំណួរដែលមានចម្លើយ "បាទ ចាស និងទេ" នៃល្បះខាងក្រោមឱ្យបានសមស្រប ៖

- នាងកញ្ញាកូនក្រមុំសេដ្ឋីស្ម័គ្រចិត្តចូលខ្លួនឱ្យមូសស៊ីដោយខ្លួនឯង ។
- សត្វមូសទាំងនោះរិះរកវិធីដើម្បីខាំមនុស្សលោក ។
- តើអំពើរបស់នាងកញ្ញាកូនសេដ្ឋី ជាអំពើត្រឹមត្រូវឬទេ ?
- រឿងដើមកំណើតសត្វមូសបង្ហាញមូលហេតុនាំឱ្យកើតសត្វមូសមែនឬទេ ?

២. ចូរអ្នកបង្កើតល្បះសំណួរ ចំនួន១ល្បះ ក្នុងទម្រង់នីមួយៗដូចខាងក្រោមនេះ

- ល្បះបញ្ជាក់ ដែលមានសំនៀងសួរ ។
- តើ + ល្បះបញ្ជាក់
- ល្បះបញ្ជាក់ + ឬ(ឬទេ) ។
- ល្បះបញ្ជាក់ + មែនទេ ។
- ប្រើសព្វនាមសំណួរ
- ប្រើគុណនាមសំណួរ
- ល្បះសំណួរបែប " ដណ្ដឹង"
- ល្បះសំណួរស្រប
- ល្បះសំណួរមិនស្រប ។

៣. ចូរអ្នករៀបចំល្បះខាងក្រោមនេះឱ្យទៅជាល្បះសំណួរ ៖

- សុភីជាអ្នកគ្រាហ៍លោកយាយឡើងលើផ្ទះ ។
- បាទ វាសនាយល់ព្រមធ្វើជាសាក្សីចំពោះរឿងនោះ ។
- ពួកគាត់ទៅចូលរួមក្នុងពិធីបុណ្យបច្ច័យបួន ។



# តួអង្គឯក តួអង្គរង

គេអាចស្គាល់ដំណើររឿងមួយបាន អាស្រ័យដោយអ្នកនិពន្ធបង្ហាញព្រឹត្តិការណ៍នានា ជាព្រឹត្តិការណ៍និយាយពីជីវិតមនុស្ស សត្វ ឬរុក្ខជាតិ ។ កាលបើអ្នកនិពន្ធបង្ហាញសកម្មភាពច្រើននៃតួអង្គណាមួយប្រឈមនឹងបញ្ហាសំខាន់នៃរឿង តួអង្គនោះហៅថា តួអង្គឯក ។ ឯតួអង្គដែលគ្រាន់តែមានសកម្មភាពដោយអន្លើៗនោះ ជាតួអង្គរង ។ តួអង្គរងធ្វើសកម្មភាពបំពេញឱ្យដំណើររឿងនិងលក្ខណសម្បត្តិនៃតួអង្គឯក ។ ជាមួយនោះ គេក៏បានឃើញតួអង្គមួយបែបទៀតដែលមានសកម្មភាពតិចតួច គ្រាន់តែជួយបំពេញសាច់រឿង ឱ្យមានការប្រព្រឹត្តទៅ ហៅថាតួអង្គបន្ទាប់បន្សំ ។

• ចូរអ្នកអានរឿង បុរសដណ្តឹងប្រពន្ធ ដើម្បីសិក្សាពីតួអង្គ ៖

កាលពីព្រេងនាយ មានបុរសម្នាក់ចង់បានប្រពន្ធ ក៏ទៅដណ្តឹងកូនគេម្នាក់ ។ ម្តាយឪពុកខាងស្រីបង្គាប់៖ “ បើចង់បានកូនយើងជាប្រពន្ធ យើងចងអ្នកត្រាំទឹកបីយប់ បើទ្រាំបាន ទើបយើងឱ្យកូនយើង ” បុរសនោះក៏ព្រមឱ្យគេចងត្រាំទឹក ។ លុះត្រាំទឹកបានពីរយប់ បុរសនោះឃើញភ្លើងឆេះលើកំពូលភ្នំ ។ គាត់ក៏លើកដៃឡើងទំនងដូចជាអាំងភ្លើង ។ គេមកមើលឃើញបុរសនោះអាំងភ្លើងក៏យកជាលេសមិនលើកកូនឱ្យគាត់ជាប្រពន្ធឡើយ ។ បុរសនោះខឹងណាស់ទៅប្តឹងចៅក្រម ។ ចៅក្រមឱ្យកោះម្តាយឪពុកខាងកូនស្រីនោះជំនុំជម្រះ ។ ចៅក្រមទទួលយកសំណូក ក៏កាត់៖ “ ចៅឯងត្រូវចាញ់គេហើយ មិនត្រូវបានកូនក្រមុំនេះទេ ។ បើដូច្នេះចៅឯងទៅរៀបបាយ មកឱ្យយើងបរិភោគ ” ។ ឯចៅនោះឮគេថា មិនត្រូវ បានកូនគេជាប្រពន្ធទេ ហើយត្រូវគេប្រើទៅរៀបបាយមកឱ្យគេបរិភោគដូច្នេះ ក៏តូចចិត្តណាស់ ដើរបណ្តើរយំបណ្តើរ ប្រទះសុភាទន្សាយ ។ សុភាទន្សាយសួរ៖ “ ហេតុអ្វីបានជាបងយំ? ” ។ បុរសនោះប្រាប់តាមដំណើរសព្វគ្រប់ប្រការ ។ សុភាទន្សាយសួរទៀត៖ “ គេឱ្យបងឯងទៅណា? ” ។ បុរសនិយាយ៖ “ ឥឡូវគេប្រើឱ្យទៅរៀបបាយ ” ។ សុភាទន្សាយបង្គាប់៖ “ អើ! បងឯងរៀបរួចយកមក ឱ្យអញទៅផង អញទៅជួយជំនុំជម្រះឱ្យ ប៉ុន្តែបើបងឯងរៀបបាយមក ស្លកុំដាក់អំបិលប្រហុក ។ ប្រហុកដាក់តែក្បែរខាងនោះ ស្លតែត្រីនិងបន្លែបានហើយ ” ។ បុរសនោះឮសុភាទន្សាយសន្យាដូច្នេះអរណាស់ ខំទៅរៀបបាយដូចបង្គាប់សុភាទន្សាយ ហើយក៏យកមកជូនចៅក្រម និងសុភាទន្សាយ ។ ចៅក្រមឃើញសុភាទន្សាយមកក៏សួរ៖ “ បងទន្សាយមករកអ្វី? ” ។ សុភាទន្សាយឆ្លើយ៖ “ មកជំនុំក្តីលោក ” ។ ចៅក្រមតប៖ “ អើចាំបរិភោគបាយរួចសិន ” ។ ឯចៅក្រម នៅ

ពេលបរិភោគបាយនោះទៅក៏សួរៈ“ សម្លអ្វីក៏សាបម្ល៉េះ?” ។ សុភាទន្សាយឆ្លើយតបៈ“ ភ្លើងឆេះនៅលើកំពូលភ្នំថាក្ដៅដល់ ចុះអំបិលប្រហុកដាក់ក្បែរនេះ ម្ដេចបានជាមិនប្រៃដល់?” ។ សុភាទន្សាយឆ្លើយតែប៉ុណ្ណោះ ចៅក្រមទាល់ប្រាជ្ញា ទើបកាត់សេចក្ដីឱ្យបុរសនោះឈ្នះនាពេលនោះទៅ ។

*(ដកស្រង់ និងកែសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ២)*

រឿងនេះ បានបង្ហាញសកម្មភាពតួអង្គបុរសឈ្នះក្ដី បានទទួលកូនក្រមុំធ្វើជាប្រពន្ធដោយសារការជួយកាត់ក្ដីពីតួអង្គសុភាទន្សាយ ។ ចៅក្រមទទួលសំណូកពីឪពុកម្ដាយកូនក្រមុំនោះត្រូវបរាជ័យយ៉ាងអាម៉ាស់ ។ ឯឪពុកម្ដាយកូនក្រមុំក៏សុខចិត្តលើកកូនក្រមុំខ្លួនឱ្យបុរសនោះធ្វើជាប្រពន្ធ ។ ជាមួយនឹងសកម្មភាពនេះ យើងស្គាល់តួអង្គនីមួយៗ ដូចតទៅៈ

- បុរសដណ្ដឹងកូនក្រមុំឈ្នះក្ដី បាននាងជាប្រពន្ធ ជាតួអង្គឯក ។
- សុភាទន្សាយនិងចៅក្រមជាតួអង្គរង ។
- ម្ដាយឪពុករបស់កូនក្រមុំជាតួអង្គបន្ទាប់បន្សំ ។
- កូនក្រមុំជាតួអង្គរំលឹក ។



- *តួអង្គឯកជាតួអង្គដែលមានសកម្មភាពច្រើនប្រឈមនឹងបញ្ហាស្មុគស្មាញក្នុងដំណើររឿង ។*
- *តួអង្គរងជាតួអង្គដែលធ្វើសកម្មភាពដោយអន្លើៗ ហើយសកម្មភាពទាំងនោះជួយបំពេញដំណើររឿងនិងលក្ខណសម្បត្តិឱ្យតួអង្គឯក ។*
- *តួអង្គបន្ទាប់បន្សំជាតួអង្គដែលធ្វើសកម្មភាពហែហមដំណើររឿងឱ្យមានភាពរលូនតែប៉ុណ្ណោះ ។*

## លំហាត់

ចូរអ្នកបង្ហាញតួអង្គឯក តួអង្គរង និងតួអង្គបន្ទាប់បន្សំ ក្នុងរឿងសង្គ្រាមរវាងតីង្គក់និងតាព្រហ្ម ដែលមានតួអង្គ តីង្គក់ តាព្រហ្ម ត្រីក្រាញ់ ឃ្មុំ ឪម៉ាល់ ។



# រឿងចចក



កាលពីព្រេងនាយ មានចចកគ្រោសធំមួយ ដល់ខែលំហើយ វាដើររកត្រពាំងបឹងបួ ដែលរីងទឹកដើម្បីចាប់ត្រីស៊ី ។ លុះទៅដល់ត្រពាំងមួយ រីងទឹកអស់នៅតែប្រឡង់មួយ ឃើញសុទ្ធតែភក់ មានត្រី កំពឹស បង្កង ក្តាមជាច្រើន ។ ចចកឃើញហើយមានចិត្តត្រេកអររីករាយដោយគិត៖ “ ថ្ងៃនេះ អញមានលាភធំណាស់ ជាលាភចម្លែកជាងសព្វថ្ងៃ ” ។ ឯកំពឹសមានប្រាជ្ញាយល់គំនិតចចកថាដូច្នេះក៏និយាយលួងលោមចចក៖ “ យើងទាំងអស់គ្នាសុទ្ធតែជាចំណីបងចចកឯងទាំងអស់ហើយ ប៉ុន្តែយើងប្រឡាក់ភក់ណាស់ បងឯងស៊ីយើងទាំងភក់ដូច្នេះមិនឆ្ងាញ់ពិសាទេ ” ។ ចចកឆ្លើយ៖ “ ធ្វើដូចម្តេចនឹងឆ្ងាញ់ពិសា? ” ។ កំពឹសឆ្លើយ៖ “ ត្រូវបងចចកឯងយកយើងទៅលាងទឹកឱ្យជ្រះស្អាតសិនសឹមស៊ី នោះទើបឆ្ងាញ់ពិសា” ។ ចចកសួរ “ ធ្វើដូចម្តេចនឹងយកទៅលាងទឹកបាន បើច្រើនដល់ម្លេះ? ” ។ កំពឹសប្រាប់៖ “ បងចចកកុំព្រួយចិត្ត ខ្ញុំធានាគិតឱ្យបងបានស្រួល ប៉ុន្តែត្រូវបងឯងធ្វើតាមខ្ញុំ ” ។ ចចកឆ្លើយឡើង៖ “ បងឯងឱ្យខ្ញុំធ្វើដូចម្តេចក៏ខ្ញុំតាមទាំងអស់ ” ។ កំពឹសបង្គាប់ចចក៖ “ បើដូច្នេះចូរបងចុះមក ដេកននៀលក្នុងភក់នេះ ហើយយើងទាំងអស់គ្នានឹងបានតោងខាំរោមបង ។ បងត្រូវនាំយើងទៅរកស្ទឹងបឹងបួងណាមានទឹកច្រើនថ្លាល្អ រួចបងលាងយើងឱ្យស្អាត សឹមបងឯងស៊ីឱ្យឆ្ងាញ់ពិសាតាមចិត្តចុះ ” ។ ឯចចកជា

សត្វល្មោភហើយល្ងង់ ក៏ធ្វើតាមពាក្យកំពីស ។ កំពីសនិងត្រីបបួលគ្នាតោងរោមចចកទៅ ។ លុះទៅដល់បឹងធំមួយវែង មានទឹកថ្លាល្អ ចចកក៏ដើរចុះទៅក្នុងទឹក ។ ពួកត្រី និងកំពីសលោតទៅក្នុងបឹងរួចប្រាប់៖ “ បងចចកឯងទៅជញ្ជូនមកឱ្យអស់សិនសឹមមកស៊ីឱ្យឆ្អែតតែម្ដង យើងនៅចាំបងនៅទីនេះ” ។ ចចកក៏ទៅជញ្ជូនត្រី និងកំពីសមក លុះត្រាតែអស់ពីត្រពាំងនោះ ។ ពួកត្រីកំពីសក្ដាមខ្យង ដឹងថាចចកជញ្ជូនអស់ហើយ នាំគ្នាមុជក្នុងទឹកជ្រៅបាត់អស់ ។ ឯចចកដឹងថា កំពីសបញ្ឆោតដូច្នេះហើយ ខឹងណាស់ ដើរទៅបបួលអស់សត្វធំតូច ដំរី រមាស ខ្លា គ្រប់សត្វទាំងពស់ថ្លាន់ ពស់ធំ ពស់តូច មិនឱ្យសេសសល់ដល់តិច ដើម្បីបបួលគ្នាមកបាចទឹកបឹងនោះឱ្យរីងនឹងបានចាប់ត្រីក្នុងបឹងនោះស៊ីឱ្យអស់ ។ ពស់ថ្លាន់ធ្វើជាទំនប់ទឹក អស់សត្វឯទៀតក៏បបួលគ្នាបាច ។ សត្វក្នុងបឹងដឹងថា ចចកបបួលគ្នាបាចទឹកឱ្យរីងទាំងបឹង ភ័យណាស់ ក៏នាំគ្នាគិត៖ “ យើងធ្វើដូចម្ដេចនឹងបានឱ្យអស់សត្វទាំងនោះលែងបាចទឹក? ” ។ កាលនោះ ត្រីក្រាញ់ឆ្លើយ៖ “ ខ្ញុំឮគេនិយាយថា បងសុភាទន្សាយជាអ្នកមានប្រាជ្ញា ចេះដោះទុក្ខមនុស្ស សត្វផងជាច្រើនមកហើយ បើដូច្នេះខ្ញុំនឹងទៅពឹងបងសុភាទន្សាយឱ្យមកជួយដោះទុក្ខពួកយើង” ។ ពួកត្រីគិតគ្នាហើយក៏ប្រើត្រីក្រាញ់ឱ្យទៅអញ្ជើញសុភាទន្សាយ ។ ត្រីក្រាញ់ប្រឹងនឿលត្រូវថ្ងៃក្រៀមស្រកាអស់ ។ ដល់យប់សុភាទន្សាយចេញមករកស៊ី បានឃើញត្រីក្រាញ់នឿលដូច្នោះក៏សួរ៖ “ បងត្រីក្រាញ់ទៅណា? ” ។ ត្រីក្រាញ់ឃើញសុភាទន្សាយហើយ មានចិត្តត្រេកអរណាស់និយាយអង្វរ៖ “ បងសុភាទន្សាយអាណិតខ្ញុំ ត្បិតត្រីទាំងអស់ក្នុងបឹង គេប្រើខ្ញុំមកអញ្ជើញបងសុភាទៅ ត្បិតឮទាំងមនុស្សនិយាយថា បងជាអ្នកមានប្រាជ្ញា ចេះកាត់សេចក្ដីដោះទុក្ខគេ បើអ្នកឯណាកើតទុក្ខ បងតែងតែទៅជួយដោះទុក្ខគេ មិនដែលខាន ។ ឥឡូវនេះមានដំរី ក្របី គោរមាស រមាំង ជ្រូក ពស់ធំ ពស់តូច ទាំងសត្វហើរ គឺមានកុក ក្រៀល ចង្កៀលខ្យង ទុង ទោមក្អែកទឹក ប្រវីក ស្មោញ ទាំងប៉ុន្មានបានបបួលគ្នាបាចទឹកបឹងឱ្យរីងនឹងបានចាប់អស់ត្រីអណ្ដែង កន្ធាយស៊ីជាចំណីឱ្យអស់ពីក្នុងបឹងនេះ ។ គេឱ្យពស់ថ្លាន់ ពស់ធំតូច ធ្វើជាទំនប់ ទប់បឹងនេះឯង ។ បើដូច្នេះបងសុភាទន្សាយអាណិតជួយដោះទុក្ខអស់បងប្អូនខ្ញុំ ឱ្យបានរួចពីក្ដីភ័យម្ដងនេះនឹងបានល្បីកេរ្ដិ៍ឈ្មោះតទៅ ។ យើងនឹងតបគុណបងសុភាទន្សាយឯង យើងមិនភ្លេចគុណដរាបដល់អស់ជីវិត” ។ ឯទន្សាយឮត្រីក្រាញ់និយាយអង្វរដូច្នោះក៏ឆ្លើយ៖ “ បងត្រីក្រាញ់ទៅមុន

ចុះ ទៅប្រាប់បងប្អូនកុំឱ្យភិតភ័យ ចាំខ្ញុំជួយដោះទុក្ខឱ្យកុំបារម្ភឡើយ" ។ ត្រីក្រាញ់ក៏ត្រឡប់មកវិញ ។ ឯទន្សាយ លុះព្រឹកព្រហាមឡើង ទៅដល់មាត់បឹងឃើញអស់សត្វកំពុងតែបាចទឹក ក៏យកស្លឹកឈើដែលដង្កូវស៊ីធ្លុះៗ មកធ្វើជាសំបុត្រ ហើយស្រែកហៅសត្វទាំងនោះ ៖ " នែ! បងប្អូនទាំងអស់គ្នាចាំស្តាប់ខ្ញុំ ត្បិតព្រះឥន្ទ្រឱ្យខ្ញុំនាំសំបុត្រមកប្រាប់គ្រប់គ្នាថា ព្រះឥន្ទ្រលោកនឹងមកកាច់ជើងត្រុំប្រមុំជើងអក កាប់ក្បាលចចកដកភ្លុកដំរីស " ។ អស់សត្វឮថា សំបុត្រព្រះឥន្ទ្រដូច្នោះភ័យណាស់ ផ្អើលបោលទៅជាន់លើគ្នា ។ ដំរី ក្របី រមាស រមាំង ស្ទុះបោលទៅជាន់លើពស់ថ្លាន់ជាទំនប់ដាច់ខ្លួនជាពីរបីកំណាត់ធ្លាយទំនប់លិចទឹកស្លាប់អស់ ។ សត្វទាំងនោះក៏ទៅជាចំណីត្រីវិញ ។ តាំងពីថ្ងៃនោះមក អស់សត្វទាំងពួងកោតខ្លាចប្រាជ្ញាសុភាទន្សាយទុកសុភាទន្សាយជាគ្រូបាអាចារ្យទាំងអស់គ្នា ។

*(ដកស្រង់ និងកែសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ១)*

## សំណួរ

១. ហេតុដូចម្តេចបានជាចចកនាំសត្វព្រៃមកបាចទឹកបឹង ?

២. តើឥរិយាបថបែបនេះសមស្របឬទេ ? ព្រោះអ្វី ?

៣. តើចចក កំពឹស ត្រីក្រាញ់ សុភាទន្សាយ តួអង្គណាជាតួអង្គឯក តួអង្គរង ឬតួអង្គបន្ទាប់បន្សំ ?

៤. ហេតុដូចម្តេចបានជាត្រីក្រាញ់ស្ម័គ្រចិត្តទៅរកសុភាទន្សាយ ?

៥. តើសុភាទន្សាយយល់ព្រមមកជួយដោះស្រាយបញ្ហាឱ្យហ្វូងមច្ឆជាតិដែរឬទេ ?

៦. តើទង្វើរបស់ត្រីក្រាញ់និងសុភាទន្សាយ ជាទង្វើល្អដែរឬទេ ? ទង្វើនេះបានផ្តល់ជាបទពិសោធយ៉ាងណាខ្លះចំពោះអ្នក ?



# រឿង ជើង ដៃ មាត់ ក្រពះ



មានកាលថ្ងៃមួយ ពួកអវយវៈទាំងឡាយគឺដៃពីរ ជើងពីរ មាត់មួយ នាំគ្នានិយាយៈ " យើងសព្វថ្ងៃនេះលំបាកនឹងប្រកបការងាររកស៊ីណាស់ " ។ ជើងទាំងពីរៈ " ខ្ញុំនេះរាល់ថ្ងៃឱ្យតែព្រឹកឡើងកាលណា រវល់តែនឹងដើរទៅឯនោះខ្លះ ឯនេះខ្លះ មិនចេះឈប់ឈរឡើយ" ។ ដៃទាំងពីរឆ្លើយឡើងៈ " ខ្ញុំក៏រវល់មិនមានឱកាសឈប់សោះ វៀរតែដេកលក់ទើបបានឈប់ តែភ្ញាក់ឡើងកាលណា រវល់តែចាប់នេះ ចាប់នោះ មិនចេះអស់ឡើយ យ៉ាងហោចក៏ពេលស៊ីបាយស៊ីចំណី ដៃក៏រវល់ចាប់ចំណីបញ្ចុកមាត់ដែរ" ។ មាត់ឆ្លើយឡើងៈ " ខ្ញុំក៏រវល់មិនឈប់ដូចតែគ្នាភ្ញាក់ឡើងកាលណា ចរចានិយាយថានេះ ថានោះមិនចេះចប់ យ៉ាងហោចក៏ត្រឹមបរិភោគចំណីអាហារ មាត់ក៏រវល់ទំពា រវល់លេបអាហារបញ្ចូលទៅ ការងារខ្ញុំមានសភាពយ៉ាងនេះ" ។ ជើងដៃបានឮដូច្នោះ ក៏សួរទៅមាត់ៈ" អាហារនោះ តើធ្លាក់ទៅនៅលើរូបនរណា" ។ មាត់ប្រាប់ៈ " អាហារអស់នោះ តែស៊ីហើយក៏ធ្លាក់ទៅលើក្រពះទាំងអស់ " ។ " អើសព្វអាហារដែលពួកយើងបានមកដោយដើរ ដោយចាប់កាន់ ដោយទំពា ហើយលេបចូលទៅ គឺទៅនៅលើក្រពះ

ទាំងអស់ ។ ក្រពះនោះ តើវាមកជួយធ្វើការអ្វីខ្លះដែរ ឬវានៅស្ងៀមព្រងើយកន្តើយទេ? មាត់ប្រាប់ៈ“ ក្រពះនោះ វានៅស្ងៀមទទេ វានឹងបានជួយកិច្ចការអ្វីក៏គ្មានដែរ ” ។ ជើងឆ្លើយឡើងៈ “ អញរវល់ដើរទៅរកស៊ី បានអាហារ ឯអាហារនោះក៏គួរធ្លាក់មកលើអញអេះ នេះម្តេចឡើយក៏បានទៅលើក្រពះ ដែលវានៅស្ងៀមនោះវិញ ? បើដូច្នេះពីថ្ងៃនេះទៅ អញលែងដើររកស៊ីទៀតហើយ ” ។ ឯដៃក៏ពោលៈ“ អញខំធ្វើការសព្វសារពើ សព្វថ្ងៃនេះ អាហារសោតក៏ធ្លាក់បានទៅលើក្រពះនោះវិញ បើដូច្នេះពីថ្ងៃនេះទៅអញលែងចាប់ពាល់កាន់ធ្វើអ្វី លែងរាំលេងទុកឱ្យក្រពះវាចេញមកធ្វើការ ដាំស្លដាក់ពោះវាចុះ ” ។ ឯមាត់ក៏ពោលឡើងៈ “ អញសោតខំនិយាយខំស៊ី ខំទំពា ខំលេប ឯអាហារក៏ពុំតាំងនៅលើខ្លួនអញ វាត្រឡប់បានទៅអាក្រពះនោះវិញ ។ ក្រពះវាគ្មានជួយធ្វើការអ្វីសោះ ។ អើពីថ្ងៃនេះទៅ អញលែងនិយាយ លែងពោល លែងទំពាស៊ីអ្វីៗហើយ ទុកឱ្យក្រពះ វាក្រៀមស្វិតពោះវាចុះ ទើបសមមុខវា ដែលវាកម្ជិលធ្វើការដូចនេះ ” ។

អវយវៈទាំងបីនិយាយត្រូវគំនិតគ្នាហើយ ទើបចូលដេកលើគ្រែ លែងប្រកបការជាភ្នាក់ងារខ្លួនទីទៃៗ ពីថ្ងៃនោះហោង ។ ឯក្រពះនោះ កាលអវយវៈក្រៅមិនបញ្ចូលអាហារទៅឱ្យដូច្នោះហើយ ក៏កើតស្ងួតក្រៀម ភ្លើងគេជោធាតុពុំមានអាហារនឹងដុតផ្សាយទៅសកលកាយបាន ។ សកលកាយនោះ កាលបើពុំមានអាហារនឹងទទួលហើយ ធ្វើឱ្យរីងស្ងួតស្វិតទៅៗ ។ កាលបើធាតុប្រែប្រួលពុំប្រក្រតីហើយ ពួកអវយវៈទាំងឡាយក៏ស្វិតស្គមរីងរៃទៅៗ រោគាពាធក៏បៀតបៀនធ្វើឱ្យចុកសៀតទៅផ្សេងៗពេញខ្លួនប្រាណ ។

ឯដៃ ជើង មាត់ កាលណាបើកើតវិបត្តិដល់ខ្លួនទីទៃៗហើយ ពុំអាចនឹងតាំងនៅជាប្រក្រតីបាន ទើបមកប្រជុំគ្នាវិញទៀតថា ពួកយើងតាំងតែពីឈប់ប្រកបការ មិនបញ្ចូលអាហារទៅឱ្យក្រពះនោះ ឥឡូវនេះវាស្វិតស្ងួតពុំបានផ្សាយរសជាតិអាហារដល់ពួកយើងឡើយ ។ ពួកយើងទទួលបានក្តីស្គាំងស្គមទ្រមទ្រុឌ គ្មានកម្លាំងសោះ មិនតែប៉ុណ្ណោះក៏ដាលកើតជារោគចុកសៀតរួយអស់សាច់សរសៃថែមទៀត ។ បើពួកយើងនៅតែបង្អត់អាហារក្រពះយ៉ាងនេះ វាគង់នឹងអន្តរធានវិនាសទៅទាំងអស់គ្នាមិនខាន ព្រោះក្រពះគ្មានអាហារជាកម្លាំងនឹងផ្សាយរសជាតិដល់ពួកយើងនេះឯង ។ បើដូច្នេះ ពួកយើងត្រូវប្រកបការតាមភ្នាក់ងាររៀងខ្លួនដូចកាលមុន

វិញចុះ ទើបក្រពះវាផ្សាយរសជាតិដល់ពួកយើងវិញ ។ ពួកអវយវៈពិគ្រោះឃើញក្តីទុក្ខទោសព្រមគ្នាដូច្នោះហើយ ជើងក៏ក្រោកដើរទៅប្រកបការតាមទម្លាប់ដើម ដៃសោតក៏ចាប់ពាល់ធ្វើការងារតាមធម្មតា ឯមាត់សោតក៏ហានិយាយស្តី ហាស៊ីបាយចំណីដូចកាលមុនវិញហោង ។ ឯក្រពះកាលបានអាហារដាក់ដូចមុនហើយ កើតមានកម្លាំងផ្សព្វផ្សាយរសជាតិនោះទៅសព្វសារពាង្គកាយ ។ ដៃជើងមាត់ក៏បានក្តីសុខសប្បាយឡើង ដូចប្រក្រតី ដូចកាលមុននោះវិញហោង ។

*(ដកស្រង់ និងកែសម្រួលពីគតិលោកភាគ៦)*

## សំណួរ

១. ហេតុដូចម្តេចបានជា ជើង ដៃ មាត់ មិនព្រមធ្វើការតាមមុខងារខ្លួន ?

២. តើតួអង្គណាជាតួអង្គឯក ហើយតួអង្គណាជាតួអង្គរង ?

៣. ការធ្វើបែបនេះជាការត្រឹមត្រូវឬទេ ? ព្រោះអ្វី ?

៤. តើផលអាក្រក់ ដែលកើតឡើងដោយសារតែការមិនជួយបំពេញការងារផ្សេងៗរបស់ខ្លួន បានធ្វើឱ្យសរីរាង្គទាំងមូលស្ថិតក្នុងសភាពបែបណា ?

៥. តើការជួយគ្នាស្របតាមតួនាទីរៀងៗខ្លួនបែបនេះ បានផ្តល់ផលវិជ្ជមានយ៉ាងណាខ្លះចំពោះសរីរាង្គទាំងមូល ?

៦. តើគេអាចប្រៀបធៀបពួកតួអង្គទាំងនេះទៅនឹងបុគ្គលបែបណាក្នុងសង្គម ?



# សញ្ញាសម្គាល់ វង់ក្រចក តង្កៀប

អ្នកបានសិក្សារួចហើយពីសញ្ញាសម្គាល់ចំណុចរាយ ។ ឥឡូវនេះអ្នកនឹងសិក្សាបន្តទៅទៀត អំពីសញ្ញាសម្គាល់វង់ក្រចក (...) និងតង្កៀប [...] ។

- ចូរអ្នកសង្កេតឧទាហរណ៍ខាងក្រោម ៖
  - បរិសុទ្ធ (បរិ៑សុត) គុ.(បា.) ដែលស្អាត , ឥតសៅហ្មង , ឥតមោះមៃ : ចិត្តបរិសុទ្ធ , មនុស្សបរិសុទ្ធ , ទ្រព្យបរិសុទ្ធ ។
  - ទេសកាល (ទេស-កាល) ន. (បា. ទេស+កាល) កាលសម័យរបស់ប្រទេស ឬ កាលដែលនិយមទៅតាមប្រទេស ... ។
- ចូរអ្នកអានឧទាហរណ៍ខាងក្រោមនេះ ៖

ក. [...] វាមាសូរក៏យកកែវមួយទៅត្រងទឹកសន្សើម ដែលទើរនៅលើស្លឹកឈើនិងស្មៅផ្សេងៗ ។ វាបានខំព្យាយាមធ្វើដូច្នេះជាច្រើនព្រឹក ប៉ុន្តែឥតបានផលប្រយោជន៍សោះ ។ ចំណែកឯនាងមេខលា ដែលជាស្រីចេះគិតវែងឆ្ងាយ ក៏រើសយកបណ្តូលឈើមួយយ៉ាងទន់ស្ពោតៗហើយយកទៅដាក់ផ្តិតលើទឹកសន្សើម ដែលដក់នៅលើស្លឹកឈើ និងនៅលើស្មៅទាល់តែដុំឈើនោះជក់ទឹកពេញទាំងអស់ ។ បន្ទាប់មក នាងអារក្ខទេវីបានយកដុំឈើនោះទៅច្របាច់ទឹកដាក់ទៅក្នុងកែវ ។ អាស្រ័យដោយហេតុដូច្នេះ នាងក៏រកទឹកសន្សើមដាក់កែវបានពេញ ហើយក៏យកកែវនោះទៅជូនមហាតាបស ។ ហេតុដូច្នេះបានជានាងអារក្ខទេវី ត្រូវបានតាបសសម្គាល់ថា ប៉ិនប្រសប់ជាងបិសាច ។

តាបសជបទឹកសន្សើមនោះឱ្យកើតទៅជាកែវ ហើយប្រគល់ទៅឱ្យនាងមេខលាដោយបញ្ជាក់ប្រាប់៖“ កែវនេះមានអានុភាពខ្លាំងពូកែណាស់ ។ បើអ្នកមានបំណងអ្វីមួយ គ្រាន់តែលើកកែវនេះគ្រវីឡើង នោះមួយរំពេចសេចក្តីប្រាថ្នារបស់អ្នកនឹងបានសម្រេចភ្លាម ។ មួយទៀតដោយអានុភាពនៃកែវនេះ អ្នកអាចហោះកាត់អាកាសកប់ពពកជ្រកអាចម៍ជន្លេន ទៅកាន់កន្លែងណាក៏បានទាំងអស់ ” ។ [...]

ខ. [រឿង ទុំទាវ មានចំនួន១០៥០ល្បះ (ភិក្ខុសោម)]

គ. កត់សូរក្នុងភាសាខ្មែរ

- ជាប់ [ជ័ប] ។ - ទាន់ [ទ័ន] ។

- មាត់ [ ម័ត] ។ - ទាល់ [ ទ័ល] ។

ឃ. ក្នុងគណិតវិទ្យា

[AB] = [BC]

នៅក្នុងឧទាហរណ៍នេះ គេបានបង្ហាញឱ្យឃើញការប្រើសញ្ញាវង់ក្រចក ឬសញ្ញាតង្កៀប ដែលមានលក្ខណៈបួនយ៉ាងផ្សេងគ្នា ។ ការប្រើប្រាស់សញ្ញានេះស្ថិតក្នុងលក្ខខណ្ឌខុសគ្នាគឺ

- បញ្ជាក់សួរ បញ្ជាក់ន័យ ឬពន្យល់សេចក្ដីរបស់ពាក្យដែលនៅខាងដើមនៃវង់ក្រចក ។
- ប្រាប់ពីអ្នកនិពន្ធ ឬប្រភពនៃល្បះ ។
- ប្រាប់ពីប្រភពនៃអត្ថបទដកស្រង់ ។

ដូច្នេះ នៅក្នុងភាសាខ្មែរ សញ្ញាវង់ក្រចកជ្រុង ឬតង្កៀបនិងវង់ក្រចក គេប្រើក្នុងករណីណាខ្លះ?



- *អមសេចក្ដីដែលប្រើវង់ក្រចករួចហើយ ។*
- *បញ្ជាក់ពីការដកស្រង់វគ្គណាមួយនៃអត្ថបទ ។*
- *អមសញ្ញាសូរវិទ្យាអន្តរជាតិ ឬសញ្ញាសូរភាសាជាតិ ។*
- *នៅក្នុងមុខវិជ្ជាគណិតវិទ្យា ឬក្នុងមុខវិជ្ជាដទៃទៀត (រូប គីមី) ។*

## លំហាត់

ក. ចូរអ្នកជ្រើសរើសកន្សោមពាក្យខាងក្រោមនេះ ដើម្បីដាក់ក្នុងសញ្ញាតង្កៀបឱ្យបានសមស្រប ៖

- មហោរី មះហោរី ។
- សមណសក្តិ សះម៉ះណះស័ក ។
- មនសិការ មះនះសិការ៉ះ ។
- ទណ្ឌកម្ម ទ័នឌះក័ម ។

ខ. ដើម្បីបញ្ជាក់ថា វគ្គនេះជាវគ្គដកស្រង់ (ស្ថិតនៅផ្នែកខាងក្រោយបំផុតនៃអត្ថបទដើម) តើអ្នកគួរប្រើសញ្ញាតង្កៀប និងសញ្ញាវង់ក្រចក នៅត្រង់ចំណុចណានៃវគ្គដកស្រង់នេះ?

ពូឡាងសឹន បានបង្ហាញឱ្យពួកនោះចេះដាំដំណាំ ឬសាបព្រោះគ្រាប់ ចេះធ្វើផ្ទះ ចេះរៀបការគ្នាបង្កើតជាគ្រួសារ បង្កើតកូនប្រុសស្រី ។ ចាប់តាំងពីពេលនោះមក មនុស្សជាតិកាន់តែរីកចម្រើនច្រើនឡើងៗ ជាលំដាប់ ។ មឿងលុម មានជីវភាពកាន់តែសកម្ម កាន់តែរីកចម្រើន ។ ពូឡាងសឹនក៏បានបង្ហាញឱ្យពួកគេចេះស្រឡាញ់ឪពុកម្ដាយ ចេះគោរពចាស់ទុំមានភាតរភាពចំពោះអ្នកដែលនៅក្នុងភូមិជាមួយគ្នា នៅក្នុងប្រទេសជាមួយគ្នា មានសញ្ជាតិដូចគ្នា ឱ្យថែរក្សាកេតនភណ្ឌ ដែលបុព្វបុរសបានទុកឱ្យ ។ ពូឡាងសឹន និងប្រធានបួននាក់ទៀតអប់រំស្មារតីស្នេហាជាតិដ៏ធំធេង ។ ដូចនេះហើយ ឡាវទាំងប្រុស ទាំងស្រី ក៏មានកតញ្ញូតាធម៌ដ៏ជ្រាលជ្រៅ ចំពោះប្រធានទាំងនោះ ហើយលើកតម្កើងទុកជាបុព្វបុរសរបស់ខ្លួន ។

*(ទេវកថា ឡាវ និពន្ធដោយ សុំស៊ីដាសារ)*



# សង្ខេបឡើងវិញ

អ្នកបានអានរឿង ចចក រួចមកហើយ ។ ចូរអ្នកសង្ខេបឡើងវិញ ដោយគ្រាន់តែលើកយកចំណុចសំខាន់ៗនៃរឿងមកបង្ហាញតែប៉ុណ្ណោះ ៖

មានចចកធំមួយដើររកបឹង ដែលរីងទឹក ដើម្បីចាប់ត្រីស៊ី ។ លុះទៅដល់ត្រពាំងមួយរីងទឹកអស់ មានត្រី កំពីស បង្កង ក្តាម វាមានចិត្តត្រេកអរណាស់ ។ កំពីសមានប្រាជ្ញា ដឹងថាចចកចង់ស៊ីពួកខ្លួនដូច្នេះ ក៏និយាយលួងលោមចចកឱ្យជញ្ជូនពួកខ្លួនលាងទឹកសម្អាតជាមុនសិនសឹមស៊ីឱ្យឆ្ងាញ់ពិសា ។ ក្រោយពីបានស្តាប់ការណែនាំរបស់កំពីសរួចមក ចចកក៏យល់ព្រមធ្វើតាម ។ ពេលដឹងថា ពួកមច្ឆជាតិត្រូវចចកជញ្ជូនអស់ពីត្រពាំងនោះហើយ ពួកត្រីកំពីស ក្តាម ខ្យង ក៏នាំគ្នាមុជក្នុងទឹកជ្រៅបាត់អស់ ។ ចចកដឹងថា កំពីសបញ្ឆោតដូច្នេះ ខឹងណាស់ ដើរទៅបបួលអស់សត្វដំរី រមាស ខ្លា ពស់ថ្លាន់ ពស់ធំ ពស់តូច មកបាចទឹកបឹងនោះឱ្យរីងនឹងបានចាប់ត្រីក្នុងបឹងនោះស៊ីឱ្យអស់ ។ ដោយឃើញចចកបបួលគ្នាបាចទឹកបឹងឱ្យរីង ពួកកំពីសភ័យណាស់ ក៏ឱ្យត្រីក្រាញ់ទៅអញ្ជើញសុភាទន្សាយ មកជួយពួកគេ ។ ព្រឹកព្រហាមឡើង ទន្សាយក៏ទៅមាត់បឹងឃើញអស់សត្វកំពុងតែបាចទឹក ក៏យកស្លឹកឈើដែលដង្កូវស៊ីធ្លុះៗ មកធ្វើជាសំបុត្រ ហើយស្រែកប្រាប់អស់សត្វទាំងនោះថាជាសំបុត្ររបស់ព្រះឥន្ទ្រ រួចថា ព្រះឥន្ទ្រនឹងកាច់ជើងត្រុំ ប្រមុំជើងអក កាប់ក្បាលចចកដកភ្លុកដំរីស ។ ពួកវាឮដូច្នេះភ័យណាស់ ផ្អើលបោលជាន់លើពស់ថ្លាន់ជាទំនប់ដាច់ខ្លួនជាពីរបីកំណាត់លិចទឹកស្លាប់អស់ ហើយក៏ក្លាយទៅជាចំណីត្រីវិញ ។

## សំណួរ

១. តើការប្រើពាក្យ ពួកគេ ពួកវា ក្នុងអត្ថបទសង្ខេបនេះចង់សំដៅទៅលើតួអង្គណាខ្លះ ?

២. តើចចក ត្រីក្រាញ់ និងសុភាទន្សាយ តំណាងឱ្យមនុស្សបែបណា ?

## លំហាត់

ចូរអ្នកសង្ខេបរឿង ជើង ដៃ ក្រពះឱ្យបានយ៉ាងតិចចំនួន៨បន្ទាត់ ដោយប្រើសព្វនាមដើម្បីជំនួសឈ្មោះតួអង្គ ។



# រឿង ស្រូវ



ក្នុងអត្ថបទជាច្រើនមានខ្លឹមសារអប់រំសំខាន់ៗបង្កប់ក្នុងសកម្មភាពតួអង្គ ។ ដូចនេះ យើងចេះត្រងត្រាប់ រាល់សកម្មភាពវិជ្ជមានទាំងនោះនិងអាចចេះកត់ចំណាំសេចក្តីលម្អិតសំខាន់ៗក្នុងអត្ថបទនោះផង ។

• ចូរអ្នកស្តាប់រឿង ស្រូវ ដើម្បីស្វែងយល់គំនិតអប់រំនិងកត់ចំណាំសេចក្តីលំអិតសំខាន់ៗ រួចឆ្លើយនឹងសំណួរខាងក្រោមនេះ ៖

## សំណួរ

១. កាលដើមឡើយ តើស្រូវមានកំណើតមកពីណា ?

២. ហេតុអ្វីបានជាស្រូវត្រូវទៅពួនសម្ងំនៅកន្លៀតថ្មភ្នំយ៉ាងជ្រៅទៅវិញ ?

៣. ហេតុដូចម្តេច បានជាត្រីស្លាតស្ម័គ្រចិត្តជួយយកអាសាមនុស្ស ស្វែងរកមេស្រូវបែបនេះ ?

៤. តើស្រូវយល់ព្រមជួយមនុស្សលោកដូចមុនទៀតដែរឬទេ ? ព្រោះអ្វី ?

៥. តើអ្នកយល់យ៉ាងណាដែរ ចំពោះរឿងខាងលើនេះ ? ព្រោះអ្វី ?

៦. តើឥរិយាបថរបស់ស្រូវ និងត្រីស្លាតចំពោះមនុស្សជាឥរិយាបថយ៉ាងដូចម្ដេចដែរ ?

៧. បើតាមយោបល់អ្នក ហេតុដូចម្ដេចបានជាស្រូវលែងហោះចូលជង្រុកដូចមុនទៀត ?



## សំណេរអត្ថបទព័ត៌មានដែលពណ៌នាព្រឹត្តិការណ៍

តើព្រឹត្តិការណ៍ជាអ្វី? ព្រឹត្តិការណ៍ជារឿងរ៉ាវផ្សេងៗខុសពីសកម្មភាពធម្មតា ។ យើងអាចដឹងព្រឹត្តិការណ៍ណាមួយតាមរយៈអ្នកដទៃ ឬដោយជួបប្រទះផ្ទាល់ភ្នែក ។

សំណេរនេះ តម្រូវឱ្យអ្នកសរសេរលើកយកហេតុការណ៍ ឬរឿងរ៉ាវដែលខ្លួនជួបប្រទះមករៀបរាប់បង្ហាញអ្នកដទៃឱ្យបានដឹងរឿងរ៉ាវទាំងនោះ ។

- ចូរអ្នកអានឧទាហរណ៍ខាងក្រោមនេះ

នៅវេលាប្រមាណជាម៉ោងមួយកន្លះរសៀល ខ្ញុំបានជួបនឹងព្រឹត្តិការណ៍ដ៏គួរឱ្យតក់ស្លុតមួយ ។ អគ្គិភ័យមួយបានកើតឡើង ។ ផ្ទះមួយខ្នងនៅភូមិខ្ញុំត្រូវភ្លើងឆាបឆេះយ៉ាងសន្ធោសន្ធៅគួរឱ្យខ្លាច ។ ផ្កាភ្លើងប៉ើងឡើងទៅលើអាកាសតាមកម្លាំងខ្យល់បក់ ។ អ្នកភូមិបានជួយពន្លត់ភ្លើងតាមលទ្ធភាពរៀងខ្លួន ។ ខ្លះទៅដងទឹក ខ្លះឡើងទៅលើផ្ទះនៅក្បែរនោះ ដើម្បីជះទឹកពីចម្ងាយ ខ្លះហៅរថយន្តពន្លត់អគ្គិភ័យ ។ មិនយូរប៉ុន្មាន រថយន្តពន្លត់អគ្គិភ័យក៏មកដល់ ហើយភ្នាក់ងារយើងក៏បានបាញ់ទឹកពន្លត់ភ្លើងដែលកំពុងឆេះពេញទំហឹងនោះ ។ ទីបំផុត ភ្លើងក៏រលត់ អ្នកភូមិខ្ញុំ និងគ្រួសាររងគ្រោះ បានថ្លែងអំណរគុណចំពោះភ្នាក់ងារយើង ។

ដោយសារការរួបរួមសាមគ្គី ជួយយកអាសា ទើបគ្រោះអាសន្ននោះ ត្រូវសាបសូន្យទៅវិញ ។ ប៉ុន្តែខ្ញុំមានអារម្មណ៍សោកស្ដាយណាស់ចំពោះឧបទ្ទវហេតុខាងលើនេះ ព្រោះវាមិនត្រឹមតែធ្វើឱ្យវិនាសទ្រព្យសម្បត្តិប៉ុណ្ណោះទេ តែថែមទាំងបណ្ដាលឱ្យបាត់បង់អាយុជីវិតមនុស្ស សត្វថែមទៀតផង ។

## សំណួរ

១. តើអត្ថបទ បង្ហាញពីឧបទ្ទវហេតុអ្វី ?

២. តើក្នុងសំណេរនេះមានសព្វនាមបុរិសៈ អ្វីដែលគួរកត់សម្គាល់ជាងគេ ?

៣. តើឧបទ្ទវហេតុនោះ បានបង្ហាញពីការជួយគ្នាយ៉ាងណាខ្លះ ?

៤. តើគេអាចប្ដូរសព្វនាមបុរិសៈខាងលើនេះបានឬទេ ?

៥. ប្រសិនបើអាចប្ដូរបាន តើគេត្រូវប្រើសព្វនាមបុរិសៈណាមួយជំនួសសព្វនាម បុរិសៈនោះ ?

## លំហាត់

ចូរអ្នកសរសេរអត្ថបទពណ៌នាឧបទ្ទវហេតុណាដែលអ្នកបានដឹង ឬជួបប្រទះ ឬអាចជ្រើសរើសព្រឹត្តិការណ៍ណាមួយក្នុងចំណោមឧបទ្ទវហេតុខាងក្រោមៈ

ក. ខ្យល់គ

ខ. លង់ទឹក

គ. គ្រោះថ្នាក់ចរាចរណ៍

ឃ. ខូចមធ្យោបាយធ្វើដំណើរ (កង់ ម៉ូតូ)

ង. ខ្សែភ្លើងឆក់ ។

ដើម្បីឱ្យការសរសេររបស់អ្នកកាន់តែល្អប្រសើរ អ្នកគប្បីធ្វើតាមការណែនាំខាងក្រោម ៖

- ប្រាប់ប្រភពហេតុការណ៍ឬព្រឹត្តិការណ៍
- បញ្ជាក់ពេលវេលា ទីកន្លែងនៃឧបទ្ទវហេតុ
- មូលហេតុនៃឧបទ្ទវហេតុ
- ប្រាប់សកម្មភាពលម្អិតឬភាពសាំញ៉ាំនៃព្រឹត្តិការណ៍
- លទ្ធផលនៃឧបទ្ទវហេតុព្រឹត្តិការណ៍ ។




# កេរដំណែលរបស់ជាតិ



បុព្វបុរសខ្មែរបានបន្សល់ទុកកេរដំណែលដ៏ច្រើនសន្ធឹកសន្ធាប់និងមានតម្លៃដូចជា ទឹកដី ប្រាសាទ ពិសេសប្រាសាទអង្គរវត្ត គម្ពីរក្បួនខ្នាត ច្បាប់ទូន្មាន របាំ ចម្រៀង កំណាព្យ ប្រពៃណី ទំនៀមទម្លាប់ដ៏ល្អថ្លៃថ្លា ។ល ។ ក្នុងមេរៀននេះ អ្នកនឹងបានសិក្សាស្វែងយល់ ពីកេរដំណែលមួយចំនួនរបស់ជាតិ ដើម្បីចូលរួម ឱ្យតម្លៃលើកតម្កើង និងថែរក្សាការពារឱ្យបានគង់វង្សស្ថិតស្ថេរ ។

ជាពិសេស ក្នុងមេរៀននេះ អ្នកនឹងសិក្សាបន្ថែមទៀតអំពី ៖

- កាព្យមាត្រ ឬរង្វាស់កាព្យ
- ចំណាប់ចួន ផ្ទួន រណ្តំ
- និមិត្តរូប
- គំនិតសំខាន់បង្កប់ក្នុងកំណាព្យ
- សព្វនាមចង្អុល
- ការសូត្រនិងតែងកំណាព្យខ្លីៗ ។



# កាព្យមាត្រ ឬរង្វាស់កាព្យ

កំណាព្យខ្មែរមានក្បួនខ្នាត ហើយក្បួនខ្នាតទាំងនោះប្រែប្រួល ផ្លាស់ប្តូរទៅតាមលក្ខណៈបទនីមួយៗ តាំងពីកាព្យមាត្រ(រង្វាស់កាព្យ) ចំណាប់ចួន ចង្វាក់និងបរិយាកាស ។

ដូចម្តេចហៅថាកាព្យមាត្រ?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖

ឧទាហរណ៍១៖ បទកាកគតិ

កុំដៀលអ្នកស្រែ ត្រកូលឯងខ្មែរ កុំប្រែក្រឡាស់
ក្រឡេកឃើញគុណ ទន់ខ្លួនសំពះ កុំធ្វើអ្នកណាស់
កុំត្មះអ្នកក្រ ។

អ្នកកុំភ្លេចគុណ គ្រូលេខនព្វន្ត គ្រូសូត្រអក្សរ
កុំចាប់ដៃទាញ គំនាប់ងក់ក កុំជជែកត
ស្មើមិត្តសម្លាញ់ ។

*(ដកស្រង់ពីច្បាប់ក្រមង៉ុយ ទំព័រទី ៦ បោះពុម្ពឆ្នាំ១៩៨៩)*

គំនូសតាង




ដូចនេះ បទកាកគតិមាន ៧ឃ្លាក្នុង១វគ្គ ហើយក្នុង១ឃ្លា មាន៤ព្យាង្គ

ឧទាហរណ៍ ២ ៖ បទពាក្យ៧

ព្រៃភ្នំធំខ្ពស់ជ្រោះជ្រលង វាលវែងអន្លង់ជាប់ជើងមេឃ
ព្រែកស្ទឹងបឹងអូរសម្បូរពេក ហូរកាត់ពុះជ្រែកគ្រប់ទិសទី ។

គំនូសតាង







ដូចនេះ បទពាក្យ ៧ មាន៤ឃ្លាក្នុង ១វគ្គ និង៧ព្យាង្គក្នុង១ឃ្លា ។

ឧទាហរណ៍ខាងលើបង្ហាញថា ចំនួនព្យាង្គក្នុងឃ្លានិងចំនួនឃ្លាក្នុងវគ្គរបស់កំណាព្យប្រែប្រួលទៅតាមបទ ។



*កាព្យមាត្រ ឬរង្វាស់កាព្យ ជាការរាប់ចំនួនព្យាង្គក្នុងឃ្លានិងចំនួនឃ្លាក្នុងវគ្គរបស់កំណាព្យ ។ កាព្យមាត្រ ឬរង្វាស់កាព្យប្រែប្រួលទៅតាមបទរបស់កំណាព្យ ។*

## លំហាត់

១. ចូរប្រាប់ពីកាព្យមាត្រ ឬរង្វាស់កាព្យរបស់កំណាព្យខាងក្រោម ៖

ក. បទព្រហ្មគីតិ

ក្សិណនោះឯមច្ឆា ហៅបុត្រភ្លាមកឆាប់ៗ
កូនមកហើយទួញប្រាប់ ថាឱពៅពន្លកម្តាយ ។
ខ្លួនម្តាយនឹងស្លាប់ហើយ កុំកូនអើយនៅរៀងអាយ
ទៅរកស៊ីឱ្យឆ្ងាយ ពីទីនេះផុតមនុស្សា ។

*(ល្បើកជុចនិងត្រី វិសេសមួង)*

ខ. បទភុជង្គលីលា

ហែកូនស្រីស្ងួនមាសម្តាយ ក្រណាស់នាងអាយ តាមដោយច្បាប់ស្រី ។
ក្រមួយមិនបានសម្តី ពាក្យទន់តិចនៃ ឱ្យញាតិចូលចិត្ត ។
ក្រមួយមិនចេះរិះគិត ឃើញញាតិឆ្ងាយជិត ហៅឡើងនីស្លា ។
ទោះមានមិនមានក្តីណា ពាក្យផ្អែមចរចា ទើបគេស្រឡាញ់ ។

*(សម្រង់ចាកច្បាប់ស្រី បណ្ឌិតម៉ឺនមៃ)*

២. ចូរប្រាប់កាព្យមាត្ររបស់កំណាព្យ បទកាកគតិ បទពំនោល និងបទពាក្យបួន ។



# ចំណាប់ចួន ផ្ទួន រណ្តំ

ក. ចំណាប់ជួន

ចំណាប់ជួនក្នុងកំណាព្យ មានលក្ខណៈខុសប្លែកគ្នាទៅតាមបទនីមួយៗ ។ ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖

ឧទាហរណ៍ ១៖ បទពំនោល

ដៃកាន់អាវុធរាងហំ    ឫកពាសោតសម    យុទ្ធជនសម័យមានឫទ្ធិ ។
អប្សរបវរទេពពិត    ឆ្លាក់ជាប់នៅនិត្យ    សសរសិលារាងរាយ ។
ហត្ថាកាន់ផ្កាទាំងឡាយ    ញញឹមពព្រាយ    រេរាំជាន់លើបទុម ។

គំនូសតាង




- ចួនក្នុងវគ្គ : ព្យាង្គទី៦នៃឃ្លាទី១ ចួននឹងព្យាង្គទី៤នៃឃ្លាទី២ វគ្គ១ ។
- ចួនឆ្លងវគ្គ : ព្យាង្គទី៦ ឃ្លាទី៣ វគ្គទី១ ចួននឹងព្យាង្គទី៦ ឃ្លាទី១វគ្គទី២ ចួននឹង ព្យាង្គទី៤ឃ្លាទី២វគ្គ២ ។

ឧទាហរណ៍២៖ បទពាក្យ៧

ប្រាសាទតាព្រហ្មភ្នំបាខែង    ជាទីស្ងប់ស្ងែងជននានា
បក្សីចាំក្រុងសាងក្នុងគ្រា    សម័យខេមរាមានឫទ្ធី ។
បាយ័នក្រុងធំភ្នំទ្រង់យស    សង់លើលានខ្ពស់ក្នុងធានី
ហៅថាយសោធរគិរី    ជាទីក្សេមក្សាន្តសម្រាន្តចិត្ត ។

គំនូសតាង




ចួនក្នុងវគ្គ ៖ - សូរព្យាង្គទី៧ នៃឃ្លាទី១ ចួននឹងព្យាង្គទី៤ នៃឃ្លាទី២

- សូរព្យាង្គទី៧ នៃឃ្លាទី២ ចួននឹងព្យាង្គទី៧ នៃឃ្លាទី៣ ចួននឹងព្យាង្គទី៤ នៃឃ្លាទី៤ វគ្គទី១ ។

ចួនឆ្លងវគ្គ ៖ ព្យាង្គទី៧ នៃឃ្លាទី៤ វគ្គទី១ ចួននឹងព្យាង្គទី៧ នៃឃ្លាទី២ ក្នុងវគ្គទី២ ។



*ចួនជាព្យាង្គដែលកើតឡើងដោយសូរស្រៈដូចគ្នា ឬព្យញ្ជនៈប្រកបដូចគ្នាឬសូរស្រៈនិងព្យញ្ជនៈប្រកបដូចគ្នា ។ ចួនមានលក្ខណៈល្អលុះត្រា ៖*

- *ព្យញ្ជនៈស្ថិតក្នុងពួកតែមួយ ៖ ពួកអនិងអ ពួកអ៊ិនិងអ៊ិ*
- *ស្រៈដូចគ្នា ៖ ស្រៈពួកអនិងអ ពួកអ៊ិនិងអ៊ិ ។*

ខ. ផ្ទួន

ផ្ទួនគឺជាការដែលកវីចេះជ្រើសរើសពាក្យ ឃ្លាកាព្យយកមកប្រើច្រើនដងដដែលៗ ។ ផ្ទួនជាវិធីមួយដែលកវីប្រើ ដើម្បីសង្កត់ន័យលើគំនិតណាមួយ ឬបង្កើតសញ្ចេតនាអ្វីមួយ ។

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖

ត្រីក្រាញ់លលេញដេញត្រីក្រុស ត្រីក្រឹមក្រាបចុះឈប់បង្អង់
ត្រីក្រាយហែលក្រោយបណ្តោយត្រង់ ត្រីក្រឹមរិលវង់ក្រោយត្រីក្រាយ ។
កំពីសគោងឬសកំពឹងពួយ ក្រពាត់ស្ទុះស្ទួយស្ទាក់ពីឆ្ងាយ
ពើបពះពានលើកំពូលបាយ កំពុងវាត់វាយកំពីសពង ។

"ផ្ទួន "នៅអត្ថបទកាព្យដកស្រង់នេះគឺ ពាក្យ "ត្រី " ។



*ផ្ទួន ជាព្យាង្គតែមួយដែលកវីប្រើច្រើនដងក្នុងឃ្លា ឬវគ្គនៃកំណាព្យ ។*

គ. រណ្ដំ

កំណាព្យខ្លះកវី ប្រើព្យញ្ជនៈតែមួយ ឬស្រៈតែមួយច្រើនដងនៅក្នុងឃ្លា ឬវគ្គនៃកំណាព្យ ដែលធ្វើឱ្យស្នាដៃរបស់គាត់មានភាពពីរោះរណ្ដំណែងណង ។

ក្នុងឧទាហរណ៍ខាងលើ រណ្ដំមាន ៖

- រណ្ដំព្យញ្ជនៈ "ក "៖ ក្រាញ់ ក្រុស ក្រឹម ក្រាប ក្រាយ ក្រោយ ។
- រណ្ដំព្យញ្ជនៈ "ព "៖ ពីស ពីង ពួយ ពត ពើប ពះ ពាន ពួល ពុង ពង ។
- រណ្ដំស្រៈ "ំ" និងព្យញ្ជនៈ "ព"៖ កំពីស កំពីង កំពត ។



*រណ្ដំជាព្យាង្គ ដែលកវីប្រើព្យញ្ជនៈ ឬស្រៈតែមួយច្រើនដងនៅក្នុងឃ្លា វគ្គនៃកំណាព្យ ។ រណ្ដំមានរណ្ដំស្រៈ និងព្យញ្ជនៈ ។*

## លំហាត់

- ចូរអាន រួចរកចំណាប់ជួន ផ្ទួន និងរណ្ដំក្នុងអត្ថបទកំណាព្យដកស្រង់ខាងក្រោម៖

| | |
|---|---|
| មើលមានជ្រៃជ្រែសង្កែថ្ងាន់ | ត្រៀលត្រស់ក្រវាន់គុយស្រគំ |
| ស្រឡីស្រឡៅក្រពៅក្ដួត | ទ្រនំអាអូដ្ឋចង្ហួរត្នោត ។ |
| ដង្កោទ្រយឹងខ្ទឹងក្រសាំង | អំពិលភ្លូងភ្លាំងទាំងភ្លូបាត |
| គួលែនទុរេនមៀនលាំងសាត | មាក់បាតបង្គោពោចាន់ចារ ។ |
| ត្របែកត្រសេកអំបែងថ្ងៃ | អង្គ្រងស្មាច់ស្មែរោគរកា |
| ក្រូចក្រាយស្វាតស្វាយត្រាចត្រៀលស្វា | សេដាសណ្ដាន់ថ្ងាន់ជ្រៃជ្រៃ ។ |

*(ដកស្រង់ពីរឿង ទុំទាវ ភិក្ខុសោម)*



# សោភណភាពប្រាសាទបាយ័ន



ទ្វារបាលធំៗអស្ចារ្យ ឈរតម្រៀបគ្នា ចាំយាមគ្រប់សសរស្តម្ភ ។
ដៃកាន់អាវុធរាងហាំ ឫកពាសោតសម យុទ្ធជនសម័យមានឫទ្ធិ ។
អប្សរបវរទេពពិត ឆ្លាក់ជាប់នៅនិត្យ សសរសិលារាងរាយ ។
ហត្ថាកាន់ផ្កាទាំងឡាយ ញញឹមពព្រាយ រេរាំជាន់លើបទុម ។
នាងរាំថ្វាយព្រះបរម ពោធិឧត្តម ចមលោកលោកេស្វរា ។
ជញ្ជាំងរោងទងនោះណា ចម្លាក់យោធា ច្បាំងគ្នាប្រយុទ្ធជាញជ័យ ។
ទ័ពខ្មែរសឹងមានថ្វីដៃ ខ្មាំងបរាជ័យ ចាលចាញ់ឫទ្ធីចេស្តា ។
ចម្លាក់សិល្បៈនានា ល្បែងខ្មែរកីឡា ប្រដាល់ចំបាប់គួរគន់ ។
ចាក់ក្បាច់គួរស្ញើចពេកពន់ មានពួកមហាជន ឈរចាំទស្សនាច្រើនក្រៃ ។
ចម្លាក់ពីរឿងប្រពៃ- ណីក្នុងសម័យ សេដ្ឋកិច្ចនាមហានគរ ។

លក់ដូរទំនិញកុះករ ត្រីសាច់ឆ្លាមមករ រឿងបររឿងបាញ់សត្វព្រៃ ។
នេសាទសឹងមាននាព្វ រូពិនប្រពៃ សម័យរុងរោចន៍រីទ្ធិសាយ ។
រូបភាពតន្ត្រីទាំងឡាយ លេងដោយសប្បាយ លាយដោយកញ្ញារេរាំ ។
រូបត្លុករូបតួទន្ទាំ ពួកអ្នកប្រគំ ដេញពិណកំដរបីអធិក ។ [...]
មានរូបពួកអ្នកសិង្ហា សំញើញទន្តា ហាក់ចាំប្រហារសត្រូវ ។
រូបរស់អមសងខាងផ្លូវ គយគន់មើលទៅ សម្បើមឥតបីគណនា ។
អសុរនិងពួកទេព្តា សម្បើមអស្ចារ្យ ទាញនាគជាបង្កាន់ដៃ ។
ដុំថ្មសុទ្ធមានតម្លៃ សិល្បករច្នៃ សម្រិតសម្រាំងជាកេរ ។
គួរឱ្យស្តាយអ្វីម៉្លេះទេ ចម្លាក់ផងខ្មែរ ឥតមានជាតិណាធ្វើបាន ។
កម្លាំងស្ថាប័នបុរាណ ប្រាកដជាមាន ថ្វីដៃឯកទេសមហិមា ។
សំណង់សុទ្ធសឹងថ្មដា ប្រាកដផែនការ មេបាបុព្វបុរស ។
ឥឡូវបាក់បែកស្ទើរអស់ តែមានសម្រស់ អាចលើកកិត្តិយសខ្មែរបាន ។
បាយ័នប្រាសាទបុរាណ ខ្មែរប្រតិស្ឋាន បូជាព្រះពុទ្ធសាសនា ។

*(ដកស្រង់ពីសៀវភៅអត្ថបទអក្សរសិល្ប៍ក្រសួងអប់រំឆ្នាំ ១៩៨២ ទំព័រ៥៤-៥៦)*

## សំណួរ

១. តើកំណាព្យខាងលើនេះនិយាយពីអ្វី?

២. តើកំណាព្យខាងលើនេះតែងឡើងជាបទអ្វី?

៣. ចូរគូសគំនូសតាងចំណាប់ចួនកំណាព្យនេះនៅបីវគ្គដំបូង ។

៤. ចូរបង្ហាញគំនិតសំខាន់បង្កប់ក្នុងកំណាព្យ ។

៥. តើប្អូនមានចំណាប់អារម្មណ៍ដូចម្តេចខ្លះ ចំពោះកេរដំណែលប្រាសាទបាយ័ន?



# សព្វនាមចង្អុល

អ្នកធ្លាប់បានសិក្សារួចហើយអំពីសព្វនាមសំណួរនិងសព្វនាមបុរិសៈ។ ឥឡូវនេះអ្នកនឹងសិក្សាអំពីសព្វនាមចង្អុល ។

- ចូរសង្កេតល្បះខាងក្រោម ៖

- នេះជាផ្ទាំងគំនូរប្រាសាទបាយ័ន ។ - ចម្ការចេកខាងនេះជាចម្ការរបស់លោកតាខ្ញុំ ។

- នោះជារូបសំណាកព្រះវិស្ណុ ។ - ឯចម្ការខាងនោះជាចម្ការរបស់ម្ដាយខ្ញុំ ។

ពាក្យ "នេះ" "នោះ" ក្នុងល្បះខាងលើជាពាក្យដែលគេប្រើជំនួសវត្ថុ មនុស្ស សត្វ គំនិត ឬល្បះណាមួយដែលសម្រាប់ចង្អុលបង្ហាញឱ្យឃើញច្បាស់ នៅចំពោះមុខ នៅទីជិត ឬទីឆ្ងាយ ។



*សព្វនាមចង្អុលជាពាក្យសម្រាប់ចង្អុលបង្ហាញអ្វីមួយ ដែលនៅចំពោះមុខនៅជិត និងនៅឆ្ងាយ ។*

សព្វនាមចង្អុលមានពីរយ៉ាងគឺ៖

- សម្រាប់ទីជិត ៖ នេះ អានេះ អ្នកនេះ . . . ។

- សម្រាប់ទីឆ្ងាយ ៖ នោះ អានោះ អ្នកនោះ . . . ។

- សព្វនាមចង្អុលប្រើសម្រាប់ផ្លាស់កន្សោមនាម

ឧទាហរណ៍៖ នេះជាសៀវភៅខ្ញុំ ។ នោះជាសៀវភៅឯង ។

- ផ្លាស់កន្សោមនាមជាវត្ថុ ៖ អានេះ អានោះ

ឧទាហរណ៍៖ មានបន្ទាត់ពីរនៅលើតុ អានេះជារបស់ខ្ញុំ អានោះជារបស់ឯង ។

- ផ្លាស់កន្សោមនាម ជាមនុស្ស ៖ អ្នកនេះ អ្នកនោះ

ឧទាហរណ៍៖ សិស្សទាំងពីរនាក់នេះ អ្នកនេះពូកែជាងអ្នកនោះ ។

## លំហាត់

- ចូរអ្នកតែងល្បះដោយប្រើសព្វនាមចង្អុល "នេះ" និង "នោះ" ឱ្យបាន៦ល្បះ ។



# និមិត្តរូប

ក្នុងមេរៀននេះ ប្អូនៗនឹងសិក្សាអំពីនិមិត្តរូប ។ តើនិមិត្តរូបជាអ្វី? ចូរសង្កេតនិមិត្តរូបមួយចំនួនខាងក្រោម ៖



កាកបាទក្រហម តំណាងជំនួយ ឬសង្គ្រោះ



តំណាងភាពយុត្តិធម៌



តំណាងគ្រោះថ្នាក់ដល់ជីវិត



តំណាងមិត្តភាព



តំណាងសន្តិភាព

និមិត្តរូប មានលក្ខណៈរួម (សកល) និងលក្ខណៈដោយឡែកទៅតាមតំបន់ ស្រុកភូមិ ឬប្រទេសផ្សេងៗ ។

និមិត្តរូបមានច្រើនប្រភេទ ដូចជានិមិត្តរូបអំពីពណ៌នៃសត្វ អំពីវត្ថុ ឬផ្នត់គំនិតស្រុកភូមិ ឬប្រទេស ។

ឧទាហរណ៍ ៖ និមិត្តរូបមួយចំនួនរបស់ខ្មែរយើង

- ពណ៌ក្រហមតំណាងវីរភាព ឬសេចក្តីក្លាហាន
- ពណ៌ខ្មៅតំណាងទុក្ខព្រួយ
- ពណ៌សតំណាងសេចក្តីបរិសុទ្ធ

- សត្វកណ្ដៀរតំណាងសេចក្ដីព្យាយាម
- សត្វលាតំណាងភាពល្ងង់ខ្លៅ
- សត្វស្វាតំណាងភាពក្រមាច់ក្រមើម
- សត្វឃ្មុំតំណាងការងារ ។



*និមិត្តរូបជាសញ្ញា ឬរូបតំណាង... ដើម្បីសម្គាល់គំនិត ទំនាក់ទំនង ឬបកស្រាយព័ត៌មានផ្សេងៗ ។*

## លំហាត់

- ចូរប្រាប់ន័យរបស់និមិត្តរូបខាងក្រោម ៖

ក.  ............................................

ខ.  ............................................

គ.  ............................................

ឃ.  ............................................

ង.  ............................................



# ប្រាសាទសិលាខ្មែរ



ប្រាសាទសិលាបាំងគងព្រៃ
វត្ថុតម្លៃបុរាណគេរ
ជាវិស្វកម្មជាប់ចាំចេរ
សិល្បៈឈ្នះគេក្នុងលោកា ។

ប្រាសាទនគរវត្តបញ្ចង់
ល្អទ្រង់សក្តិសមដូចសួគ៌ា
កំពូលប្រាំដូចបទុមា
បូជាថ្វាយអង្គព្រះវិស្ណុ ។

បាកានកំពូលខ្ពស់ស្កឹមស្កៃ
វិស័យសុមេរុឥតមានគូ
ជាវិស្វកម្មពួកវិទូ
ជាអ្នកតស៊ូស្ថាបនា ។

ប្រាសាទតាព្រហ្មភ្នំបាខែង
ជាទីស្ងប់ស្ងែងជននានា
បក្សីចាំក្រុងសាងក្នុងគ្រា
សម័យខេមរាមានរិទ្ធី ។

បាយ័នក្រុងធំភ្នំទ្រង់យស
សង់លើលានខ្ពស់ក្នុងធានី
ហៅថាយសោធរគិរី
ជាទីក្សេមក្សាន្តសម្រាន្តចិត្ត ។

បាពួនប្រាសាទល្អសោភី
ជាអនុស្សាវរីយ៍ខ្មែរពិតៗ

វិមានអាកាសជាឋានឋិត ទុកជាទីក្រិត្យស្បថសច្ចា ។
ប្រាសាទទាំងឡាយនៃខេមរា សោភ័ណអស្ចារ្យជាសំអាង
ជំនាន់បុរាណជាតំណាង ផ្នែកខាងសិល្បៈអ្នកសាសនា ។
គឺជាពូជពង្សស្ថាបនិក ទុកជាចារឹកក្នុងសាវតារ
ជាគោលសំខាន់ក្នុងខេមរា ឥតមានជាតិណាប្រលោមបាន ។

*(ដកស្រង់ និងកែសម្រួលពីកម្រងអត្ថបទអក្សរសិល្ប៍ក្រសួងអប់រំឆ្នាំ ១៩៨២)*

## សំណួរ

១. តើកំណាព្យខាងលើនេះជាបទអ្វី?
២. តើកំណាព្យខាងលើនេះនិយាយពីអ្វី?
៣. ចូរបង្ហាញឈ្មោះប្រាសាទទាំងអស់ ដែលមានក្នុងអត្ថបទកំណាព្យខាងលើ ។
៤. ចូរបង្ហាញតម្លៃអប់រំនៃកំណាព្យខាងលើ ។
៥. តើប្រាសាទសិលាទាំងអស់របស់ខ្មែរមានប្រយោជន៍អ្វីខ្លះ?
៦. តើប្អូនមានអារម្មណ៍ដូចម្តេចខ្លះ ចំពោះកេរដំណែលវប្បធម៌ខ្មែរទាំងនេះ?

5



# របាំត្រុដិ



របាំត្រុដិជារបាំប្រជាប្រិយមួយបែបរបស់ខ្មែរយើង ដែលមានតាំងពីបុរាណកាលមកម្ល៉េះ ។

គេលេងរបាំនេះ តែនៅពេលបុណ្យចូលឆ្នាំខ្មែរប៉ុណ្ណោះ ។ តាមសេចក្ដីឱ្យការណ៍ជាច្រើនរបស់សមាជិកឆ្លើយឆ្លងនៃក្រុមជំនុំទំនៀមទម្លាប់ នៅក្នុងខេត្តសៀមរាបនិងបាត់ដំបង គេលេងរបាំនេះ ដើម្បីប្រសិទ្ធីសព្ទសាធុការពរជូនអ្នកស្រុកក្នុងឱកាសឆ្នាំថ្មី ។ ឈ្មោះ "ត្រុដិ " ជាពាក្យដើមមកពី ភាសាសំស្រ្កឹត ប្រែថា ផ្ដាច់ ឬកាត់ផ្ដាច់ គឺសំដៅដល់ការផ្ដាច់ឆ្នាំ ឬការកាត់ផ្ដាច់ឆ្នាំចាស់ចូលទៅក្នុងឆ្នាំថ្មី ។ សព្វថ្ងៃ មានព្រះរាជពិធីមួយហៅថា " ត្រស្តិសង្ក្រាន្ត "ត្រូវបានប្រារព្ធធ្វើជាប់រហូត ។ ជួនកាល តាមទម្លាប់របស់អ្នកស្រុក គេលេងរបាំនេះនៅពេលប្រារព្ធពិធីសុំទឹកភ្លៀង គ្រាដែលស្រុកទេសមានការរាំងស្ងួតជាច្រើនថ្ងៃខែ ។ កាលពីជំនាន់បុរាណរៀងរាល់ពេលបុណ្យចូលឆ្នាំជនជាតិសំរែបាននាំគ្នាទៅលេងថ្វាយព្រះរាជាដើម្បីថ្វាយព្រះពរសួស្ដីសិរីមង្គល ។ ហេតុនេះហើយ បានជាមានទម្លាប់លេងតែនៅពេលចូលឆ្នាំរហូតដល់ឥឡូវ ។ [...]

តាមការអធិប្បាយមកនេះ យើងឃើញថា គេលេងរបាំត្រុដិតាមជំនឿ តាមទម្លាប់និងតាមការចូលចិត្តរបស់អ្នកស្រុកតែប៉ុណ្ណោះឯង ។ ប៉ុន្តែការសង្កេតនាពេលបច្ចុប្បន្នវិញបង្ហាញថា អ្នកភូមិយករបាំនេះជាមធ្យោបាយជួយសម្រាលដល់សេចក្តីត្រូវការជាច្រើន ខាងគ្រឿងសក្ការបូជាចំពោះសាសនាផងនិងខាងផលប្រយោជន៍សាធារណៈផង ។

ដោយសារគោលបំណងនេះ ទើបអ្នកលេងត្រុដិ ពុំដែលយកអ្វីជាប្រយោជន៍ផ្ទាល់ខ្លួនទេ ។ វង់ត្រុដិតែងយកលុយកាក់ទៅតម្កល់សម្រាប់វត្តអារាមណាដែលនៅជិតភូមិខ្លួន ដើម្បីជួយកសាងឬជួសជុលព្រះវិហារ កុដិ សាលា ឬកំពែង តាមសេចក្តីត្រូវការ ។ គេយកប្រាក់កាសខ្លះទៀតដែលនៅសេសសល់ ធ្វើបុណ្យបន្ត ដូចជានិមន្តលោកឆាន់ ឬដារឆ្លងជាដើម ។ ក្រៅពីពេលចូលឆ្នាំនិងក្រៅពីរដូវសម្តែងត្រុដិជាប្រពៃណី អ្នកលេងត្រុដិទាំងអស់ប្រកបរបរធម្មតារៀងៗខ្លួន ពុំបានយកសិល្បៈត្រុដិធ្វើជាអាជីវកម្មប្រចាំថ្ងៃជាប់លាប់នោះទេ ។

ហេតុនេះ បំណងសំខាន់របស់របាំត្រុដិគឺ៖

១. រក្សាកេរមត៌កសិល្បៈមួយបែបដែលមានពីបុរាណយូរលង់ណាស់មកហើយកុំឱ្យបាត់ដានអារ្យធម៌ចាស់ ។

២. ជួយជាសាធារណប្រយោជន៍ ដូចជាកសាងទីកន្លែងធ្វើបុណ្យទាន និងទម្លាប់ឱ្យអ្នកស្រុកមានសប្បុរសធម៌ ចេះធ្វើបុណ្យ ឱ្យទាន ។

*(ដកស្រង់ និងកែសម្រួលពីសៀវភៅ "របាំប្រជាប្រិយខ្មែរ" ឆ្នាំ១៩៦៤ ទំព័រ៩-១០ និងទំព័រ៤០-៤១)*

## សំណួរ

១. តើរបាំត្រុដិជារបាំប្រភេទណា? គេលេងនៅពេលណា? ដើម្បីអ្វី?

២. តើរបាំត្រុដិមានន័យដូចម្តេច?

៣. តើរបាំត្រុដិមានកំណើតដំបូងនៅខេត្តណា?

៤. តើគោលបំណងសំខាន់នៃរបាំត្រុដិមានអ្វីខ្លះ?

៥. តើអ្នកយល់ដូចម្តេចចំពោះកេរដំណែលរបាំត្រុដិនេះ?



# ការស្ដាប់អត្ថបទ "ច្បាប់ស្រី"



អ្នកធ្លាប់សិក្សារួចមកហើយអំពីគំនិតសំខាន់បង្ហាញត្រង់ ។ ជួនកាល អ្នកនិពន្ធបានបង្កប់គំនិតសំខាន់តាមរយៈរូបារម្មណ៍ ន័យធៀប ដែលអ្នកអាន អ្នកសិក្សាពុំអាចរកឃើញដោយត្រង់ៗក្នុងពាក្យពេចន៍ ឃ្លាល្បះធម្មតានោះទេ ។ គំនិតសំខាន់បង្កប់ តម្រូវឱ្យអ្នកអាន អ្នកសិក្សាពិចារណា ស្វែងយល់ រួចទាញសេចក្ដីសន្និដ្ឋានរួម ដោយខ្លួនឯង ធ្វើយ៉ាងណាឱ្យមានន័យគ្រប់ដណ្ដប់ល្បះ វគ្គ កថាខណ្ឌ ឬអត្ថបទទាំងមូលបាន ។

ចូរអ្នកស្ដាប់អត្ថបទដកស្រង់វគ្គខ្លះក្នុង "ច្បាប់ស្រី " ។ នៅពេលស្ដាប់ ចូរប្អូនកត់ចំណាំសេចក្ដីលម្អិតសំខាន់ ៗ រួចឆ្លើយនឹងសំណួរខាងក្រោម ៖

## សំណួរ

១. តើអត្ថបទកាព្យខាងលើនេះជាបទអ្វី?

២. តើអត្ថបទខាងលើនេះក្នុង១វគ្គមានប៉ុន្មានឃ្លា? ឃ្លានីមួយៗមានប៉ុន្មានព្យាង្គ?

៣. តើគំនិតសំខាន់បង្កប់នៃអត្ថបទកាព្យនេះគឺអ្វី?

៤. ចូរបង្ហាញពីតម្លៃអប់រំក្នុងកំណាព្យដកស្រង់ខាងលើនេះ ។



# ការសូត្រកំណាព្យ

អ្នកបានសិក្សារួចហើយពីកំណាព្យបទពំនោលនិងបទពាក្យប្រាំពីរ ។ ឥឡូវនេះអ្នកនឹងសូត្រកំណាព្យទាំងនោះឡើងវិញឱ្យបានត្រឹមត្រូវទៅតាមបទ ។

- បទពំនោល

- រង្វាស់កាព្យ៖ ១វគ្គ មាន៣ឃ្លា

ឃ្លាទី១ មាន៦ ព្យាង្គ

ឃ្លាទី២ មាន៤ ព្យាង្គ

ឃ្លាទី៣ មាន៦ ព្យាង្គ ។

- របៀបសូត្រ ៖ គេសូត្រទម្លាក់សំឡេងនៅព្យាង្គទី២ និងទី៤ គ្រប់ឃ្លាទាំងអស់ ។

ឧទាហរណ៍ ៖

ទ្វារបាលធំៗអស្ចារ្យ ឈរតម្រៀបគ្នា ចាំយាមគ្រប់សសរស្តម្ភ ។
ដៃកាន់អាវុធរាងហាំ ឫកពាសោតសម យុទ្ធជនសម័យមានឫទ្ធិ ។
អប្សរបវរទេពពិត ឆ្លាក់ជាប់នៅនិត្យ សសរសិលារាងរាយ ។
ហត្ថាកាន់ផ្កាទាំងឡាយ ញញឹមពព្រាយ វេរាំជាន់លើបទុម ។

- បទពាក្យប្រាំពីរ

- រង្វាស់កាព្យ ៖ ១វគ្គ មាន៤ ឃ្លា ។ ១ ឃ្លាមាន៧ ព្យាង្គ ។

- របៀបសូត្រ ៖ គេសូត្រទម្លាក់សំឡេងនៅព្យាង្គទី២ និងទី៤ គ្រប់ឃ្លាទាំងអស់ ។

ឧទាហរណ៍ ៖

ប្រាសាទសិលាបាំងគងព្រៃ វត្ថុតម្លៃបុរាណកេរ
ជាវិស្វកម្មជាប់ចាំចេរ សិល្បៈឈ្នះគេក្នុងលោកា ។
ប្រាសាទនគរវត្តបញ្ចង់ ល្អទ្រង់សក្តិសមដូចសួគ៌ា
កំពូលប្រាំដូចបទុមា បូជាថ្វាយអង្គព្រះវិស្ណុ ។

## លំហាត់

- ចូរអ្នកហាត់សូត្រកំណាព្យខាងក្រោមនេះ នៅផ្ទះរៀងៗខ្លួន ៖

១. បទពំនោល

| | | |
|---|---|---|
| ខ្ញុំមានក្រចកនិងធ្មេញ | បើខ្ញុំបញ្ចេញ | សត្វផងរអែងខ្ញុំណា ។ |
| រហ័សប្រៀបបាននឹងខ្លា | ខ្ញុំស្រែកកាលណា | សម្រែកដូចជាខ្លាឃ្មុំ ។ |
| ឬដូចសន្ធាប់ខ្លាធំ | មនុស្សសត្វគិតពុំ | តយុទ្ធនឹងខ្ញុំដល់ម្តង ។ |
| កណ្តុរខ្លាចខ្ញុំពេកហោង | ខ្ញុំឡើងឈើផង | រហ័សទាំងលោលោតចុះ ។ |
| ចំណីមានឱជារស | ខ្ញុំពាំបណ្តោះ | ទៅលើដំបូលបរិភោគ ។ |

*(ដកស្រង់ពីសៀវភៅកំណាព្យខ្មែរភាគ១ ក្រសួងអប់រំ ១៩៨៤)*

២. បទពាក្យប្រាំពីរ

| | |
|---|---|
| ក្រឡេកក្រលៀងឆ្មៀងមើលព្រះ | ចន្ទចែងភ្លឺច្បាស់រះប្រហែល |
| ម៉ោង១០យប់យន់យូរជ្រៅក្រៃល | នឹកដែលនឹកដល់ស្រងល់ងោក ។ |
| ព្រះពាយផាយផាត់ស្ងាត់ត្រជាក់ | រហើយដល់ធ្លាក់សន្សើមស្រោក |
| ស្រពស្រស់ចុះចំប្រោះព្រំជោក | ជាប់ជាំដើមធ្លកឱឡេកបេង ។ |
| សូរសព្ទសព្វសត្វស្រងាត់យំ | ឆ្លើយគ្នាទីមទំព្ទលើ្វយល្វេង |
| បណ្តិតពេជ្រទុំបារម្ភក្រែង | ព្រួយព្រឺសង្រេងចម្បែងបង ។ |

*(ដកស្រង់ពីសៀវភៅកំណាព្យខ្មែរភាគ២ ក្រសួងអប់រំ)*



# ការតែងកំណាព្យ

អ្នកធ្លាប់សិក្សារួចមកហើយពីសំណេរអត្ថបទខ្លីៗជាពាក្យរាយផ្សេងៗ ។ ឥឡូវនេះអ្នកនឹងសិក្សាវិធីតែងកំណាព្យបទពាក្យនិងបទពំនោល ដែលអ្នកបានសិក្សារួចមកហើយនៅក្នុងអំណាន ។

- បទពំនោល

 - រង្វាស់កាព្យ ៖ ១ វគ្គ មាន៣ ឃ្លា
 ឃ្លាទី១ មាន៦ ព្យាង្គ
 ឃ្លាទី២ មាន៤ ព្យាង្គ
 ឃ្លាទី៣ មាន៦ ព្យាង្គ ។

 - ចំណាប់ចួន




 - ចួនក្នុងវគ្គ ៖ ព្យាង្គទី៦ នៃឃ្លាទី១ ចួននឹងព្យាង្គទី៤ នៃឃ្លាទី២ វគ្គទី១ ។
 - ចួនឆ្លងវគ្គ ៖ ព្យាង្គទី៦ នៃឃ្លាទី៣ វគ្គទី១ ចួននឹងព្យាង្គទី៦ នៃឃ្លាទី១ ចួននឹងព្យាង្គទី៤ ឃ្លាទី២ វគ្គទី២ ។

- បទពាក្យប្រាំពីរ

 រង្វាស់កាព្យ ៖

 - ១ វគ្គ មាន៤ ឃ្លា
 - ១ ឃ្លាមាន៧ ព្យាង្គ

- ចំណាប់ចួន



ចួនក្នុងវគ្គ ៖ - ព្យាង្គទី៧នៃឃ្លាទី១ចួននឹងព្យាង្គទី២ ឬទី៤នៃឃ្លាទី២

- ព្យាង្គទី៧នៃឃ្លាទី២ចួននឹងព្យាង្គទី៧នៃឃ្លាទី៣ ចួននឹងព្យាង្គទី២ ឬទី៤នៃឃ្លាទី៤ វគ្គទី១ ។

ចួនឆ្លងវគ្គ ៖ ព្យាង្គទី៧នៃឃ្លាទី៤វគ្គទី១ ចួននឹងព្យាង្គទី៧នៃឃ្លាទី២ក្នុងវគ្គទី២ ។

## លំហាត់

• ចូរអ្នករំឭកឡើងវិញអំពីកាព្យមាត្រ ចំណាប់ចួននៃបទពំនោល និងបទពាក្យ៧ រួចសាកល្បងតែង ៖

១. បទពាក្យ៧ ៖ ការរៀបរាប់គេរដំណែលប្រាសាទបុរាណណាមួយ ដែលអ្នកពេញចិត្តជាងគេឱ្យបាន៣វគ្គ ។

២. បទពំនោល ៖ ការបង្ហាញទឹកចិត្តស្រឡាញ់ ថែរក្សា ការពារសម្បត្តិវប្បធម៌ជាតិ ដូចជាប្រាសាទបុរាណជាដើម ឱ្យបានចំនួន៥វគ្គ ដោយគោរពតាមក្បួនចាប់ចុងចួននៃបទនីមួយៗឱ្យបានត្រឹមត្រូវ ។

## លំនែនាំ

ពេលតាក់តែងអ្នកត្រូវ ៖

- ឱ្យខ្លឹមសារវគ្គនីមួយៗ ទាក់ទងគ្នាតាមលំដាប់គំនិត ហើយឱ្យស្របនឹងប្រធានបទ
- គោរពក្បួនចាប់ចុងចួនឱ្យបានត្រឹមត្រូវ តាមបទនីមួយៗ
- ពិនិត្យកំហុសពាក្យនិងការប្រើប្រាស់សញ្ញាវណ្ណយុត្តិផ្សេងៗ ឱ្យបានត្រឹមត្រូវច្បាស់លាស់. . . ។




# សេចក្តីថ្លៃថ្នូរ



សេចក្តីថ្លៃថ្នូរជាគុណសម្បត្តិ ដែលគួរលើកសរសើរ និងគោរពក្រៃលែង ។ សេចក្តីថ្លៃថ្នូររបស់មនុស្សម្នាក់ៗនឹងកើតមាន លុះត្រាតែអ្នកទាំងនោះប្រព្រឹត្តអំពើល្អ ប្រកបដោយគុណធម៌ សីលធម៌ និងសុចរិត ហើយត្រូវបានមនុស្សទូទៅទទួលស្គាល់ ឱ្យតម្លៃ និងគោរពស្រឡាញ់ ។ ពិសេសបំផុត ត្រូវលះបង់អំពើអាក្រក់ ការមើលងាយមើលថោកការងារផ្សេងៗ ព្យាយាមប្រព្រឹត្តអំពើល្អប្រពៃ មានសេចក្តីក្លាហាន តស៊ូ អំណត់ ធ្វើការងារគ្រប់យ៉ាងដោយមិនរើសអើង ឱ្យតែការងារទាំងនោះជាការងារសុចរិត ។

ក្នុងមេរៀននេះ អ្នកនឹងសិក្សាអត្ថបទមួយចំនួនទាក់ទងនឹងសេចក្តីថ្លៃថ្នូរ ។

**ជាពិសេស អ្នកនឹងបានសិក្សាផងដែរអំពី ៖**

- តួអង្គឯក តួអង្គរង
- កាលអាកាស
- នាមករណ៍ ឬករណនាម
- នាមការក៍ ឬការកនាម
- ការប្រើប្រាស់រាជសព្ទ
- សំណេរអត្ថបទដោយប្រើរាជសព្ទ ។



# នាមករណ៍ ឬករណនាម

អ្នកធ្លាប់សិក្សាអំពីនាមរួចមកហើយ ។ តើនាមជាអ្វី?

នាមជាពាក្យសម្ដីសម្គាល់ឈ្មោះមនុស្ស សត្វ រុក្ខជាតិ ទីកន្លែង ឬវត្ថុអ្វីមួយ ។ នាមមានច្រើនប្រភេទដូចជា សាធារណនាម អសាធារណនាម ។ល ។ ឥឡូវនេះ អ្នកនឹងសិក្សានាមករណ៍ឬករណនាម ។

តើអ្វីទៅជានាមករណ៍ ឬករណនាម?

- ចូរអ្នកអានឧទាហរណ៍ខាងក្រោម ៖
  - សេចក្ដីថ្លៃថ្នូរត្រូវបានទទួលការកោតសរសើរនិងសេចក្ដីស្រឡាញ់រាប់អានផងដែរ ។
  - ការប្រព្រឹត្តអំពើល្អតែងទទួលបានផលល្អ ។

ពាក្យ " សេចក្ដីថ្លៃថ្នូរ ការកោតសរសើរ សេចក្ដីស្រឡាញ់ ការគោរព សេចក្ដីរាប់អាន ការប្រព្រឹត្ត..." គឺជានាមករណ៍ ឬករណនាម ។



*នាមករណ៍ ឬករណនាម ជានាមសម្ដែងសភាព ឬសកម្មភាព ។*

## លំហាត់

១. តើពាក្យណាខ្លះជានាមករណ៍ ឬករណនាម ក្នុងចំណោមពាក្យទាំងអស់ខាងក្រោមនេះ?

អ្នកចម្ការ ការពិសោធ កសិករ អ្នកនិពន្ធ សេចក្ដីព្យាយាម ការគោរព អ្នករបាំ សេចក្ដីថ្លៃថ្នូរ ការសង្កេត សេចក្ដីស្រឡាញ់ ។

២. ចូរសរសេរពាក្យខាងក្រោមឱ្យទៅជានាមករណ៍ ឬករណនាម៖

អនុវត្ត ចម្រើន ខុស ប្រព្រឹត្ត អធិប្បាយ អនុញ្ញាត នឹក កើន ពិសោធ រាប់អាន ។

៣. ចូរតែងល្បះដោយប្រើនាមករណ៍ ឬករណនាម ឱ្យបាន៣ល្បះ ។



# ការប្រើប្រាស់រាជសព្ទ - សង្ឃសព្ទ

រាជសព្ទនិងសង្ឃសព្ទ ជាភាសាដែលខ្មែរចាត់ទុកជាកេរដំណែលដ៏ឧត្តមនៃវប្បធម៌ខ្មែរ ។ ខ្មែរយើងមានរាជសព្ទនិងសង្ឃសព្ទជាច្រើនដែលយើងធ្លាប់ប្រើប្រាស់ភាសានេះតាំងពីដើមរៀងមក ។

ការរីកចម្រើនរបស់ប្រទេសជាតិ មិនអាចកាត់ផ្តាច់ពីអរិយធម៌ខ្ពង់ខ្ពស់ ឧត្តុង្គឧត្តមដែលខ្មែរធ្លាប់មានឡើយ ។ ដូចនេះ អ្នកត្រូវខិតខំសិក្សានិងលើកស្ទួយវប្បធម៌ជាតិ ឱ្យកាន់តែរុងរឿងឱ្យសមនឹងពាក្យស្លោកថា វប្បធម៌រលត់ជាតិរលាយ វប្បធម៌ពណ្ណរាយជាតិថ្កើងថ្កាន ។ អ្នកត្រូវស្គាល់ពាក្យពេចន៍ជារាជសព្ទនិងសង្ឃសព្ទ ដែលគេតែងប្រើជាញឹកញាប់និងជាប្រចាំផងដែរ ។

- ចូរអ្នកអាននិងសិក្សាអត្ថន័យនៃពាក្យក្នុងតារាងខាងក្រោម ៖

| សង្ឃសព្ទ | រាជសព្ទ | ពាក្យសាមញ្ញ |
|---|---|---|
| ប្រគេន | ប្រទាន ថ្វាយ | ឱ្យ(ស្តេចឱ្យទៅរាស្ត្រ)ថ្វាយ(រាស្ត្រទៅស្តេច) |
| កេសា | កេសា | សក់ |
| កុដិ | ទីនាំង ដំណាក់ | ផ្ទះ |
| តើន | តើន | ក្រោកពីដំណេក |
| ត្រាស់ | ត្រាស់ ទូល | ប្រាប់ ជម្រាប |
| ទត | ទ្រង់ទត | មើល |
| គង់ | ប្រថាប់នៅ | គង់នៅ ស្ថិតនៅ អង្គុយនៅ |
| ប្រោស | ប្រោស | អនុគ្រោះ |
| សណ្តាប់ | ទ្រង់ព្រះសណ្តាប់ | ស្តាប់ ព្រះអង្គទ្រង់ស្តាប់ |
| ព្រះភក្ត្រ | ព្រះភក្ត្រ | មុខ |

| | | |
|---|---|---|
| ពរ | ព្រះពរ | ចាស់-បាទ |
| សឹង | ទ្រង់ផ្ទំ | ដេក សម្រាន្ត |
| ពិរោធ | ទ្រង់ព្រះពិរោធ ក្រោធ | ខឹងខ្លាំង ព្រះអង្គទ្រង់ខឹងខ្លាំង |
| សង្ឃដីកា | ឱង្ការ | និយាយ |
| សព្វព្រះទ័យ | សព្វព្រះទ័យ | ស្រឡាញ់ពេញចិត្ត (ព្រះអង្គម្ចាស់ អ្នកអង្គម្ចាស់) |
| សព្វព្រះហឫទ័យ | សព្វព្រះរាជហឫទ័យ | ស្រឡាញ់ ពេញចិត្ត (ព្រះមហាក្សត្រទ្រង់រាជ្យ) |
| ករុណា | ទ្រង់ព្រះករុណា | អាណិត អាសូរ ស្តេចទ្រង់អាណិតអាសូរ |
| ប្រសូត | ប្រសូត | កើត |
| ព្រះឱស្ឋ | ព្រះឱស្ឋ | មាត់ |
| មេត្តា | ទ្រង់ព្រះមេត្តា | រាប់អាន |
| ឧទរ | ព្រះឧទរ | ពោះ |
| ទស្សនាការ | ទ្រង់ទស្សនាការ | ឃើញ ទ្រង់ឃើញ |
| គាល់ | គាល់ | អង្គុយចាំឬទៅជួបក្នុងវត្តឬក្នុងដំណាក់ស្តេច |
| កព្រះហស្ត | កព្រះហស្ត ព្រះករ | កដៃ |
| ព្រះហស្ត | ព្រះហស្ត | ដៃ |
| ព្រះកន្សែង | កន្សែង ទ្រង់ព្រះកន្សែង | យំ |
| ព្រះបាទ | ព្រះបាទ | ជើង |
| អង្គ(ចំនួន) | ព្រះអង្គ (ចំនួន) | នាក់(ចំនួន) |
| ពិធី | ព្រះរាជពិធី | ពិធី |
| ក្រាបថ្វាយបង្គំ | ក្រាបថ្វាយបង្គំ | ជម្រាបសួរ(សំពះ) |

តាមតារាងបញ្ជីពាក្យខាងលើ យើងឃើញថា រាជសព្ទ សង្ឃសព្ទច្រើនមកពីពាក្យបាលីសំស្ក្រឹត ហើយប្រើប្រាស់ទៅតាមឋានៈសង្គម... ដូចដែលយើងធ្លាប់ប្រើ ធ្លាប់ដឹង និងធ្លាប់ឮកន្លងមកដូច្នោះដែរ។ សង្ឃសព្ទ និងរាជសព្ទ មួយចំនួនខ្លះដូចគ្នា។

ឧទាហរណ៍៖ តើន ទត ព្រះភក្ត្រ ព្រះកេស ។ល។



- *រាជសព្ទ ជាពាក្យសម្រាប់ប្រើជាមួយព្រះរាជា ឬស្ដេច។*
- *សង្ឃសព្ទ គឺជាពាក្យសម្រាប់ប្រើជាមួយ ព្រះសង្ឃនិងព្រះពុទ្ធ។*

## លំហាត់

- ចូររកពាក្យមកបំពេញតារាងខាងក្រោម៖

| ពាក្យសាមញ្ញ | សង្ឃសព្ទ | រាជសព្ទ |
|---|---|---|
| ដើរ ដើរទៅ ទៅ | ......................... | យាង |
| ......................... | សឹង | ......................... |
| ស្លាប់ | ......................... | ......................... |
| ឈឺ | អាពាធ | ......................... |
| ......................... | ......................... | ព្រះក្រយាស្ងោយ |
| ពិសា ហូប | ......................... | ......................... |



# រឿង ក្មេងកំព្រា និងព្រះចៅផែនដី



កាលដើមឡើយ មានកុមារម្នាក់អាយុ១៥ឆ្នាំ ជាក្មេងកំព្រាឥតមានមាតាបិតារក្សា ។ ក្មេងនោះទៅនៅដោយសាររោងនាយពិសេស គឺរោងសម្រាប់ធ្វើក្រយាស្ងោយថ្វាយស្តេច ។ ឯនាយពិសេសក៏អាណិតមេត្តាឱ្យក្មេងនោះនៅ ហើយប្រើឱ្យលាងចាន លាងថាស ជូតសមស្លាបព្រា ដោយឱ្យកម្រៃក្នុងមួយខែជាប្រាក់ពី៥-៦ កាក់ ល្មមជាសោហ៊ុយបាន ។ ក្មេងនោះឧស្សាហ៍ធ្វើការក្នុងមុខការរបស់ខ្លួនណាស់ ហើយបានប្រាក់តែរាល់ខែរៀងមក ។

ឯព្រះចៅផែនដី រាល់ពេលដែលស្តេចបានយាងមកទតការណ៍ក្នុងរោងពិសេស ទ្រង់បានយល់ក្មេង ធ្វើការស៊ីឈ្នួលលាងចាននោះរឿយៗ ។ ថ្ងៃមួយ ស្តេចទ្រង់យាងមករោងពិសេសយល់កូនក្មេងកំពុងតែលាងចាននៅខាងក្រៅរោង ស្តេចត្រាស់សួរៈ “ ចៅឯងស៊ីឈ្នួលលាងចានសព្វថ្ងៃនេះមានប្រាក់ប៉ុន្មានហើយ? ” ។ ក្មេងនោះឆ្លើយៈ “ សព្វថ្ងៃនេះ ខ្ញុំមានស្មើគ្នានឹងស្តេចផែនដី ” ។ ស្តេចត្រាស់ៈ “ ការដែលរកស៊ីឈ្នួលគេក្នុងលោកនេះ ការស៊ីឈ្នួលលាងចានជា

ការងារទន់ទាប ម្ដេចថៅឯងស្ដីអួតថា ខ្លួនមានសម្បត្តិស្មើនឹងយើងជាម្ចាស់ផែនដី ផ្ទៃក្រោមនេះ ។ ក្មេងនោះក៏អធិប្បាយ " ខ្ញុំស៊ីឈ្នួលគេសព្វថ្ងៃនេះពិតមែនក្នុង១ខែគេឱ្យ៥-៦កាក់ តែការដែលទទួលទានបាយក៏ត្រឹមមួយឆ្អែត ទទួលទានដំណេកក៏ត្រឹមតែមួយពេល ឯស្ដេចដែលមានសម្បត្តិច្រើនរាប់មិនអស់នោះសោត ក្នុងមួយថ្ងៃក៏គង់សោយព្រះក្រយាស្ងោយ ត្រឹមតែមួយឆ្អែតដូចគ្នាមិនដែលសោយឱ្យលើសអំពីនោះទេ ។ ការដែលទ្រង់ផ្ទំសោតក៏ទ្រង់ផ្ទំត្រឹមមួយពេលដូចគ្នា មិនដែលផ្ទំឱ្យលើសពីនោះក៏ទេដែរ ។ ហេតុនោះទើបទូលបង្គំយល់ថា ខ្លួនទូលបង្គំមានសម្បត្តិស្មើនឹងម្ចាស់ផែនដីដែរ" ។ ឯមហាក្សត្រាធិបតី បានស្ដាប់ពាក្យក្មេងអធិប្បាយប្រាប់ហេតុដែលយកមួយឆ្អែតជាប្រមាណដូច្នោះហើយ ក៏ទ្រង់យល់ថា ពិតជាប្រាកដណាស់ ។ ទ្រង់ពិចារណាមើលហេតុផលទៅក៏ពុំមានខុសអំពីគ្នា គឺអ្នកក្រក៏ស៊ីត្រឹមមួយឆ្អែតអ្នកមានក៏ស៊ីត្រឹមមួយឆ្អែតដូចគ្នា។ ស្ដេចមានព្រះហឫទ័យស្រឡាញ់ពាក្យក្មេងនោះក្រៃពេកទើបទ្រង់ប្រទានមាសប្រាក់សំពត់ខោអាវឱ្យទៅក្មេងនោះ ហើយទ្រង់ចារឹកពាក្យក្មេងនោះថា" ពាក្យអ្នកប្រាជ្ញ" ក្នុងលោកនេះ ។

*(ដកស្រង់ និងកែសម្រួលពីគតិលោកភាគ២ ទំព័រទី៩៥-៩៨)*

## សំណួរ

១. ចូររកតួអង្គឯកនិងតួអង្គរងក្នុងរឿង ។

២. តើអ្នកយល់ដូចម្ដេច ចំពោះព្រះបន្ទូលរបស់ព្រះមហាក្សត្រ ដែលពោល ៖ " ការដែលរកស៊ីឈ្នួលគេក្នុងលោកនេះ ការស៊ីឈ្នួលលាងចាន ជាការងារទន់ទាបម្ដេចក៏ថៅឯងស្ដីអួតថា ខ្លួនមានសម្បត្តិស្មើនឹងយើងជាម្ចាស់ផែនដីផ្ទៃក្រោម" ។

៣. តើតួអង្គក្មេងលាងចាននេះជាមនុស្សដូចម្ដេច? ។

៤. តើក្នុងរឿងខាងលើនេះមានប្រើប្រាស់រាជសព្ទអ្វីខ្លះ ? ចូរស្រង់និងពន្យល់ន័យរបស់ពាក្យនីមួយៗឱ្យបានត្រឹមត្រូវ ។

៥. តើអ្នកយល់ថា ការងារលាងចានដូចតួអង្គក្នុងរឿងនេះជាការងារដូចម្ដេច ?

៦. ចូរស្រង់នាមករណ៍ ឬករណនាម ដែលមាននៅក្នុងអត្ថបទរឿងខាងលើ ។



# នាមការក៏ ឬការកនាម

អ្នកបានសិក្សារួចមកហើយអំពីនាមករណ៍ ឬករណនាម ។ តើនាមករណ៍ ឬករណនាមជាអ្វី? តើនាមករណ៍ ឬករណនាមខុសគ្នាដូចម្ដេចនឹងនាមការក៏ ឬការកនាម?

ខាងក្រោមនេះ អ្នកនឹងសិក្សាអំពីនាមការក៏ ឬការកនាម ។

- ចូរអ្នកអានល្បះខាងក្រោមនេះ ៖

ក. អ្នកភ្ជួរ អ្នករាស់ អ្នកដក អ្នកស្ទូង អ្នករែកកណ្ដាប់ កំពុងបំពេញភារកិច្ចរៀងខ្លួនយ៉ាងសកម្ម ។

ខ. អ្នកក្រុងពូកែធ្វើការ អ្នកចម្ការពូកែដាំដុះ ។

គ. កសិករឧស្សាហ៍ធ្វើស្រែចម្ការ ច្បារដំណាំគ្រប់ប្រភេទ ។

ឃ. ទស្សនិកជនទះដៃសរសើរសិល្បករ ។

ពាក្យ " អ្នកក្រុង អ្នកចម្ការ កសិករ អ្នកភ្ជួរ អ្នករាស់ អ្នកដក អ្នកស្ទូង ទស្សនិកជន សិល្បករ... " គឺជានាមការក៏ ឬការកនាម ។



*នាមការក៏ ឬការកនាម ជានាមសម្ដែងអ្នកធ្វើអំពើ ឬអ្នកមានសភាពលក្ខណៈបែបណាមួយ ។*

## លំហាត់

១. ចូរសរសេរពាក្យខាងក្រោម ឱ្យទៅជានាមការក៏ ឬការកនាម ៖ ក្រុង ស្រែ ចម្ការ ភ្ជួ សិល្បៈ ដក ស្ទូង រាំ ។

២. ចូរតែងល្បះដោយប្រើ នាមការក៏ ឬការកនាមឱ្យបាន៣ល្បះ ។



# កាលអាកាស

ដើម្បីដឹងថា អត្ថបទរឿងផ្សេងៗ ដែលយើងសិក្សានោះ មានព្រឹត្តិការណ៍អ្វីកើតឡើងខ្លះ ហើយកើតឡើងនៅពេលណា កន្លែងណា គេត្រូវសិក្សា “ កាលអាកាសនៃរឿង” ដែលមានដំណើរប្រព្រឹត្តទៅតាំងពីដើមដល់ចប់ ។

- ចូរអ្នកអាននិងសិក្សាដំណើររឿងនៃរឿងខាងក្រោម ៖

## បុរស៣នាក់ឈ្លោះដណ្ដើមដំណេកគ្នា

កាលរាត្រីមួយ មានបុរសបីនាក់ បានធ្វើដំណើរជាមួយគ្នាតាមផ្លូវកណ្ដាលព្រៃ ។ លុះដល់ពេលយប់ ក៏នាំគ្នាឈប់សម្រាកនៅកណ្ដាលព្រៃ ហើយមានវិវាទជជែកប្រកែកដណ្ដើមដំណេកគ្នា ដោយចង់ដេកកណ្ដាលតែរៀងខ្លួន ។ បុរសទាំងបីនោះរវល់តែប្រកែកជជែកគ្នាទៅវិញទៅមកក៏ខានដេកពេញមួយយប់នោះ ។ លុះព្រឹកឡើង ម្នាក់ៗទៅរកចៅក្រមដើម្បីប្ដឹងដោយដំណើរទីទៃ ។ ចៅក្រមពិចារណាក្ដីនេះពុំដាច់ស្រេចក៏នាំបុរសទាំងបីនាក់ទៅក្រាបបង្គំទូលព្រះមហាក្សត្រដោយដំណើរនោះ ។ ព្រះអង្គទ្រង់ព្រះសណ្ដាប់ហើយ ទ្រង់ព្រះតម្រិះដោយព្រះប្រាជ្ញាឈ្វេងយល់ក្នុងព្រះវិចារណញ្ញាណ ហើយទ្រង់ត្រាស់បង្គាប់ថា “ ចូរព្រះស្ដែងទាំងបីនាក់ដេកយកក្បាលឈមជុំចូលរកគ្នា នេះឯងហៅថាដេកកណ្ដាលគ្រប់គ្នាហោង” ។

បុរសទាំងបីនាក់ទទួលព្រះបន្ទូលនោះហើយ ក៏ក្រាបបង្គំលាព្រះមហាក្សត្រទៅលំនៅរៀងខ្លួន ។

*(ដកស្រង់ និងកែសម្រួលពីសៀវភៅប្រជុំរឿងព្រេងខ្មែរភាគ៣ទំព័រទី១៤)*

តាមដំណើររឿងខាងលើនេះ យើងឃើញថាកាលអាកាសនៃរឿងបុរស៣នាក់ឈ្លោះដណ្ដើមដំណេកគ្នាមាន ៖

- កាល ៖ កាលរាត្រីមួយ លុះព្រឹកឡើង នៅតាមផ្លូវកណ្ដាលព្រៃ
- អាកាស ៖ ទីកន្លែងនៃរឿងដែលកើតឡើងគឺកន្លែងដែលពួកគេដណ្ដើមដំណេកយកតែកណ្ដាលរៀងខ្លួននិងនៅព្រះបរមរាជវាំង ។



*កាលអាកាស ពេលវេលា ទីកន្លែងដែលដំណើររឿងប្រព្រឹត្តទៅ ។*

កាល អាចបង្ហាញពេលវេលាក្នុងអតីតកាល បច្ចុប្បន្នកាល អនាគតកាល ពេលថ្ងៃ ពេលយប់ ឬរដូវកាលណាមួយ ។ល ។

អាកាស ជាកន្លែងដែលរឿងកើតឡើង ។ អាកាសអាចជាកន្លែងដែលអ្នកនិពន្ធប្រឌិតឡើង ដូចជាឋានសួគ៌ ឋាននរក ឋានត្រៃត្រិង្ស ឬពិភពណាមួយ ។ ជួនកាល កន្លែងនោះមានពិតប្រាកដផងដែរ ។

## លំហាត់

- ចូរអានរឿងខាងក្រោម រួចរកកាលអាកាសនៃរឿង ៖

## បុរស៤នាក់រៀនសិល្បសាស្ត្រ

កាលពីដើម មានបុរសបួននាក់ទៅស្វែងរករៀនសិល្បសាស្ត្រនៅឯតក្កសិលាមហានគរ ។ ម្នាក់រៀនធ្វើឱ្យកើតជារូបមនុស្ស ម្នាក់រៀនធ្វើឱ្យមានអវយវៈ ម្នាក់រៀនធ្វើឱ្យមានសាច់ឈាមពណ៌សម្បុរ ហើយម្នាក់ទៀតរៀនធ្វើឱ្យមានជីវិត ចេះនិយាយស្តី ។

លុះរៀនបានចេះសព្វគ្រប់ហើយ ក៏លាគ្រូអាចារ្យត្រឡប់មកស្រុកខ្លួនវិញ ។ កាលមកដល់ពាក់កណ្តាលផ្លូវ ក៏ឈប់សម្រាកនាទីមួយកន្លែងក្នុងព្រៃ ។ ទីនោះមានខ្លាកាចសាហាវជាច្រើន ពួកគេដេកមិនលក់សោះ ។ បុរសទាំងបួននាក់នោះគិតគ្នាថា " គួរតែយើងយកឈើមកធ្វើជារូបមនុស្សស្ត្រីម្នាក់ឱ្យដេកកំដរយើង " ។ លុះគិតព្រមព្រៀងគ្នាហើយ បុរសម្នាក់យកឈើមកធ្វើជារូបរាងខ្លួនប្រាណ ។ បុរសម្នាក់ឆ្លាក់រចនាសម្រេចជារូបអង្គឱ្យល្អល្អះត្រចះត្រចង់សព្វសព៌ាង្គកាយ មានទាំងកេរ្តិ៍ខ្មាសផង ។ បុរសម្នាក់សូត្រសែកមន្តឧបទេសបន្ទន់សាច់ឱ្យមានពណ៌សម្បុរល្អិតល្អ ព្រមទាំងឱ្យមានសម្លៀកបំពាក់ដណ្តប់ស្បៃ វិស័យជាមនុស្សពិតៗ ។ បុរសម្នាក់សូត្រសែកមន្តវិសេសឧបទេស ជបឱ្យរស់ជាមនុស្សចេះនិយាយស្តី ។

កាលបើ បង្កើតបានជារូបមនុស្សស្ត្រីស្រេចហើយ បុរសទាំងបួននាក់ ក៏ដណ្តើមគ្នាយកស្ត្រីនោះធ្វើជាភរិយាតែរៀងខ្លួន ។ ដោយប្រកែកជជែកគ្នាទៅវិញទៅមក គ្មានអ្នកណាជំនុំជម្រះឱ្យសោះ ទើបនាំគ្នាទៅរកចៅក្រមប្តឹងតាមដំណើរទីទៃៗ ។ ឯចៅក្រមជំនុំជម្រះឱ្យដោយនូវគន្លងធម៌ពុំបាន ក៏នាំបុរសទាំងបួននាក់នោះទៅក្រាបទូលព្រះមហាក្សត្រតាមដំណើរគ្រប់ប្រការ ។ បុរសទាំងបួននាក់ក្រាបទូលសួរថា " សូមទ្រង់ព្រះមេត្តាប្រោស បើសេចក្តីដូច្នេះ តើស្ត្រីនេះគួរបានជាប្រពន្ធអ្នកណា ? " ។

ព្រះមហាក្សត្រទ្រង់ពិចារណា ឈ្វេងយល់ស្រេចហើយ ទ្រង់មានព្រះបន្ទូលថា " បុរសដែលយកឈើមកធ្វើជារូបរាងសាងឡើងជាអង្គនោះត្រូវបានជាម្តាយ បុរសដែលឆ្លាក់សម្រេចរូបអង្គផ្ចិតផ្ចង់គ្រប់ប្រការ ឱ្យល្អល្អះ សព្វសព៌ាង្គមានទាំងគ្រឿងខ្នាសផងនោះត្រូវបានជាប្តី ។ បុរសដែលសូត្រសែកមន្តឧបទេសបន្ទន់សាច់សម្បុរស្បែកឱ្យល្អិតល្អ ឱ្យមានសម្លៀកបំពាក់ដណ្តប់ស្បៃវិស័យមនុស្សពិតនោះ ត្រូវបានជាបង ឯបុរសដែលសូត្រសែកមន្តវិសេសឧបទេសជបឱ្យរស់ជាមនុស្សមានវិញ្ញាណចេះនិយាយ ចេះស្តីនោះ ត្រូវបានជាឪពុក" ។

ព្រះមហាក្សត្រទ្រង់កាត់ក្តីដូច្នេះ ហៅសុគតិគមនំហោង ។

*(ដកស្រង់ និងកែសម្រួលពីសៀវភៅប្រជុំរឿងព្រេងខ្មែរភាគ៣ ទំព័រ៦-៧)*



# រឿង កុំត្រាប់តាមបង



កាលពីដើម សេដ្ឋីម្នាក់មានកូនប្រុសពីរនាក់ ។ កូនបងឈ្មោះ ធឿន កូនប្អូនឈ្មោះ ពេជ ។ លុះពួកគេធំពេញវ័យរៀងៗខ្លួន ឪពុកក៏ស្លាប់ចោលទៅ ។ ធឿន និងពេជ បានទទួលកេរមត៌កស្មើគ្នា ។

ពេជមានឫកពាសុភាពរាបសា រៀនក៏ពូកែជាងធឿន ។ គាត់បានប្រលងជាប់ធ្វើជាគ្រូបង្រៀន ។ ពេជត្រូវក្រសួងចាត់តាំងឱ្យបម្រើការងារនៅសាលាបឋមសិក្សាមួយក្នុងរដ្ឋធានី ។

លោកគ្រូពេជ ខំយកចិត្តទុកដាក់នឹងកិច្ចការរបស់ខ្លួនណាស់ ។ គាត់ស្គាល់ភារកិច្ចច្បាស់លាស់របស់ខ្លួន ហើយខំបំពេញជូនជាតិយ៉ាងរីករាយ ។ សិស្សានុសិស្សទាំងអស់គោរព និងស្រលាញ់រាប់អានលោកគ្រូពេជគ្រប់ៗគ្នា ។

ចំណែកធឿន រៀនក៏ពុំបានវែងឆ្ងាយ ហើយពុំដែលគិតគួរធ្វើការងារ ព្រោះសំអាងលើទ្រព្យសម្បត្តិខ្លួន ។ គាត់តែងដើរលេង ស៊ីចាយផ្តេសផ្តាសជាមួយមិត្តភក្តិ ។

ល្ងាចថ្ងៃមួយ លោកគ្រូពេជបានទៅលេងផ្ទះបង ។ ធឿនកំពុងស៊ីផឹកយ៉ាងសប្បាយជាមួយនឹងមិត្តជាច្រើននាក់ ។ ទឹកមុខធឿនឡើងក្រហម ហើយធុំក្លិនសុរាភាយៗ ។ ពេជតឹងទ្រូងណាស់ ទ្រាំចាំភ្ញៀវទៅអស់ ទើបដាច់ចិត្តនិយាយនឹងបងប្រុសថា ៖

- បង! ខ្ញុំចង់និយាយកិច្ចការខ្លះជាមួយបង!
- ការស្អី? និយាយទៅ ឯងចាំបាច់សុំច្បាប់អញអី! (ធឿនឆ្លើយទាំងងុល) ។
- បង! លាក់បាំងអី អាកប្បកិរិយាបងសព្វថ្ងៃពុំគប្បីសោះ (ពេជចាប់និយាយ) ។
- ស្អី អាពេជ! ឯងចង់ថាម៉េច? ឯងចង់ប្រដៅអញឬ?
- បងចង់ថា ប្អូនប្រដៅក៏បាន! ខ្ញុំជាប្អូនគ្មានសិទ្ធិនឹងប្រដៅបងទេ តែបើឃើញបងប្រព្រឹត្តខុស ប្អូនគ្រាន់តែជួយរំលឹកបងប៉ុននោះ ។
- តើអញធ្វើអ្វីខុសរាល់ថ្ងៃនេះ? អញអត់រុកកួនលុយកាក់ ឬសុំស៊ីឯងទេ អញទៅលួចប្លន់ ធ្វើបាបអ្នកណាក៏គ្មាន!(ធឿនឆ្លើយ) ។
- ត្រូវហើយបង! ទ្រព្យសម្បត្តិឪពុកយើងច្រើនណាស់ មិនទាន់ធ្វើឱ្យបងដើរសុំទានគេ ឬទៅលួចប្លន់គេទេ ។ ក៏ប៉ុន្តែខ្ញុំជឿថា បើបងនៅតែប្រព្រឹត្តយ៉ាងនេះតទៅទៀត កេរ្តិ៍ឈ្មោះឪពុកយើងនិងធនធានបងច្បាស់ជារលាយពិតប្រាកដ ។ ម្យ៉ាងទៀត អ្នកប្រព្រឹត្តបែបនេះគឺខុសនឹងមាគ៌ាផង ។ សព្វថ្ងៃនេះ ទាំងអ្នកក្រុង អ្នកស្រែគ្រប់គ្នា គេខំបង្កបង្កើនផលនិងបម្រើជាតិតាមក្រសួងនានាយ៉ាងសស្រោកសស្រាំ គេពុំមានពេលទំនេរផឹកស៊ីរាំវែក ហ៊ោកញ្ជ្រៀវដូចបងយ៉ាងនេះទេ ។
- អាពេជ! ឈប់និយាយ អញស្តាប់មិនចូលទេ! (ធឿនស្រែកយកដៃខ្ទប់ត្រចៀក) ។
- បង! ខ្ញុំនិយាយភាសាធម្មតាទេ តើហេតុអ្វីក៏បងស្តាប់ខ្ញុំមិនបាន? ខ្ញុំគ្រាន់ចង់សាកចិត្តឱ្យបងឈប់សេពគប់នឹងមិត្តភក្តិរបៀបនេះតទៅទៀតទៅ ។ គេកំពុងនាំបងទៅរកគ្រោះថ្នាក់ដោយពុំដឹងខ្លួន ។ បងមានប្រាក់ច្រើន គេបញ្ឆោរបង គេនាំបងឱ្យភ្លើតភ្លើនផ្តេសផ្តាស...បាត់បង់សេចក្តីថ្លៃថ្នូរ ។
- ឈប់និយាយអាពេជ! គ្មាននរណាមកដឹកនាំអញបានទេ! (ធឿនឆ្លើយកាត់) ។

- ខ្ញុំនៅតែនិយាយ ទោះបីបងមិនចង់ស្តាប់យ៉ាងណាក៏ដោយ ព្រោះបងកំពុងតែមានឈ្មោះមិនល្អសោះ ។ កាលណាខ្ញុំធ្វើមិនដឹងមិនឮទៅ ហាក់ដូចជាខ្ញុំមិនមែនជាសាច់ឈាមរបស់បង(ពេជពន្យល់បងមួយៗ) ។
- អញថាឱ្យឈប់និយាយអាពេជ! ស្តាប់បានឬទេ? ហើយឯង និងអញអស់ជាបងប្អូននឹងគ្នាទៀតហើយ! (ធឿនស្រែក) ។
- បងកាត់កាល់ខ្ញុំ តែខ្ញុំមិនហ៊ានទេ ។ យើងមានតែពីរនាក់បងប្អូន មិនគួរនិយាយស្តាប់គ្នាពុំបានសោះ! ស្តាយណាស់ មានបងប្រុសមួយមិនច្រឡំនឹងគេ! ។
- យី! អាពេជ ហ៊ានប្រមាថអញដល់ម្លឹងផង! ចុះចេញពីផ្ទះអញឱ្យឆាប់ បើមិនចង់ឈឺខ្លួន ហើយឈប់មកជាន់ផ្ទះអញទៀតឮឬទេ?(ធឿនគំរាមប្អូន) ។
- មិនអីទេបង! បើបងអាចកាត់សាច់ឈាមបងដាច់ បងកាត់ទៅចុះ ។ ផ្ទុយទៅវិញខ្ញុំនៅតែទុកបងជាបងប្រុសខ្ញុំជានិច្ច ។ ខ្ញុំនឹងមករកបងភ្លាម បើបងត្រូវការ ខ្ញុំលាហើយបង!

ពោលរួច ពេជក៏ចុះបាត់ទៅ ។ មួយអាទិត្យក្រោយមក ដោយការភ្លេចខ្លួនកាន់តែខ្លាំង ធឿនត្រូវក្រសួងមានសមត្ថកិច្ចចាប់ នាំខ្លួនទៅដាក់ក្នុងមន្ទីរឃុំឃាំង ។

នៅទីនោះ ពុំមាននរណាម្នាក់អើតមុខទៅសួរធឿនទេ មានតែលោកគ្រូពេជម្នាក់គត់ដែលដើរតម្រង់ទៅរកបង ហើយនិយាយដោយទឹកភ្នែករលីងរលោងថា ៖

- ឃើញទេបង! បងមិនជឿខ្ញុំ ។ អំពើអបាយមុខនាំមកនូវគ្រោះថ្នាក់យ៉ាងណាខ្លះ? ខ្ញុំអាណិតបងណាស់ តែបងពុំស្តាប់ប្អូនសោះ ។
- ពេជប្អូនប្រុសសម្លាញ់បង! បងខុសហើយ ។ ទើបតែពេលនេះ ម៉ោងនេះ នៅក្នុងទីរបៀបនេះ ដែលបងភ្ញាក់ខ្លួនថា ប្អូននិយាយទាំងប៉ុន្មានត្រូវទាំងអស់ ។ បងខ្មាសប្អូនណាស់...(ធឿនឱនមុខចុះ សម្រក់ទឹកភ្នែក) ។
- មិនអីទេបង! បើបងភ្ញាក់ខ្លួនហើយ និងដឹងកំហុសបងយ៉ាងនេះ បងអាចក្លាយទៅជាមនុស្សត្រឹមត្រូវមួយរូបដែលជាតិត្រូវការ ។ សូមបងកុំអស់សង្ឃឹម! ទោសបង

ពុំមែនជាទោសក្បត់ជាតិទេ គឺគេឆ្លើយដាក់ ដោយបងសេពគប់ខុស ចាំប្អូនជួយដោះស្រាយឱ្យ ។

ធឿនលូកដៃមកចាប់ឱបប្អូន វន្ធត់នឹងសម្តីដ៏ពីរោះរបស់ប្អូន ។ គាត់សម្រក់ទឹកភ្នែកកាន់តែខ្លាំង ហើយពោលថា ៖

- បងខុសហើយពេជ! ប្អូនល្អណាស់ នៅតែមករាប់រកបងជានិច្ច ទោះបីក្នុងទីថោកទាបយ៉ាងនេះក្តី ។ សុំប្អូនខំកសាងខ្លួនឱ្យកាន់តែល្អតទៅទៀត ហើយកុំធ្វើតាមបងឱ្យសោះ ។

មួយអាទិត្យក្រោយមក ក្រសួងមានសមត្ថកិច្ចបានដោះលែងធឿនឱ្យរួចខ្លួន ដោយសារសមត្ថកិច្ចខំស៊ើបអង្កេតរកខុសត្រូវនិងការធានាការពាររបស់ពេជឱ្យបងប្រុស ។

ក្រោយមក ធឿនស្ម័គ្រចិត្តធ្វើជាកម្មករបម្រើក្នុងរោងចក្រមួយ ។ តាំងពីនោះមក ធឿនបានកែខ្លួនត្រឹមត្រូវឡើងវិញតាមគំនិតរបស់ប្អូន ។

ទាំងពីរនាក់បងប្អូនសម្រេចចិត្តមករស់នៅជាមួយគ្នាវិញ ក្រោមដំបូលតែមួយរបស់ឪពុកម្តាយយ៉ាងសុខសាន្តរហូតមក ។

ការស្គាល់និងចេះកែកំហុស អាចជៀសផុតពីគ្រោះថ្នាក់ ។

*(ដកស្រង់ និងកែសម្រួលចេញពីរឿងនិទាន ក្រសួងអប់រំ និងសិក្សាធិការជាតិ ឆ្នាំ១៩៨០ ទំព័រទី៩០-៩៨)*

## សំណួរ

១. តើរឿងនេះនិយាយពីអ្វី?

២. តើការប្រព្រឹត្តរបស់ធឿនមានភាពថ្លៃថ្នូរដែរឬទេ? ព្រោះអ្វី?

៣. តើនរណាជាតួអង្គឯក និងតួអង្គរងនៅក្នុងរឿង?

៤. ចូររកកាលអាកាសនៃរឿង ។

៥. តើធឿនជាមនុស្សដូចម្តេច? តើអ្នកគួរធ្វើត្រាប់តាមធឿនដែរឬទេ? ព្រោះអ្វី?

៦. តើរឿងនេះមានតម្លៃអប់រំដូចម្តេច?ចូរស្រង់នាមការក៏ ដែលមានក្នុងរឿង ។

៧. ចូរស្រង់នាមការក៏ ដែលមានក្នុងរឿង ។



# រឿង ព្រះរាជកុមារ៤អង្គត្រូវជ្រើសយកមួយអង្គសោយរាជ្យ



មាននិទានមួយថា មានព្រះរាជកុមារបួនអង្គចេញទៅរករៀនសិល្បសាស្ត្រឯក្រុងតក្កសិលាមហានគរ ។ លុះរៀនសិល្ប៍ចប់សព្វគ្រប់ហើយ ត្រឡប់វិលវឹងមកឈប់សម្រាន្តក្នុងឧទ្យានមួយ ។ កាលនោះ មានព្រះមហាក្សត្រនគរដទៃមួយសោយព្រះទិវង្គត ហើយឥតអ្នកណានឹងធ្វើជាស្ដេចសោយរាជ្យស្នងព្រះមហាក្សត្រនោះ ទើបព្រាហ្មណ៍អ្នកប្រាជ្ញ រាជបុរោហិត មុខមន្ត្រី សេនាបតី កវីបណ្ឌិត ព្រឹទ្ធាមាត្រ ទឹមបុស្សរថអធិដ្ឋានផ្សងរកអ្នកមានបុណ្យ ដើម្បីទទួលយកមកឱ្យសោយរាជ្យសម្បត្តិគ្រប់គ្រងព្រះនគរនោះ ។ កាលផ្សងទៅ បុស្សរថនោះពុំទៅរំលងឧទ្យាននោះឡើយ ។ ពួកបុរោហិតចូលទៅមើលយល់រាជបុត្រទាំងបួនព្រះអង្គគង់នៅទីនោះ ក៏យកទឹកស្រង់ទាំងបួនព្រះអង្គហើយ អញ្ជើញចេញមក ទើបព្រាហ្មណ៍អ្នកប្រាជ្ញរាជបុរោហិត និងមុខមន្ត្រីសេនាបតីកវីបណ្ឌិតព្រឹទ្ធាមាត្យទាំងនេះពិចារណាគ្នាថា “ រាជកុមារទាំងបួនព្រះអង្គនេះ យើងនឹងយកព្រះអង្គណាជាអម្ចាស់យើង” ។ ព្រាហ្មណ៍ អ្នកប្រាជ្ញបុរោហិតអម្បាលនោះ គិតធ្វើជាប្រស្នាពិសោធរាជកុមារទាំងបួនថា រាជកុមារឯណាមានបុណ្យប្រកបដោយលក្ខណៈត្រូវបានជាស្ដេច ។ គិតដូច្នេះហើយព្រាហ្មណ៍ អ្នកប្រាជ្ញទាំងនោះក្រាបបង្គំទូល

ថា" បពិត្រព្រះរាជកុមារទាំងបួនព្រះអង្គ! យើងខ្ញុំនឹងនិទានរឿងមួយថ្វាយព្រះអង្គសូមព្រះអង្គទ្រង់ព្រះសណ្ដាប់ " ហើយព្រាហ្មណ៍និទានថា " មាននគរមួយមានរាជធីតាបួនព្រះអង្គនាងទី១មានរូបឆោមល្អប្រពៃ នាងទី២ចេះវត្តប្រតិបត្តិ ហើយចេះប្រដាប់ភោជនាហារដ៏មានរសឆ្ងាញ់ពិសា នាងទី៣ចេះផ្គត់ផ្គង់សារពើទ្រព្យផងរក្សាទុកមិនឱ្យខ្ចាត់ខ្ចាយ នាងទី៤ចេះប្រដៅខ្ញុំកំដរផង ចេះចាយទ្រព្យឱ្យទានសមណៈព្រាហ្មណ៍និងស្មូមយាចកផង ។ បើនាងទាំងបួនសុទ្ធតែប្រកបដោយលក្ខណៈទីទៃៗដូច្នេះ តើព្រះអង្គទាំងបួន សព្វព្រះរាជហឫទ័យនឹងយកនាងណាជាព្រះរាជទេពីនៃព្រះអង្គ ?" ។ ព្រះរាជកុមារទី១មានព្រះបន្ទូលថា" នាងដែលមានរូបល្អនោះគួរជារាជទេពី " ។ ព្រះរាជកុមារទី២ថា " នាងដែលមានវត្តប្រតិបត្តិចេះប្រដាប់ភោជនាហារដ៏មានរសឆ្ងាញ់ពិសានោះគួរជារាជទេពី " ។ រាជកុមារទី៣ថា" នាងដែលចេះផ្គត់ផ្គង់សារពើទ្រព្យរក្សាទុកមិនឱ្យខ្ចាត់ខ្ចាយនោះគួរជារាជទេពី " ។ ព្រះរាជកុមារទី៤ថា" នាងដែលចេះប្រដៅខ្ញុំកំដរផង ចេះចំណាយទ្រព្យផ្គត់ផ្គង់សមណៈព្រាហ្មណ៍ភណាចារ្យ និងឱ្យទានស្មូមយាចកផងនោះគួរបានជារាជទេពី" ។ ទើបអស់ព្រាហ្មណ៍ អ្នកប្រាជ្ញ រាជបុរោហិតនូវមុខមន្ត្រីសេនាបតីកវីបណ្ឌិតព្រឹទ្ធាមាត្យទាំងនោះ ទទួលយកព្រះរាជកុមារអង្គក្រោយ ដែលសព្វព្រះរាជហឫទ័យចំពោះនាងដែលចេះបង្គាប់បញ្ជាប្រដៅខ្ញុំកំដរផង ចេះរក្សាទ្រព្យផ្គត់ផ្គង់សមណៈព្រាហ្មណ៍ និងឱ្យទានស្មូមយាចកផងនោះឯង អភិសេកឡើងជាស្ដេច សម្រេចដោយនូវប្រការអម្បាលនេះហោង ។

*(ដកស្រង់ និងកែសម្រួលពីសៀវភៅរឿងព្រេងខ្មែរភាគទី៣ ទំព័រទី៣៩-៤០)*

## សំណួរ

១. តើរឿងនេះនិយាយពីអ្វី?

២. តើគេជ្រើសរើសរាជកុមារមួយអង្គក្នុងចំណោមរាជកុមារទាំង៤ ឱ្យឡើងសោយរាជ្យយ៉ាងដូចម្ដេច?

៣. ហេតុអ្វីបានជាពួកព្រាហ្មណ៍ អ្នកប្រាជ្ញ បុរោហិតសម្រេចចិត្តយកព្រះរាជកុមារអង្គក្រោយជាអ្នកសោយរាជ្យ?

៤. ចូរស្រង់រាជសព្ទ ដែលមានប្រើក្នុងអត្ថបទរឿងនេះឱ្យបានត្រឹមត្រូវ ។

៥. តើនរណាជាតួអង្គឯក និងតួអង្គរងក្នុងរឿង?

៦. តើរឿងនេះមានតម្លៃអប់រំដូចម្ដេច?



## រឿង ស្ដេចព្រហ្មទត្តនិងស្ដេចស្រមោចខ្មៅ



អ្នកធ្លាប់បានសិក្សារួចមកហើយអំពីសេចក្ដីលម្អិតសំខាន់និងតម្លៃអប់រំនៃរឿង ។

នៅពេលអ្នកស្ដាប់រឿង ស្ដេចព្រហ្មទត្តនិងស្រមោចខ្មៅ ចូរអ្នកកត់ចំណាំសេចក្ដីលម្អិតសំខាន់ៗនៃរឿង ដើម្បីងាយយល់ន័យនៃគំនិតសំខាន់នោះ ហើយចេះវាយតម្លៃ ឬផ្ដល់តម្លៃអប់រំ ដែលមាននៅក្នុងរឿង ហើយឆ្លើយនឹងសំណួរផ្សេងៗ ខាងក្រោម៖

### សំណួរ

១. តើរឿងនេះនិយាយអំពីអ្វី?

២. ហេតុអ្វីបានជាស្ដេចព្រហ្មទត្តមិនចង់រាប់អានស្ដេចស្រមោចខ្មៅ?

៣. តើអ្នកយល់ដូចម្តេច ចំពោះសមត្ថភាពរបស់ស្តេចស្រមោចខ្មៅ?

៤. តើការរើសអើងមិត្ត ដោយការសម្លឹងសម្បកក្រៅជាការត្រឹមត្រូវដែរឬទេ? ព្រោះអ្វី?

៥. តើអ្នកយល់ថា ស្តេចស្រមោចខ្មៅជាសត្វតូចតាចថោកទាបដែរឬយ៉ាងណា? តើរឿងនេះមានគំនិត ឬតម្លៃអប់រំដូចម្តេច?



## ការសម្តែងតួដោយប្រើសង្ឃសព្ទ

អ្នកដឹងហើយថាក្នុងការនិយាយប្រាស្រ័យទាក់ទងគ្នានៅក្នុងសង្គម គេប្រើភាសា ។ ភាសាជាមធ្យោបាយទំនាក់ទំនងពីមនុស្សម្នាក់ទៅមនុស្សម្នាក់ពីជាតិសាសន៍មួយទៅជាតិសាសន៍មួយពីប្រទេសមួយទៅប្រទេសមួយទៀត ។

ប៉ុន្តែ ការប្រើប្រាស់ភាសា ពាក្យពេចន៍ ក៏អាស្រ័យតាមឋានៈ តួនាទី ឬស្ថានភាពសង្គមផងដែរ ។ នៅក្នុងសង្គមខ្មែរយើង មានការប្រើប្រាស់ភាសា ឬពាក្យពេចន៍ច្រើនប្រភេទដូចជាពាក្យប្រើសម្រាប់ព្រះសង្ឃ គ្រហស្ថ ឬប្រជារាស្ត្រទូទៅ និងព្រះរាជាជាដើម ។

ក្នុងមេរៀននេះ អ្នកនឹងសិក្សាការសម្តែងនិងការនិយាយដោយការប្រើសង្ឃសព្ទ ។

តើអ្វីទៅជាសង្ឃសព្ទ ?

សង្ឃសព្ទ គឺជាសព្ទ ឬពាក្យដែលប្រើជាមួយព្រះសង្ឃ ។

- ចូរអ្នកអាន និងសង្កេតការសន្ទនាខាងក្រោម ៖

ដូនចាស់ ៖ ខ្ញុំព្រះករុណាសូមក្រាបថ្វាយបង្គំព្រះតេជព្រះគុណ ។

ព្រះសង្ឃ ៖ ចម្រើនពរ ។ តើញោមអញ្ជើញមកមានការអ្វី ?

ដូនចាស់ ៖ ខ្ញុំព្រះករុណាមានបំណងចង់សូមនិមន្តព្រះតេជគុណទៅសូត្រមន្តនៅផ្ទះខ្ញុំព្រះករុណា ។

ព្រះសង្ឃ ៖ ចម្រើនពរ ។ តើញោមប្រារព្ធពិធីអ្វី ? នៅថ្ងៃណា ? ម៉ោងប៉ុន្មាន ?

ដូនចាស់ ៖ ខ្ញុំព្រះករុណានឹងប្រារព្ធពិធីឡើងផ្ទះ នៅថ្ងៃសុក្រសប្តាហ៍ក្រោយ ម៉ោង៣រសៀលព្រះតេជព្រះគុណ ។ តើព្រះអង្គអាចនិមន្តបានដែរឬទេ? សូមព្រះអង្គមេត្តាមានសង្ឃដីកា ។

ព្រះសង្ឃ ៖ មិនអីទេ! អាត្មាអាចទៅចូលរួមបាន ។ តើញោមនិមន្តព្រះសង្ឃប៉ុន្មានអង្គ ?

ដូនចាស់ ៖ ប្អូនអង្គព្រះតេជព្រះគុណ ។ ដូចនេះខ្ញុំព្រះករុណានឹងមកនិមន្តព្រះតេជគុណដោយផ្ទាល់នៅម៉ោងជិត ៣រសៀលសប្តាហ៍ក្រោយនេះ ។ ខ្ញុំព្រះករុណាសូមក្រាបថ្វាយបង្គំលាព្រះតេជព្រះគុណ និងសូមអរព្រះគុណ ។

ព្រះសង្ឃ ៖ ចម្រើនពរញោម ។ សូមទៅចុះឱ្យសុខសប្បាយ ។

## សំណួរ

១. តើការសន្ទនាខាងលើនេះប្រព្រឹត្តទៅនៅកន្លែងណា ?

២. តើការសន្ទនាខាងលើនេះនិយាយពីអ្វី ?

៣. តើការសន្ទនាខាងលើនេះមានប្រើប្រាស់សង្ឃសព្ទអ្វីខ្លះ ?

៤. ចូរអ្នកចាប់គូគ្នាពីរនាក់ រួចដើរតួសន្ទនាតាមគំរូសន្ទនាខាងលើឱ្យបានត្រឹមត្រូវ ។



# សំណេរអត្ថបទដោយប្រើរាជសព្ទ

អ្នកទើបបានសិក្សារួចអំពីសង្ឃសព្ទនិងរាជសព្ទ ។

ឥឡូវនេះ ចូរអ្នកសាកល្បងតែងអត្ថបទខ្លីមួយ ដោយប្រើរាជសព្ទ ។ អ្នកអាចជ្រើសរើសប្រធានបទណាមួយខាងក្រោម ដែលអ្នកពេញចិត្តៈ

- ប្រធានបទទី១

“ ព្រះមហាក្សត្រទ្រង់យាងសម្ពោធនិងសាកសួរសុខទុក្ខសិស្សានុសិស្សអំពីការសិក្សា ” ។

- ប្រធានបទទី២

“ ព្រះមហាក្សត្រយាងមកសាកសួរសុខទុក្ខប្រជាជន ក្នុងភូមិមួយដែលទទួលរងគ្រោះដោយគ្រោះធម្មជាតិទឹកជំនន់ ហើយព្រះអង្គទ្រង់សព្វព្រះហឫទ័យប្រទានព្រះរាជអំណោយមួយចំនួនដល់ប្រជាជនរងគ្រោះទាំងនោះផង” ។

ពេលអ្នកជ្រើសរើសប្រធានបទសរសេរណាមួយ ចូរអ្នកសរសេរតាមសេចក្តីណែនាំខាងក្រោមៈ

១. តើព្រះរាជាទ្រង់យាងចុះសួរសុខទុក្ខសិស្សានុសិស្ស ឬប្រជាជននៅសាលារៀនណាឬភូមិណា ? នៅពេលណា ?

២. តើសិស្សានុសិស្ស ឬប្រជាជននៅតាមសាលារៀន ឬភូមិទទួលបដិសណ្ឋារកិច្ចយ៉ាងដូចម្តេចខ្លះ ?

៣. តើសិស្សានុសិស្ស ឬប្រជាជនមានទឹកចិត្តដូចម្តេច ?

៤. តើព្រះរាជាមានព្រះឱង្ការអ្វីខ្លះទៅកាន់សិស្សានុសិស្ស ឬប្រជាជនទាំងអស់នៅក្នុងសាលារៀន ឬក្នុងភូមិ ?

៥. តើសិស្សានុសិស្ស ឬតំណាងប្រជាជនក្នុងភូមិបានឡើងសម្តែងទឹកចិត្តតបស្នងដូចម្តេចខ្លះទៅព្រះអង្គវិញ ?

៦. ចំពោះព្រះរាជដំណើរយាងមកសាលារៀន ឬភូមិ ដើម្បីសួរសុខទុក្ខនិងការប្រទានព្រះរាជអំណោយរបស់ព្រះមហាក្សត្រ តើសិស្សានុសិស្ស ឬប្រជាជនមានអារម្មណ៍ដូចម្តេច ?

៧. តើសិស្សានុសិស្ស ឬប្រជាជនបានធ្វើអ្វីខ្លះ ក្រោយការបញ្ចប់ព្រះរាជដំណើរយាងមក និងយាងនិវត្តន៍ទៅវិញរបស់ព្រះអង្គ ?

ក្រោយពីសរសេរចប់តាមសេចក្តីណែនាំខាងលើ សូមប្អូនពិនិត្យសំណេររបស់ប្អូនៗឡើងវិញដោយឆ្លើយសំណួរខាងក្រោម ៖

១. តើសំណេររបស់អ្នកមានការផ្តើមដោយផ្តោតលើគំនិតសំខាន់ទាក់ទងនឹងប្រធានបទហើយឬនៅ?

២. តើសំណេររបស់អ្នក តាមលំដាប់លំដោយគំនិត លំដាប់លំដោយខ្លឹមសារ និងតាមសេចក្តីណែនាំគ្រប់ចំណុចហើយឬនៅ ?

៣. តើសំណេររបស់អ្នកប្រើប្រាស់រាជសព្ទបានត្រឹមត្រូវដែរឬទេ ?

៤. តើសំណេររបស់អ្នកមានកំហុសអក្ខរាវិរុទ្ធដែរឬទេ ?

៥. តើសំណេររបស់អ្នកមានកំហុសឆ្គង ឬខ្វះចន្លោះក្នុងការប្រើប្រាស់វណ្ណយុត្តផ្សេងៗដូចជាសញ្ញាខណ្ឌ សញ្ញាដំពីរ សញ្ញាចុចពីរ. . . ដែរឬទេ ?




# ពលរដ្ឋល្អ



ការធ្វើខ្លួនឱ្យក្លាយទៅជាកូនល្អ សិស្សល្អ ជាដើមចមនាំឱ្យក្លាយជាពលរដ្ឋល្អក្នុងសង្គម ។ ពលរដ្ឋល្អផ្តើមចេញពីការស្គាល់កាតព្វកិច្ច និងករណីយកិច្ចរបស់ខ្លួន ដែលត្រូវបំពេញដូចជាការសិក្សារៀនសូត្រ ការយល់ដឹងពីសុជីវធម៌ ការចេះរក្សាសណ្តាប់ធ្នាប់សាធារណៈ ការគោរពច្បាប់ ឬជួយរក្សាអនាម័យ ការថែរក្សាបរិស្ថានជាដើម ។ ក្នុងមេរៀននេះ អ្នកនឹងបានសិក្សាអំពីកាតព្វកិច្ចមួយចំនួនរបស់ពលរដ្ឋ ។

**ជាពិសេស អ្នកនឹងបានសិក្សាផងដែរអំពី ៖**

- សេចក្តីលម្អិតសំខាន់ៗ ។
- កិរិយាសុទ្ធ កិរិយាហេតុ និងសញ្ញាជើងក្អែក ។
- របៀបសន្ទនាតាមទូរស័ព្ទ ។
- ការបំពេញព័ត៌មានផ្ទាល់ខ្លួន អត្តសញ្ញាណប័ណ្ណសិស្ស ពាក្យសុំចូលរៀន សៀវភៅតាមដានការសិក្សា និងសលាកបត្រព័ត៌មាន ។



# យុវជនកម្ពុជា



យុវជនទាំងអស់ ទាំងស្រីទាំងប្រុស ជាកម្លាំងយ៉ាងសំខាន់ក្នុងការរួមចំណែកកសាងជាតិ ។ យុវជនត្រូវមានការភ្ញាក់រលឹកជានិច្ច តាំងសតិអារម្មណ៍ឱ្យប្រសើរឧត្តុង្គឧត្តមមានការសន្តោស និងសេចក្ដីស្មោះត្រង់ ។ ការរក្សាសាមគ្គីភាព មិត្តភាព មិនប្រមាថមើលងាយអ្នកដទៃ មិនសេពគប់ជនពាល និងមិនប្រព្រឹត្តិល្បែងស៊ីសងពាលា ជាលក្ខណសម្បត្តិល្អរបស់យុវជនកម្ពុជា ។

នៅតាមជនបទស្រែចម្ការនិងនៅតាមរោងចក្រឧស្សាហកម្មនានា យុវកសិករ និងយុវកម្មករខិតខំបញ្ចេញសមត្ថភាពខ្លួនយ៉ាងអស់ពីចិត្តពីថ្លើម ។ គេរវៀសរវៃបំពេញភារកិច្ចដែលជាកាតព្វកិច្ចរបស់ខ្លួន មិនស្ទាក់ស្ទើរ ខិតខំបង្កើនផលិតផលគ្រប់យ៉ាងឱ្យសម្បូរហូរហៀរ ដើម្បីកសាងសេដ្ឋកិច្ចជាតិ ឱ្យរីកចម្រើនឆាប់រហ័សទាន់សម័យទំនើប ។

នៅតាមអគារសិក្សា យុវសិស្ស យុវនិស្សិត ខិតខំព្យាយាមរៀនសូត្រសព្វមុខវិជ្ជាដើម្បីបណ្ដុះគំនិតរបស់ខ្លួនឱ្យភ្លឺស្វាង ដើម្បីក្លាយជាអ្នកចេះដឹង ឬជាអ្នកប្រាជ្ញបណ្ឌិតយ៉ាងស្ទាត់ជំនាញក្នុងពេលអនាគត ។

បច្ចុប្បន្ននេះ យុវជនកម្ពុជាមានភារកិច្ចសំខាន់ណាស់ ក្នុងការរួមចំណែកអភិវឌ្ឍជាតិឱ្យរីកចម្រើន ។ យុវជនត្រូវរួបរួមគ្នា ទាំងកាយ វាចាចិត្ត ដើម្បីលើកស្ទួយអរិយធម៌ជាតិឱ្យរុងរឿង ព្រោះយុវជនជាសេចក្តីសង្ឃឹមរបស់មាតុភូមិ ។

យុវជនមិនត្រូវបណ្តែតបណ្តោយជីវិតដ៏មានតម្លៃរបស់ខ្លួន ដែលប្រៀបបាននឹងបុប្ផាកំពុងត្រូវទឹកសន្សើម រីកស្គុសស្គាយ ផ្សាយក្លិនពិដោរនោះឱ្យស្រពាប់ស្រពោនទៅវិញនោះឡើយ ។

ដោយសារតែកម្លាំងរួបរួមគ្នាដ៏រឹងមាំនៃយុវជនគ្រប់រូប ប្រទេសជាតិនឹងមានអរិយធម៌ខ្ពង់ខ្ពស់ស្ថិតស្ថេរចីរកាលយូរអង្វែង ។

## សំណួរ

១. តើយុវជនត្រូវមានការតាំងចិត្ត និងឥរិយាបថបែបណាខ្លះ?
២. តើយុវជនទាំងនេះត្រូវមានកាតព្វកិច្ចយ៉ាងណាខ្លះ?
៣. តើអ្នកនិពន្ធមានសេចក្តីសង្ឃឹមយ៉ាងដូចម្តេចខ្លះចំពោះយុវជនយើងនាពេលអនាគត?
៤. បច្ចុប្បន្ននេះតើយុវជនកម្ពុជាមានភារកិច្ចអ្វីខ្លះ?
៥. តើអ្នកត្រូវធ្វើដូចម្តេចខ្លះដែរ ដើម្បីឱ្យខ្លួនអ្នកក្លាយទៅជាពលរដ្ឋដ៏ល្អម្នាក់?
៦. តើអត្ថបទនេះអប់រំយើងពីអ្វីខ្លះ?



# សញ្ញាជើងក្អែក ( + )

ភាសាខ្មែរមានសញ្ញាសម្គាល់ជាច្រើន ដែលមានតួនាទីផ្សេងៗគ្នា ដើម្បីបំពេញតម្រូវការចាំបាច់ក្នុងសំណេរ ។ ឥឡូវនេះ អ្នកនឹងសិក្សាបន្ថែមទៀតពីសញ្ញាមួយដែលមានអត្ថប្រយោជន៍ជាច្រើនក្នុងសំណេររបស់អ្នក ។

- ចូរអ្នកសង្កេតឧទាហរណ៍ខាងក្រោមនេះ ៖

១. គេប្រើសញ្ញា (+) សម្រាប់សំណេរតភ្ជាប់រវាងព្យញ្ជនៈ ស្រៈ និងព្យញ្ជនៈប្រកប ៖

- ក +ា > កា ។ - ក +ង > កង ។ - ប + ុ +ក > បុក ។

២. គេប្រើសញ្ញា (+) សម្រាប់សំណេរតភ្ជាប់រវាងផ្នត់ដើម ឬពាក្យបន្ថែមដើមនិងពាក្យឫស ៖

- [ក-] + កាយ > កកាយ
- [កញ់-]+ ចាស់ > កញ្ចាស់
- ការ + សិក្សា > ការសិក្សា
- អ្នក + ស្រែ > អ្នកស្រែ
- ជន + បរទេស > ជនបរទេស
- សេចក្ដី + លំបាក > សេចក្ដីលំបាក

៣. គេប្រើសញ្ញា (+) សម្រាប់សំណេរតភ្ជាប់រវាងព្យាង្គនិងព្យាង្គ ៖

- ប្រវ័ញ្ច (ប្រវ៉ាញ់) កិ. (សំ. ប្រ + វញ្ច ; បា. ប + វញ្ច) បញ្ឆោត បោកប្រាស់ ឬឆបោក ប្រវ័ញ្ចយកទ្រព្យគេ ។
- ពេទ្យវិទ្យា ឬ -វិជ្ជា (ពែទ្យៈ វិត- ទ្យា ឬ -វិច. ជា) (សំ. វៃទ្យ + វិទ្យា ; បា. វេជ្ជ+ វិជ្ជា) វិជ្ជាពេទ្យ គឺចំណេះរបស់ពេទ្យ ឬចំណេះសម្រាប់ពួកពេទ្យសិក្សា ។

៤. គេប្រើសញ្ញា (+) សម្រាប់សំណេរជ្រៀតព្យាង្គ ឬពាក្យដែលសរសេររំលង ៖

　　　　　　　　　　　　　　　　　　　　　　សួយ
- ការរួបរួមគ្នាទាំងផ្លូវកាយទាំងវាចាចិត្ត ដើម្បីលើក+អរិយធម៌ជាតិឱ្យរុងរឿងជាភារកិច្ចរបស់យុវជន ។

　　　　　　　ដើរ
- មានសត្វភេពីរ មួយ+រកត្រីខាងទឹកជ្រៅ មួយទៀតដើរខាងទឹករាក់ ។

៥. គេប្រើសញ្ញា (+) សម្រាប់ទាញសំឡេងអក្សរឱ្យឡើងខ្ពស់ជាងប្រក្រតី ៖

- ឆ្លើយក៎ូក
- ន៎ុះហើយ
- អ៊ី្ហ៎?
- នុះន៎! ជាសមិទ្ធផលដែលពលរដ្ឋយើងបានកសាងឡើង ។

ឧទាហរណ៍ខាងលើនេះបានបង្ហាញថា សញ្ញាជើងក្អែកមាននាទីសំខាន់ក្នុងការសម្គាល់ការតភ្ជាប់ព្យញ្ជនៈ ស្រៈ ជ្រៀតព្យាង្គ ឬពាក្យឧទាន ។



*សញ្ញាជើងក្អែកមាននាទីសំខាន់ក្នុងការ*

- *តភ្ជាប់ព្យញ្ជនៈ ស្រៈ និងព្យញ្ជនៈប្រកប ។*
- *តភ្ជាប់ផ្នត់ដើម ឬពាក្យបន្ថែមដើម និងពាក្យឫស ។*
- *តភ្ជាប់ព្យាង្គ ឬពាក្យដែលសរសេររំលង ។*
- *ទាញសំឡេងអក្សរឱ្យឡើងខ្ពស់ជាងប្រក្រតី ។*

## លំហាត់

១. ចូរអ្នកសរសេរជ្រៀតព្យញ្ជនៈ ព្យាង្គ ឬពាក្យដែលគេភ្លេចសរសេរ (បទ ស្រុក ខ្លួនកាយ ផ្លូវ ជា) នៅក្នុងល្បះខាងក្រោម ៖

- នៅតាមជនស្រែចម្ការ និងនៅតាមរោងចក្រឧស្សាហកម្មនានា យុវកសិករ និងយុវកម្មករខិតខំបញ្ចេញសមត្ថភាពរបស់ខ្លួន យ៉ាងអស់ពីចិត្តពីថ្លើម ។

- ការរួបរួមគ្នាទាំងផ្លូវកាយ ទាំងវាចាចិត្ត ដើម្បីលើកអរិយធម៌ជាតិឱ្យរុងរឿង គឺជាភារកិច្ចរបស់យុវជន ។ យុវជន សេចក្តីសង្ឃឹមរបស់មាតុភូមិ ។

២. ចូរអ្នកពិនិត្យមើលពាក្យណាមួយខាងក្រោម ដែលត្រូវប្រើសញ្ញាជើងក្អែក(+)៖

- អូ! មែនហើយ យុវជនកម្ពុជាពិតជាធនធានមនុស្សដ៏សំខាន់ពិតប្រាកដ ។
- ពលរដ្ឋល្អជាពលរដ្ឋដែលស្គាល់កាតព្វកិច្ចខ្លួន!
- តើសុជាតិមានពេលអាចទៅចូលរួមក្នុងពិធីរុក្ខទិវានេះទេ ? ចាស!

៣. ចូរអ្នកប្រើសញ្ញាជើងក្អែក (+) ដើម្បីភ្ជាប់ពាក្យខាងក្រោមឱ្យបានត្រឹមត្រូវ ៖

- ពលទោ (ពល់-) ន. (បា. ពល ទោ) ទាហានថ្នាក់ក្រោមបង្អស់ ។
- ឱសានវាទ (-ន័ះវាត) ន. (បា. <ឱសាន វាទ) ពាក្យសម្តីក្រោយបង្អស់ ។
- គជសីហ៍ (គះជះសី) ន. (សំ. គជ សីហ ឬសិង្ហ; បា. គជ សីហ) ឈ្មោះសត្វមានរូបដូចសិង្ហ តែមានប្រមោយដូចដំរី មាននិយាយតែក្នុងរឿងផ្សេងៗ ពីបុរាណ ។
- ពលិការ ឬពលីការ (ពះ-) ន. (សំ. បា. ពលិ ការ) កិរិយាធ្វើនូវពលី, ការធ្វើពលី : តាំងពលិការ, ធ្វើពលិការ ។
- ពលបាលទោ ន. (បា. ពល បាល ទោ) ឋានន្តរនាយទាហានរងនៅក្នុងចន្លោះពលបាលត្រីនិងពលបាលឯក (ពលបាលថ្នាក់ទី២) ។
- [ក-] កាយ > កកាយ
- [ច-] ចឹក > ចចឹក
- [ត-] តូង > តតូង



# កិរិយាសុទ្ធនិងកិរិយាហេតុ

កិរិយាជាសម្ដីសំដៅសម្រាប់សម្ដែងអំពើ ។ កិរិយា មាន៤ បែបគឺ កិរិយាសុទ្ធ កិរិយាហេតុ កិរិយាសកម្ម និងកិរិយាអកម្ម ។ ឥឡូវនេះ យើងសិក្សាពីកិរិយាសុទ្ធនិងកិរិយាហេតុ ។ ដូចម្ដេចហៅថាកិរិយាសុទ្ធ? កិរិយាហេតុ?

- ចូរអានឧទាហរណ៍ខាងក្រោម ៖

ឧទាហរណ៍ទី១៖

ក. ខ្ញុំរៀន ភាសាខ្មែរ ។

ខ. ប្អូនប្រុស ខ្ញុំសិតសក់ ។

គ. វាឈរនៅមុខសាលារៀន ។

ឃ. សុធីជម្រះស្មៅជុំវិញផ្ទះ ។

ង. បុប្ផាដឹកដៃដូនចាស់ឆ្លងថ្នល់ ។

ឧទាហរណ៍ទី២៖

ក. អ្នកគ្រូបង្រៀន ភាសាខ្មែរ ។

ខ. សត្វចាបសសិតស្លាប ។

គ. គាត់បញ្ឈរសសរផ្ទះ ។

ឃ. ម្ដាយផ្ដេកកូនក្នុងអង្រឹង ។

ង. កម្មករបន្ស៊ីស្ពឺគ្រឿងចក្រ ។

ក្នុងឧទាហរណ៍ទី១៖ “ រៀន សិត ឈរ ជម្រះ ដឹក” សម្ដែងអំពើរបស់ប្រធាន “ ខ្ញុំ ប្អូនប្រុសខ្ញុំ វា សុធី បុប្ផា ” ដែលបានធ្វើនិងទទួលផលដោយខ្លួនឯងផ្ទាល់ ។

ក្នុងឧទាហរណ៍ទី២ ៖ បង្រៀន សសិត បញ្ឈរ ផ្ដេក បន្ស៊ី “ សម្ដែងអំពើរបស់ប្រធាន ” “ អ្នកគ្រូ សត្វចាប គាត់ ម្ដាយ កម្មករ ” ដែលធ្វើឡើងគ្រាន់តែជាហេតុ ដើមចមប៉ុណ្ណោះ ។

ដូច្នេះ អ្វីដែលហៅថា កិរិយាសុទ្ធ? កិរិយាហេតុ?



- *កិរិយាសុទ្ធជាកិរិយាសម្ដែងអំពើរបស់ប្រធាន ដែលធ្វើដោយខ្លួនឯងផ្ទាល់ ។*
- *កិរិយាហេតុ គឺជាកិរិយាសម្ដែងនូវអំពើរបស់ប្រធាន ដែលធ្វើឡើងគ្រាន់តែជាហេតុដើមចមប៉ុណ្ណោះ ។*

## លំហាត់

១. ចូរអ្នកជ្រើសរើសកិរិយាសុទ្ធនិងកិរិយាហេតុ ខាងក្រោមនេះ មកដាក់តាមក្រុមឱ្យបានត្រឹមត្រូវៈ ព្រុស ស្ទូង បង្ហើប ប្រយុទ្ធ បន្សាប ពន្សឹត ដុត ស្រុះស្រួល ។

២. ចូរអ្នកតែងល្បះដោយប្រើ ៖

ក. កិរិយាសុទ្ធ ៖ រលឹក សាយ សឹក ។

ខ. កិរិយាហេតុ ៖ ផ្សឹក ផ្ទុក រំលឹក ។

៣. ចូរស្រង់កិរិយាសុទ្ធ និងកិរិយាហេតុក្នុងអត្ថបទដកស្រង់ ខាងក្រោមនេះ ៖

[...] ឯក្បាលត្រី ដោយមានឆ្អឹងធំក៏ធ្ងន់ចុះ ខ្លាត្រីក៏ពោលៈ“ អះអា!ខាងនេះធ្ងន់ជាងត្រូវយកសាច់ចេញខ្លះទើបបាន” ។ ថាហើយក៏លូកយកក្បាលត្រីចេញពីអ៊ុយ ហើយខិនខាំស៊ីត្រង់សាច់អម ក ហើយដាក់ថ្លឹងទៀត ។ ថ្លឹងម្ដងនេះ ខាងក្បាលស្រាលបះឡើង ឯខាងកន្ទុយក៏ធ្ងន់ចុះ ។ ខ្លាត្រីក៏ពោលៈ “ អះអា! ខាងនេះចាស់ជាង ត្រូវយកសាច់ចេញខ្លះ” ។ ថាហើយក៏លូកយកកន្ទុយចេញពីអ៊ុយ ហើយខិនខាំស៊ីសាច់ខាងគល់កន្ទុយនោះ ហើយដាក់ថ្លឹងទៀត ។ លើកនេះ ថ្លឹងទៅខាងកន្ទុយស្រាលបះឡើង ខ្លាត្រីក៏លូកយកក្បាលមកខាំស៊ី ហើយដាក់ថ្លឹងតទៅទៀត ។ ខ្លាត្រីថ្លឹងត្រីក្លែងមិនឱ្យស្មើ ហើយម្ដងស៊ីខាងនេះ ម្ដងស៊ីខាងនោះ ទាល់តែអស់សាច់រេចនៅតែឆ្អឹងទាំងសងខាងទើបថ្លឹងឯក្រោយឱ្យស្មើបាន ហើយក៏ដាក់ចុះចាកត្រាជូ ហៅភេទាំងពីរៈ “ ចៅឯងទាំងពីរចូរមើលចុះយើងថ្លឹងចែកនេះត្រូវដោយយុត្តិធម៌ល្អហើយ តាមចិត្តចៅណាយកភាគខាងណាក៏មកយកទៅចុះ ភាគទាំងពីរនេះមិនលើសមិនខ្វះទេ ” ។ [...]



# រឿង គង់ហ៊ាន



កាលពីព្រេងនាយ មានមនុស្សម្នាក់ឈ្មោះ គង់ មានប្រពន្ធពីរនាក់ ម្នាក់ឈ្មោះ នាងអាំ ម្នាក់ទៀតឈ្មោះ នាងគំ ។ ថ្ងៃមួយ អ្នកគង់នាំប្រពន្ធទាំងពីរទៅសួរសុខទុក្ខបងប្អូននៅស្រុកឆ្ងាយ ។ តាមផ្លូវទៅស្រុកនោះ មានខ្លាសាហាវ ។ អ្នកគង់បណ្ដើរប្រពន្ធទាំងពីរនាក់ទៅដល់ព្រៃធំមួយជិតស្រុកគេ ។ ព្រៃនោះតែងមានខ្លាចេញមកខាំមនុស្ស ក្របី គោ ស៊ីតែរឿយៗ ។ លុះអ្នកគង់ទៅដល់កន្លែងនោះ ខ្លាក៏ស្ទុះដេញស្រែកសន្ធាប់ពីចម្ងាយមក ។ អ្នកគង់ភ័យណាស់រត់ចូលរូងឈើ រាកនោម ញ័រដៃញ័រជើង ។ នាងអាំនិងនាងគំព្រួតគ្នាវាយខ្លានោះស្លាប់ទៅ ។

ឯអ្នកគង់ឃើញប្រពន្ធវាយខ្លាស្លាប់ហើយ ក៏ស្ទុះម្នីម្នាចេញពីរូងឈើមក យកដំបងវាយខ្លាស្លាប់នោះថែមទៀត ។ ប្រពន្ធទាំងពីរបន្ទោសប្ដី៖ "ខ្លាគេវាយងាប់ហើយ ធ្វើជាមកវាយថែមទៀត ប្រុសអីកំសាកញីដូច្នេះ" ។ អ្នកគង់ជេរបំពានទៅប្រពន្ធ៖ " មិនដែលមានស្រីណាវាយខ្លាស្លាប់ទេ មានតែប្រុសបានហ៊ានវាយខ្លាទាល់តែស្លាប់" ហើយអ្នកគង់ក៏បោចវល្លិចងខ្លានោះនាំប្រពន្ធសែងចូលទៅក្នុងស្រុក ។ អស់អ្នកស្រុកឃើញអ្នកគង់សែងខ្លាមក គេបបួលគ្នាមក

ចោមរោមមើល ហើយគេសួរៈ“ អ្នកឯងធ្វើដូចម្ដេច ទើបបានខ្លានេះ ។ ខ្លានេះសាហាវណាស់ វាតែងតែខាំមនុស្សម្នា ក្របី គោស៊ីច្រើនណាស់” ។ ប្រពន្ធអ្នកគង់ក៏និយាយប្រាប់អ្នកស្រុកៈ “អ្នកគង់គាត់ឃើញខ្លាវាបោលមក គាត់រត់ចូលក្នុងរូងឈើ ខ្ញុំពីរនាក់ស្រីៗ ព្រួតគ្នាវាយខ្លាទាល់តែស្លាប់ ” ។ អ្នកគង់ឮប្រពន្ធនិយាយប្រាប់គេដូច្នោះក៏និយាយបង្គ្រប់ប្រពន្ធៈ“ មិនដែលមានស្រីឯណាខ្លាំងហ៊ានវាយខ្លាស្លាប់ទេ មានតែប្រុសទើបខ្លាំងពូកែហ៊ានវាយខ្លាស្លាប់បាន” ។ អ្នកគង់ក៏អួតប្រាប់អ្នកស្រុកៈ“ កាលដែលខ្លាវាស្ទុះមកនឹងខាំដូច្នេះ ខ្ញុំដាក់ស្នៀតគុណដូច្នេះបានជាវាយវាបាន” ។ អ្នកគង់ធ្វើជាលោតគុណវាយខ្លាឱ្យអ្នកស្រុកមើល ។ ឯអស់អ្នកស្រុកកោតខ្លាចអ្នកគង់តែរាល់គ្នា ហើយឱ្យឈ្មោះថា “គង់ហ៊ាន” ។ តាំងពីថ្ងៃនោះមក ឮល្បីឈ្មោះគង់ហ៊ានជាអ្នកពូកែចេះគុណ វាយខ្លាស្លាប់ រឿងនេះជ្រាបទៅដល់ស្ដេច ។ ស្ដេចទ្រង់ឱ្យយកគង់ហ៊ានទៅចិញ្ចឹមធ្វើជាសេនាសម្រាប់ច្បាំងសង្គ្រាម ។

លុះយូរបន្តិចទៅ ជួនជាមានសឹកគេលើកមកច្បាំងយកនគរ ។ ស្ដេចទ្រង់ប្រើគង់ហ៊ានឱ្យទៅច្បាំង ។ គង់ហ៊ានឮស្ដេចទ្រង់ប្រើឱ្យទៅជួយច្បាំងសឹកដូច្នោះ ភ័យណាស់ពុំដឹងគិតធ្វើដូចម្ដេចនឹងមិនទៅច្បាំងមិនបាន ព្រោះស្ដេចទ្រង់ប្រើហើយ ។ ម្យ៉ាងទៀត ខ្លួនបានទាំងល្បីឈ្មោះជាអ្នកខ្លាំងពូកែផង ។ គាត់ត្រឡប់មកផ្ទះវិញ ដេកសន្ធឹកសន្ធៃ អត់បាយ ។ ប្រពន្ធទាំងពីរនាក់ចូលទៅសួរៈ“ ម្ដេចបានជាអ្នកដេកអត់បាយដូច្នេះ តើមានហេតុភេទអ្វី ប្រការដូចម្ដេច ?” ។ គង់ហ៊ានប្រាប់ៈ“ត្បិតស្ដេចទ្រង់ប្រើឱ្យទៅច្បាំងសឹកឥឡូវនេះ ។ បងខ្លាចសឹកនោះណាស់មិនដឹងបើគិតដូចម្ដេចទេ” ។ ប្រពន្ធឆ្លើយឡើងៈ“អ្នកកុំព្រួយចិត្ត ធានាលើខ្ញុំទាំងអស់ ។ អ្នកក្រោកឡើងពិសាបាយឱ្យឆ្អែត ងូតទឹកឱ្យសប្បាយខ្លួនចុះ” ។ គង់ហ៊ានឮប្រពន្ធលួងលោមដូច្នោះ បានធូរក្នុងចិត្ត ក្រោកឡើងងូតទឹក ស៊ីបាយ រៀបគ្រឿងប្រដាប់នឹងទៅច្បាំង ។ លុះរៀបរួចហើយ ដល់ពេលល្អ ក៏ចូលទៅក្រាបបង្គំលាស្ដេចចេញទៅច្បាំង យកទាំងប្រពន្ធទៅផង ។ គង់ហ៊ានជិះខាងក្បាលដំរី ប្រពន្ធជិះខាងក្រោយ មានរេហ៍ពលហែហមអមមុខក្រោយជាក្បួនទ័ពត្រៀបត្រាពាសពេញ ។ លុះទៅជិតខ្មាំងសត្រូវ មើលឃើញច្បាស់ប្រាកដ គង់ហ៊ានភ័យណាស់ លេចអាចម៍លេចនោម ញ័រដៃជើងដូចគេអង្រួនក្បាលដំរី ។ ឯដំរីគិតស្មានថា គេអង្រួនឱ្យខ្លួនបោលចូលក៏ចេះតែបោលមុនរេហ៍ពលទាំងអស់គ្មាននរណាតាមទាន់ ។ ឯខ្មាំងសត្រូវឃើញគង់ហ៊ានបំបោលដំរីចូលដូច្នោះ គិតស្មានថាមេទ័ពនេះពូកែណាស់ ក៏បាក់ទ័ពចាញ់រត់យកតែព្រះអាយុដោយខ្លួនទៅ ។

គង់ហ៊ានឃើញខ្លាំងរត់អស់ក៏ធ្វើជាអួតក្អេងក្អាងឱ្យអស់នាម៉ឺន និងរេហ៍ពលកោតខ្លាច ។ អស់នាម៉ឺនឃើញគង់ហ៊ានលេចអាចម៍ដាក់ក្បាលដំរី ស្អុយពាសពេញដូច្នោះ គេសួរៈ “ លោកមេទ័ពថ្មី ម្ដេចក៏លេចលាមកដូច្នេះ ? ” ។ គង់ហ៊ានឆ្លើយៈ “ បើកំពុងតែច្បាំងនឹងសត្រូវ ហើយឈឺផ្ទៃនឹងចុះទៅដោះទុក្ខសត្វឯណា មានតែដោះទុក្ខសត្វលើក្បាលដំរីដូច្នោះឯង បើរវល់តែដោះទុក្ខសត្វ ខ្មាំងវាមិនកាប់ស្លាប់ឥតអំពើទៅហើយ ” ។

អស់នាហ្មឺន និងរេហ៍ពល ឮគង់ហ៊ាននិយាយដូច្នោះ អ្នកខ្លះមានប្រាជ្ញាគេដឹងថា គង់ហ៊ាន ខ្លាច ឯអ្នកខ្លះមិនសូវមានប្រាជ្ញា ក៏កោតខ្លាចគង់ហ៊ានណាស់ ។ ឯគង់ហ៊ានបានឈ្នះទ័ពត្រឡប់ចូលមកក្នុងនគរវិញ ហើយចូលទៅក្រាបថ្វាយបង្គំស្ដេច ។

ស្ដេចទ្រង់ជ្រាបថា គង់ហ៊ានទៅច្បាំងឈ្នះ ដេញខ្មាំងរត់ខ្ចាត់ខ្ចាយអស់ទៅ ទ្រង់ត្រេកអរណាស់ ទ្រង់ព្រះរាជទានយសស័ក្តិជានាម៉ឺនធំ ហើយព្រះរាជទាន ព្រះរាជទ្រព្យ និងគ្រឿងបណ្ណាការជាច្រើន ។ តាំងអំពីថ្ងៃនោះមក គង់ហ៊ានរឹតតែអួតខ្លាំងពូកែក្អេងក្អាងឡើងទៀត ។

លុះក្រោយមកទៀត មានក្រពើសាហាវមួយចេះតែដេញខាំមនុស្ស ។ ឈ្មួញលក់ដូរដើររកស៊ីខាងជើងទឹក ជើងកំពង់ ខ្លាចរអាគ្រប់គ្នា មិនមានអ្នកណាហ៊ានចុះងូតទឹក ឬដើរទូកសោះ ។ អស់រាស្ត្រពិបាកចិត្តណាស់ ។ រឿងនោះក៏ជ្រាបទៅដល់ស្ដេច ។ ស្ដេចទ្រង់ត្រាស់ប្រើគង់ហ៊ានឱ្យទៅចាប់ក្រពើ ។ ឯគង់ហ៊ានឮព្រះបន្ទូលដូច្នោះនឹកភ័យណាស់ ប៉ុន្តែមិនហ៊ានទទឹងព្រះបន្ទូលក៏ទទួលថានឹងយកអាសា សូមទ្រង់កុំព្រួយព្រះរាជហឫទ័យ ។ គង់ហ៊ានត្រឡប់មកដល់ផ្ទះ និយាយប្រាប់ប្រពន្ធៈ “គេហ៍អើយ! ឥឡូវនេះស្ដេចទ្រង់ឱ្យយើងទៅចាប់ក្រពើក្នុងទន្លេត្បិតក្រពើសាហាវណាស់ ។ ម្ដងនេះឃើញថាមិនរួចខ្លួនទេ មុខជាក្រពើខាំស្លាប់មិនខាន ពីមុននៅលើគោក គ្រាន់នឹងមើលទៅឃើញ ឥឡូវនេះនៅក្នុងទឹក តើធ្វើដូចម្ដេចនឹងគេចរួច ? ប៉ុន្តែស្ដេចទ្រង់ប្រើហើយនឹងមិនទៅក៏មិនបាន ។ បើដូច្នោះមានតែទៅលោតទឹកឱ្យក្រពើវាខាំស្លាប់តែម្ដងទៅ” ។ គង់ហ៊ានគិតគ្នានឹងប្រពន្ធដូច្នោះហើយ ក៏ហៅកូនក្មួយមកធ្វើជាទៅចាប់ក្រពើ ។ មនុស្សម្នាមហាជនឮថាគង់ហ៊ានទៅចាប់ក្រពើក៏បបួលគ្នាទៅមើលយ៉ាងកុះករ ។ លុះគង់ហ៊ានទៅដល់កំពង់ទឹកបានឃើញក្រពើហែលមកប្របច្រាំង ត្រង់ទីដែលមានដើមឈើពីរដើមដុះជិតគ្នាមានប្រគាប គាត់ក៏ស្ទុះលោតចុះទៅក្នុងទឹកត្រង់ទីនោះដោយគិតថា លោតទៅឱ្យក្រពើខាំឱ្យ

ស្លាប់តែម្តង ។ ប៉ុន្តែក្រពើក៏ភ្ញាក់ព្រើតនឹងសូរសន្ធឹកគង់ហ៊ានលោតចុះ ហើយប្រឹងលោតឡើង ដូចជាគេប្រហាកក្នុងប្រគាបឈើ ជាប់ពាក់កណ្តាលខ្លួន រុលទៅមុខក៏មិនរួច ថយមកក្រោយក៏មិនរួច ។ គង់ហ៊ានមុជទៅក្នុងទឹក ងើបឡើងឃើញក្រពើជាប់នឹងដើមឈើដូច្នោះស្រែកបង្គាប់ឱ្យកូនក្មួយយកលំពែងមកចាក់កាប់ក្រពើនោះស្លាប់ទៅ ។ ឯអ្នកដែលមើលទាំងប៉ុន្មានគេគិតស្មានថា គង់ហ៊ានចាប់ក្រពើបោះមកឱ្យជាប់នឹងដើមឈើក៏កោតខ្លាចគង់ហ៊ានក្រៃពេក ។

គង់ហ៊ានបានឃើញក្រពើស្លាប់ដូច្នោះ ក៏រឹតតែក្អេងក្អាងអួតខ្លួនថា ខ្លាំងពូកែឡើងទៀត ហើយចូលទៅក្រាបទូលស្តេចថា ខ្លួនបានចាប់ក្រពើចោលឡើងមកលើគោក ។ ស្តេចក៏ទ្រង់សព្វព្រះរាជហឫទ័យ ប្រោសព្រះរាជទានយសស័ក្តិឱ្យគង់ហ៊ានឡើងជាធំលើសពីមុនទៀតដោយព្រះរាជទានទាំងអំណាច ទាំងរង្វាន់ជាច្រើន ។

*(ដកស្រង់ពីប្រជុំរឿងព្រេងខ្មែរភាគ១)*

## សំណួរ

១. ហេតុដូចម្តេច បានជាអ្នកស្រុកអបអរគង់ហ៊ាន ចំពោះការកម្ចាត់សត្វខ្លានិងក្រពើ ?

២. តើការជួយគ្នារបស់ប្រពន្ធគង់ហ៊ាន ក្នុងការកម្ចាត់សត្រូវ សត្វខ្លា និងសត្វក្រពើនោះជាអំពើល្អឬទេ? ហេតុអ្វី?

៣. តើសត្វទាំងពីរនេះអាចចាត់ទុកជានិមិត្តរូបនៃមនុស្សបែបណា? ព្រោះអ្វី?

៤. តើការកម្ចាត់ ខ្លា ក្រពើ និងកម្ចាត់សត្រូវឈ្លានពានរបស់គង់ហ៊ាន និងប្រពន្ធជាកាតព្វកិច្ចរបស់ពលរដ្ឋល្អក្នុងសង្គមដែរឬទេ?

៥. ចូរបញ្ជាក់កាលអាកាសនៃរឿងខាងលើ ។

៦. ចូរអ្នករកកិរិយាសុទ្ធនិងកិរិយាហេតុក្នុងរឿងខាងលើនេះ ។



# សន្ទនាតាមទូរស័ព្ទ

សព្វថ្ងៃនេះ ប្រព័ន្ធបច្ចេកវិទ្យាទំនើបនិងទំនាក់ទំនងតាមទូរស័ព្ទកំពុងដុះដាលស្ទើរគ្រប់ទីកន្លែង ។

- ចូរអ្នកអានការនិយាយឆ្លើយឆ្លងគ្នាតាមទូរស័ព្ទរបស់ធារីនិងសុជាតិ ។

ទូរស័ព្ទបានរោទិ៍ឡើង ពេលនោះក្មេងស្រីម្នាក់លើកទូរស័ព្ទ ៖

- ធារី ៖ អាឡូ! ជម្រាបសួរ តើអញ្ជើញទូរស័ព្ទមកពីខាងណាដែរ ?
- សុជាតិ ៖ បាទ! ជម្រាបសួរ ខ្ញុំបាទសុជាតិ ។
- ធារី ៖ អូ! សុជាតិ តើសុជាតិឯងសុខសប្បាយជាទេ ? តើមានការអ្វីដែរ ?
- សុជាតិ ៖ បាទ! អរគុណធារី ខ្ញុំសុខសប្បាយធម្មតាទេ ។ តើធារីបានដឹងព័ត៌មានអំពីការចូលរួមក្នុងពិធីរុក្ខទិវានៅថ្ងៃអាទិត្យនេះឬទេ ?
- ធារី ៖ ខ្ញុំមិនទាន់ដឹងច្បាស់ទេ ។ បើសុជាតិដឹងជួយប្រាប់ខ្ញុំផង!
- សុជាតិ ៖ នៅថ្ងៃអាទិត្យខាងមុខនេះ សាលារៀនយើងនឹងមានប្រារព្ធពិធីរុក្ខទិវា ។
- ធារី ៖ ចាស! ថ្ងៃនោះ ខ្ញុំពិតជាទៅចូលរួមជាមិនខាន ។ អរគុណសម្រាប់ព័ត៌មាននេះ ។
- សុជាតិ ៖ បាទអរគុណធារី! ថ្ងៃក្រោយជួបគ្នា! លាសិនហើយ!

## សំណួរ

១. តើធារីប្រើសម្ដីបែបណា ពេលលើកទូរស័ព្ទនិយាយ?

២. តើសុជាតិត្រូវនិយាយបែបណាមុននឹងប្រាប់ព័ត៌មានទៅធារី?

៣. តើសុជាតិ ប្រាប់ព័ត៌មានអ្វីទៅធារី?

៤. ក្រោយពីបញ្ចប់កិច្ចសន្ទនា តើធារីប្រើសំនួនបែបណា? សុជាតិប្រើសំនួនបែបណាដែរ?

## លំហាត់

• ចូរអ្នកជ្រើសរើសដៃគូ ដើម្បីសន្ទនាតាមទូរស័ព្ទ ដោយសាកសួរព័ត៌មានផ្សេងៗទាក់ទងនឹងការចូលរួមពិធីមួយចំនួន ៖

១. ការផ្សព្វផ្សាយច្បាប់ចរាចរណ៍ផ្លូវគោក ។

២. ការផ្សព្វផ្សាយបទបញ្ជាផ្ទៃក្នុងរបស់សាលារៀន ។

៣. ការសំអាតទីធ្លាសាធារណៈ ។

នៅពេលសន្ទនា ត្រូវធ្វើតាមការណែនាំខាងក្រោម ៖

- អ្នកទូរស័ព្ទផ្ដើមនិយាយឱ្យបានច្បាស់លាស់ពីគោលបំណងខ្លួន ដែលបានទូរស័ព្ទមករកអ្នកដទៃ ។
- ថ្លែងអំណរគុណចំពោះអ្នកទទួលទូរស័ព្ទ ដែលបានជួយបំពេញបំណងណាមួយរបស់ខ្លួនឬបានផ្ដល់ព័ត៌មានដល់ខ្លួន ។
- ទីបញ្ចប់ថ្លែងអំណរគុណ ជូនពរ ឬជម្រាបលាទៅវិញទៅមក ។



# ការស្តាប់ រឿងខ្ញុំខុសហើយ



ដើម្បីយល់អត្ថន័យនៃរឿងណាមួយឱ្យបានច្បាស់លាស់ អាចទាញយកបទពិសោធល្អៗ ពីតួអង្គនៅក្នុងរឿង យើងគប្បីស្តាប់ដោយចេះកត់ចំណាំសេចក្តីលម្អិតសំខាន់ៗ នៃរឿងនោះ ។

• ចូរអ្នកស្តាប់រឿងខ្ញុំខុសហើយ រួចឆ្លើយនឹងសំណួរខាងក្រោម ៖

## សំណួរ

១. "ខ្ញុំខុសហើយ" មានន័យដូចម្តេច?

២. ហេតុដូចម្តេចបានជានាងសុភាពស្ទុះជ្រែកគេជ្រែកឯង ស្រែកប្រកូកហៅមិត្តរួមថ្នាក់ កោកៗបែបនេះ? តើឥរិយាបថនេះសមរម្យឬទេ? ព្រោះអ្វី?

៣. ក្នុងនាមជាពលរដ្ឋល្អម្នាក់ តើអ្នកគប្បីមានឥរិយាបថបែបណានៅទីសាធារណៈ?

៤. តើក្នុងអត្ថបទនេះ តួអង្គណាជាតួអង្គឯក ហើយតួអង្គណាជាតួអង្គរង? តួអង្គទាំងនោះមានសកម្មភាពយ៉ាងណាខ្លះ?

៥. ដើម្បីបញ្ជាក់ថា អ្នកជាពលរដ្ឋមួយរូបដែលមានសីលធម៌ តើអ្នកត្រូវបំពេញកាតព្វកិច្ចយ៉ាងណាខ្លះ?

៦. ចូរបង្ហាញតម្លៃអប់រំតាមរយៈតួអង្គឯក ។



## បំពេញទម្រង់បែបបទប្រើប្រាស់ក្នុងជីវភាពប្រចាំថ្ងៃ

គេអាចសម្គាល់អត្តសញ្ញាណរបស់មនុស្សម្នាក់ៗតាមរយៈអត្តសញ្ញាណប័ណ្ណ ។ ជាមួយនោះ នៅសាលារៀនប្អូនៗ តែងតែមានប័ណ្ណសម្គាល់ខ្លួន ហើយត្រូវបំពេញដូចខាងក្រោមនេះ ៖

**ចំហៀងខាងមុខ**

ព្រះរាជាណាចក្រកម្ពុជា

ជាតិ សាសនា ព្រះមហាក្សត្រ

**អត្តសញ្ញាណប័ណ្ណសិស្ស**

លេខ ០៥/...

វិទ្យាល័យ ទួលទំពូង

ឆ្នាំសិក្សា ២០០៨ - ២០០៩

ភ្នំពេញ. ថ្ងៃទី...ខែ...ឆ្នាំ ២០០៨

នាយកវិទ្យាល័យ

រូបថត ថតថ្មី
3 x 4
ពណ៌ ស ខ្មៅ

**ចំហៀងខាងក្រោយ**

គោត្តនាម នាម: ....................

ភេទ: ........ សញ្ជាតិ: ........

ថ្ងៃខែឆ្នាំកំណើត: ........ 1995

ទីកន្លែងកំណើត: ....................

....................

ជាសិស្សថ្នាក់ទី ........ អត្តលេខ: ........

ឈ្មោះឪពុក: ....................

មុខរបរ: ....................

ឈ្មោះម្ដាយ: ....................

មុខរបរ: ....................

ទីលំនៅបច្ចុប្បន្ន ផ្ទះលេខ: ........ ផ្លូវ: 490

សង្កាត់: ........ ខណ្ឌ: ........

ហត្ថលេខាសាមីខ្លួន

## លំហាត់

ចូរអ្នកចម្លងគំរូ ព័ត៌មានផ្ទាល់ខ្លួនសិស្ស ពាក្យសុំចូលរៀន សៀវភៅតាមដានការសិក្សា សលាកបត្រព័ត៌មាន ដាក់ក្នុងសៀវភៅរបស់អ្នក ដោយបំពេញព័ត៌មានខ្លួនឯងផ្ទាល់ឱ្យបានត្រឹមត្រូវ ។

ក. ព័ត៌មានផ្ទាល់ខ្លួនសិស្ស

**ព្រះរាជាណាចក្រកម្ពុជា**
ជាតិ សាសនា ព្រះមហាក្សត្រ

**សាលារាជធានីភ្នំពេញ**
**មន្ទីរអប់រំយុវជននិងកីឡារាជធានីភ្នំពេញ**
**វិទ្យាល័យ..................**
**លេខ.....................**

### ព័ត៌មានផ្ទាល់ខ្លួនសិស្ស

រូបថត 4x6

១. ឈ្មោះសិស្ស.................................ភេទ..............ជាតិ....................អត្តលេខ..............
២. កើតនៅថ្ងៃទី................................ខែ..................................ឆ្នាំ.........................
៣. នៅឃុំ-សង្កាត់...............................ខណ្ឌ-ស្រុក........................ខេត្ត-ក្រុង...................
៤. ឪពុកឈ្មោះ...........................មុខរបរ...........................ក្រសួង..............................
៥. ម្ដាយឈ្មោះ...........................មុខរបរ...........................ក្រសួង..............................
៦. អាណាព្យាបាលឈ្មោះ.............................ជា...................ក្រសួង..............................
៧. អាសយដ្ឋានបច្ចុប្បន្នផ្ទះលេខ.......ផ្លូវលេខ.........ជាន់ទី.........ក្រុមទី.........សង្កាត់...........................
ខណ្ឌ.......................................................ទូរស័ព្ទ ..................................
៨. ជាប់សញ្ញាបត្រ មធ្យមសិក្សាបឋមភូមិ សម័យប្រលង: ថ្ងៃទី......................ខែ...............ឆ្នាំ...........
មណ្ឌលប្រលង...................................................លេខបន្ទប់.........លេខតុ.............និទ្ទេស.........
៩. ផ្ទេរការសិក្សាមកពីសាលាបឋមសិក្សា អនុវិទ្យាល័យ-វិទ្យាល័យ.........................ឃុំ-សង្កាត់..................
ខណ្ឌ-ស្រុក..........................ខេត្ត.....................ចូលរៀនថ្នាក់ទី..........ឆ្នាំសិក្សា ២០០.....២០០....
១០.កាលបរិច្ឆេទផ្ទេរការសិក្សាមកពីសាលាបឋមសិក្សា អនុវិទ្យាល័យ-វិទ្យាល័យ.........ថ្ងៃទី.......ខែ.........ឆ្នាំ២០០...

| សំណុំលិខិតជូនភ្ជាប់: | | ឆ្នាំសិក្សា | ថ្នាក់ | ឈ្មោះគ្រូបន្ទុកថ្នាក់ |
|---|---|---|---|---|
| ១. ពាក្យសុំចូលរៀន | ១ច្បាប់ | ២០០.... ២០០.... | ថ្នាក់ទី...... | លោក.......................... |
| ២. សៀវភៅសិក្សាធិការ | ១ក្បាល | ២០០.....២០០.... | ថ្នាក់ទី...... | លោក.......................... |
| ៣. រូបថត ៤ x ៦ ស.ម | ២សន្លឹក | ២០០.... ២០០.... | ថ្នាក់ទី...... | លោក.......................... |

* លុបកន្លែងដែលគ្មានប្រយោជន៍
* ស្នើបំពេញគ្រប់ចន្លោះមុនយកមកដាក់

កំណត់សំគាល់លើអាកប្បកិរិយាពិសេសរបស់សិស្ស បញ្ជាក់ដោយគ្រូបន្ទុកថ្នាក់

ហត្ថលេខា

១.........................................................................................................
២.........................................................................................................
៣.........................................................................................................
៤.........................................................................................................

## ខ. ពាក្យសុំចូលរៀន

ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ

ក្រសួងអប់រំ យុវជន និង កីឡា
វិទ្យាល័យ..........................................

**ពាក្យសុំចូលរៀនថ្នាក់ទី..................**

**ឆ្នាំសិក្សា.....................**

✿✿✿✿✿

ខ្ញុំបាទ-នាងខ្ញុំឈ្មោះ..............................ភេទ.............ជាតិ..................ជាសិស្សថ្នាក់ទី.........នៃសាលាបឋមសិក្សា អនុវិទ្យាល័យ.........................................ធ្លាប់រៀនភាសា.......................................ឆ្នាំសិក្សា..............

-កើតថ្ងៃទី..........ខែ............ឆ្នាំ..........នៅសង្កាត់-ឃុំ........................ស្រុក-ខណ្ឌ............ខេត្ត-ក្រុង..............

-ឪពុកឈ្មោះ.........................................................មុខរបរ...........................................................

-ម្តាយឈ្មោះ.........................................................មុខរបរ...........................................................

-អាណាព្យាបាលឈ្មោះ.............................................មុខរបរ...........................................................

-អាសយដ្ឋានបច្ចុប្បន្នផ្ទះលេខ............ផ្លូវ..........ក្រុមទី.........ភូមិ-មណ្ឌល...............សង្កាត់..................ខណ្ឌ.............

**សូមគោរពជូន**

**លោកនាយក**.........................................

សូមលោកនាយក មេត្តាចុះឈ្មោះខ្ញុំបាទ-នាងខ្ញុំសាជាថ្មីនៅថ្នាក់ទី...........ក្នុងឆ្នាំសិក្សា.............នៅ................................ របស់លោក ដោយអនុគ្រោះ ។

**សូមជូនភ្ជាប់មកជាមួយនូវ :**

- -សៀវភៅសិក្ខាគារិក...................................................................០១ ក្បាល
- -លិខិតសំគាល់ខ្លួន........................................................................០១ សន្លឹក
- -រូបថត.......................................................................................០២ សន្លឹក
- -ស្រោមសំបុត្របិទតែមប្រើក្នុងស្រុក.......................................................០២ សន្លឹក
- -លិខិតបញ្ជាក់សំបុត្រកំណើតថតចំលង...................................................០១ សន្លឹក

ខ្ញុំបាទ-នាងខ្ញុំ សូមសន្យាថានឹងគោរពបទបញ្ជាផ្ទៃក្នុងសាលា អោយបានគ្រប់ជ្រុងជ្រោយជាចំខាត ។ បើខ្ញុំបាទ-នាងខ្ញុំប្រព្រឹត្តផ្ទុយនឹងចំណុចណាមួយ ខ្ញុំសូមទទួលកំហុសតាមច្បាប់ជាធរមាន ។

សូមលោកនាយក មេត្តាទទួលនូវសេចក្តីគោរពដ៏ខ្ពង់ខ្ពស់អំពីខ្ញុំបាទ-នាងខ្ញុំ ។

ភ្នំពេញ,ថ្ងៃទី.........ខែ..........ឆ្នាំ...........

ហត្ថលេខា

បានឃើញ និង ឯកភាព

របស់សិស្សឈ្មោះ...................................

ភ្នំពេញ,ថ្ងៃទី...........ខែ...........ឆ្នាំ...........

ហត្ថលេខាឪពុក-ម្តាយ-អាណាព្យាបាល

គ. សៀវភៅតាមដាន




# ព្រះរាជាណាចក្រកម្ពុជា
## ជាតិ សាសនា ព្រះមហាក្សត្រ

*********

# សៀវភៅតាមដានការសិក្សា

**********

គោត្តនាម និង នាម.................................ជាអក្សរឡាតាំង.................................

ថ្ងៃ-ខែ-ឆ្នាំកំណើត :.................................................................

ទីកន្លែងកំណើត :.................................................................

ឈ្មោះ និង មុខរបរឪពុក :.................................................................

.................................................................

ឈ្មោះ និង មុខរបរម្ដាយ :.................................................................

.................................................................

អាសយដ្ឋានសព្វថ្ងៃ : ផ្ទះលេខ.....................ផ្លូវលេខ.....................ក្រុមទី.....................

ឃុំ/សង្កាត់.............................ស្រុក/ខណ្ឌ.............................ខេត្ត/ក្រុង.............................

ទូរស័ព្ទ :.................................................................

គំរូហត្ថលេខា ឬស្នាមមេដៃមាតាបិតា ឬអាណាព្យាបាល

មាតា បិតា អាណាព្យាបាល (បើមាន)

សំគាល់ : ស្នើមាតាបិតា ឬ អាណាព្យាបាលសិស្ស ចុះគំរូហត្ថលេខាកុំបីខាន ។

ឃ. សលាកប័ត្រព័ត៌មាន

## សលាកប័ត្រព័ត៌មាន



រូបថត 4X6

គោត្តនាម-នាម:.................................... អត្តលេខ........................

ឈ្មោះជាអក្សរពុម្ពឡាតាំង :.................................................................

ភេទ :.................ជនជាតិ.........................សញ្ជាតិ.......................

កើតថ្ងៃទី :...................ខែ.........................ឆ្នាំ..........................

នៅភូមិ-មណ្ឌល..................ឃុំ-សង្កាត់...................ស្រុក-ខណ្ឌ..................ខេត្ត-ក្រុង.................

ជាសិស្សថ្នាក់ទី..............................នៃ.......................................................................

ជ្រើសរើសភាសា...........................................សំរាប់មុខវិជ្ជាជីវភាសា..........................................

ឪពុកឈ្មោះ...............................................មុខរបរ...................................................

ម្តាយឈ្មោះ...............................................មុខរបរ...................................................

អាសយដ្ឋានបច្ចុប្បន្នផ្ទះលេខ...........ផ្លូវលេខ.........ក្រុមទី..........សង្កាត់.......................ខណ្ឌ................

ជាកូនទី..........ក្នុងគ្រួសារ ¨ ក្រ - មធ្យម - មាន ¨ ដែលមានបងប្អូនប្រុស..............នាក់ ស្រី...............នាក់

ប្រលងសញ្ញាប័ត្រមធ្យមសិក្សាបឋមភូមិ សម័យប្រលង...................................................

មណ្ឌលប្រលង :...................................បន្ទប់លេខ :...................លេខតុ :.....................

និទ្ទេស :.............................. ធ្វើនៅ.............. ថ្ងៃទី.........ខែ..............ឆ្នាំ............

ហត្ថលេខា និង ឈ្មោះបេក្ខជន




# សេចក្តីប្រាថ្នារបស់យើង



យើងម្នាក់ៗ សុទ្ធតែមានសេចក្តីប្រាថ្នារៀងៗខ្លួន ។ ដើម្បីញ៉ាំងឱ្យសេចក្តីប្រាថ្នារបស់យើងសម្រេចបានជោគជ័យ យើងគប្បីតាំងចិត្តតស៊ូ អំណត់ ព្យាយាមរៀនសូត្រធ្វើការងារនិងប្រព្រឹត្តតែអំពើល្អ ។ សេចក្តីប្រាថ្នាមានន័យថាអ្វីៗដែលយើងប៉ងទុក នឹកក្នុងចិត្តជាមុន ។ ការរស់នៅប្រកបដោយសេចក្តីស្រឡាញ់ សាមគ្គីភាព សេចក្តីថ្លៃថ្នូរ ព្យាយាម និងការពិចារណាប្រកបដោយបញ្ញា ជាមធ្យោបាយធ្វើឱ្យសម្រេចសេចក្តីប្រាថ្នារបស់យើង ។

នៅក្នុងមេរៀននេះ អ្នកនឹងបានសិក្សាអំពី ការផ្សព្វផ្សាយពាណិជ្ជកម្ម ការបញ្ចុះបញ្ចូល និងទាក់ទាញអតិថិជនរបស់ម្ចាស់ផលិតផល ឬក្រុមហ៊ុនមួយចំនួន ។

**ជាពិសេស អ្នកនឹងបានសិក្សាបន្ថែមទៀតអំពី ៖**

- ភាពខុសគ្នារវាងការពិត និងមតិឬគំនិត
- សំណោរផ្សាយពាណិជ្ជកម្ម ។
- ការបង្ហាញការផ្សាយពាណិជ្ជកម្ម
- ប្រភេទល្បះ (ល្បះបញ្ជា ល្បះឧទាន)



# ការពិត ឬការណ៍

បាតុភាពផ្សេងៗដែលនៅជុំវិញយើងតែងតែលាយឡំគ្នារវាងការពិត និងមតិ ។ តើយើងអាចញែកការពិត និងមតិដោយវិធីណា? ការចាប់ផ្តើមដ៏ល្អ គឺយើងត្រូវស្គាល់ពាក្យទាំងពីរនេះឱ្យបានច្បាស់លាស់ ។ តើការពិត ឬការណ៍ជាអ្វី ?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖

១. - ប្រាសាទអង្គរវត្តជាកេរមរតកវប្បធម៌របស់ខ្មែរ ដែលបុព្វបុរសបានបន្សល់ទុកឱ្យកូនចៅជំនាន់ក្រោយ ។

- រាជធានីភ្នំពេញជាប់ចំណាត់ថ្នាក់លេខ១ក្នុងចំណោមទីក្រុង៩៦ អំពីការអភិវឌ្ឍឆាប់រហ័ស ហើយជាទីក្រុងធំបំផុតនៃព្រះរាជាណាចក្រកម្ពុជាសព្វថ្ងៃនេះ ។
- បឹងទន្លេសាបមានខេត្ត៦ ព័ទ្ធជុំវិញ គឺខេត្តសៀមរាប កំពង់ធំ កំពង់ឆ្នាំង ពោធិ៍សាត់ បាត់ដំបង និងបន្ទាយមានជ័យ ។ បឹងទន្លេសាបជាជម្រកត្រីធំបំផុតនៅប្រទេសកម្ពុជា ។

*(ដកស្រង់ពីឯកសារណែនាំគ្រូបង្រៀនស្តីពីការអប់រំបរិស្ថានបឹងទន្លេសាបទំ.២)*

២. សម្តេចព្រះមហាសុមេធាធិបតី ជួន ណាត ទ្រង់ប្រសូតនៅថ្ងៃអង្គារ ១១រោចខែផល្គុនព.ស.២៤២៧ ត្រូវនឹងថ្ងៃទី១១ខែមីនាឆ្នាំ១៨៨៣ នៅភូមិកំរៀង ឃុំរកាកោះ ស្រុកគងពិសី ខេត្តកំពង់ស្ពឺ។ ព្រះបិតានាម ជួន ព្រះមាតានាម យក់ ។ គ្រួសារនេះមានបុត្រតែពីរនាក់គត់គឺសម្តេចនិងឧកញ៉ា សោភណមន្ត្រី ជួន នុត ។

កាលនៅកុមារ សម្តេចបានសិក្សាអក្សរ និងលេខរហូតដល់អាយុ១៤ឆ្នាំ ។ ព្រះអង្គបានបួសជាសាមណេរនៅថ្ងៃ១៥កើត ខែពិសាខ ឆ្នាំ ច សំរឹទ្ធិស័ក ព.ស.២៤៤១ (ខែឧសភាឆ្នាំ១៨៩៧)នៅវត្តពោធិព្រឹក្ស(ហៅវត្តពោលាំ) ឃុំរលាំងកែន ស្រុកកណ្តាលស្ទឹង ខេត្តកណ្តាល ។បួសជាសាមណេរបានពីរឆ្នាំ ក្នុងព.ស.២៤៤៣ គ.ស.១៨៨៩ សម្តេចបានចូលសិក្សាព្រះបរិយត្តិធម៌នៅវត្តឧណ្ណាលោម ក្រុងភ្នំពេញ ។...

*(ដកស្រង់ពីសៀវភៅស្នាព្រះហស្តក្រោយបង្អស់នៃសម្តេចព្រះមហាសុមេធាធិបតីជួនណាត គ.ស.១៩៧០ទំព័រ ៥៧)*

ឧទាហរណ៍ទី១ បង្ហាញហេតុការណ៍ ជាក់លាក់និងពិតប្រាកដ ដែលមានអំណះអំណាងអាចបញ្ជាក់បាន ។ ចំណែកឧទាហរណ៍ទី២ បង្ហាញប្រវត្តិកំណើតជាក់លាក់របស់សម្ដេចព្រះសុមេធាធិបតី ជួន ណាត ដោយបញ្ជាក់ច្បាស់លាស់ពីថ្ងៃ ខែ ឆ្នាំកំណើត ស្រុកកំណើត ឪពុក ម្ដាយ បងប្អូន ទៀតផង ។ ព័ត៌មានទាំងនេះមានប្រភពបញ្ជាក់ច្បាស់លាស់ ។



*ការពិត ឬការណ៍ គឺជាសេចក្ដីប្រាប់ព័ត៌មានប្រាកដជាក់លាក់ ដែលមិនអាចមាននរណាថាផ្សេងពីនេះបានឡើយ ។*

## លំហាត់

តើកថាខណ្ឌណាជាការពិត ឬការណ៍ ?

១. នៅពេលមានភ្លៀង គេតែងឃើញផ្លេកបន្ទោរ និងសំឡេងផ្គរ រន្ទះគួរឱ្យភ័យខ្លាច ។បាតុភូតនេះត្រូវបានលើកឡើងក្នុងរឿងព្រេងខ្មែរយើងថា ផ្លេកបន្ទោរកើតឡើងពីពន្លឺចាំងនៃកែវមនោរាហ៍របស់នាងមេខលា ដែលនាងគ្រវីនៅពេលនាងលេងទឹកភ្លៀង ។ ឯសំឡេងផ្គរ រន្ទះជាសំឡេងពូថៅ ដែលរាមាសូរចោលទៅលើនាងមេខលា ដើម្បីដណ្ដើមយកវត្ថុទិព្វកែវមនោរាហ៍ពីនាង ។

២. កាសែតកម្ពុជាថ្មី ឆ្នាំទី៧លេខ១៦៧៤ ថ្ងៃអាទិត្យ-ចន្ទទី២២-២៣ ខែមិថុនាឆ្នាំ ២០០៨ បានសរសេរបញ្ជាក់ថា ដំណាំដំឡូងមីនៅតាមព្រំដែនប៉ែកខាងលិចបានបង្កើតការងារសម្រាប់ពលករខ្មែរ ។ នៅស្រុក៤នៃខេត្តបន្ទាយមានជ័យ គឺស្រុកម៉ាឡៃ អូរជ្រៅ ស្វាយចេក និងថ្មពួក ផ្ទៃដីចម្ការជាច្រើនហិកតាត្រូវបានប្រជាកសិករ និងក្រុមហ៊ុនមួយចំនួនដាំដំឡូងមី និងអំពៅ ។ ឥឡូវនេះ ក្រុមហ៊ុនជាច្រើនបានចុះមកទិញផលដំឡូងមីដល់ចម្ការតែម្ដង ។



# មតិ ឬគំនិត

អ្នកបានសិក្សារួចមកហើយអំពីការណ៍ ឬការពិត ។ ដូចនេះ អ្នកអាចកំណត់បានថាអ្វីដែលអ្នកបានអាន បានស្ដាប់ និងមើលឃើញនោះជាការពិត ឬគ្រាន់តែជាគំនិតរបស់អ្នកណាម្នាក់ ។ ប្រសិនបើយើងមិនបានសង្កេត គិត ពិចារណាឱ្យបានច្បាស់ទេនោះយើងនឹងភ័ន្តច្រឡំរវាងការពិតនិងមតិ ឬគំនិត ។ តើអ្វីជាមតិ ឬគំនិត ?

- ចូរអានឧទាហរណ៍ខាងក្រោម ៖

ឧទាហរណ៍ទី១ ៖

- មានតែការដើរកម្សាន្តទេ ទើបជួយបន្ធូរការតានតឹងក្នុងខ្លួនបាន ។
- ក្រុមហ៊ុនដឹកជញ្ជូននេះមានសេវាល្អលើសគេ ។

ឧទាហរណ៍ទី២ ៖

[...] ការងារអាចដឹកនាំមនុស្សពីឋានៈតូចទាបឱ្យទៅរកឧត្តមភាពបាន ។ ការងារធ្វើឱ្យមនុស្សរស់សុខស្រួលក្នុងសង្គម និងជាអាវុធដ៏ស័ក្តិសិទ្ធិក្នុងការរើបម្រះ ប្រឈមមុខនឹងធម្មជាតិទៀតផង ។ [...]

ឧទាហរណ៍ទី ៣ ៖

ជាទូទៅ ការប្រើប្រាស់កុំព្យូទ័រតិច ឬច្រើន សុទ្ធតែប៉ះពាល់ដល់ភ្នែករបស់យើង ព្រោះពន្លឺកុំព្យូទ័រ អាចធ្វើឱ្យភ្នែករបស់យើងម៉ូប ។

ឧទាហរណ៍ខាងលើសុទ្ធតែបង្ហាញគំនិត ឬការយល់ឃើញរបស់បុគ្គលខ្លះៗ ហើយបុគ្គលខ្លះទៀតមានគំនិត ឬយល់ឃើញផ្សេងពីនេះបានដែរ ។



*មតិ ឬគំនិត គឺជាយោបល់ ការគិតឃើញ ឬការយល់ឃើញរបស់បុគ្គលណាម្នាក់ ឬក្រុមណាមួយ ដែលមិនប្រាកដថាត្រូវឬខុស ហើយត្រូវបានទទួលស្គាល់ដោយមនុស្សទូទៅឡើយ ។*

## លំហាត់

តើកថាខណ្ឌណាខ្លះជាមតិ ?

១. ក្រុមហ៊ុនទេសចរណ៍យើងខ្ញុំមានរថយន្តទំនើបៗ បំពាក់ដោយម៉ាស៊ីនត្រជាក់ និងធានាផាសុកភាពសម្រាប់អ្នកដំណើរគ្រប់រូបតាមផ្លូវធ្វើដំណើរពីភ្នំពេញឆ្ពោះទៅកាន់ខេត្ត ក្រុងនានាទូទាំងព្រះរាជាណាចក្រកម្ពុជា ក៏ដូចជាប្រទេសជិតខាងដែរ ។ សូមទេសចរជាតិ អន្តរជាតិ ជឿទុកចិត្តលើសេវាបម្រើល្អឥតខ្ចោះ និងការធានាសុវត្ថិភាពរបស់ក្រុមហ៊ុនទេសចរណ៍យើងខ្ញុំចុះ ។

២. ប្រាសាទអង្គរវត្តស្ថិតនៅក្នុងខេត្តសៀមរាបប៉ែកខាងជើងទីប្រជុំជនខេត្តសៀមរាប ចម្ងាយប្រមាណ៦គីឡូម៉ែត ។ ជារៀងរាល់ថ្ងៃ មានទេសចរជាច្រើនមកទស្សនាប្រាសាទអង្គរវត្ត ។

៣. ប្រាសាទនេះជាវិមានដ៏ធំស្កឹមស្កៃមួយល្អឯក រកគូប្រដូចគ្មាន ។



# អត្ថបទ : ការផ្សាយពាណិជ្ជកម្មមួយ



## សំណួរ

១. តើអត្ថបទនេះផ្សព្វផ្សាយផលិតផលអ្វី?

២. តើគេអួតសរសើរផលិតផលរបស់គេដូចម្ដេចខ្លះ?

៣. តើគេប្រើពាក្យបញ្ចុះបញ្ចូលអ្នកប្រើប្រាស់ដូចម្ដេច?

៤. តើគេប្រើវិធីអ្វី ដើម្បីទាក់ទាញអ្នកប្រើប្រាស់ឱ្យទិញផលិតផលរបស់គេ?

៥. តើការផ្សាយពាណិជ្ជកម្មខាងលើបង្ហាញចំណុចសំខាន់ៗអ្វីខ្លះ?



# ល្បះបញ្ជា

នៅពេលឪពុកម្ដាយរបស់អ្នកណែនាំទូន្មាន ឬឱ្យអ្នកធ្វើអ្វីមួយ តើគាត់និយាយដូចម្ដេច ? បើអ្នកចង់ឱ្យនរណាម្នាក់ធ្វើអ្វីមួយ តើអ្នកនិយាយដូចម្ដេច ?

បើគេចង់ឱ្យយើងធ្វើនេះធ្វើនោះ ឬយើងចង់ឱ្យនរណាម្នាក់ធ្វើអ្វីមួយនោះតើគេត្រូវប្រើល្បះបញ្ជា ។ ដូចម្ដេចដែលហៅថាល្បះបញ្ជា?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖
  - ទៅលាងដៃឱ្យស្អាតសិនសឹមមកហូបបាយ! (បង្គាប់បញ្ជា)
  - ទៅ! ទៅមើលឱ្យច្បាស់ កុំទាន់ជឿគេ ។ (បង្គាប់បញ្ជា)
  - កុំ! កុំលេងគ្រាប់នេះប្រយ័ត្នគ្រោះថ្នាក់ ។ (ឱ្យដំបូន្មាន)
  - នែក្មួយ! កុំអាលជឿ ប្រយ័ត្នចាញ់បោកគេណា៎! (ឱ្យដំបូន្មាន)
  - សូមបងប្អូនជួយជ្រោមជ្រែងគ្នា ក្នុងកិច្ចការពារ និងថែរក្សាទឹកដីយើងឱ្យបានគង់វង្ស ។ (សំណូមពរ)
  - សូមពុកម៉ែអភ័យទោសឱ្យកូនផង! (អង្វរ)

ឧទាហរណ៍ខាងលើបញ្ជាក់ថា កាលណាគេចង់ឱ្យនរណាម្នាក់ធ្វើអ្វីមួយ គេតែងបង្គាប់បញ្ជា ស្នើ ឬសំណូមពរ ឱ្យដំបូន្មាន ផ្ដល់យោបល់ ឬអង្វរអ្នកនោះដោយប្រើល្បះបញ្ជា ។



*ល្បះបញ្ជាជាល្បះប្រើសម្រាប់បង្គាប់បញ្ជា ផ្ដល់យោបល់ សំណូមពរ អង្វរ និងឱ្យដំបូន្មាន ។*

## លំហាត់

១. ចូរពិនិត្យល្បះបញ្ជាខាងក្រោម រួចប្រាប់ថា តើល្បះណាសម្រាប់បង្គាប់បញ្ជា សំណូមពរ ឱ្យដំបូន្មាន និងអង្វរ ។

- កុំបើកលឿនពេក ប្រយ័ត្នគ្រោះថ្នាក់!

- ប្អូនប្រុស! មកនេះមួយភ្លែត !
- សូមបងហុចសៀវភៅនោះឱ្យខ្ញុំបន្តិច!
- សូមលោកគ្រូអភ័យទោសឱ្យគេម្ដងចុះ!

២. ចូរតែងល្បះបញ្ជាទៅតាមបែបនីមួយៗ (បង្គាប់ សំណូមពរ អង្វរ ឱ្យដំបូន្មាន) ឱ្យបាន២ល្បះ ។



# ការប្រើប្រាស់ជីរបស់កសិករយើង



សព្វថ្ងៃនៅលើទីផ្សារនានា មានលក់ជីគីមីជាច្រើនប្រភេទ ដែលជីទាំងនោះភាគច្រើននាំចូលមកពីបរទេស ។ លោកអ្នកដឹងហើយថា ជីទាំងនោះមានតម្លៃខ្ពស់ណាស់ ។កសិករយើងត្រូវចាយវាយប្រាក់កាសត្បិតត្បៀត ដើម្បីសន្សំប្រាក់ទុកទិញជីប្រើប្រាស់នៅរដូវដាំដុះ ។ ការធ្វើបែបនេះ ដោយសារគាត់យល់ថា ជីគីមីជាប្រភេទជីល្អប្រសើរបំផុត ដែលធ្វើឱ្យដំណាំ

ផ្សេងៗលួតលាស់ឆាប់រហ័សទាន់ចិត្ត ទិន្នផលខ្ពស់ ងាយប្រើប្រាស់ ហើយមិនបាច់ចំណាយពេលផលិតទៀតផង ។ នេះដោយសារកសិករយើងមួយចំនួនយល់ថា អ្វីៗដែលនាំចូលពីបរទេសសុទ្ធតែល្អប្រសើរ រហូតដល់ពួកគាត់ភ្លេចគិតពីអ្វីៗដែលមាននៅជុំវិញខ្លួនរបស់គាត់ ។ លាមកគោ ក្របី សេះ ជ្រូក មាន់ ទា ប្រចៀវ ... រួមផ្សំជាមួយនឹងស្លឹកឈើ មួយចំនួនដូចជា ទន្រ្ទានខេត្ត... និងផេះ ជាជីធម្មជាតិដ៏ល្អវិសេសវិសាលក្រៃលែង ។ ការប្រើប្រាស់ជីធម្មជាតិជួយបង្កើនគុណភាពដី ធ្វើឱ្យដីផុស មានជីជាតិ ផ្តល់ទិន្នផលខ្ពស់ ផលដំណាំគ្មានជាតិគីមី និងមិនខូចបរិស្ថានឡើយ និងងាយស្រួលក្នុងការផលិត ។ម្យ៉ាងទៀត យើងអាចសន្សំបានលុយកាក់ទៀតផង ។

បងប្អូនកសិករទាំងឡាយ គួរកាត់បន្ថយការចំណាយទៅលើជីគីមី ហើយខិតខំផលិត និងប្រើប្រាស់ជីធម្មជាតិ ឬជីកំប៉ុសវិញ ព្រោះវត្ថុធាតុដើមសម្រាប់ផលិតជីធម្មជាតិមានច្រើនណាស់នៅជុំវិញយើង ។ ម្យ៉ាងទៀត ការប្រើប្រាស់ជីគីមីច្រើនមិនត្រឹមត្រូវតាមបច្ចេកទេសនឹងធ្វើឱ្យប៉ះពាល់ដល់គុណភាពដី ផលដំណាំ និងបំផ្លាញបរិស្ថានថែមទៀត ។

ដូចនេះ យើងគួរបង្វែរការចំណាយទិញជីគីមីទៅជាប្រាក់សន្សំ សម្រាប់សេចក្តីត្រូវការផ្សេងៗទៀត ក្នុងគ្រួសារនិងសង្គម កាន់តែបានច្រើនទ្វេឡើងទៀត ។

## សំណួរ

១. តើអ្នកស្គាល់ជីគីមីអ្វីខ្លះដែលគេលក់សព្វថ្ងៃនេះ?ជីទាំងនោះមានតម្លៃដូចម្តេច?

២. ហេតុអ្វីបានជាកសិករយើងមួយចំនួនចូលចិត្តប្រើជីគីមី ?

៣. តើអ្វីខ្លះដែលគេអាចយកមកធ្វើជាជីធម្មជាតិ ?

៤. តើជីធម្មជាតិមានអត្ថប្រយោជន៍ដូចម្តេចខ្លះ ?

៥. រវាងជីគីមីនិងជីធម្មជាតិ តើមួយណាប្រសើរជាង ? ហេតុអ្វី ?

៦. បើអ្នកជាកសិករ តើអ្នកគួរប្រើប្រាស់ជីប្រភេទណា ? ព្រោះអ្វី ?



# ល្បះឧទាន

តើអ្នកពោលដូចម្ដេចនៅពេលស្ញើចសរសើរនរណាម្នាក់? តើអ្នកធ្លាប់ស្រែកនៅពេលភ័យខ្លាចដែរឬទេ ? ការពោលពាក្យស្ញើចសរសើរ ការស្រែកនៅពេលភ័យខ្លាច... គឺបង្កើតបានជាល្បះឧទាន ។ តើល្បះឧទានជាអ្វី ?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖
  - យី! និយាយបែបនេះ គឺបោកគេទាំងស្រុងហើយ!
  - កូនគេនេះបានចំជាអ្នករៀនមែន!
  - ពុទ្ធោ! ជួយកូនខ្ញុំផង!
  - យើ! នៅហ៊ានកុហកគេទៀត ។
  - យី! ផលិតផលរបស់គេនេះពិតជាល្អមែន!
  - ន៎ែ! ម៉េចក៏ប្រើម្សៅគីមីលើបន្លែអ៊ីចឹង ? គ្រោះថ្នាក់ណាស់ !

ឧទាហរណ៍ខាងលើបញ្ជាក់ថា កាលណាគេភ្ញាក់ ស្ញើចសរសើរ ឆ្ងល់ ខ្លាច រំភើប ភ័យព្រួយ... គេភ្លាត់មាត់ស្រែក ឬពោលឡើងជាល្បះឧទាន ។



*ល្បះឧទាន ជាល្បះសម្រាប់សម្ដែងការចាប់អារម្មណ៍ភ្លាមៗ នៅពេល រំភើប ភ័យខ្លាច ស្ញើចសរសើរ ព្រួយ និង សប្បាយរីករាយ ឆ្ងល់... ។*

## លំហាត់

១. ចូរប្រាប់ពីអារម្មណ៍(រំភើប ភ័យព្រួយ ស្ញើចសរសើរ និង សប្បាយ ឆ្ងល់ សោកស្ដាយ...) តាមល្បះឧទានខាងក្រោម ៖

- ន៎ែ ក្មួយត្រូវគិតពីសុខភាពអ្នកដទៃផង!
- យី! មកដល់ពីយូរហើយតើ!
- ន៎ែ! សម្លាញ់កុំអាលជឿគេ!

- នៃឈប់សិន! មើលស្អីស្កុងៗនៅខាងមុខ!
- ហ៊ឺះ! សត្វនេះចង្រៃមែន!
- ហ៊ឺ! មិនគួរមកកាប់បំផ្លាញឈើតូចៗដូចនេះសោះ ។

២. ចូរអ្នកតែងល្បះឧទានឱ្យបាន៦ល្បះ ។



## អត្ថបទផ្សាយពាណិជ្ជកម្ម



សុខទាំងកាយ សប្បាយទាំងអារម្មណ៍! សូមបងប្អូនអ្នកដំណើរ និងទេសចរជាតិ អន្តរជាតិ មកទទួលសេវាបម្រើល្អឥតខ្ចោះពីក្រុមហ៊ុនទេសចរណ៍ "រថយន្តធំ " យើងខ្ញុំ ។ ក្រុមហ៊ុនយើងខ្ញុំមានរថយន្តតូចធំ ថ្មីៗ ទំនើបៗ គ្រប់ប្រភេទសម្រាប់ជួល និងដឹកអ្នកដំណើរពីរាជធានីភ្នំពេញ ឆ្ពោះទៅខេត្ត ក្រុងនានាទូទាំងព្រះរាជាណាចក្រកម្ពុជា ព្រមទាំងប្រទេសជិតខាងទៀតផង ។ បើលោកអ្នកធ្វើដំណើរតាមរថយន្តក្រុមហ៊ុនយើងខ្ញុំ លោកអ្នកនឹងចំណេញពេលវេលា និងទទួលបានសេវាបម្រើ ដែលមិនធ្វើឱ្យលោកអ្នកទាស់ចិត្តឡើយ ព្រោះរថយន្តមានបំពាក់ដោយឧបករណ៍កំដរអារម្មណ៍ដូចជាវិទ្យុ វីដេអូ ហើយថែមទាំងមានបន្ទប់អនាម័យទៀតផង ។

រួសរាន់ឡើង! រថយន្តចេញដំណើររៀងរាល់ថ្ងៃ ទៅតាមពេលវេលាដូចខាងក្រោម ៖

| កន្លែងចេញដំណើរ-កន្លែងទៅដល់ | ពេលវេលាចេញដំណើរ | |
|---|---|---|
| | ព្រឹក | រសៀល |
| ភ្នំពេញ-ហូជីមិញ(វៀតណាម) | ម៉ោង៦:៤៥ ,៩:០០ | គ្មាន |
| ភ្នំពេញ-ប៉ោយប៉ែត-បាងកក(ថៃ) | ម៉ោង៦:០០ ,៨:០០ | គ្មាន |
| ភ្នំពេញ-បាត់ដំបង | ម៉ោង៧:០០→ ម៉ោង១២:០០ | ម៉ោង១:៣០ ,២:៣០ |
| ភ្នំពេញ-សៀមរាប | ម៉ោង៦:៣០,៧:៣០,៨:៣០ | ម៉ោង១:៣០ |
| ភ្នំពេញ-ខេត្តព្រះសីហនុ | ម៉ោង៧:១៥ ,៨:៣០ | ម៉ោង១:៣០ ,២:០០ |
| ភ្នំពេញ-ស្ទឹងត្រែង | ម៉ោង៦:៣០ ,៨:០០ | ម៉ោង១:០០ |
| ភ្នំពេញ-មណ្ឌលគិរី | ម៉ោង៦:៣០ ,៧:០០ | ម៉ោង១:០០ |

សូមលោក លោកស្រី ធ្វើដំណើរប្រកបដោយផាសុកភាព និងសុវត្ថិភាព ។ ក្រុមហ៊ុនទេសចរណ៍"រថយន្តធំ" យើងខ្ញុំមានអាសយដ្ឋាននៅភ្នំពេញ ផ្ទះលេខ.....ផ្លូវលេខ......សង្កាត់............ខណ្ឌ................រាជធានីភ្នំពេញ ទូរស័ព្ទលេខ ០២.........../០១............ ។

## សំណួរ

១. តើក្រុមហ៊ុនទេសចរណ៍នោះឈ្មោះអ្វី ?

២. តើក្រុមហ៊ុនទេសចរណ៍នេះដឹកអ្នកដំណើរពីណាទៅទីណាខ្លះ ?

៣. តើក្រុមហ៊ុននោះអួតសរសើរមធ្យោបាយធ្វើដំណើរនិងសេវាបម្រើដូចម្ដេចខ្លះ ?

៤. តើសម្ដី "...មកទទួលសេវាបម្រើល្អឥតខ្ចោះពីក្រុមហ៊ុន..." ជាការពិតឬមតិ ?

៥. ចូររកល្បះបញ្ជា និងល្បះឧទាននៅក្នុងអត្ថបទឱ្យបានពីរល្បះ ។

៦. តើការផ្សាយពាណិជ្ជកម្មនេះ បង្ហាញចំណុចអ្វីខ្លះ ?



# ផ្សាយពាណិជ្ជកម្ម

អ្នកបានអានរួចមកហើយនូវការផ្សាយពាណិជ្ជកម្មរបស់ក្រុមហ៊ុនដឹកអ្នកដំណើរមួយ ។ ដើម្បីទាក់ទាញអតិថិជន តើគេអួតសរសើរដូចម្តេចខ្លះ? ចូរអ្នកសាកល្បងបង្ហាញការផ្សាយពាណិជ្ជកម្មផ្សេងៗទៀត ក្រៅពីការផ្សាយពាណិជ្ជកម្មរបស់ក្រុមហ៊ុនដឹកអ្នកដំណើរ ។តើការផ្សាយពាណិជ្ជកម្មនោះ ប្រើវិធីទាក់ទាញអតិថិជនដូចម្តេចដែរ ។ ចូរអ្នកអានការផ្សាយពាណិជ្ជកម្មខាងក្រោមនេះ ៖

ឱសថបុរាណសញ្ញា " ដើមញ " យើងខ្ញុំមានថ្នាំព្យាបាលជំងឺគ្រប់ប្រភេទដូចជា ជំងឺក្រពះ ពោះវៀន ក្រួសក្នុងតម្រងនោម ក្រួសក្នុងប្រមាត់ ទឹកនោមផ្អែម លើសឈាម រោគស្ត្រី ជំងឺថ្លើមគ្រប់ប្រភេទ ។ល ។ លើសពីនេះទៅទៀត យើងខ្ញុំមានថ្នាំពិសេសម្យ៉ាងអាចព្យាបាលជំងឺមួយរយមុខ ។

យើងខ្ញុំសូមធានាថា ក្រោយពីពិសាថ្នាំរបស់យើងខ្ញុំភ្លាមអ្នកជំងឺ ពិតជាធូរស្រាល និងជាសះស្បើយភ្លាម! ប្រសិនបើមិនជា យើងខ្ញុំមិនយកប្រាក់ឡើយ ។

សូមអញ្ជើញមកពិគ្រោះជំងឺដោយឥតគិតថ្លៃ! ប្រញាប់ឡើង! ចៀសវាងការចំណាយប្រាក់ឥតប្រយោជន៍ សូមបងប្អូនប្រញាប់មកទទួលយកឱសថទិព្វរបស់យើងខ្ញុំ ។

អាសយដ្ឋានផ្ទះ..............ក្រុមទី.........ភូមិ...........ឃុំ/សង្កាត់..................
ស្រុក/ខណ្ឌ................ខេត្ត/ក្រុង...............ឬទាក់ទងតាមទូរស័ព្ទលេខ ......... ។

## សំណួរ

១. តើអត្ថបទនេះផ្សព្វផ្សាយផលិតផលអ្វី ?

២. តើគេអួតសរសើរផលិតផលរបស់គេដូចម្តេចខ្លះ ?

៣. តើអ្នកជឿឬទេថា មានថ្នាំពិសេសអាចព្យាបាលជំងឺមួយរយមុខ ?

៤. តើអ្នកជឿថា នៅលើលោកនេះមានឱសថទិព្វមែនឬទេ? ហេតុអ្វី ?

៥. តើការផ្សាយពាណិជ្ជកម្មខាងលើមានទម្រង់ដូចម្តេច ?

## លំហាត់

១. ចូរអ្នកហាត់និយាយអត្ថបទខាងលើ ដោយមិនមើលអត្ថបទ ។

២. ចូរអ្នកនិយាយផ្សាយពាណិជ្ជកម្មផលិតផល និងហាងលក់ដូរមួយចំនួនដោយប្រើវិធីយ៉ាងណា ដើម្បីទាក់ទាញអ្នកទិញបានច្រើន ។

ក. គ្រឿងប្រើប្រាស់ក្នុងផ្ទះដូចជា ក្រែ ពូក ឆ្នាំងអ៊ុត... ។

ខ. គ្រឿងហូបចុកដូចជា នំ មី អង្ករ ទឹកស៊ីអ៊ីវ ម្ហូបអាហារ... ។

គ. គ្រឿងសំអាងតុបតែងលម្អខ្លួនប្រាណដូចជា ប្រេងម្សៅ ទឹកអប់... ។

ឃ. ហាងលក់សម្លៀកបំពាក់ ។

ង. សំអាងការ ។



## សំណេរអត្ថបទផ្សាយពាណិជ្ជកម្ម

អ្នកបានហាត់និយាយផ្សាយពាណិជ្ជកម្មផលិតផលផ្សេងៗ ខាងលើរួចមកហើយ ឥឡូវនេះ ចូរអ្នកតែងអត្ថបទផ្សាយពាណិជ្ជកម្មមួយ ដើម្បីទាក់ទាញអ្នកប្រើប្រាស់ឱ្យមកទិញផលិតផលរបស់អ្នក ។

សំណេររបស់អ្នក ត្រូវយកលំនាំតាមអត្ថបទគំរូដែលបានសិក្សារួចហើយ និងយកចិត្តទុកដាក់លើចំណុចសំខាន់ៗមួយចំនួនខាងក្រោម ៖

ក. ត្រូវប្រាប់ឈ្មោះផលិតផល ឈ្មោះហាងលក់ដូរ ក្រុមហ៊ុន... ។

ខ. អួតសរសើរគុណភាព ប្រសិទ្ធភាព

គ. អួតសរសើរពីសារប្រយោជន៍

ឃ. លើកតម្កើង បញ្ជោរបញ្ចុះបញ្ចូលអ្នកប្រើប្រាស់ ឬភ្ញៀវ

ង. បង្ហាញវិធីអូសទាញភ្ញៀវ(ការចាប់ឆ្នោត បន្ថែមរបស់ បញ្ចុះតម្លៃពិសេស...) ។




# តម្លៃនៃការងារ



មនុស្សម្នាក់ៗត្រូវតែធ្វើការងារ ទើបអាចរស់នៅប្រកបដោយសុភមង្គល ។ ការងារសំដៅលើមុខរបរ និងសកម្មភាពទាំងឡាយ ដែលនាំឱ្យខ្លួន គ្រួសារ និងសង្គមមានការអភិវឌ្ឍ ។ អ្នកខ្លះចូលចិត្តប្រកបការងារប្រើកម្លាំងកាយ អ្នកខ្លះទៀតប្រើកម្លាំងប្រាជ្ញា ។ ទោះបីការងារនោះប្រើកម្លាំងកាយ ឬប្រាជ្ញាក្តី តូច ធំ ធ្ងន់ ឬស្រាល សុទ្ធតែមានតម្លៃទាំងអស់ ឱ្យតែការងារទាំងនោះជាការងារសុចរិត និងស្របច្បាប់ ។ ក្នុងមេរៀននេះ អ្នកនឹងទទួលបានគំនិតអប់រំពីតម្លៃនៃការងារមួយចំនួនតាមរយៈអត្ថបទ និងច្បាប់ទូន្មានផ្សេងៗ ។

**ជាពិសេស ក្នុងមេរៀននេះ អ្នកនឹងសិក្សាបន្ថែមទៀតអំពី ៖**

- គំនិតសំខាន់បង្កប់ក្នុងអត្ថបទ
- បុគ្គលិកកម្ម
- គុណកិរិយាកាល កន្លែង និងបំណែប
- សូត្រ និងតែងកំណាព្យតាមបទបានត្រឹមត្រូវ ។



# គុណកិរិយាឬកិរិយាវិសេស

គុណកិរិយាជាអ្វី ? ចូរពិនិត្យឧទាហរណ៍ខាងក្រោមៈ

ឧទាហរណ៍ ១ៈ

- រទេះគោនេះបរយឺតៗ ។
- បុប្ផាឯងគិតធ្វើដូចម្ដេច ?
- ម្ដាយខ្ញុំច្រូតស្រូវរហ័សណាស់ ។
- គាត់មកដល់ម្សិលមិញ ។

ក្នុងល្បះឧទាហរណ៍ ពាក្យ " យឺតៗ ដូចម្ដេច រហ័សណាស់ ម្សិលមិញ" ជាគុណកិរិយាសម្រាប់បញ្ជាក់លក្ខណៈឱ្យកិរិយា " បរ គិតធ្វើ ច្រូត មកដល់ " ។

ឧទាហរណ៍២ៈ

- តុនេះរលោងស្រិល ។
- ក្របីនេះធំណាស់ ។
- សក់របស់សេតខ្មៅក្រិប ។
- ស្ពានថ្មីនេះធំហើយវែងអន្លាយ ។

ក្នុងល្បះឧទាហរណ៍ ពាក្យ " ស្រិល ណាស់ ក្រិប អន្លាយ " ជាគុណកិរិយាសម្រាប់បញ្ជាក់លក្ខណៈឱ្យគុណនាម " រលោង ធំ ខ្មៅ វែង " ។

ឧទាហរណ៍ ៣ៈ

- គាត់មកដល់យឺតពេក ។
- សំបើកបរប្រយ័ត្នប្រយែងណាស់ ។
- គាត់ស្រែកឡូឡាខ្លាំងណាស់ ។
- នាងធ្វើការរហ័សរហួនបំផុត ។

ក្នុងល្បះនៃឧទាហរណ៍ ពាក្យ “ ពេក ណាស់ ខ្លាំងណាស់ បំផុត ”ជាគុណកិរិយា សម្រាប់បញ្ជាក់ឱ្យគុណកិរិយា “ យឺត ប្រយ័ត្នប្រយែង ឡូឡា រហ័សរហួន ” ។

តាមឧទាហរណ៍ទាំង៣ ខាងលើ យើងឃើញគុណកិរិយា ជាពាក្យសម្រាប់បញ្ជាក់បែប បទរបស់កិរិយា គុណនាម និងគុណកិរិយាក្នុងល្បះ ។



*- គុណកិរិយា ឬកិរិយាវិសេសជាពាក្យ ឬកន្សោមពាក្យសម្រាប់សម្ដែង លក្ខណៈរបស់កិរិយា គុណនាម ឬគុណកិរិយានៅក្នុងល្បះ ។*

*- គុណកិរិយាមានគុណកិរិយាបំណែប កាល កន្លែង បរិមាណ និងគុណ កិរិយាសំណួរ ។*

## លំហាត់

១. ចូរបង្ហាញគុណកិរិយាក្នុងល្បះខាងក្រោម ៖

- ឪពុកខ្ញុំកាប់ដីខាងក្រោយផ្ទះ ។
- ខ្ញុំជាអ្នកដាំបាយរាល់ថ្ងៃ ។
- សេតរត់លឿនណាស់ ។
- បុប្ផារាំទន់ល្វតល្វន់ ។
- ស្អែកសុភាពនឹងមករៀនវិញ ។

២. ចូរតែងល្បះដោយប្រើគុណកិរិយាឱ្យបាន ៦ ល្បះ ។

## វិព្ញកបញ្ញត្តិ

• កាព្យមាត្រ ឬរង្វាស់កាព្យ ៖ ការរាប់ចំនួនព្យាង្គនៅក្នុងឃ្លា និងចំនួនឃ្លា នៅក្នុងវគ្គ របស់កំណាព្យ ។ រង្វាស់កាព្យប្រែប្រួលទៅតាមប្រភេទបទរបស់កំណាព្យ ។

• ចួន ៖ ព្យាង្គដែលកើតឡើង ដោយស្វរស្រៈដូចគ្នា ព្យញ្ជនៈប្រកបដូចគ្នា ឬស្វរស្រៈ និងព្យញ្ជនៈប្រកបដូចគ្នា ។

ចួនមានលក្ខណៈល្អប្រសើរលុះត្រាតែ ៖

- ព្យញ្ជនៈស្ថិតក្នុងពួកតែមួយ (ពួកអនិង អ , ពួក អ៊ និង អ៊)
- ស្វរស្រៈដូចគ្នា (ស្រៈពួក អ និង អ , ពួកអ៊ និង អ៊) ។

- ផ្ទួន ៖ ពាក្យតែមួយ ដែលកវីប្រើច្រើនដងក្នុងឃ្លា ឬវគ្គនៃកំណាព្យ ។
- រណ្តំ ៖ គឺជាពាក្យ ដែលកវីប្រើព្យញ្ជនៈ ឬស្រៈ តែមួយច្រើនដងនៅក្នុងឃ្លា ឬវគ្គនៃកំណាព្យ ។ រណ្តំមានរណ្តំស្រៈ និងរណ្តំព្យញ្ជនៈ ។
- តម្លៃអប់រំ ៖ គំនិតអូសទាញ ការទូន្មាន ការប្រៀនប្រដៅរបស់អ្នកនិពន្ធតាមរយៈស្នាដៃរបស់ខ្លួន ។ ក្នុងការអប់រំ អ្នកនិពន្ធមានវិធីបង្ហាញប្លែកៗ ដូចជាបង្ហាញអំពើល្អ ដើម្បីឱ្យអ្នកអាន អ្នកសិក្សាយកតម្រាប់តាម ឬយកជាបទពិសោធ ។ បង្ហាញអំពើអាក្រក់ដើម្បីឱ្យអ្នកអាន អ្នកសិក្សា ស្អប់ខ្ពើម ចៀសវាង លះបង់ ... ។
- ល្បះបញ្ជាក់ ៖ ល្បះប្រាប់ព័ត៌មាន ឬព្រឹត្តិការណ៍ផ្សេងៗ ។ ល្បះនេះបញ្ចប់ដោយសញ្ញាខណ្ឌ “ ។ ” ។
- ល្បះសំណួរ ៖ ល្បះសម្រាប់សួររកដំណឹង ឬព័ត៌មានផ្សេងៗ ដែលគេចង់ដឹង ហើយល្បះនេះបញ្ចប់ដោយសញ្ញាសួរ “ ? ” ។



# ច្បាប់ល្បើកថ្មី



(បទកាកគតិ)

| | | |
|---|---|---|
| [...] កើតមកជាមនុស្ស | ទាំងស្រីទាំងប្រុស | មិនដែលចេះឯង |
| បើក្រឱ្យមាន | វិញ្ញាណចេះក្រែង | គិតគ្រប់កន្លែង |
| | កុំដេកតែក្រ ។ | |
| កុំប្លន់កុំលួច | កុំខ្ជិលកុំខូច | កុហកឆ្មូវឆ |
| បោកប្រាស់យកប្រាក់ | ច្រវាក់ជាប់ក | កាន់មារយាទល្អ |
| | សុចរិតត្រឹមត្រូវ ។ | |
| កូនអើយរកស៊ី | កកាយធរណី | ធ្វើស្រែយកស្រូវ |
| កុំតាមអ្នកណា | បាតាមតែឪ | លើកភ្លឺជិតផ្លូវ |
| | កុំស្រាស់បន្លា ។ | |

គេដើរយប់ថ្ងៃ មុតជើងមុតដៃ ដឹងចៀសទៅណា
ចៀសចុះជាន់ស្រូវ ហើយជេរផ្ដាសា កូនម្ដាយអាណា
ស្រាស់ដើរមិនរួច ។

កុំយកគល់ឈើ ទៅដាក់ពីលើ ទោះធំទោះតូច
ជំពប់ជើងគេ គេថាឯងខូច ជេរជៀលដល់ពូជ
ប្រដូចមេបា ។

លើកភ្លឺឱ្យធំ បង្ហាប់ឱ្យមាំ គាប់ភ្នែកទេវតា
ស្មើបានសង់ស្ពាន នឹងមានផល្លា កើតសាធុការ
អាយុយឺនវែង ។

កូនអើយធរណី បើតាមគម្ពីរ ដែលលោកសម្ដែង
កុំចង់បានធំ ប្រមុំឆៀលឆ្វេង កុំលើកដីឯង
លបដាក់ស្រែគេ ។

អំពើអាក្រក់ មួយចម្រៀកសក់ ធ្លាក់ទៅនិរយេ
បច្ចុប្បន្នលោកិយ កើតក្ដីវាយជេរ មិនដែលសុខទេ
ព្រោះដីមួយហត្ថ ។

កុំជួញចង់ទាស់ ខូចខាតរបស់ អស់ទ្រព្យសម្បត្តិ
ចង់គង់ប្រយោជន៍ ឱ្យចេះប្រយ័ត្ន ពាក្យឪមួយម៉ាត់
ឱ្យគិតមួយម៉ោង ។

សំអាតថ្និតផ្ទង់ លើកភ្លឺឱ្យត្រង់ កុំលើកឱ្យកោង
អ្នកកុំប្រហែស ក្រែងមានប្រហោង លើកមើលទំនង
ទំនាបទឹកហូរ ។

ចំនួនទឹកស្ទឹង ទឹកព្រែកទឹកបឹង ទឹកវាលទឹកអូរ
អ្នកលើលិចស្រូវ ត្រូវបើកបង្ហូរ អ្នកក្រោមកុំថ្ងូរ
បន្ទូរបហួសទៅ ។

| | | |
|---|---|---|
| វាំងរឹងថ្ងៃយប់ | ឆាប់លើកឆាប់ទប់ | កុំឱ្យបាក់ជ្រោ |
| កត្តិកចេញខ្យល់ | តម្កល់ទឹកនៅ | បើចង់បានស្រូវ |
| | ស្រេចនៅត្រឹមថៃ ។ | |
| កុំយកគ្រាប់ត្នោត | ទៅដាំទៅដោត | ពីលើភ្លឺស្រែ |
| ចិត្តគិតប្រមាណ | ចង់បានផ្កាផ្លែ | ដាំដុះបង្ហែ |
| | បង្ហិនខ្លួនឯង ។ | |
| ដល់ត្នោតឡើងគល់ | ឡើងកើតនាំខ្វល់ | ធាងលូតឡើងវែង |
| ភ្លូវរាស់ជាប់នឹម | ក្របីជាប់ស្នែង | ទទើសទទែង |
| | ភ្ជួរឆ្វេងមិនត្រូវ ។ | |
| ដល់ត្នោតវាធំ | មានស្លឹកវាទុំ | វាជ្រុះក្នុងស្រូវ |
| ស្រែឆ្ងាយពីផ្ទះ | ឃ្លាតណាស់ពីផ្លូវ | ទម្រាំតែទៅ |
| | រលួយស្រូវអស់ ។ | |
| កូនអើយកុំឆោត | បើចង់បានត្នោត | ដាំដោយកៀនកោះ |
| ដីទួលចម្ការ | ឯណាចន្លោះ | ដាំជារបោះ |
| | ជាជួររបង ។ [...] | |

*( ដកស្រង់ពីច្បាប់ក្រមង៉ុយ ការផ្សាយរបស់ពុទ្ធសាសនបណ្ឌិត្យ)*

# សំណួរ

១. តើអត្ថបទកាព្យនេះតែងជាបទអ្វី ?

២. ចូរគូសតាងចំណាប់ចួនរបស់កំណាព្យខាងលើ ។

៣. ចូរប្រាប់ព្យាង្គផ្ទួន និងរណ្តំក្នុងវគ្គទី២នៃកំណាព្យនេះ ។

៤. ចូរប្រាប់គំនិតសំខាន់បង្ហាញត្រង់ក្នុងវគ្គទីមួយ និងទីពីរនៃកំណាព្យនេះ ។

៥. ចូរបង្ហាញតម្លៃអប់រំរបស់កំណាព្យនេះ ។

៦. ចូរស្រង់ពាក្យជាគុណកិរិយាក្នុងកំណាព្យឱ្យបាន៣ពាក្យ ។



# គុណកិរិយា កាល កន្លែង និងបំណែប

## ក. គុណកិរិយាកាល

គុណកិរិយាកាលជាអ្វី ? ចូរពិនិត្យឧទាហរណ៍ ៖

- បងខ្ញុំទៅចម្ការនៅព្រឹកស្អែក ។
- ខ្ញុំបោសថ្នាក់រួចហើយអំបាញ់មិញនេះ ។
- លោកគ្រូដាក់លំហាត់ឱ្យសិស្សធ្វើរៀងរាល់ថ្ងៃ ។
- ខ្ញុំតែងចូលគេងនៅម៉ោងប្រាំបួនយប់ ។

តាមឧទាហរណ៍ខាងលើ ពាក្យ " ព្រឹកស្អែក អំបាញ់មិញនេះ រៀងរាល់ថ្ងៃ ម៉ោងប្រាំបួនយប់ " ជាគុណកិរិយាកាលសម្រាប់បញ្ជាក់ពេលវេលារបស់កិរិយា " ទៅ បោស ធ្វើ គេង "នៅក្នុងល្បះ ។

ពាក្យ និងកន្សោមពាក្យជាគុណកិរិយាកាលមានដូចជា សព្វថ្ងៃ ព្រឹកនេះ ពីម្សិលស្អែក ខានស្អែក អំបាញ់មិញ ឥឡូវនេះ . . . ។



*គុណកិរិយាកាលជាពាក្យ ឬកន្សោមពាក្យសម្រាប់បញ្ជាក់ពេលវេលារបស់កិរិយានៅក្នុងល្បះ ។*

## ខ. គុណកិរិយាកន្លែង

- ចូរពិនិត្យឧទាហរណ៍ ៖
  - សំទៅឈរខាងនោះ ឯសេតមកខាងនេះ ។
  - ខ្ញុំបោសសំរាមក្នុងថ្នាក់  ចំណែកមិត្តទៅបោសខាងក្រៅ ។
  - នៅខាងក្រោយថ្នាក់ជាណោ មានសុទ្ធតែរងដំណាំ ។
  - នៅជុំវិញដងទង់ជាតិមានផ្ការីកស្គុសស្គាយ ។

ក្នុងឧទាហរណ៍ខាងលើ ពាក្យ " នោះ នេះ ក្នុង ខាងក្រៅ ខាងក្រោយ នៅជុំវិញ" ជាគុណកិរិយាកន្លែងសម្រាប់បញ្ជាក់ទីកន្លែងឱ្យកិរិយា " ឈរ មក បោស មាន " នៅក្នុងល្បះ ។

ពាក្យ និងកន្សោមពាក្យដែលជាគុណកិរិយាកន្លែងមានដូចជា នេះ នោះ លើ ក្រោម ខាងក្នុង ខាងក្រៅ ក្រោយ មុខ ជិត ឆ្ងាយ ក្បែរ . . . ។



*គុណកិរិយាកន្លែងជាពាក្យ កន្សោមពាក្យសម្រាប់បញ្ជាក់ទីកន្លែងរបស់កិរិយានៅក្នុងល្បះ ។*

## គ. គុណកិរិយាបំណែប

- ចូរពិនិត្យឧទាហរណ៍ៈ
  - សំធ្វើកិច្ចការយ៉ាងផ្ចិតផ្ចង់ ។ " យ៉ាងផ្ចិតផ្ចង់ " បញ្ជាក់ឱ្យកិរិយា " ធ្វើ "
  - ផ្ទះនេះធំជ្រងោ ។ " ជ្រងោ " បញ្ជាក់ឱ្យគុណនាម "ធំ "
  - សោភានិយាយបួរបាច់ពីការងាររបស់ខ្លួន ។ " បួរបាច់ " បញ្ជាក់ឱ្យកិរិយា " និយាយ"
  - ថ្ងៃអាទិត្យ ការដ្ឋាននេះស្ងាត់ជ្រងំ ។ " ជ្រងំ " បញ្ជាក់ឱ្យគុណនាម " ស្ងាត់ "
  - គាត់បើកម៉ូតូលឿនពេក ទើបមានគ្រោះថ្នាក់ ។ " ពេក " បញ្ជាក់ឱ្យគុណកិរិយា " លឿន " ។

ពាក្យនិងកន្សោមពាក្យ ដែលជាគុណកិរិយាបំណែបមានដូចជា លឿន ឆាប់ រហ័ស រួសរាន់ សន្សឹមៗ តិចៗ យឺត រឿយៗ ខ្វាប់ខ្ជួន ខ្ជីខ្ជា ជ្រងំ ជ្រងោ បួរបាច់ . . . ។



*គុណកិរិយាបំណែបជាពាក្យ កន្សោមពាក្យសម្រាប់បញ្ជាក់បែបបទរបស់កិរិយានៅក្នុងល្បះ ។*

## លំហាត់

តើល្បះណាខ្លះប្រើគុណកិរិយាកាល ? កន្លែង ? បំណែប ?

១. ម្ដាយសុភាពចេញទៅថ្ងៃស្អែក ។

២. សាលារៀនរបស់ខ្ញុំមានទីធ្លាធំទូលាយ ។

៣. ពូផាភ្ជួរស្រែក្បែរអូរ ។

៤. សំបោសសំរាមក្រោមជណ្ដើរ ។

៥. រថភ្លើងរត់លឿនស្លៅ ។

៦. សុភាពក្រោកអានសៀវភៅនៅម៉ោងប្រាំសាមសិបនាទី ។



## កំណប់ឪពុកខ្ញុំ



កាលពីព្រេងនាយ មានកសិករពោះម៉ាយម្នាក់ មានកូនកម្លោះបីនាក់ ។ គាត់ជាមនុស្សធ្លាប់តែដុតដៃដុតជើងក្នុងការប្រកបការងារ មិនដែលបណ្ដោយឱ្យពេលវេលាកន្លងទៅឥតប្រយោជន៍ឡើយ ។ កសិករនោះបាននិយាយប្រាប់គេឯងថា គាត់មានកូនកំលោះបីនាក់ ជាយុវជនប្រកបដោយរូបកាយមាំមួន កម្លាំងខ្លាំងក្លា រូបសម្បត្តិស្អាតបាត តែអ្នកទាំងបីនោះមិន

ទម្លាប់ធ្វើការងារសោះ ។ គេចូលចិត្តអង្គុយជជែកគ្នាលេងឥតប្រយោជន៍ក្រោមម្លប់ឈើ ឬក៏ទៅស្ទូចត្រីលេងនៅមាត់បឹង ។ គេតែងនិយាយ ៖ " យើងចាំបាច់ធ្វើការងារអ្វីទៀត ទ្រព្យមានមិនខ្វះ តាមអីពុកគាត់ជាមនុស្សរពឹសដៃរពឹសជើង " ។

ពេលវេលាចេះតែកន្លងទៅ ឪពុកកម្សត់កាន់តែជរា កម្លាំងកាន់តែខ្សោយ គាត់មិនអាចធ្វើការងារដូចមុនៗឡើយ ។ ច្បារដំណាំស្វិតរញម ស្មៅដុះទ្រុបទ្រុលក្នុងចម្ការ ដោយគ្មានអ្នកថែទាំ ។

បុរសឪពុកព្រួយបារម្ភ ពិបាកចិត្ត ចំពោះអាកប្បកិរិយារបស់កូនគាត់ ដែលមិនសម្រេចខ្លួនធ្វើការងារអ្វីសោះ ទម្លាប់ខ្លួនតែជជែកគ្នាលេងឥតប្រយោជន៍ ឬទៅស្ទូចត្រីលេងនៅមាត់បឹង ។ គាត់ក៏ធ្លាក់ខ្លួនឈឺទ្រុឌទ្រោមខ្សោយជាលំដាប់ ។

នៅពេលដែលដឹងខ្លួនថានឹងត្រូវសូន្យសង្ខារក្នុងពេលដ៏ខ្លីនេះ គាត់ក៏ហៅកូនទាំងបីមកជួបជុំគ្នា ហើយនិយាយ ៖

- បើអត់ពីឪពុក តើកូននឹងរស់នៅយ៉ាងដូចម្ដេច ? កូនទាំងបីរន្ធត់យ៉ាងខ្លាំងហើយកូនច្បងអង្វរឪពុក ៖
- ពុក! តើកូនត្រូវធ្វើដូចម្ដេច ? ពុកមានប្រសាសន៍ប្រាប់កូនផង!
- ល្អហើយកូន! ពុកនឹងនិយាយរឿងសម្ងាត់មួយប្រាប់កូន ។ កាលម្ដាយឯងនៅរស់ ពុក និងម៉ែឯងបានរកស៊ីសន្សំបានកាក់មាសមួយកូនក្រឡ ។ ពុកបានយកក្រឡទៅកប់ទុកក្នុងដីចម្ការជិតផ្ទះយើង ។ ពេលនោះពុកមិនច្បាស់ជានៅកន្លែងណាទេ ។

កូនត្រូវខំរកកំណប់នោះណាំកូន! ហើយត្រូវអត់ធ្មត់ទម្លាប់ខ្លួនក្នុងការងារលំបាកនោះផង ។ បើកូនរកឃើញកំណប់នោះ កូនអាចរស់នៅយ៉ាងសុខសាន្ត គ្មានកង្វះខាតទេ ។ ផ្ដាំកូនរួចហើយ ឪពុកកម្សត់រលត់សង្ខារ លាចាកលោកនេះទៅ ។ ក្រោយពីបញ្ចុះសពឪពុករួចហើយ កូនច្បងនិយាយទៅកាន់ប្អូនទាំងពីរ ៖ " ប្អូននៅចាំបណ្ដាំឪពុកយើងទេ ? ទៅយើងនាំគ្នារកកំណប់ឪពុកយើង " ។ ទាំងបីនាក់បងប្អូននាំគ្នាកកាយដីជិតៗផ្ទះ តែមិនឃើញអ្វីសោះ ។ អ្នកទាំងបីនាំគ្នាទៅជីកគាស់កកាយដីជុំវិញផ្ទះ ក្នុងច្បារ ក្នុងចម្ការទៀត ក៏រកពុំឃើញក្រឡមាសសោះ ។ កូន៣បាននិយាយឡើង ៖ "ពុក! បើគាត់កប់ក្រឡមាស គាត់មិនកប់រាក់នោះទេ

ប្រាកដជាកប់ជ្រៅហើយ ។ មក! យើងទៅគាស់ត្រឡប់ដីនេះម្តងទៀត ឱ្យជ្រៅៗគង់តែឃើញទេ" ។

ម្តងនេះ យុវជនទាំងបីនាក់ ខំពុះពារយ៉ាងសស្រោកសស្រាំ មិនមើលបំណាំគ្នាទ្រាំនឹងការលំបាក ប្រឹងគាស់ត្រឡប់ដីគ្មានសំចៃកម្លាំង ។ គេខំគាស់អស់ចិត្តអស់ចង់ មិនប្រទះកំណប់សោះ ។ បងប្អូនទាំងបីនាក់អង្គុយសម្រាក ក្រោមម្លប់ឈើមួយ ហើយសម្លឹងមើលដីចម្ការរបស់គេដោយស្ងៀមស្ងាត់ ។

កូនច្បងបាននិយាយឡើង៖ "ដីយើងល្អណាស់ មិនអាចទុកចោលទេ ។ យើងនាំគ្នាសាបព្រោះស្រូវទៅ យើងមិនខាតបង់កម្លាំងចោលអសារឥតការដែរ" ។ ស្រុះស្រួលគ្នាហើយ គេក៏នាំគ្នាសាបព្រោះស្រូវពាសពេញដី ហើយនាំគ្នាថែរក្សាយ៉ាងយកចិត្តទុកដាក់ ។ ដើមស្រូវដុះលូតលាស់ត្រកុំត្រកាល បែកគុម្ពត្រសុំត្រសាយ ចេញក្ួរពាសពេញស្រែ ហាក់ដូចកម្រាលព្រំពណ៌មាស ។

កសិផលបានច្រើនលើសលប់ យុវជនទាំងបីនាក់បងប្អូនយកផលស្រូវទៅលក់ បានប្រាក់ច្រើនក្រាស់ក្រែលណាស់ ។ ពេលនោះ កូនច្បងលាន់មាត់ ៖ " យើងទម្លាប់តស៊ូប្រឹងគាស់កាប់ភ្ជួរដីយើងនេះ ជាការប្រសើរណាស់ គឺយើងរកឃើញកំណប់ ដែលពុកយើងបានប្រាប់មុនពេលគាត់អនិច្ចកម្មទៅនោះហើយ" ។

*( ដកស្រង់ និងកែសម្រួលពីសៀវភៅរឿងព្រេងនិទានបោះពុម្ពឆ្នាំ ១៩៨៧ ក្រសួងអប់រំ )*

## សំណួរ

១. តើកូនកម្លោះទាំងបីនាក់របស់កសិករមានលក្ខណសម្បត្តិដូចម្តេចខ្លះ ?

២. តើកសិករផ្តាំកូនៗដូចម្តេចខ្លះមុនពេលគាត់ស្លាប់ ?

៣. តើកូនៗធ្វើតាមបណ្តាំឪពុកឬទេ ? ទទួលផលដូចបណ្តាំឬទេ ?

៤. ចូរបង្ហាញបំណងនៃបណ្តាំរបស់កសិករជាឪពុក ។

៥. ចូរស្រង់ពាក្យជាគុណកិរិយាកន្លែង និងគុណកិរិយាបំណែបឱ្យបានពីរៗពាក្យ ។ចូរស្រង់ល្បះសំណួរអត្ថបទឱ្យបាន៣ល្បះយ៉ាងតិច ។



# បុគ្គលិកកម្ម

នៅពេលយើងអានអត្ថបទផ្សេងៗដូចជារឿងព្រេង ប្រលោមលោក ឬកំណាព្យ . . . យើងឃើញអត្ថបទខ្លះ អ្នកនិពន្ធពណ៌នាវត្ថុ សត្វ ឬធម្មជាតិ ឱ្យមានសកម្មភាព ចេះនិយាយ ចេះខឹង យំសោក. . . ដូចមនុស្សដែរ ។ ការធ្វើបែបនេះគេហៅថា បុគ្គលិកកម្ម ។

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖

១. [...] គីង្គក់តប ៖ " មករ៉ុយបងឃ្មុំ! យើងដឹងហើយថា ក្រុមបងលើកទ័ពទៅច្បាំង ព្រោះអត់ទឹកភ្លៀង ឈើព្រៃមិនអាចផ្ដល់ផ្កាសម្រាប់ក្រុមបងធ្វើសំបុកតកូនចៅបានឡើយ ។ មកបង! កុំបង្អង់យូរ យើងនាំគ្នាទៅតយុទ្ធនឹងតាព្រហ្មកុំខ្លាចស្លាប់! ទៅពួកយើង! " ។ [...]

២. - ព្រះអាទិត្យបញ្ចេញកំហឹងយ៉ាងខ្លាំងនៅពេលរសៀលនេះ. . . ។

- ព្រះចន្ទញញឹមពព្រាយមករកសុភាព ហាក់ដូចជាជួយត្រេកអរនាង ដោយព្រលប់នេះ សុភាពលក់នំដាច់អស់គ្មានសល់. . . ។

- ក្នុងរាត្រីដ៏ស្ងប់ស្ងាត់ គេឮសូរសំឡេងថ្ងូចថ្ងូររបស់វាយោថ្លែងពីទុក្ខសោករបស់ខ្លួន. . . ។

## (បទកាកគតិ)

៣. អកទោចខ្ទួញយំ តាមដងព្រៃភ្នំ ឃើញភាពទារុណ
មនុស្សស្លាប់គរច្រើន កើនហួសបូកគុណ រុយមូសញាក់គ្រុន
ខ្លាចខ្មោចមនុស្សលង ។
មនុស្សធម៌បង់បាត់ ខ្លួនមនុស្សចិត្តសត្វ លែងស្គាល់ប្អូនបង
ជាតិជាមួយគ្នា ប្រហារចាប់ចង ចិត្តពាលយង់ឃ្នង
មោហ៍បាំងជុំជិត ។

*( ដកស្រង់ពីកំណាព្យមើលផែនដីខ្មែរសម័យប៉ុលពតរបស់ ជួន ម៉េន)*

តាមឧទាហរណ៍ខាងលើ យើងឃើញថា សត្វ ធម្មជាតិសុទ្ធតែមានលក្ខណៈ និងសកម្មភាពមនុស្សដូចជាគីង្គក់ ឃ្មុំលើកទ័ពទៅច្បាំង ព្រះចន្ទញញឹម ខ្យល់ថ្ងូចថ្ងូរ រុយមូសញាក់គ្រុនខ្លាចខ្មោចលង ។



*បុគ្គលិកកម្មជាវិធីដែលអ្នកនិពន្ធផ្តល់លក្ខណៈមនុស្សឱ្យដល់វត្ថុ សត្វ ឬធម្មជាតិទាំងឡាយ ដើម្បីឱ្យស្នាដៃរបស់គាត់កាន់តែមានភាពរស់រវើក ។*

## លំហាត់

ក. តើល្បះណាខ្លះបញ្ជាក់បុគ្គលិកកម្ម ?

១. ដើមស្រល់រេរាំតាមចង្វាក់វាយោ. . . ។

២. រាត្រីនេះរលឹមស្រិចៗ ផ្ការរត្រហឹមមិនដាច់សួរ. . . ។

៣. ក្រោយភ្លៀងបានបង្អុរមួយមេយ៉ាងធំ គេឮសូរតែសំឡេង គីង្គក់ ហ៊ឹង កង្កែប យំទ្រហឹងអឹងកង. . . ។

៤. សំណង់ខ្ពស់ស្កឹមស្កៃនិងល្អវិចិត្រនេះ ប្រតិស្ឋានឡើងដោយបាតដៃដ៏ប៉ិនប្រសប់របស់កូនខ្មែរជំនាន់យើងនេះ. . . ។

៥. រដូវប្រាំងមកដល់ សត្វទុង ក្រសារ នាំគ្នាលើកទ័ពសំដៅទៅបឹងបួដើម្បីរកចំណី ។

ខ. ចូរស្រង់សេចក្តី ដែលជាបុគ្គលិកកម្មក្នុងអត្ថបទកាព្យខាងក្រោម ៖

(បទកាកគតិ)

ផ្ការីកខុសកាល ទឹកសាចពេញវាល ស្មៅស្រពោនស្វិត
ក្រួសថ្មក្រៀមក្រំ យំសោកអាណិត ត្រកួនព្រលិត
លេងឫទ្ធិឡើងទ្រើង ។

វេស្សវ័ណ្ណអង់អាច អាងឫទ្ធិអំណាច ប្រឹងលើកតម្កើង
ហ៊ឹងនិងគីង្គក់ ពីភក់ចំបើង ឱ្យរុងរឿងថ្កើង
ឡើងស្មើចន្ទ្រា ។
ហ៊ឹងអរភ្លេចគិត ភ្ញាក់ទាំងងងឹត ឥតគិតពិចារ
លោតលលេងភ្លើង ក្រហមភ្លឺថ្លា ព្រាត់ប្រាសខ្លោចផ្សា
ទើបនឹកស្ដាយក្រោយ ។
ស្រណោះផ្គរលាន់ ផ្គរស្រែករន្ទាន់ ប្រាប់ជាអំណោយ
ហ៊ឹងក្អាត់មិនស្ដាប់ លុះស្លាប់ថ្លោះធ្លោយ បែរងាកមើលក្រោយ
កោះត្រើយហួសឆ្ងាយ ។

*( កំណាព្យ “ មើលផែនដីខ្មែរ សម័យប៉ុល ពត ” ជួន ម៉េន )*



# ការស្តាប់អត្ថបទកាព្យ " ខែប្រាំង "

• ចូរអ្នកស្តាប់អត្ថបទកាព្យ ដែលគ្រូរបស់អ្នកអាន ដើម្បីត្រៀមឆ្លើយសំណួរខាងក្រោម៖



## សំណួរ

១. តើអត្ថបទនេះជាកំណាព្យបទអ្វី ?

២. នៅខែប្រាំង តើពួកស្រមោចធ្វើអ្វីខ្លះ ? ចំណែកពួករៃធ្វើអ្វីខ្លះដែរ ?

៣. នៅរដូវវស្សា តើពួកស្រមោចរស់នៅដូចម្តេច ? ហេតុអ្វី ?

៤. ចំណែកឯពួករៃរស់នៅដូចម្តេចដែរ ? ហេតុអ្វី ?

៥. ចូរបង្ហាញបុគ្គលិកលក្ខណៈក្នុងអត្ថបទកាព្យដែលបានស្តាប់ ។



# រឿង ភ្នំបុរី



កាលនោះ មានព្រះរាជាមួយព្រះអង្គគង់នៅព្រះរាជវាំងបាសាក់ ឬចម្ប៉ាសាក់ គឺនៅផ្នែកខាងលើនៃទន្លេមេគង្គ ។ ព្រះអង្គមានព្រះរាជបុត្រីមួយព្រះអង្គ ប្រកបដោយរូបឆោមល្អ ល្អះ រកនរណាប្រៀបគ្មាន ។ ព្រះនាងមានចិត្តប្រតិព័ទ្ធទៅលើបុរសទុរគតម្នាក់យ៉ាងខ្លាំងក្លា ។ ដោយប្រកាន់វណ្ណៈ ព្រះរាជាសុខចិត្តបំបរបង់ព្រះរាជបុត្រីជាមួយនឹងបុរសទុរគតនោះចេញពីព្រះរាជវាំង ។ ព្រះរាជាទ្រង់ចាត់សេនាឱ្យរៀបចំ ស្រូវអង្ករ ពោតសណ្តែក អំបិលប្រហុក និងប្រដាប់ប្រដាប្រើប្រាស់ជាច្រើនផង ដាក់ពោងពាយបណ្តែតចេញទៅ ។ ពោងពាយចេះតែអណ្តែតតាមទឹកធំល្វល្វេវជាយូរថ្ងៃ ក៏នាំអ្នកទាំងពីរទៅដល់ភ្នំមួយ គឺភ្នំបុរីនេះឯង ដែលសព្វថ្ងៃស្ថិតនៅក្នុងខេត្តតាកែវ ។ កាលនោះព្រះនាងអាក់អ និងបុរសទុរគតជាស្វាមីមានសេចក្តីត្រេកអរយ៉ាងខ្លាំង ដោយខ្លួនបានរួចជីវិតពីកណ្តាលជលសារ ។ អ្នកទាំងពីរក៏នាំគ្នាម្ទីម្នាជញ្ជូនរបស់របរពីពោងពាយឡើងទៅលើគោក ហើយរកកាប់ឈើធ្វើជាខ្ទមដើម្បីស្នាក់នៅទីនោះ ។

ការរស់នៅទីកណ្តាលព្រៃភ្នំ តែពីរនាក់ ធ្វើឱ្យព្រះនាង " មានការនឹករឭកមកព្រះបិតាមាតា បងប្អូនជាខ្លាំង ។ ពេលរាត្រី នាងតែងអង្គុយសញ្ជប់សញ្ជឹង លន្លង់លន្លោចជាមួយនឹងសំឡេងថ្ងូចថ្ងូររបស់វាយោកំពូលភ្នំ លាយឡំជាមួយនឹងចម្រៀងឆ្លើយឆ្លងរបស់សត្វរាត្រីចរទាំងឡាយ ។ នៅយប់មួយ នាងលង់លក់មួយភាំងទៅ ក៏មានអ្នកសច្ចំមកពន្យល់សប្តិថានឹងជួយនាងឱ្យមានទ្រព្យសម្បត្តិ និងកិត្តិយសល្បីល្បាញនៅទីភ្នំនេះ ។ សុបិននេះជាកម្លាំងចិត្តធ្វើឱ្យនាងនិងស្វាមីខិតខំកាប់គាស់ដីព្រៃដើម្បីដាំដំណាំផ្សេងៗចិញ្ចឹមជីវិត ។ ព្រះនាងអាក់អបានឱ្យប្តីទៅកាប់អុសនៅឯព្រៃជ្រៅ ចំណែកនាងនៅធ្វើការជិតៗខ្ទម ។ បុរសជាស្វាមីបានទៅកាប់អុសបានសុទ្ធតែឈើចន្ទន៍ក្រស្នាមកគរទុកបានយ៉ាងច្រើន ។ ព្រះនាងស្គាល់ច្បាស់ថា ជាឈើមានតម្លៃលើសលប់ក៏ប្រាប់ប្តីឱ្យទៅរកឈើទាំងនោះមកទុកឱ្យបានច្រើន ។ ប្តីធ្វើតាមបណ្តាំប្រពន្ធទាំងរីករាយ ។ ថ្ងៃមួយ ពេលប្តីទៅកាប់ឈើដូចធម្មតា ក៏ប្រទះនឹងដុំថ្មមានពណ៌លឿងទុំល្អប្លែក ក៏យកថ្មបីដុំទៅផ្ទះជាមួយ ។ ប្រពន្ធស្គាល់ច្បាស់ថាជាដុំមាស ក៏សួរប្តី ហើយផ្តាំឱ្យប្តីប្រមូលថ្មនោះមកទុកឱ្យបានច្រើន ។ ប្តីចេះតែធ្វើតាមប្រពន្ធរហូតបានឈើចន្ទន៍ក្រស្នានិងដុំមាសរាប់គំនរ ។ ព្រះនាងអាក់អ ក៏ឱ្យប្តីចាត់ចែងលើកទង់ពណ៌សមួយយ៉ាងខ្ពស់ដើម្បីសម្គាល់ក្រែងមានសំពៅជំនួញណាធ្វើដំណើរមកគេឃើញនឹងចូលមកទាក់ទងជួញដូរ ។ មិនយូរប៉ុន្មាន មានសំពៅជំនួញប្រាំពីរមកពីលង្កាបានចូលសំចតនៅទីមាត់ទឹក ហើយជង្ហោសំពៅក៏ឡើងទៅមើលតាមសញ្ញា ក៏បានជួបហើយនិយាយដោះដូរមុខជំនួញមានកំណាត់សំពត់ គ្រឿងប្រើប្រាស់ ហូបចុក និងភស្តុភារដទៃទៀតជាមួយឈើចន្ទន៍ក្រស្នា និងដុំមាស ។ ព្រះនាង" អាក់អ " យល់ព្រមដោះដូរតែឈើចន្ទន៍ក្រស្នាទេ ចំណែកដុំមាស នាងបានឱ្យនាយសំពៅទៅរកជាងមាសប្រុស ១០០នាក់ស្រី ១០០នាក់ មកពីស្រុកក្រៅដើម្បីច្នៃទៅជាគ្រឿងអលង្ការសិន ។ នាយសំពៅត្រឡប់សំពៅទៅស្រុកវិញ ហើយធ្វើតាមបណ្តាំនាងអាក់អ ។ មិនយូរប៉ុន្មាន ទីនោះក៏មានអ្នកស្រុកក្រៅមកតាំងទីលំនៅ កើតជាកូនពូនជាចៅកាន់តែច្រើនឡើងៗ ហើយពួកគេគោរពកោតខ្លាច និងចាត់ទុកព្រះនាងអាក់អនិងស្វាមីជាម្ចាស់នៅទីនោះ ។ ក្រោយមក ព្រះនាងអាក់អ ក៏ឱ្យស្វាមីប្រកាសខ្លួនឯងជាស្តេចមួយអង្គគ្រងរាជ្យនៅតំបន់នោះ ដោយមានព្រះនាមថាព្រះបាទសង្ខចក្រ និងព្រះនាងអាក់អជាអគ្គមហេសី ។ ព្រះអង្គសង្ខចក្រក៏ចាត់ចែងឱ្យមានជាមន្ត្រីរាជការតាមផ្នែក ក្រុម មាន

ទ័ព ។ល ។ ព្រមទាំងរៀបចំទីនោះឱ្យមានលក្ខណៈជាក្រុងមួយយ៉ាងល្អ ដោយមានកំផែងព័ទ្ធជុំវិញ ។ អ្នកស្រុកនៅទីនោះហៅ " បុរី " ព្រោះចាត់ទុកថាអ្នកទៅទីនោះជាអ្នកក្រុង ហេតុដូចនេះបានជាជាប់ឈ្មោះទីនោះថា " ភ្នំបុរី " រហូតមកដល់សព្វថ្ងៃ ។

*( ដកស្រង់ និងសម្រួលពីប្រជុំរឿងព្រេងខ្មែរភាគ ៦ )*

## សំណួរ

១. តើហេតុអ្វីបានជាព្រះរាជាបំបរបង់បុត្រីចេញពីព្រះរាជវាំង ?
២. ក្រោយពីត្រូវព្រះបិតាបំបរបង់ តើព្រះនាងអាក់អទៅរស់នៅទីណា ? ប្រកបរបរអ្វីខ្លះ ?
៣. ចូរស្រង់ពាក្យដែលជាគុណកិរិយាកន្លែង និងគុណកិរិយាបំណែបពីក្នុងអត្ថបទ ។
៤. ចូរបង្ហាញបុគ្គលិកកម្មនៅក្នុងអត្ថបទ ។
៥. តើកត្តាអ្វីខ្លះដែលជំរុញឱ្យបុរសទុរគត និងព្រះនាងអាក់អក្លាយជាស្តេច ?
៦. តើរឿងនេះជាទេវកថាឬជាព្រេងកថា ? ចូរបញ្ជាក់ ។



## ការសូត្រកំណាព្យ

អ្នកបានសិក្សារួចមកហើយ ពីកំណាព្យបទកាកគតិ ។ ឥឡូវនេះ អ្នកបើកទំព័រអំណាន " ច្បាប់ល្បើកថ្មី " រួចសូត្រកំណាព្យនេះឡើងវិញ ។

• កំណាព្យបទកាកគតិ ៖ ១វគ្គ មាន ៧ឃ្លា
១ឃ្លា មាន ៤ព្យាង្គ ។

បទនេះ គេប្រើសម្រាប់ពណ៌នាទីកន្លែង តួអង្គ ធម្មជាតិ ជួនកាលគេយកបទនេះទៅប្រើក្នុងការសម្តែងទុក្ខសោក ។

របៀបសូត្រ ៖ បទនេះមានចង្វាក់ស្មើ មិនលើក មិនដាក់ តែរន្ថើនៗ មានទំនងដូចជាដំណើរក្អែកលោត ហើយទម្លាក់សំឡេងលើព្យាង្គទី២ គ្រប់ឃ្លា ។



# ការតែងកំណាព្យបទកាកគតិ

- កំណាព្យបទកាកគតិ ៖ ១វគ្គ មាន ៧ឃ្លា

  ១ឃ្លា មាន ៤ព្យាង្គ។

**ចំណាប់ចួន**




- ចួនក្នុងវគ្គ ៖ ព្យាង្គទី៤ នៃឃ្លាទី១ ចួននឹងព្យាង្គទី៤ នៃឃ្លាទី២

  ៖ ព្យាង្គទី៤ នៃឃ្លាទី៣ ចួននឹងព្យាង្គទី៤ នៃឃ្លាទី៥ ចួននឹងព្យាង្គទី៤ នៃឃ្លាទី៦

- ចួនឆ្លងវគ្គ ៖ ព្យាង្គទី៤ នៃឃ្លាទី៧ ក្នុងវគ្គទី១ ចួននឹងព្យាង្គទី៤នៃឃ្លាទី៣ក្នុងវគ្គបន្ត។

## លំហាត់

- ចូរអ្នកតែងកំណាព្យ បទកាកគតិឱ្យបាន៤វគ្គ ស្ដីអំពី " តម្លៃនៃការងារ " ឬ "អត្ថប្រយោជន៍នៃការងារ " ។

សំណេររបស់អ្នកត្រូវយកចិត្តទុកដាក់លើ ៖

- ការប្រើប្រាស់ពាក្យពេចន៍ត្រឹមត្រូវ
- ការគោរពចំណាប់ចួនត្រឹមត្រូវតាមបទកាកគតិ . . .។




# សេចក្ដីព្យាយាម



សេចក្ដីព្យាយាមជាការតស៊ូ ខិតខំ ខ្មីឃ្មាត ជម្នះគ្រប់ការលំបាក ដើម្បីធ្វើឱ្យសម្រេចតាមគោលបំណងរបស់ខ្លួន ។ ពេលណាសេចក្ដីព្យាយាមកាន់តែរឹងមាំ ពេលនោះជ័យជម្នះ ឬការសម្រេចកាន់តែឈានចូលមកជិតយើងដែរ ។ ដូចនេះអ្នកគប្បីបង្កើនសេចក្ដីព្យាយាមភាពអំណត់ និងភាពស្វាហាប់របស់អ្នកថែមទៀត ។

ជាពិសេស អ្នកនឹងបានសិក្សាផងដែរអំពីៈ

- តួអង្គនិងទម្រង់អត្ថបទល្ខោន ។
- សញ្ញាសម្ព័ន្ធ "ទៅជា" និង "មកពី " ។
- គុណកិរិយាបរិមាណ ទីតាំងគុណនាម កិរិយាក្នុងល្បះ ។
- ការសម្ដែងល្បែងដើរតួ ។
- សំណេរសង្ខេបអត្ថបទល្ខោនជាពាក្យរាយ ។



# ភាពខុសគ្នារវាងអត្ថបទល្ខោន និងអត្ថបទពាក្យរាយ

តាមការសិក្សាកន្លងមក គេឃើញមានអត្ថបទច្រើនប្រភេទដូចជា អត្ថបទពាក្យរាយ ពាក្យកាព្យ ឬអត្ថបទល្ខោនជាដើម ។

- ចូរអ្នកអានអត្ថបទខាងក្រោមនេះ ដើម្បីស្វែងយល់ តើថាជាអត្ថបទល្ខោន ឬជាអត្ថបទពាក្យរាយ៖

**ឧទាហរណ៍ទី១៖**

- អ្នកស្រទុំ ៖ មីកាភ័ព្វ (នាងភ័ព្វរត់ចូលក្នុងវិញ លោករ័ត្នដើរមុខ ពូចិត្រ និងនាយអឿនសែងលោកប៊ុស្ដិ៍ចូលមកកណ្ដាលឆាក)
- លោករ័ត្ន ៖ នេះហើយលោកប៊ុស្ដិ៍... លោកអ្នកស្គាល់ទេ? ...មេត្តាប្រាប់ខ្ញុំផងលោកអើយ! ...
- លោកគី ៖ ផ្ទះអាណា អាហ្នឹងវាស្គាល់ ចាំបាច់សួរអី! ...
- ពូចិត្រ ៖ បើស្គាល់! ផ្ទះលោកឯងនៅឯណា... គេរកតែលុយស៊ីបាយគ្មាន! ឯងយកលុយទៅផឹកស្រាឱ្យស្រវឹង (អ្នកទាំងពីរដាក់លោកគីចុះ) ។
- លោកគី ៖ ផ្ទះខ្ញុំនេះ!... (ចង្អុលចំមែន) ។
- នាយអឿន ៖ ទរទៀតហើយ ឱ្យតែផ្ទះអ្នកណានៅចំពីមុខគាត់ ផ្ទះគាត់ទាំងអស់!...
- លោករ័ត្ន ៖ ហ្ន៎! យើងប្រថុយគិតហៅផ្ទះហ្នឹងម្ដងទៀតមើល ក្រែងលោវាមែន!...
- ពូចិត្រ ៖ ទេ!...ខ្ញុំមិនហ៊ានទេ! អម្បាញ់មិញគាត់ចង្អុលផ្ទះក្លិង្គថាជាផ្ទះរបស់គាត់ យើងហៅឱ្យបើកទ្វារទៅ ស្រាប់តែក្លិង្គចេញមក ឥឡូវមកចង្អុលផ្ទះនេះទៀតហើយ អាណាហ៊ានដាស់! ... នែ៎! លោក សុំលុយថ្លៃស៊ីក្លូមក ខ្ញុំទៅរកស៊ីវិញហើយ ខាតអស់មួយយប់ទទេ!
- នាយអឿន ៖ លុយឯណា!... ទាល់តែរកផ្ទះលោកនេះឃើញ ទើបយកលុយពីប្រពន្ធកូនគាត់ឱ្យ... អ្នកណាមានលុយឱ្យ!... [...]

**ឧទាហរណ៍ទី ២៖**

[...] ឯក្បាលត្រីដោយមានឆ្អឹងធំក៏ធ្ងន់ចុះ ខ្លាត្រីក៏ថា"អះអា! ខាងនេះធ្ងន់ជាង ត្រូវយកសាច់ចេញ ទើបបាន" ។ ថាហើយក៏លូកយកក្បាលត្រីចេញពីអ៊ុយ ហើយខិនខាំស៊ីត្រង់សាច់អមក ហើយដាក់ទៅថ្លឹងទៀត ។ ថ្លឹងទៅខាងក្បាល ស្រាលបះឡើងខាងកន្ទុយក៏ធ្ងន់ចុះ ។ ខ្លាត្រីក៏ពោល៖" អះអា! ខាងនេះចាស់ជាង ត្រូវយកសាច់ចេញខ្លះ ។ " ថាហើយក៏លូកយកកន្ទុយមកខាំស៊ីសាច់ខាងគល់កន្ទុយនោះ ហើយដាក់ថ្លឹងទៅទៀត ។ ខ្លាត្រីថ្លឹងត្រី មិនឱ្យស្មើចេះ តែស៊ីទៅស៊ីមក ទាល់តែអស់សាច់ រេចនៅតែឆ្អឹងទាំងសងខាង ទើបថ្លឹងឱ្យស្មើបាន ហើយក៏ដាក់ចុះចាកត្រាជូ ហៅភេទាំងពីរ៖" ចៅឯងទាំងពីរចូលមើលចុះ យើងថ្លឹងចែកនេះ ត្រូវដោយយុត្តិធម៌ ល្អហើយ តាមចិត្តចៅណាយកភាគទាំងពីរនេះ មិនលើសមិនខ្វះទេ " ។ ឯភេទាំងពីរបានឃើញកិរិយាខ្លាត្រី ក្លែងថ្លឹងស៊ីសាច់អស់ខាងក្បាលនៅតែលលាដ៍ ខាងកន្ទុយនៅតែចុងជាយ និងយកទៅអាស្រ័យពុំបានដូចនោះ ក៏កើតខឹងចិត្ត ស្តាយគំនិតប្រព្រឹត្តខុស លុះទៅដោយក្តីលោភចង់បានតែឯង មិនបែងបទអធ្យាស្រ័យ ក្តីសាមគ្គីនឹងគ្នា កើតខឹងប្តឹងផ្តល់ទាល់តែអស់សៀងរៀងខ្លួន ។ ភេទាំងពីរកើតវិប្បដិសារី រំពូកក្តីខ្លួនធ្វើខុស កើតក្តៅក្រហាយ ហើយក៏បោលចោលចំណែកខ្លួនទៅកាន់លំនៅនៃអាត្មាទីទៃៗហោង ។

*(ដកស្រង់ពីគតិលោកភាគទី១០)*

**ឧទាហរណ៍ទី៣៖**

[...] នៅតាមជនបទស្រែចម្ការនិងនៅតាមរោងចក្រឧស្សាហកម្ម យុវកសិករ ឬយុវកម្មករ ខិតខំបញ្ចេញសមត្ថភាពខ្លួនយ៉ាងអស់ពីចិត្តពីថ្លើម ។ គេរវៀសរវៃបំពេញភារកិច្ច ដែលជាកាតព្វកិច្ចរបស់ខ្លួនមិនស្ទាក់ស្ទើរ ដោយខិតខំបង្កើតផលិតផលគ្រប់យ៉ាង ឱ្យសម្បូរហូរហៀរដើម្បីកសាងសេដ្ឋកិច្ចជាតិឱ្យរីកចម្រើនឆាប់រហ័សទាន់សម័យទំនើប ។ នៅតាមអគារសិក្សាយុវសិស្ស យុវនិស្សិត តស៊ូព្យាយាមរៀនសូត្រសព្វមុខវិជ្ជា ដើម្បីបណ្តុះគំនិតរបស់ខ្លួនឱ្យភ្លឺស្វាងនឹងក្លាយទៅជាអ្នកចេះដឹង ឬជាអ្នកប្រាជ្ញបណ្ឌិត យ៉ាងស្ទាត់ជំនាញក្នុងពេលអនាគត ។

បច្ចុប្បន្ននេះ យុវជនកម្ពុជាមានភារកិច្ចសំខាន់ណាស់ ក្នុងការរួមចំណែកអភិវឌ្ឍជាតិឱ្យរីកចម្រើន ។ ការរួបរួមគ្នាទាំងផ្លូវកាយ និងទាំងវាចាចិត្ត ដើម្បីលើកស្ទួយអរិយធម៌ជាតិឱ្យរុង

រឿង ជាភារកិច្ចរបស់យុវជន ។ យុវជនជាសេចក្ដីសង្ឃឹមរបស់មាតុភូមិ ។ យុវជន មិនត្រូវបណ្ដែតបណ្ដោយ ធ្វើឱ្យជីវិតដ៏មានតម្លៃរបស់ខ្លួន ដែលប្រៀបបាននឹងបុប្ផាកំពុងត្រូវទឹកសន្សើមរីកស្គុសស្គាយ ផ្សាយក្លិនពិដោរនោះ ឱ្យស្រពាប់ស្រពោន ទៅវិញនោះឡើយ ។ ដោយសារតែកម្លាំងរួបរួមគ្នាដ៏រឹងមាំរបស់យុវជន ប្រទេសជាតិនឹងមានអរិយធម៌ខ្ពង់ខ្ពស់ព្រមទាំងវឌ្ឍនធម៌ស្ថិតស្ថេរចីរកាលយូរអង្វែង ។

អត្ថបទឧទាហរណ៍ទី១ បានបង្ហាញឱ្យឃើញពីបញ្ជីតួអង្គនៅម្ខាង ហើយបទសន្ទនារបស់តួអង្គនៅម្ខាង ។ បទសន្ទនានីមួយៗមានប្រើស្មៀងជាចាំបាច់ មានតួអង្គ និងដំណើររឿង ។

អត្ថបទឧទាហរណ៍ទី២ បានបង្ហាញដំណើររឿងនៃសត្វរភេពីររកស៊ីចូលគ្នា ដែលមានផ្នែកពោល និងផ្នែកសន្ទនា ព្រមទាំងបង្ហាញព្រឹត្តិការណ៍នៃរឿងទៀតផង ។

អត្ថបទក្នុងឧទាហរណ៍ទី៣ បានបង្ហាញពីគំនិតសំខាន់ ដោយពណ៌នារៀបរាប់ តួនាទីរបស់យុវជន ក្នុងការអភិវឌ្ឍជាតិឱ្យរុងរឿង ។

ដូចនេះ តើអ្វីទៅដែលហៅថាអត្ថបទល្ខោន? អ្វីទៅដែលហៅថាអត្ថបទពាក្យរាយ? តើអត្ថបទទាំងពីរនេះមានលក្ខណៈខុសគ្នាយ៉ាងណាខ្លះ?

*អត្ថបទល្ខោនជាអត្ថបទមួយប្រភេទ ដែលមានបញ្ជីឈ្មោះតួអង្គនៅម្ខាងមានសេចក្ដីសន្ទនារបស់តួអង្គនៅម្ខាង ហើយតួអង្គនីមួយៗបានសន្ទនាគ្នាតាមសេចក្ដីនោះ ។ អត្ថបទល្ខោនខ្លះមានបង្ហាញឈុតនិងឆាក ។*

*អត្ថបទពាក្យរាយបង្ហាញព្រឹត្តិការណ៍នៃរឿង ឬគំនិតសំខាន់ដោយពណ៌នារៀបរាប់ពីសំណាក់អ្នកនិពន្ធ ។*

## លំហាត់

ចូរអានអត្ថបទជាបន្តបន្ទាប់ដែលមាន រឿងព្រះអាទិត្យរះហើយ រឿងបុរសកម្សត់សង់ខ្ទមក្បែរផ្ទះសេដ្ឋីធ្វើត្រាប់សេដ្ឋី និងរឿងមិត្តសានិត ដើម្បីបញ្ជាក់ថា អត្ថបទណាមួយជាអត្ថបទល្ខោន ហើយអត្ថបទណាមួយជាអត្ថបទពាក្យរាយ ។



# រឿង ព្រះអាទិត្យរះហើយ



## ឆាកទី៣ [...]

(ទិដ្ឋភាពក្នុងផ្ទះអ្នកស្រទុំ)

លោករ័ត្ន ៖ . . . ឥឡូវបើយើងដឹងហេតុការណ៍មិនស្រុះស្រួលក្នុងវង្សត្រកូល ដូច្នេះហើយ យើងខំកែខ្លួនម្នាក់បន្តិចៗ នោះវង្សត្រកូលគង់តែរកសុភមង្គលឃើញឡើងទេ... ឥឡូវបើយើងរកឃើញហេតុមិនស្រួលក្នុងគ្រួសារហើយ គប្បីសមាជិកទាំងអស់ចេះតាំងចិត្ត ថា ខំកែខ្លួន! . . .

- ពូចិត្រ ៖ នរណាដែលត្រូវចេញថ្លៃស៊ីក្លូឱ្យខ្ញុំមែនទែន ? . . .
- នាយអឿន៖ នៅឱ្យស្ងៀមសិនពូ... ចាំចប់ចុងចប់ដើមរឿងមួយសិន. . .
- អ្នកស្រទុំ ៖ កែមិនកើតទេលោក បើដបស្រានៅតែដៃអ៊ីចឹង! . . .
- លោកគី ៖ អញផឹកអ៊ីចឹងហើយ បើប្រពន្ធវារៀបខ្លួនអ៊ីចឹងនោះ! . . .
- អ្នកស្រទុំ ៖ ខ្ញុំនៅតែអ៊ីចឹង កំណើតខ្ញុំយ៉ាងម៉េច យ៉ាងហ្នឹងហើយ! . . .

- លោកគី ៖ អញផឹកទៀត (ហៀបនឹងចាក់ស្រាផឹក)

- លោកវ័ត្ត ៖ អីយ៉ូយៗ! ... ឈប់សិន ខូចការអស់ហើយ ឈ្លើយតាងនាមអ្នកទាំងអស់គ្នា ដែលជួបជុំក្នុងពេលនេះ ខ្ញុំសូមអង្វរលោកខាងនោះ (មើលមុខលោកគី) ឱ្យបោះបង់ការពិសាស្រាចោលទៅ! ខ្ញុំសុំអ្នកខាងនោះឱ្យចេះលៃលកជាស្រីមេផ្ទះ គឺរៀបចំកាយឱ្យល្អម ចេះប្រើសម្ដីផ្អែមល្ហែមនឹងស្វាមី រៀបចំផ្ទះសម្បែងឱ្យសមរម្យទៅជាទ្រនំមួយដែលមានសុភមង្គល តើអ្នកទាំងអស់គ្នាយល់ដូចខ្ញុំទេ ?. . .

- លោកជិន ៖ ខ្ញុំនេះជាងគេជាងឯងហើយ! សុំឱ្យតែស្រុះស្រួលនឹងគ្នាទៅ! សង្គមខ្មែរយើងមិនទាន់រៀបរយល្អ ម្ល៉ោះហើយប្ដីដែលចេះ ត្រូវតាំងចិត្តជាអ្នកសន្ដោសប្រពន្ធ ប្រពន្ធដែលច្រើនជាអ្នកមិនសូវមានចំណេះត្រូវតាំងចិត្តជាអ្នកតាមប្ដីខ្លះផង(ចង្អុលទៅនាយអឿន និងនាងភ័ព្វ) យុវជនជំនាន់ក្រោយ ដែលបានរៀនសូត្រនៅសាលាដូចគ្នានោះ ពួកគេនឹងក្លាយទៅជាវង្សត្រកូលនៃអនាគតមួយល្អជាមិនខាន...

- អ្នកស្រទុំ ៖ លោកដែលមិនទាន់ស្គាល់ទុក្ខវេទនាខ្ញុំច្បាស់ ចេះតែថាឱ្យខ្ញុំងាយៗ លោកគិតមើល ខ្ញុំជាអ្នករក្សាសីលទៅវត្ត មានប្ដី...បន្តិចមានគេប្រាប់ថា...ហ៉ាក! នៅឯបកប៉ូលិសឯណោះ! ព្រោះស្រវឹងជ្រុល បន្តិចថាហ៉ាក! ដួលនៅតៀមស្រាងណោះ គេដឹកយកមក ប្រាក់ខែប្រាក់ចុងអីក៏ខ្ទេចអស់ដែរ ខ្ញុំវេទនាណាស់!...

- លោកគី ៖ វេទនាព្រោះតែគំនិតឯង ដែលតាំងខ្លួនជាជុំថ្ម ជាងោះ ខ្ញុំទ្រាំមិនបាន ខ្ញុំទ្រាំមិនបាន ខ្ញុំផឹកស្រាទៅ! ...

- លោកវ័ត្ត ៖ ចុម! ... ចុម! ... ទៀតហើយ ... ឈ្លើយឈប់ជជែកគ្នាត្រឹមប៉ុណ្ណឹងហើយ ព្រមទទួលទាំងពីរនាក់ ថាម្នាក់ខុសបន្តិចៗ ចុះ(ងាកទៅរកអ្នកស្រទុំ) មិនអីចឹងហ្អីអ្នក?

- អ្នកស្រទុំ ៖ លោកចេះធ្វើម្ដេច ឱ្យគេឈប់ផឹកស្រាទៅ ខ្ញុំនោះមិនអីទេ!

- លោកគី ៖ លោកចេះធ្វើយ៉ាងម៉េច ឱ្យគេចេះស្គាល់កំហុសគេ ហើយចេះរៀបចំសម្ដីរៀបចំខ្លួនប្រាណ ឱ្យស្រួលនឹងប្ដីទៅ ខ្ញុំនោះវាមិនអីទេ!

- លោកវ័ត្ត ៖ ម្នាក់ៗ! ... កាន់តែជឿនលឿនទៅមុខហើយ! ...

- ពូចិត្រ ៖ អឺចឹងនែ៎ ! សុំលុយថ្លៃស៊ីភ្លូមក សុំឱ្យគេគិតមួយយប់តែម្តងទៅ!.....
- នាយអឿន៖ លោកពូ! ... អ្នកមីង! ការស្រុះស្រួលរវាងលោកពូ និងអ្នកមីងមានន័យ និងមានសារៈសំខាន់ណាស់ ។ បានន័យថា នៅពេលដែលយើងកំពុងស្ទះស្វែងសាងសង្គមដើម្បីឱ្យមានរបៀបរៀបរយ យើងម្នាក់ៗចេះព្រមទទួលកំហុសខ្លួន ។ ការស្គាល់កំហុសនេះហើយ ជាការស្ម័គ្រចិត្តព្រមគ្នាទទួលប្រឹងប្រែងកែខ្លួនជាថ្មីឡើងវិញ...
- ពូចិត្រ ៖ ហ៊ឺ! ... វែងណាស់! សុំលុយមក! ... ! ... ! ...
- លោកជិន៖ លោកក្មួយមានឧត្តមគតិល្អណាស់ ឮសម្តីក្មួយហើយ (ទះស្មានាយអឿន) ធ្វើឱ្យយើងទាំងអស់គ្នាសង្ឃឹមថា អនាគតខ្មែរមិនសាបសូន្យទេ! ...
- នាងភ័ព្វ ៖ ខ្ញុំសុំនិយាយម្តង ដំបូងខ្ញុំសុំទោសលោកពូរ័ត្ន លោកពូចិត្រ បងអឿននិងលោកពូជិន ដែលអត់ងងុយអស់មួយយប់មកពីរឿងប៉ា និងម៉ែខ្ញុំ ។ រឿងទាំងនេះ ខ្ញុំសូមអរគុណ លោកពូទាំងអស់ដែលបានខំខ្នះខ្នែងបណ្តុះសុភមង្គលឱ្យកើតក្នុងវង្សត្រកូលខ្ញុំវិញ វង្សត្រកូលដែលគ្មានសុភមង្គល ប្រៀបដូចជាទន្លេគ្មានទឹក ប្រៀបដូចផ្ទះឥតដំបូល (នាងភ័ព្វលុតជង្គង់ចុះ)លោកប៉ា អ្នកម៉ែ កូនសូមលោកប៉ាអ្នកម៉ែធ្វើម្តេចយល់ព្រមមូលចិត្តគ្នាវិញទៅចុះ ទើបកូនរស់បានសប្បាយដូចកូនគេធម្មតា... ក្នុងលោកនេះ គ្មានទុក្ខអ្វីធំជាងទុក្ខកូនស្រីដែលម្តាយឪពុកឈ្លោះគ្នានោះទេ កូនស្រឡាញ់អ្នកមានគុណទាំងពីរស្មើគ្នា សូមលោកប៉ា និងអ្នកម៉ែជ្រាប (អ្នកស្រទុំកាន់ដៃកូន)
- អ្នកស្រទុំ ៖ កូនម្តាយ! ... កូនចង់យ៉ាងម៉េច ? ... ម៉ែធ្វើតាមទាំងអស់!
- លោកគី ៖ (ដើរទៅកាន់ដៃកូនម្ខាងទៀត) កូនរបស់ឪពុក កូនចង់យ៉ាងម៉េច ?... ឪពុកធ្វើតាមទាំងអស់!... (នាងភ័ព្វចាប់ដៃឪពុក និងម្តាយផ្ទុំគ្នា ហើយសំឡេងបក្សាបក្សីយំច្រៀវច្រៃ ភ្លើងលើឆាកបើកទាំងអស់បញ្ជាក់ថា ព្រះអាទិត្យរះហើយ ព្រះសូរិយាបញ្ចេញរស្មីត្រចះ)
- នាងភ័ព្វ ៖ ឱ! បក្សាបក្សី សត្វពាហនៈជាមិត្តទាំងឡាយ អ្នកបានច្រៀងកងរំពងឡើង ជាសញ្ញាមួយអបអរសាទរវង្សត្រកូលខ្ញុំ ដែលត្រឡប់មករកសុភមង្គលវិញ...

សំឡេងអ្នកពីរោះណាស់ មកដាស់អារម្មណ៍មនុស្ស ឱ្យមានសង្ឃឹមហើយ! ហើយត្រេកត្រអាលនឹងជីវិតថ្មីជានិច្ច....! [...]

*(ដកស្រង់ និងកែសម្រួលចេញពីល្ខោននិយាយរឿង " វង្សត្រកូលកម្សត់ ឬព្រះអាទិត្យរះហើយ" ឆាកទី៣ និពន្ធដោយលោក ហង់ ធនហាក់)*

## សំណួរ

១. តើអត្ថបទនេះជាប្រភេទអត្ថបទពាក្យរាយ ឬជាអត្ថបទល្ខោន ?

២. ហេតុដូចម្តេចបានជាក្នុងវគ្គនេះ គេប្រើពាក្យថា " ឆាក" ? ហើយមានបញ្ជីរាយឈ្មោះតួអង្គ និងបទសន្ទនាបែបនេះ ?

៣. តើតួអង្គណាជាតួអង្គឯក តួអង្គណាជាតួអង្គរង ហើយតួអង្គណាជាតួអង្គបន្ទាប់បន្សំ ?

៤. ហេតុដូចម្តេចបានជាលោកគីនិងអ្នកស្រទុំ មិនចុះសម្រុងគ្នា ?

៥. តើតួអង្គណាខ្លះបានព្យាយាមចូលរួមជួយសម្រុះសម្រួលគ្រួសារលោកគី និងអ្នកស្រទុំ?ហើយបានទទួលលទ្ធផលវិជ្ជមាន ឬអវិជ្ជមាន ?

៦. នៅទីបំផុត តើគ្រួសារលោកគីនិងអ្នកស្រទុំបានទទួលសុភមង្គលដែរឬទេ ? ព្រោះអ្វី ?

៧. ចូរអ្នកចែកថ្នាក់ពាក្យជានាម គុណនាមនិងកិរិយាសព្ទ តាមក្រុមនីមួយៗ ដែលមាននៅក្នុងវគ្គដកស្រង់ខាងលើនេះ ដែលក្រុមនីមួយៗ យក៥ពាក្យ ។



# គុណកិរិយាបរិមាណនិងទីតាំងគុណកិរិយាក្នុងល្បះ

ក្នុងមេរៀនទី៧ អ្នកបានសិក្សារួចមកហើយ នូវគុណកិរិយាកាល គុណកិរិយាកន្លែង និងគុណកិរិយាសំណួរ ។ ឥឡូវនេះ អ្នកនឹងសិក្សាអំពីគុណកិរិយាបរិមាណនិងទីតាំងគុណកិរិយានៅក្នុងល្បះទៀតផង ។

- ចូរអ្នកអានឧទាហរណ៍ខាងក្រោមនេះ ៖

ឧទាហរណ៍ទី១៖

- វិចិត្រ ស្ដាយអំពើរបស់ខ្លួន**ណាស់** ។
- វាធ្វើ **ច្រើន**ជាងនិយាយ ។
- សម! កុំនិយាយ **ច្រើន** ។
- គាត់ពិសា **តិច** ។
- ពិសិដ្ឋ អានសៀវភៅ **តិចៗ** ។
- ឯងកុំបើកម៉ូតូលឿន **ពេក** ។

ក្នុងឧទាហរណ៍ទី១ពាក្យ “**ណាស់ តិច ច្រើន ពេក** ” ជាគុណកិរិយាបរិមាណ ជួយបញ្ជាក់ន័យឱ្យ“អំពើរបស់ខ្លួន ពិសា ធ្វើ អាន និយាយ លឿន” ។

ឧទាហរណ៍ទី២៖

- គាត់ដើរ**យឺតៗ** ។ (គុណកិរិយាបំណែប)
- ពិសិដ្ឋ និយាយ**នៅក្នុងមន្ទីរពេទ្យ** ។ (គុណកិរិយាកន្លែង)
- **ស្អែក** វិចិត្រនឹងទៅបាត់ដំបង ។ (គុណកិរិយាកាល)
- បងខ្ញុំ **កាលពីមុន** រៀនភាសាអង់គ្លេស ។ (គុណកិរិយាកាល)
- ប្អូនឯង! កុំខ្ជិលខ្ជាពេក ។ (គុណកិរិយាបរិមាណ)

ក្នុងឧទាហរណ៍ទី២ ពាក្យ “**យឺត នៅក្នុងមន្ទីរពេទ្យ ស្អែក កាលពីមុន ពេក** ” ជាគុណកិរិយាស្ថិតក្នុងល្បះ ហើយមានទីតាំងខុសៗគ្នា ។

តើគុណកិរិយាបរិមាណ មានតួនាទីយ៉ាងដូចម្ដេចនៅក្នុងល្បះ? ហើយវាមានទីតាំងនៅត្រង់ណាខ្លះនៃល្បះ?



- *គុណកិរិយាបរិមាណ បញ្ជាក់ន័យរបស់កិរិយា គុណនាម ឬគុណកិរិយា ។*
- *គុណកិរិយា មានទីតាំងខុសគ្នានៅក្នុងល្បះ អាស្រ័យទៅតាមប្រភេទនៃគុណកិរិយា និងទីសេចក្ដីនៅក្នុងល្បះទាំងនោះ ។*

## លំហាត់

១. ក. ចូរអ្នកធ្វើល្បះជាមួយគុណកិរិយាបរិមាណខាងក្រោមនេះ ៖ ណាស់ តិច ច្រើន ពេក ក្រៃលែង បំផុត ។

ខ. ចូរអ្នករកគុណកិរិយាបរិមាណមកបំពេញល្បះខាងក្រោមនេះ ឱ្យបានសមស្រប ៖

- ការសិក្សាជាការសំខាន់ ... ។
- ឪពុកម្ដាយខ្ញុំ មានមោទនភាពយ៉ាង...ចំពោះការព្យាយាមសិក្សារបស់ខ្ញុំ ។
- គាត់ជាសិស្សពូកែ គាត់ឧស្សាហ៍អានសៀវភៅ ... ។
- វាជាសិស្សមានប្រាជ្ញាជាងគេ ... នៅក្នុងថ្នាក់នេះ ។
- ភាសាខ្មែរមានតម្លៃ ... នៅក្នុងវប្បធម៌ជាតិ ។

២. តើក្នុងកថាខណ្ឌនេះ មានគុណកិរិយាបរិមាណឬទេ? បើមានចូរស្រង់បញ្ជាក់ ។

[...] ល្អណាស់វិចិត្រ! ឯងមានសេចក្ដីក្លាហានណាស់ ដែលហ៊ានសារភាពការពិត! រឿងនេះ គ្រូបានដឹងរួចទៅហើយ ព្រោះសុទ្ធា និងធីតាបានប្រាប់គ្រូ ដោយថ្ងៃនោះជាវេនបោសសំអាតរបស់ពួកគេ ឯពិសិដ្ឋឥតបានដឹងរឿងនេះទេ ។ តែគ្រូក៏សូមកោតសរសើរពិសិដ្ឋឯងខ្លាំងណាស់ ដែលមានគំនិតល្អ ព្យាយាមអូសទាញមិត្តភក្តិឱ្យដើរផ្លូវត្រូវវិញ ទោះបីត្រូវអាម៉ាស់យ៉ាងណាក្ដី ។



# រឿង បុរសកម្សត់សង់ខ្ទមក្បែរផ្ទះសេដ្ឋីធ្វើត្រាប់សេដ្ឋី



មាននិទានមួយថា មានបុរសប្ដីប្រពន្ធ និងកូនស្រីម្នាក់ ជាអ្នកលំបាកកម្សត់ទុគ៌ត រកព្រឹកបានស៊ីតែព្រឹក រកល្ងាចបានស៊ីតែល្ងាច ពុំមានរបស់អម្រស់អម្រអ្វីឡើយ ទើបបុរសប្ដីប្រពន្ធនោះគិតគ្នាៈ "លំនៅយើងសព្វថ្ងៃនេះលំបាកណាស់ មកយើងទៅរកលោកឯណាមានទ្រព្យសម្បត្តិច្រើន យើងទៅនៅខាងលោក លបមើលដំណើរលោកៗធ្វើការម្ដេចខ្លះ បានជាមានទ្រព្យរបស់ច្រើន" ។ អ្នកទាំង២ ប្ដីប្រពន្ធនោះគិតគ្នាដូច្នោះហើយ ក៏រុះរើខ្ទមទៅសង់នៅក្បែរខាងផ្ទះសេដ្ឋី ។ សេដ្ឋីនោះឯងតែងប្រើខ្ញុំទៅជួញប្រែ ធ្វើចម្ការ បានទ្រព្យរបស់បំពេញអាត្មា ពុំដែលដាច់ឡើយ ។ ឯបុរសប្ដីប្រពន្ធ និងកូនបានធ្វើត្រាប់តាមអំពើទាំងអម្បាលនោះរបស់សេដ្ឋី ។ ចំណោរលង់ទៅកើតផលប្រយោជន៍ បានទ្រព្យរបស់ច្រើន ទើបបុរសនោះដឹងគុណលោកសេដ្ឋី ហើយក៏យកមាសមួយស្ទក់មកជូនមហាសេដ្ឋី ។ មហាសេដ្ឋីដណ្ដឹងសួរៈ" ហេតុម្ដេចបានជាថៅក៏យកមាសមកឱ្យអញ?" ។ បុរសប្រាប់ៈ" ដ្បិតខ្ញុំបាទនេះជាអ្នកកម្សត់ទុគ៌ត ខ្ញុំបាទបានរុះរើខ្ទមមកនៅក្បែរខាងលោក ខ្ញុំបាទមើលឃើញលោកតែងប្រើអស់ខ្ញុំកំដរ ឱ្យទៅជួញប្រែ ធ្វើស្រែ

ចម្ការឱ្យបានជាទ្រព្យរបស់មក ទើបខ្ញុំបាទប្តីប្រពន្ធ និងកូនមួយធ្វើត្រាប់អំពើការទាំងនោះតាមលោក ក៏បានជាអ្នកមានទ្រព្យរបស់លោះខ្ញុំកំដរ ទិញគោក្របីបានប្រើជាច្រើនទើបខ្ញុំបានរលឹកដល់គុណលោក ហើយខ្ញុំបាទយកមាសមួយស្ទក់មកជូនលោកហោង" ។ សេដ្ឋីៈ "ចៅបានទ្រព្យអម្បាលនេះ អញស្មានថាចៅបានពីណា ថាបើចៅបានត្បិតចៅធ្វើត្រាប់ចំណោះអញតែងធ្វើដូច្នេះហើយ ចូរចៅទៅយកទ្រព្យអម្បាលនោះមកឱ្យអញៗនឹងចែករំលែកឱ្យចៅខ្លះ" ។បុរសនោះឆ្លើយៈ "ត្បិតខ្ញុំបាទបានរលឹកគុណលោកទើបខ្ញុំយកមាសមួយស្ទក់មកជូន ខ្ញុំបាទយល់ថាលោកនឹងយកតែប៉ុណ្ណោះ បើលោកប្រើខ្ញុំបាទឱ្យទៅយករបស់ខ្ញុំបាទទាំងអស់ ខ្ញុំបាទពុំយកមកជូនទេ" ។ សេដ្ឋី និងបុរសនោះប្រកែកដណ្តើមទ្រព្យគ្នាទៅវិញទៅមក ទើបសេដ្ឋីនិងបុរសនោះទៅដល់ចៅក្រមឱ្យជំនុំពិចារណា ។ ចៅក្រមជំនុំជម្រះរឿងនោះពុំបាន ទើបនាំសេដ្ឋីនិងបុរសនោះទៅគាល់ព្រះមហាក្សត្រ ។ បុរសនោះក្រាបបង្គំទូលៈ "ខ្ញុំព្រះបាទអម្ចាស់នេះនៅក្បែរផ្ទះសេដ្ឋីនេះ ខ្ញុំព្រះបាទអម្ចាស់យល់គាត់តែងប្រើខ្ញុំកំដរគាត់ ឱ្យទៅជួញប្រែ ធ្វើស្រែចម្ការ បានទ្រព្យជាផលប្រយោជន៍ផ្ទាល់ខ្លួនគាត់ ហើយខ្ញុំព្រះបាទអម្ចាស់ប្តីប្រពន្ធ និងកូនមួយ យកខ្លួនធ្វើនូវអំពើការត្រាប់តាមគាត់ បានទ្រព្យរបស់ លោះខ្ញុំ ទិញគោក្របី ទើបខ្ញុំព្រះបាទអម្ចាស់គិតដល់គុណគាត់ ហើយយកមាសមួយស្ទក់ឱ្យគាត់ៗពុំយកតែមាសមួយស្ទក់នេះឡើយ គាត់ប្រើខ្ញុំព្រះបាទអម្ចាស់ឱ្យទៅយកទ្រព្យរបស់មាសប្រាក់មកឱ្យគាត់ទាំងអស់ ហើយគាត់នឹងចែកឱ្យខ្ញុំព្រះបាទអម្ចាស់វិញ ខ្ញុំព្រះបាទអម្ចាស់ពុំយកទ្រព្យទាំងនោះឱ្យគាត់ ទើបគាត់នាំខ្ញុំព្រះបាទអម្ចាស់ទៅប្តឹងជំនុំជម្រះពិចារណា ចៅក្រមជំនុំពុំបានសេចក្តីទាំងនេះពុំចេរ សូមទ្រង់ព្រះចិន្តាពិចារណាឱ្យខ្ញុំព្រះបាទអម្ចាស់ហោង" ។ ទើបព្រះមហាក្សត្រទ្រង់ត្រាស់ដណ្តឹងទៅសេដ្ឋីៈ "ម្នាលព្រះស្តែងដំណើរព្រះស្តែងតើដូចម្តេច?" ។ សេដ្ឋីក្រាបទូលៈ " ដំណើរសេចក្តីនៃខ្ញុំព្រះបាទអម្ចាស់នេះដូចពាក្យបុរសក្រាបទូលនេះហោង" ។ ព្រះមហាក្សត្រទ្រង់យល់ថា សេដ្ឋីនេះលោភមែនពិតទើបព្រះអង្គមានព្រះបន្ទូលដណ្តឹងថា " ម្នាលសេដ្ឋី ព្រះស្តែងមានកូន ឬឥតកូន?" ។ សេដ្ឋីក្រាបបង្គំទូលៈ " ខ្ញុំព្រះបាទអម្ចាស់មានកូនប្រុសមួយ" ។ ទើបព្រះអង្គមានព្រះបន្ទូលដណ្តឹងទៅបុរសនោះវិញៈ " ព្រះស្តែងមានកូនឬឥតកូន?" ។ បុរសក្រាបបង្គំទូល "ខ្ញុំព្រះបាទអម្ចាស់មានកូនស្រីមួយ" ។ ព្រះមហាក្សត្រមានព្រះបន្ទូលៈ " ម្នាលព្រះស្តែងទាំង២ អើយ! ម្ល៉េះហើយកុំ

ខឹងនឹងគ្នាទៅវិញទៅមក អញឱ្យព្រះស្ដែងទាំង២ចងពន្ធនឹងគ្នា ឱ្យកូនប្រុសសេដ្ឋី និងកូនស្រីអ្នកជាប្ដីប្រពន្ធនឹងគ្នាទៅ ដើម្បីឱ្យទ្រព្យរបស់ព្រះស្ដែងទាំង២នាក់ មូលទៅលើកូននោះឯង" ។ សេដ្ឋីនិងបុរសស្ដាប់ព្រះបន្ទូលដូច្នោះហើយ ចូលចិត្ត ក៏ក្រាបថ្វាយបង្គំលាទៅលំនៅអាត្មានិះរកប្រដាប់ការកូនទាំង២ សម្រេចដោយប្រការអម្បាលនេះហោង ។

*(ដកស្រង់ និងកែសម្រួលពីប្រជុំរឿងព្រេងខ្មែរ ភាគ៣)*

## សំណួរ

១. ហេតុអ្វីបានជាបុរសកម្សត់សង់ខ្ទមក្បែរផ្ទះសេដ្ឋី?
២. តើការយកតម្រាប់តាមសេដ្ឋីរបស់បុរសនោះ បានទទួលលទ្ធផលយ៉ាងដូចម្ដេច?
៣. ផលវិជ្ជមាន ដែលបុរសកម្សត់បានទទួលបែបនេះ បណ្ដាលមកពីអ្វី?
៤. តើការទាមទារចំណែកពីបុរសកម្សត់ តាមបែបលោកសេដ្ឋី ជាការសមស្របឬទេ? ព្រោះអ្វី?
៥. តើការសម្រេចព្រះទ័យដូចព្រះរាជា បានផ្ដល់ជាគុណសម្បត្តិយ៉ាងដូចម្ដេចខ្លះចំពោះគ្រួសារសេដ្ឋីនិងគ្រួសារបុរសកម្សត់នោះ?
៦. បុរសកម្សត់ក្នុងអត្ថបទនេះ បានផ្ដល់ជាតម្លៃអប់រំយ៉ាងណាខ្លះ?
៧. ចូរអ្នកស្រង់គុណកិរិយាបរិមាណ ដែលមានក្នុងអត្ថបទនេះ ចំនួន៤ពាក្យ ។



# សញ្ញាសម្ព័ន្ធទៅជា ( > ) និងមកពី ( < )

ក្នុងការសរសេរ ពេលខ្លះអ្នកចាំបាច់ត្រូវប្រើសញ្ញាសម្ព័ន្ធ ដើម្បីជួយសម្រួលសេចក្ដីឱ្យងាយយល់ ឬងាយចងចាំ។ ពេលនេះអ្នកនឹងសិក្សា អំពីសញ្ញាសម្ព័ន្ធមកពី "<" និងទៅជា ">" ។

- ចូរអ្នកអានឧទាហរណ៍ខាងក្រោមនេះ ៖

ឧទាហរណ៍ទី១៖

- ក + ា > កា។
- ទឹក + កក > ទឹកកក ។
- សៀត + [-ន-] > ស្នៀត ។
- ១០ > ៥ ។

ឧទាហរណ៍ទី២ ៖

- ឪពុកម្ដាយ < ឪពុក និងម្ដាយ ។
- បងប្អូន < បង និងប្អូន ។
- ២ < ៥ ។
- ឧទាហរណ៍ទី១ បានបង្ហាញឱ្យឃើញថា សញ្ញា ">" គេប្រើនៅចន្លោះសញ្ញាអក្សរផ្សេងៗ ព្រមទាំងប្រើនៅចន្លោះលេខ ដែលបញ្ជាក់ថា ធំជាង ។
- ឧទាហរណ៍ទី២ បានបង្ហាញឱ្យឃើញថា សញ្ញា "<" គេប្រើនៅចន្លោះសញ្ញាអក្សរផ្សេងៗព្រមទាំងប្រើនៅចន្លោះលេខ ដែលបញ្ជាក់ថា តូចជាង ។

តើសញ្ញាទៅជា ">" និងសញ្ញាមកពី "<" គេប្រើក្នុងលក្ខខណ្ឌណាខ្លះ?



- *សញ្ញាទៅជា ">" សម្រាប់ដាក់ចន្លោះសញ្ញាអក្សរផ្សេងៗ ដើម្បីបង្ហាញដំណើរប្រែប្រួលទៅជាអ្វីមួយផ្សេងទៀត ឬជាសញ្ញាសម្គាល់ធំជាង ។*
- *សញ្ញាមកពី "<" សម្រាប់ដាក់ចន្លោះសញ្ញាអក្សរផ្សេងៗ ដើម្បីបង្ហាញដំណើរក្លាយមកពីអ្វីមួយផ្សេងទៀត ឬជាសញ្ញាសម្គាល់តូចជាង ។*

## លំហាត់

១. ចូរអ្នកប្រើសញ្ញាសម្ព័ន្ធ ">" និង "<" នៅចន្លោះពាក្យណាមួយខាងក្រោមនេះឱ្យបានសមស្រប ៖

- ម្ហូបចំណី ... ម្ហូប និងចំណី ។
- ស្លៀកពាក់ ... ស្លៀក និងពាក់ ។
- បោកអ៊ុត ... បោក និងអ៊ុត ។
- សេចក្ដី + ថ្លៃថ្នូរ ... សេចក្ដីថ្លៃថ្នូរ ។
- សេចក្ដី + សុខ ... សេចក្ដីសុខ ។
- អ្នក + លេង ... អ្នកលេង ។
- អ្នក + ជំនួញ ... អ្នកជំនួញ ។
- ជន + ទុច្ចរិត ... ជនទុច្ចរិត ។

២. តើអ្នកគួរប្រើសញ្ញា ">" ឬសញ្ញា "<" នៅចន្លោះពាក្យខាងក្រោមនេះ?

- កត់...កំណត់ ។
- ជិះ...ជំនិះ ។
- ដឹង...ដំណឹង ។
- ច្រូត...ចម្រូត ។
- ៧...៣ ។
- ៤...៨ ។



# រឿង មិត្តសានិត



[...] ព្រឹកឡើង ឪពុកសានិតរាប់ខ្សែដូចសព្វដង ។ គាត់រីករាយណាស់ រួចនិយាយទៅកាន់កូន៖ "សានិតកូន ឪពុកនៅមានកម្លាំងធ្វើការលើសពីការស្មានរបស់កូន ។ ពីយប់មិញ ឪពុកវេញបានច្រើនជាងយប់មុនៗ ប្រហែលមួយភាគពីរ ។ ដៃឪពុកនៅរហ័សរហួន ភ្នែកឪពុកក៏នៅភ្លឺដែរកូន" ។ សានិតត្រេកអរពន់ពេក គេនឹកក្នុងចិត្ត៖ " មិនត្រឹមតែរកបានប្រាក់ អញថែមទាំងធ្វើឱ្យឪពុកសប្បាយចិត្ត ដោយនឹកថា ខ្លួនគាត់នៅមានកម្លាំងនៅឡើយ ។ អញត្រូវតែខំឱ្យលើសពីនេះ ។ គេបន្តកិច្ចការនេះដោយសប្បាយ ។ ដំបូងឪពុកគេឥតដឹង ។ គាត់គ្រាន់តែលាន់មាត់ ៖ "ឆ្ងល់ដល់ហើយ ឥឡូវអីក៏ចុះប្រេងកាតម្ល៉េះទំ" ។

ក្រោយមក ដោយអត់ងងុយខ្លាំងពេក សានិតអស់កម្លាំងល្ហិតល្ហៃ ។ យប់មួយនោះគេងោកនៅពេលទន្ទេញមេរៀន ។ ឪពុកសង្កេតឃើញការណ៍នេះ ។ ថ្ងៃមួយគាត់បន្ទោស ៖ "សានិតកូនឥឡូវប្រែប្រួលច្រើនណាស់ មិនដូចមុនសោះ ។ កូនកុំភ្លេចថា ឪពុកសង្ឃឹមលើអនាគតរបស់កូនទាំងស្រុង ក្នុងការបម្រើជាតិមាតុភូមិ" ។ ឪពុកបន្ទោស សានិតគិតថា លែងវេញខ្សែតាំងពីពេលនោះ ប៉ុន្តែលុះពេលល្ងាច ពេលត្រឡប់មកពីផ្សារវិញ ឪពុកសានិតរីករាយណាស់ ប្រាប់គ្រួសារថា ខែនេះគាត់រកបានប្រាក់បន្ថែមច្រើនជាងខែមុនសាមសិបរៀល ។ មិនតែ

ប៉ុននោះគាត់បានទាំងទិញក្រមាប្អូនទុកប្រើប្រាស់ទៀតផង ។ ប្អូនៗសានិតនាំគ្នាជណ្តើមក្រមារញ៉ី ។ ឃើញដូចនេះ សានិតសម្រេចចិត្តបន្តកិច្ចការនេះទៀត ដោយនឹកក្នុងចិត្ត ៖ " អញត្រូវតែខំថែមទៀត ពេលថ្ងៃអញរៀនឱ្យបានច្រើន ពេលយប់អញធ្វើការឱ្យឪពុកនិងប្អូនៗបានសប្បាយ " ។

កិច្ចការវេញខ្សែពេលយប់របស់សានិតប្រព្រឹត្តទៅដូចសព្វដង ។ ប៉ុន្តែ គេស្ទូបច្រើនធ្វើការល្ងើយ ជួនកាលងោកក្នុងថ្នាក់ ។ ម្តាយសានិតក៏មានការព្រួយបារម្ភ ព្រោះឃើញសុខភាពកូនច្បងគាត់ថយចុះជាលំដាប់ ។

ថ្ងៃមួយ ម្តាយសានិតសួរ ៖" និត កូនមិនស្រួលខ្លួនឬ? កូនកើតអី?" រួចគាត់ងាកទៅនិយាយជាមួយឪពុកគេ៖ "សានិត ឥឡូវស្គមខ្លាំងណាស់ឪវា មិនដឹងជាកើតអី? " ឪពុកសានិតតប ដោយទឹកមុខមិនពេញចិត្ត៖ " កាលដែលវារៀនពូកែ វាមានអីចឹងឯងណា? " ទើបគាត់ងាកទៅនិយាយជាមួយកូន៖ " និតកូន! ឪពុកខំធ្វើការទាំងថ្ងៃទាំងយប់ដើម្បីចិញ្ចឹមគ្រួសារ ឪពុកសុខចិត្តនឿយម្នាក់ឯងឱ្យតែកូនខំរៀន ប៉ុន្តែកូនមិនអាណិតឪពុកសោះ ។ កូនមិនស្រឡាញ់ម្តាយកូននិងប្អូនៗរបស់កូនទេ " ។ ឮសម្តីឪពុក សានិតរំជួលចិត្តពន់ពេក ខំទប់ទឹកភ្នែក ។ ចិត្តមួយសម្រេចថា ឈប់វេញខ្សែ ចិត្តមួយហៀបនឹងនិយាយការពិតប្រាប់ឪពុក ចិត្តមួយរារាំង៖ " ទេ! ត្រូវតែលាក់រឿងនេះ ត្រូវតែខំបន្តិចទៀត ។ នៅសាលា អញនឹងខំរៀនឱ្យបានឡើងថ្នាក់ ។ អញត្រូវតែជួយសម្រាលបន្ទុកឪពុក អញត្រូវជួយរំលែកការនឿយលំបាកហួសហេតុ ដែលកំពុងបំផ្លាញសុខភាពឪពុកអញបន្តិចម្តងៗ" ។ សានិតវេញខ្សែពេញបួនខែបន្តបន្ទាប់ បួនខែយប់អត់ងងុយ ថ្ងៃនឿយហត់ បួនខែដែលត្រូវឪពុកបន្ទោសរិតតែខ្លាំងឡើងៗ ។

ចូលខែទីប្រាំ សានិតសម្រេចថាឈប់វេញខ្សែដើម្បីធ្វើឱ្យឪពុកម្តាយសប្បាយចិត្តឡើងវិញ ។ ប៉ុន្តែយប់យន់មកដល់ គេក៏ក្រោកពីដំណេកដូចសព្វដង ព្រោះចង់ឃើញកន្លែងដែលគេធ្វើការជាលើកចុងក្រោយបង្អស់ ។ បរិយាកាសស្ងប់ស្ងៀមនៃរាត្រីកាល សានិតឈរសម្លឹងកន្លែងអនុស្សាវរីយ៍ដែលធ្លាប់សម្ងំធ្វើការដោយក្តីសប្បាយ និងដោយក្តីស្រឡាញ់ ។ ពន្លឺចង្កៀងជះទៅលើគំនរខ្សែធ្លូញ ធ្វើឱ្យអារម្មណ៍សានិតនឹកឃើញដល់ខ្សែទាំងឡាយ ដែលសានិតខំផលិតឡើងតាំងពីគុណភាពមធ្យម រហូតដល់ល្អបំផុត ។ ចាប់ពីថ្ងៃនេះទៅ គេលែងបានវេញដូចមុនទៀតហើយ ។ គេដាក់គូទអង្គុយ ដោយមិនដឹងខ្លួន ចាប់សំណុំខ្សែធ្លូញមកវេញ ប៉ុន្តែជ្រលក់ដៃទៅ

ត្រូវអន្លូងដំជក់ដែលផ្អែកនៅក្បែរនោះបណ្ដាលឱ្យរលំលើរនាបឮសូរម៉ាំង ។ សានិតភ័យញ័រខ្លួន ដោយលាន់មាត់ខ្សឹបៗៈ " ស្លាប់ហើយ ឪភ្ញាក់ទាន់ច្បាស់ជាវរធំ " ។ សានិតអត់ដង្ហើម ផ្ទៀងត្រចៀកស្ដាប់តែគ្មានឮអ្វី ។ ស្ងាត់ច្រៀប អ្នកផ្ទះទាំងអស់កំពុងលង់លក់ ។សានិតភ័យ ចាប់សំណុំខ្សែវេញបន្ដទៅទៀតមើលដៃស្ទើរមិនទាន់ ។ គេគិតតែពីវេញអស់សំណុំមួយដល់សំណុំមួយ ... ។

ពេលនោះ ឪពុកសានិតមកឈរពីក្រោយខ្នង តែសានិតឥតដឹង ។ ស្នូរអំបាញ់មិញធ្វើឱ្យគាត់ភ្ញាក់ពីដំណេក ។ គាត់ផ្ទៀងស្ដាប់មួយសន្ទុះ រួចដើរជើងទទេ ស្រាលៗមកកាន់កន្លែងដែលគាត់វេញខ្សែ ។ គាត់ឈរទ្រឹងសម្លឹងដៃកូន ដែលកំពុងវេញបញ្ចូលធ្លុងខ្សែ ដោយចិត្តរំជួល ព្រោះអាណិតកូន ។ ស្រាប់តែសានិតស្រែកភ្លាត់សំឡេង ពីព្រោះមានដៃពីរញាក់រញ័រមកឱបក្បាលគេពីក្រោយ ដោយសំឡេងរអាក់រអួល ទើបសានិតដឹងថា ឪពុកខ្លួនសោះ ក៏ឧទានឡើងៈ " ឪ! សូមឪអត់ទោសឱ្យកូន " ។ ឪពុកនិយាយទៅកាន់កូនដោយសំឡេងញ័រ ទឹកភ្នែកស្រក់លើស្មាកូនៈ " កូនមាសឪពុក កូនកុំខឹងនឹងឪពុកណា ឪពុកដឹងអស់ហើយ " ។ ឪពុកទេដែលសុំទោសកូន ។ ផុតសម្ដី គាត់ឱបកូនយ៉ាងណែនផ្ទាប់ទៅនឹងដើមទ្រូង រួចគាត់បណ្ដើរកូនគាត់ទៅកាន់គ្រែភរិយា គាត់និយាយថាៈ " ម៉ែវា បួនខែហើយ ដែលកូនយើងទ្រាំអត់ងងុយធ្វើការជំនួសខ្ញុំ ។ យើងបន្ទោសវា ពេលដែលវាខំធ្វើការជួយសម្រាលបន្ទុកគ្រួសារ " ។

ម្ដាយសានិតស្ទុះមកឱបកូន ចិត្តរំជួលយ៉ាងខ្លាំង និយាយលែងចេញ ។ មួយសន្ទុះគាត់បន្លឺ ៈ " ទៅគេងទៅកូនសម្លាញ់ម្ដាយ " ។ សានិតជម្រាបលាឪពុកម្ដាយទៅបន្ទប់ដេក ដោយអារម្មណ៍អណ្ដែតទៅកាន់បរិយាកាសថ្មីមួយ ។

*(ដកស្រង់ពីសៀវភៅអក្សរសិល្ប៍ក្រសួង អ យ ក ឆ្នាំ ១៩៨២)*

## សំណួរ

១. តើសានិតមានចិត្តដូចម្ដេចនៅពេលដែលឪពុកមិនដឹងពីទង្វើរបស់ខ្លួន?

២. តើទង្វើរបស់សានិតធ្វើឱ្យឪពុកម្ដាយមានការសង្ស័យឬទេ? ព្រោះអ្វី?

៣. តើសានិតព្យួនធ្វើការជំនួសឪពុកអស់រយៈពេលប៉ុន្មាន?

៤. តើទង្វើរបស់សានិតបែបនេះ ជាការត្រឹមត្រូវឬទេ?

៥. តើការព្យាយាមវេញខ្សែរបស់សានិតទទួលផលបែបណា? ព្រោះអ្វី?

៦. ចូរអ្នកទាញតម្លៃអប់រំ តាមរយៈតួអង្គសានិត ឪពុកសានិត ។



# មកវិញមក



ក្រោយពីបានស្តាប់រឿងល្ខោនខាងលើនេះរួច ចូរអ្នកធ្វើការឆ្លើយនឹងសំណួរខាងក្រោម ៖

## សំណួរ

១. តើគ្រួសារលោកគី និងអ្នកស្រទុំ ជាគ្រួសារបែបណា ?

២. តើអ្នកណាខ្លះបានព្យាយាមជួយផ្សះផ្សាទំនាស់គ្រួសារនេះ?

៣. តើកំហុសក្នុងអត្ថបទខាងលើនេះ ជាកំហុសរបស់អ្នកណា ?

៤. ចូរបង្ហាញតួអង្គឯកនិងតួអង្គរង ព្រមទាំងតួអង្គបន្ទាប់បន្សំ ក្នុងអត្ថបទល្ខោនខាងលើនេះ ។

៥. តើឥរិយាបថតួអង្គខាងលើនេះ ឥរិយាបថណាមួយ ដែលចាត់ទុកជាឥរិយាបថល្អក្នុងការរួមចំណែកជួយឱ្យសង្គមជាតិមានសណ្តាប់ធ្នាប់ល្អ? ហេតុអ្វី?



# សម្ដែងល្បែងដើរតួតាមអត្ថបទបានអាន ឬបានស្ដាប់

អ្នកបានសិក្សាខ្លឹមសារ អត្ថបទល្ខោនរឿង " ព្រះអាទិត្យរះហើយ " រួចហើយ ។ បន្ដទៅនេះ ចូរអ្នកចែកជាក្រុម ដើម្បីត្រាប់សម្ដែងតាមតួអង្គខាងលើចាប់ពីត្រង់វគ្គលោករ័ត្នសម្រុះសម្រួលគ្រួសារលោកគី និងអ្នកស្រទុំ " លោករ័ត្ន ៖ ម្នាក់ៗ! ... កាន់តែជឿនលឿនទៅមុខហើយ! ... " រហូតមកដល់នាងភ័ព្វរីករាយនឹងគ្រួសារ ដែលមានសុភមង្គល " នាងភ័ព្វ ៖ឱ! បក្សាបក្សី សត្វពាហនៈជាមិត្តទាំងឡាយ ... " ។

ការត្រាប់តាមនៃការសម្ដែងនេះអាចប្រព្រឹត្តទៅល្អបាន ដោយជោគជ័យ លុះត្រាតែគោរពតាមការណែនាំដូចខាងក្រោមនេះ ៖

- ចងចាំបទសន្ទនារបស់តួអង្គនីមួយៗ ។
- ស្វែងយល់អារម្មណ៍របស់តួអង្គឱ្យបានច្បាស់លាស់ ងាយក្នុងការប្រើសៀង ។
- គួរជ្រើសរើសតួអង្គសម្ដែង ដែលមានបុគ្គលិកលក្ខណៈស្រដៀងនឹងតួអង្គពិតក្នុងរឿងល្ខោននោះ ។
- ការសម្ដែងត្រូវប្រើកាយវិការ ពាក្យពេចន៍ ចរិតលក្ខណៈ ឱ្យស្របតាមតួអង្គក្នុងរឿងល្ខោន ទោះចរិតលក្ខណៈតួអង្គនោះ ពុំមានលក្ខណៈពីធម្មជាតិដូចខ្លួនក៏ដោយ ។
- ត្រូវចេះប្រមាណពេលវេលាសម្ដែងឱ្យបានសមស្រប ។
- មិនគប្បីប្រើពាក្យពេចន៍បញ្ចេញបញ្ចូលឱ្យហួសពីសាច់រឿង ឬប្រើពាក្យអសីលធម៌នោះទេ ។



# សំណេរសង្ខេបអត្ថបទល្ខោនជាអត្ថបទពាក្យរាយ

អ្នកបានអានអត្ថបទល្ខោនរឿង "ព្រះអាទិត្យរះហើយ" រួចហើយ ។ ឥឡូវនេះ ចូរអ្នកសរសេរសង្ខេបអត្ថបទនេះមកជាអត្ថបទពាក្យរាយវិញ៖

លោកវ័ត្ទបានពន្យល់ហេតុផល ដើម្បីឱ្យគ្រួសារឈានទៅរកសុភមង្គល ដែលសមាជិកគ្រួសារចាំបាច់ត្រូវស្គាល់តួនាទីនេះ ។ ពូចិត្រកម្មករស៊ីក្លូដែលដឹកលោកគី មកទារថ្លៃស៊ីក្លូ តែត្រូវនាយអឿនបង្អាក់ឱ្យរង់ចាំបន្តិចសិន ។ អ្នកស្រទុំរិះគន់ប្ដីថា មិនអាចកែគំនិតបានទេ គាត់គិតតែពីផឹកស្រា ។ លោកគីនិយាយផ្ចាញ់អ្នកស្រទុំថា បានជាគាត់ផឹកស្រា មកពីប្រពន្ធគាត់មិនចេះរៀបចំខ្លួនឱ្យសក្ដិសមជាប្រពន្ធល្អ ។ អ្នកស្រទុំថាខ្លួននៅតែធ្វើដូចមុនដដែល បើលោកគីនៅតែផឹក មិនឈប់ទេនោះ ។ លោកវ័ត្ទបញ្ឈប់ជម្លោះអ្នកទាំងពីរ ហើយសូមអង្វរលោកគីឱ្យឈប់ផឹកស្រា និងអង្វរអ្នកស្រទុំឱ្យចេះធ្វើជាស្រីមេផ្ទះ ចេះរៀបចំផ្ទះសម្បែងឱ្យសមរម្យ មានទំនាក់ទំនងគ្រួសារល្អ ដើម្បីបង្កើតសុភមង្គលក្នុងគ្រួសារ ។ បន្ទាប់មកលោកជិនក៏សំណូមពរបន្ថែម សុំឱ្យស្រុះស្រួលនឹងគ្នា ឱ្យប្ដីតាំងចិត្តជាអ្នកសន្ដោសប្រពន្ធ ហើយឱ្យប្រពន្ធដែលមិនសូវមានចំណេះត្រូវតាមប្ដីខ្លះផង ។ គាត់បានពន្យល់ នាយអឿន និងនាងភ័ព្វដែលជាយុវជនជំនាន់ក្រោយបានរៀនសូត្រចេះដឹង ថ្ងៃក្រោយនឹងធ្វើឱ្យគ្រួសារមានអនាគតល្អជាមិនខាន ។ អ្នកស្រទុំបានលើកពីទុក្ខលំបាកខ្លួន ហើយថាអ្នកដទៃលោកមិនទាន់ស្គាល់ទុក្ខវេទនាគាត់ទេចេះតែថា ដោយងាយៗ ។ ហើយគាត់ជាអ្នករក្សាសីលទៅវត្ត ប៉ុន្តែមិនស្ងប់ចិត្តទេព្រោះបន្តិចគេប្រាប់ថា ប្ដីនៅឯបកប៉ូលិសព្រោះស្រវឹងជ្រុល បន្តិចឮថា ដួលនៅតៀមស្រា ។ ឯប្រាក់ខែ ក៏គ្មានសល់ដែរ ។ ឯលោកគីក៏និយាយរិះគន់ប្រពន្ធគាត់ថាជាដុំថ្ម ជាងោះ ទើបគាត់ទ្រាំមិនបានទៅផឹកស្រាទៅ ។ លោកវ័ត្ទក៏បង្អាក់អ្នកទាំងពីរឱ្យឈប់និយាយតទៅទៀត ដោយឱ្យពួកគេព្រមទទួលកំហុសរៀងៗខ្លួន ។ អ្នកទាំងពីរក៏យល់ព្រម ។ លោកវ័តសម្ដែងទឹកចិត្តរីករាយព្រោះម្នាក់ៗកាន់តែជឿនលឿនទៅមុខ ។ ពូចិត្រក៏សុំថ្លៃឈ្នួលស៊ីក្លូទៀត ។ នាយអឿននិយាយថា ការស្រុះស្រួលគ្នាបែបនេះ មានន័យណាស់ដោយហេតុថា យើងកំពុងកសាងសង្គមឱ្យមានរបៀបរៀបរយល្អ ។ ម្នាក់ៗត្រូវចេះព្រមទទួលកំហុស និងកែខ្លួនជាថ្មីឡើងវិញ ។ លោកជិនសរសើរនាយ

អឿនថា គាត់មានឧត្តមគតិល្អណាស់ហើយគាត់សង្ឃឹមថាអនាគតខ្មែរមិនសាបសូន្យទេ ។ នាងភ័ព្វក៏សុំទោស និងអរគុណចំពោះអ្នកទាំងអស់គ្នា ដែលអត់ងងុយអស់មួយយប់ ដោយសារតែគ្រួសារនាង ។ លោកតា និងអ្នកស្រទុំក៏មូលចិត្តគំនិតគ្នាកសាងសុភមង្គលក្នុងគ្រួសារ ។ នាងភ័ព្វរីករាយយ៉ាងខ្លាំង ព្រោះនេះជាសញ្ញាមួយបញ្ជាក់ថាវង្សត្រកូលខ្លួន វិលត្រឡប់មករកសុភមង្គលវិញ ។

## សំណួរ

១. តើអត្ថបទសំណោរនេះ និយាយពីអ្វី?

២. តើតួអង្គណាជាតួអង្គឯក? ហើយតួអង្គណាជាតួអង្គរង?

៣. តើខ្លឹមសារអត្ថបទនេះ បានផ្តល់តម្លៃអប់រំយ៉ាងណាខ្លះ?

៤. បើស្ថិតក្នុងស្ថានភាពដូចគ្រួសារខាងលើនេះ តើអ្នកត្រូវធ្វើយ៉ាងដូចម្តេចខ្លះ ដើម្បីឱ្យគ្រួសារអ្នកមានសុភមង្គលពិតប្រាកដ ?

## លំហាត់

• ចូរអ្នកសរសេរសង្ខេបអត្ថបទល្ខោនរឿង “ មកវិញមក” ជាពាក្យរាយ តាមការយល់របស់អ្នក ។ ដើម្បីឱ្យសំណោរសង្ខេបនោះ មានភាពល្អប្រសើរបានគប្បី :

- លើកយកគំនិតសំខាន់នៃអត្ថបទនោះមកធ្វើការសង្ខេប
- សរសេរសង្ខេបមិនត្រូវឱ្យខ្លីពេក ឬវែងពេកទេ
- ត្រូវនិយាយឱ្យចំខ្លឹមសារនៃអត្ថបទ
- មិនត្រូវលើកយកសេចក្តីលម្អិតមកសរសេរពង្រីកសេចក្តីបន្ថែមទៀតនោះទេ ។




# សេចក្តីសង្ឃឹម



សេចក្តីសង្ឃឹមជាកត្តាជំរុញឱ្យមានជោគជ័យ ។ សេចក្តីសង្ឃឹមជាការផ្គងគំនិតទុកថាពិតជាបានសម្រេចដូចបំណង ឬការមានភាពកក់ក្តៅក្នុងចិត្តទុកជាមុន ។ មនុស្សម្នាក់ៗត្រូវតែមានសេចក្តីសង្ឃឹមក្នុងជីវិត ។ ដើម្បីញ៉ាំងឱ្យសេចក្តីសង្ឃឹមរបស់យើងបានសម្រេច យើងម្នាក់ៗត្រូវខិតខំ តស៊ូ អំណត់ព្យាយាមធ្វើការងារ ជម្នះគ្រប់ឧបសគ្គ និងធ្វើខ្លួនឱ្យក្លាយជាពលរដ្ឋល្អ ។

ក្នុងមេរៀននេះ អ្នកនឹងបានសិក្សាពីការកសាងសេចក្តីសង្ឃឹម តាមរយៈអត្ថបទមួយចំនួនដូចជា ល្បែង របាំ ចម្រៀងប្រជាប្រិយ សុភាសិត ពាក្យស្លោក និងពាក្យបណ្តៅរបស់ខ្មែរ ។

ជាពិសេស អ្នកនឹងបានសិក្សាបន្ថែមទៀតអំពីៈ

- លំនាំនៃការលេងល្បែងប្រជាប្រិយខ្មែរ
- ភាសាច្បាស់លាស់
- ទម្រង់មូលដ្ឋាននៃល្បះទោលនិងការតែងល្បះ
- ការសរសេរនិងការចងក្រងចម្រៀងប្រជាប្រិយ ពាក្យបណ្តៅនិងសុភាសិត ។



# ភាសាច្បាស់លាស់

ដើម្បីពណ៌នា មនុស្ស សត្វ វត្ថុ រុក្ខជាតិ ឬធម្មជាតិ ឱ្យកាន់តែមានលក្ខណៈច្បាស់លាស់ពិតប្រាកដ គេប្រើភាសាច្បាស់លាស់ ។

ដូចម្ដេចដែលហៅថា ភាសាច្បាស់លាស់? ចូរពិនិត្យឧទាហរណ៍ខាងក្រោម៖

១. ប្រសិនបើគេអើតតាមបង្អួចនៃទូរថភ្លើង គេនឹងជាប់ចិត្តជាមួយនឹងវាលពណ៌បៃតងខ្ចីដ៏ធំល្វឹងល្វើយ បង្កប់ដោយស្នាមញញឹមពព្រាយរបស់កសិករ ។

២.[...] សូជាតភ្ញាក់ខ្លួននឹងបន្ទប់ថ្មី ដែលណារិនបង្ហាញ គឺបន្ទប់តូចច្រឡឹង បោសជ្រះស្អាតបាត មានរូបគំនូរផ្សេងៗជាប់នឹងជញ្ជាំងលាបពណ៌ផ្ទៃមេឃ គ្រែដេកតូចល្មមមានពូកប្រកបដោយកម្រាលសស្គុះ ។ កូនទូតូចមួយសម្រាប់ដាក់សម្លៀកបំពាក់ ។ កូនទូតូចមួយទៀតសម្រាប់ដាក់សៀវភៅ មានទ្វារកញ្ចក់ថ្លាឈ្វេង ហាក់ដូចជា សម្លក់មុខទៅរកទូមួយទៀត ។[...]

*(រឿង សូជាត អ្នកនិពន្ធ រីម គីន)*

តាមឧទាហរណ៍ខាងលើ យើងឃើញគេប្រើភាសាច្បាស់លាស់ដូចជា៖

- វាលពណ៌បៃតងខ្ចីដ៏ធំល្វឹងល្វើយ <នាម (វាល)+ កន្សោមគុណនាម(ពណ៌បៃតងខ្ចីដ៏ធំល្វឹងល្វើយ)
- បន្ទប់តូចច្រឡឹង < នាម(បន្ទប់)+ គុណនាម(តូច)+ គុណនាម(ច្រឡឹង)
- កសិករញញឹមពព្រាយ < នាម(កសិករ)+ កិរិយា(ញញឹម)+ គុណកិរិយា(ពព្រាយ)
- កម្រាលសស្គុះ <នាម(កម្រាល)+ គុណនាម(សស្គុះ)
- ទ្វារកញ្ចក់ថ្លាឈ្វេង <នាម(ទ្វារកញ្ចក់)+ គុណនាម(ថ្លាឈ្វេង)

ពាក្យនិងកន្សោមពាក្យ៖ ពណ៌បៃតងខ្ចីដ៏ធំល្វឹងល្វើយ ញញឹមពព្រាយ តូចច្រឡឹង សស្គុះ ថ្លាឈ្វេង សម្រាប់បញ្ជាក់លក្ខណៈឱ្យនាម វាល កសិករ បន្ទប់ កម្រាល ទ្វារកញ្ចក់ ។



*ភាសាច្បាស់លាស់ ជាពាក្យ ឬកន្សោមពាក្យ ដែលជាគុណនាម ឬគុណកិរិយា សម្រាប់បញ្ជាក់លក្ខណៈ ឬសកម្មភាពរបស់មនុស្ស សត្វ រុក្ខជាតិ វត្ថុ ឬធម្មជាតិឱ្យកាន់តែច្បាស់ថែមទៀត ។*

## លំហាត់

- ចូរស្រង់ភាសាច្បាស់លាស់ក្នុងកថាខណ្ឌខាងក្រោម ៖

១. [...]ក្នុងវេលារាត្រីនោះ ពន្លឺរស្មីនៃដួងចន្ទ កំពុងចាំងឆ្លុះចូលមកតាមចន្លោះបង្អួច ហើយមានខ្យល់ត្រជាក់បក់ផាត់ផាយ ចូលមកយ៉ាងរំភើយៗ ល្ហើយត្រសៀកល្មមត្រជាក់ស្រួល ។ នៅខាងក្នុងគេហដ្ឋាននោះមានកូនចង្កៀងប្រេងកាតមួយចងព្យួរនឹងជញ្ជាំងក្ដារ ល្មមតែឆ្លុះពន្លឺឱ្យមើលឃើញបុរសជរាម្នាក់ មានរាងកាយស្គាំងស្គម ឥតសាច់ឈាម មានតែស្បែកដណ្ដប់ឆ្អឹង ដេកស្ងួកស្ងឹងនាកណ្ដាលល្វែងបន្ទប់ ។ នៅក្បែរបុរសជរានេះ មានក្មេងកំលោះម្នាក់មុខមាត់ស្រស់បស់ អង្គុយចាំបម្រើថែរក្សាជំងឺរបស់បុរសជរានោះ ដោយឫកពាស្រពាប់ស្រពោន ស្រងូតស្រងាត់ឥតមានរីករាយបន្តិចសោះ ។ នេះមកពីគេខំអត់ងងុយទ្រាំជំងឺបុរសជរា ដែលត្រូវជាឪពុកបង្កើតរបស់ខ្លួនអស់វេលាបីរាត្រីមកហើយ ។ [...]

***(ដកស្រង់ពីរឿង កុលាបប៉ៃលិន អ្នកនិពន្ធ ញ៉ុក ថែម)***

២. [...]បឹងទន្លេសាបជាផ្នែកមួយនៃធនធានធម្មជាតិដ៏មានតម្លៃរបស់ខ្មែរ និងជាជង្រុកត្រីដ៏ស្ដុកស្ដម្ភសម្រាប់បម្រើឱ្យសេដ្ឋកិច្ចជាតិ និងជីវភាពប្រជាជនយើង ។ ក្រៅពីតម្រូវការក្នុងស្រុក ត្រីបឹងទន្លេសាបត្រូវបាននាំចេញទៅលក់នៅបរទេសទៀតផង ។ តែជាអកុសល ដោយសារសង្គ្រាមរ៉ាំរ៉ៃ បឹងទន្លេសាបកំពុងត្រូវគំរាមកំហែង និងរងគ្រោះដោយការបំផ្លាញយ៉ាងធ្ងន់ធ្ងរ ។

ការបញ្ឈប់ការប្រើឧបករណ៍នេសាទខុសច្បាប់ ការនេសាទត្រីនៅរដូវត្រីពង ការនេសាទអនាធិបតេយ្យ ការកាប់បំផ្លាញព្រៃលិចទឹក និងការបំពុលបរិស្ថានបឹងទន្លេសាបជាបច្ច័យល្អប្រពៃសម្រាប់ធនធានធម្មជាតិនៅបឹងទន្លេសាប ។ [...]



# អត្ថបទៈ ល្បែងទាញព្រ័ត្រ



តើល្បែងប្រជាប្រិយខ្មែរយើងមានអ្វីខ្លះ? តើអ្នកចូលចិត្តល្បែងអ្វីជាងគេ?

តើអ្នកធ្លាប់លេងល្បែងប្រជាប្រិយខ្មែរណាមួយឬទេ? នៅពេលអ្នកលេងល្បែងណាមួយ អ្នកត្រូវចំណាំលំដាប់នៃការលេងល្បែងនោះ ។ លំដាប់លំដោយនៃការលេង គេហៅថា លំនាំនៃការលេងល្បែង ។

ឥឡូវនេះ ចូរអ្នកស្តាប់អត្ថបទ "ល្បែងទាញព្រ័ត្រ" រួចឆ្លើយនឹងសំណួរខាងក្រោមៈ

១. តើគេលេងល្បែងនេះនៅពេលណា?

២. តើល្បែងនេះត្រូវមានគ្នាប៉ុន្មាននាក់សម្រាប់លេង?

៣. តើល្បែងនេះត្រូវការប្រដាប់ប្រដាអ្វីខ្លះ?

៤. ចូរអ្នករៀបរាប់ត្រួសៗពីរបៀបលេងល្បែងនេះ?

៥. តើល្បែងនេះមានប្រយោជន៍ដូចម្តេចខ្លះសម្រាប់សុខភាព?



# រៀបរាប់ឡើងវិញពីលំនាំនៃការលេងល្បែងប្រជាប្រិយ

អ្នកបានស្តាប់រួចហើយអំពីល្បែងទាញព្រ័ត្រ ។ ឥឡូវនេះ ចូរអ្នកនិយាយលំនាំនៃការលេងល្បែងទាញព្រ័ត្រនេះឡើងវិញ ។

ក្នុងលំនាំនៃការលេងល្បែងនេះអ្នកត្រូវប្រាប់ ៖

ក. ពេលវេលា និងទីកន្លែង

- គេច្រើនលេងនៅពេលណា? (យប់ ថ្ងៃ រដូវបុណ្យទាន...)
- តើគេច្រើនលេងនៅកន្លែងណាខ្លះ? (ទីធ្លាវត្តអារាម ភូមិស្រុក...)

ខ. ចំនួនមនុស្សចូលរួមលេង ... ។

គ. គ្រឿងប្រដាប់សម្រាប់លេង ។

ឃ. របៀបលេង ។

តើគេលេងល្បែងទាញព្រ័ត្រដូចម្តេចខ្លះ? ចូរប្រាប់លំដាប់នៃការលេង ដោយប្រើពាក្យប្រាប់លំដាប់ដូចជា ដំបូង បន្ទាប់មក បន្ទាប់មកទៀត ក្រោយមក ក្រោយមកទៀត ចុងក្រោយ ទីបញ្ចប់... ។

ង. អត្ថប្រយោជន៏នៃល្បែងនេះ ។

## លំហាត់

ក. ចូរអ្នករៀបរាប់ពីលំនាំនៃការលេងល្បែងខាងក្រោម៖

៦. ល្បែងគ្របមាន់

៧. ល្បែងចោលឈូង

៨. ល្បែងលាក់កន្សែង ។

ខ. ចូរអ្នកសួរនរណាម្នាក់ពីលំនាំនៃការលេងល្បែងប្រជាប្រិយខ្មែរណាមួយ រួចយកមកនិយាយប្រាប់មិត្តរួមថ្នាក់របស់អ្នក ។



# ល្បះទោល

ល្បះមានទម្រង់បីយ៉ាងគឺ ល្បះទោល ល្បះផ្សំ និងល្បះក្រុង ។ ឥឡូវនេះយើងនឹងសិក្សាពីល្បះទោល ។ ល្បះទោលជាល្បះដូចម្តេច?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម ៖
  - បុប្ផាសើច ។
  - សំច្រៀងចម្រៀងប្រជាប្រិយ ។
  - នារីគិតដល់ឪពុកម្តាយ ។
  - ឪពុកបូណាភ្ជួរស្រែជិតសាលារៀន ។

ល្បះនីមួយៗខាងលើមានពីរផ្នែកគឺ កន្សោមនាមប្រធាន និងកន្សោមកិរិយា ។

ក. កន្សោមនាមប្រធាន(កន)

បុប្ផា(នាម) សំ(នាម) នារី(នាម) ឪពុកបូណា(នាម)

ខ. កន្សោមកិរិយា(កកិ)

- សើច(កិ)
- ច្រៀង(កិ) + ចម្រៀងប្រជាប្រិយ(កន)
- គិត(កិ) + ដល់(ធ្នាក់) + ឪពុកម្តាយ(កន)
- ភ្ជួរ(កិ) + ស្រែ(កន) + ក្បែរ(ធ្នាក់) + សាលារៀន(កន)



*ល្បះទោលជាល្បះដែលមានតែកន្សោមនាមប្រធាននិងកន្សោមកិរិយា ។*

## លំហាត់

- ចូរតែងល្បះតាមលំនាំខាងក្រោមឱ្យបានពីរៗល្បះ ៖

១. កន + កិ

២. កន + កិ + កន

៣. កន + កិ + ផ្នាក់ + កន ។

៤. កន + កិ + កន + ផ្នាក់ + កន ។



## ទម្រង់ល្បះគោល

ក. ទម្រង់មូលដ្ឋាននៃល្បះគោល

អ្នកបានសិក្សារួចហើយពីល្បះគោល ។ ដូចម្ដេចហៅថាល្បះគោល? តើល្បះគោលមានទម្រង់ដូចម្ដេចខ្លះ?

- ចូរពិនិត្យឧទាហរណ៍ខាងក្រោម៖

១. សោភាច្រៀង ។

ល → $កន_{១}$+ កិ

ល្បះកើតឡើងដោយកន្សោមនាមប្រធាន($កន_{១}$)"សោភា"និងកិរិយា(កិ)"ច្រៀង" ។

២. សំអានសៀវភៅរឿង ។

ល → $កន_{១}$+ កិ + $កន_{២}$

ល្បះកើតឡើងដោយកន្សោមនាមប្រធាន($កន_{១}$) "សំ" កិរិយា(កិ) "អាន" និងកន្សោមនាមកម្មបទ($កន_{២}$) "សៀវភៅរឿង" ។

៣. សំគិតដល់អនាគត ។

ល → $កន_{១}$+ កិ + កមធ

2

ល្បះកើតឡើងដោយកន្សោមនាមប្រធាន(កន$_១$) "សំ " កិរិយា(កិ)"គិត "និងកន្សោមនាមមានធ្នាក់(កមធ) "ដល់អនាគត " ។ ក្នុងកន្សោម "ដល់អនាគត " ពាក្យ " ដល់" ជាធ្នាក់(ធ) និងពាក្យ "អនាគត "ជានាម(កន) ។

៤.បឹងទន្លេសាបជាជង្រុកត្រីរបស់កម្ពុជា ។

ល → កន$_១$+ កិ + កន$_២$+ កមធ

ល្បះកើតឡើងដោយកន្សោមនាមប្រធាន(កន$_១$) "បឹងទន្លេសាប " កិរិយា(កិ)"ជា " កន្សោមនាម(កន$_២$) "ជង្រុកត្រី "និងកន្សោមមានធ្នាក់(កមធ) "របស់កម្ពុជា " ។ ក្នុងកន្សោម "របស់កម្ពុជា "ពាក្យ "របស់"ជាធ្នាក់ និងពាក្យ "កម្ពុជា "ជានាម ។



*ល្បះទោលមានទម្រង់មូលដ្ឋានៈ*

*១. ល → កន១+ កិ*

*២. ល → កន១+ កិ + កន២*

*៣. ល → កន១+ កិ + កមធ*

*៤. ល → កន១+ កិ + កន២+ កមធ*

ខ. គំនូសតាងល្បះ

តើល្បះទោលមានទម្រង់មូលដ្ឋានប៉ុន្មានយ៉ាង? ចូរបង្ហាញ ។

គេតាងល្បះជាពីរបែបគឺ តាងជាមែកធាង ឬចង្កោម និងតាងជាប្រអប់ទៅតាមទម្រង់របស់វា ។ ឥឡូវនេះ យើងតាងល្បះជាមែកធាង ឬជាចង្កោម ។

ល → កន$_១$+ កិ        ល → កន$_១$+ កិ + កន$_២$

ឧទាហរណ៍ ៖ ទឹកហូរ ។




ឧទាហរណ៍៖ យើងការពារព្រៃលិចទឹក ។




## លំហាត់

១. ចូរតែងល្បះតាមទម្រង់ខាងក្រោម ៖

ល → កន១ + កិ

ល → កន១ + កិ + កន២

ល → កន១ + កិ + កមធ

ល → កន១ + កិ + កន២ + កមធ

២. ចូរតាងល្បះខាងក្រោមជាមែកធាង ឬចង្កោម ៖

ក. សុភាពសើច ។

ខ. យើងរក្សាប្រភពទឹកសាប ។

គ. ដាណេនិយាយពីល្បែងគ្រុបមាន់ ។

ឃ. យើងរក្សាព្រៃលិចទឹកនៅបឹងទន្លេសាប ។



# ប្រវត្តិរបាំក្ងោក



តាមសេចក្ដីបរិយាយរបស់អ្នកស្រុកប៉ៃលិន មានតែរឿងព្រេងនិទានប៉ុណ្ណោះ ដែលជួយផ្ដល់ព័ត៌មានខាងការពន្យល់ពីរបាំក្ងោកនេះបាន ដូចមានសេចក្ដីតំណាលថា មានព្រះរាជបុត្រីក្សត្រមួយព្រះអង្គ ទ្រង់ផ្ទំលង់លក់ យល់សុបិនឃើញមានក្ងោកឈ្មោលមួយពង់យ៉ាងល្អ ចេះមន្តអាគម និងចម្រើនព្រះធម៌ទេសនាយ៉ាងពីរោះក្បោះក្បាយថ្វាយព្រះនាងទ្រង់ព្រះសណ្ដាប់ ។ លុះព្រះនាងតើនឡើង ក៏ទ្រង់រំពឹងក្នុងព្រះចិន្តាថា មិនដឹងធ្វើដូចម្ដេចនឹងបានក្ងោកដ៏ល្អឆើតឆាយនោះមកទេសនាថ្វាយព្រះនាងស្ដាប់ម្ដងទៀត ។ ម្ល៉ោះហើយ ទ្រង់តែងជ្រប់ព្រះភក្ត្រវិតក្ក ។ រាល់ថ្ងៃ ទ្រង់សោយ និងផ្ទំពុំបានស្រួលឡើយ ។ កាលទ្រង់យល់ព្រះភក្ត្ររាជបុត្រីសៅហ្មងដូចនេះ ព្រះបិតាទ្រង់ត្រាស់សួរទៅព្រះរាជបុត្រី ។ ព្រះនាងក៏ក្រាបបង្គំទូលសព្វគ្រប់តាមព្រះសុបិន និងព្រះបំណងរបស់ព្រះនាង ។

កាលនោះ ព្រះរាជាទ្រង់ជ្រើសរើសរកព្រានយ៉ាងជំនាញផុតគេ ឱ្យដើរស្វែងរកសត្វក្ងោក ដែលមានរូបឆោមល្អចេះមន្តគាថា និងទេសនាពីរោះនោះឱ្យបានយកមកថ្វាយ ។ ព្រានម្នាក់ដែលមានថ្វីដៃលើសគេទទួលព្រះរាជបញ្ជា ហើយក៏ស្វះស្វែងរកសព្វព្រៃទាំងអស់ ។ ព្រាន

ចេះតែព្យាយាមដើរទៅៗ រុករកក្នុងព្រៃតូចធំ ។ លុះព្រឹកមួយ ព្រានរកកលនឹងអស់សង្ឃឹមទៅហើយ ស្រាប់តែទៅដល់ព្រៃធំមួយ ព្រានប្រទះឃើញក្ងោកឈ្មោលធំមួយកំពុងឈរសញ្ជប់ភាវនានៅលើមែកឈើ បែរមុខឆ្ពោះទៅកាន់ព្រះអាទិត្យ ។ បន្តិចមក ក្ងោកលោតចុះពីមែកឈើមកលោតរេរាំ ហាក់ដូចជាសប្បាយរីករាយខ្លាំងណាស់ ។ ព្រានត្រេកអរពន់ប្រមាណ ក៏លើកស្ពាតម្រង់បាញ់កាត់ដំណើរកុំឱ្យក្ងោកហើររួច ប្រយោជន៍នឹងចាប់យកមកថ្វាយព្រះរាជបុត្រី ប៉ុន្តែព្រានបាញ់ជាច្រើនលើកមិនបានត្រូវសោះ នាំឱ្យព្រានលបលួចចាំមើល តើហេតុអ្វីបានជាខ្លួនបាញ់មិនត្រូវ ប្រាកដជាក្ងោកនេះចេះមន្តអាគមស័ក្តិសិទ្ធិជាមិនខាន ។ ពីរថ្ងៃក្រោយមកទើបព្រានដឹងច្បាស់ថា ក្ងោកនេះ តែភ្ញាក់ឡើងពីព្រលឹម ក៏តាំងសីលសែកមន្តគាថា ប្រណម្យឆ្ពោះទៅព្រះអាទិត្យខាងកើត លុះដល់ល្ងាចក៏ភាវនាទៀត បែរឆ្ពោះទៅខាងលិច មុននឹងចូលទ្រនំដេក ។ ព្រានសញ្ជឹងហើយយល់ថា តើគិតធ្វើយ៉ាងណាឱ្យក្ងោកភ្លេចចម្រើនភាវនាមន្តគាថា តែមួយថ្ងៃ ខ្លួននឹងលបបាញ់បានជាមិនខាន ។ ថ្ងៃបន្ទាប់មក ព្រានទៅទាក់ក្ងោកញីមួយយ៉ាងស្រស់ប្រិមប្រិយពីទីដទៃមក ហើយយកទៅលែងនៅពីមុខទ្រនំ ជាលំនៅស្ថាននៃក្ងោកឈ្មោលនោះ ។ ព្រលឹមស្រាងឡើង ក្ងោកឈ្មោលទទះស្លាបប្រុងនឹងចាប់ផ្តើមភាវនាមន្តអាគម ក៏កើតក្តីត្រេកមេត្រី ហើយហាក់លោតចុះពីមែកឈើទៅរកមយុរីដ៏ស្រស់នោះ ។ ពេលនេះហើយ ដែលក្ងោកឈ្មោលចេះមន្តគាថា ត្រូវជាប់អន្ទាក់ព្រាន ដែលលបលួចដាក់តាំងពីពេលព្រលប់ម្ល៉េះ ។

ព្រានចូលទៅចាប់ក្ងោកបានដោយក្តីត្រេកអរ ទើបក្ងោកសាកសួរថា ៖

- ព្រានអើយ! ព្រានប្រាថ្នារូបខ្ញុំយកទៅធ្វើអ្វី? ខ្ញុំនេះខំលះបង់ព្រៃរៀងអាយមកនៅព្រៃជ្រៅ ប្រាថ្នាឱ្យផុតពីការសៅហ្មង និងគេចពីការប្រមាញ់នេសាទគ្រប់យ៉ាង ហេតុអ្វីក៏ព្រានតាមមកធ្វើបាបខ្ញុំទៀត?

ព្រានឮសម្តីក្ងោកគួរអាណិតណាស់ ក៏ឆ្លើយដោយពាក្យពីរោះពិសាទៅវិញថា៖

- ក្ងោកអើយ! ខ្ញុំមិនមែនយកអ្នកទៅសម្លាប់ទេ ខ្ញុំឃើញអ្នកជាអ្នកចេះធម៌អាថ៌ តែព្រលឹមឡើងតែងចម្រើនធម៌ជានិច្ច ហេតុនេះ ខ្ញុំចាប់អ្នកនាំទៅថ្វាយព្រះរាជបុត្រីនៃព្រះចៅផែនដី ត្បិតព្រះនាងយល់សុបិនឃើញក្ងោកចេះទេសនា ហើយព្រះនាងទ្រង់ចង់ព្រះសណ្តាប់ធម៌ទេសនានេះ!

ក្ងោកសើច ហើយឆ្លើយមកវិញថា៖

- បើដូចនោះទេ សុំអ្នកកុំព្រួយ ខ្ញុំនឹងធានាទៅសម្ដែងធម៌ថ្វាយព្រះនាងស្ដាប់រៀង រាល់ថ្ងៃសីល ចាប់តាំងពីសីលនេះតទៅ ។

ចាប់តាំងពីពេលនោះមក ក្ងោកតែងហើរមកថ្វាយធម្មទេសនាដល់ព្រះរាជបុត្រី ជានិច្ច ។ អាស្រ័យរឿងនេះហើយ បានជាពួកខ្មែរកូឡានៅប៉ៃលិន និយមលេងរបាំក្ងោកនៅ ពេលថ្ងៃសីលរៀងរហូតមក ។

*(ដកស្រង់ និងកែសម្រួលពីរបាំប្រជាប្រិយខ្មែររបស់ពុទ្ធសាសនបណ្ឌិត្យ គ.ស.១៩៦៤)*

## សំណួរ

១. តើហេតុអ្វីបានជាព្រះរាជាទ្រង់បញ្ជាឱ្យជ្រើសរើសព្រានជំនាញ ដើម្បីស្វែងរក ចាប់សត្វក្ងោក?

២. តើព្រានរកសត្វក្ងោកថ្វាយព្រះរាជាបានដោយប្រើមធ្យោបាយដូចម្ដេច?

៣. ចូរស្រង់ភាសាច្បាស់លាស់ពីអត្ថបទឱ្យបានយ៉ាងតិចបីពាក្យ ។

៤. ចូរបង្ហាញកាលអាកាសរបស់រឿងនេះ ។

៥. ចូរស្រង់ល្បះសំណួរឱ្យបានពីរពីក្នុងអត្ថបទ ។



# របាំរាំវង់



រាំវង់ជារបាំមួយរបស់ជនជាតិខ្មែរយើង ។ ប្រជាជនខ្មែរទូទៅនិយមរបាំនេះណាស់តាំងពីដើមរហូតបច្ចុប្បន្ននេះ ។ គេលេងរបាំនេះមិនរើសពេល ឬកន្លែងឡើយ ។ ឯឧបករណ៍ភ្លេងពីបុរាណ ដែលចាំបាច់បំផុតនៃរបាំរាំវង់ គឺមានស្គរមួយ និងត្រឡោកជាគូប៉ុននោះ ។ ពេលគេលេង គេយកស្គរមកគាបនឹងក្បាលជង្គង់ទាំងសងខាង ហើយគេអង្គុយលើកៅអីវាយដោយដៃទាំងពីរ ។ គេក្រឡុកត្រឡោក ដែលមានដុំក្រួសនៅក្នុងនោះ ឱ្យឮសូរជាចង្វាក់តាមបទនីមួយៗ ។ សម្លៀកបំពាក់សម្រាប់មនុស្សប្រុសក្នុងពេលរាំ ពុំមានអ្វីប្លែកទេ ។ ឯសម្លៀកបំពាក់ស្ត្រីវិញ ជំនាន់មុនគេស្លៀកសំពត់សូត្រពណ៌ មានជាយប្រកបដោយខ្សែរសយ ។ ហូល ឬសំពត់ពណ៌ផ្សេងៗសុទ្ធតែស្រុងលុបបាត់កំភួនជើង ។ ឯអាវមិនសូវប្រកាន់របៀបទេ ឱ្យតែមានពណ៌ស្រស់ដេញពន្លឺភ្លើងក្នុងពេលយប់ ។ អ្នករាំស្រីច្រើនសៀតផ្កានៅសក់ ឯប្រុសសៀតផ្កានឹងអាវលើទ្រូងខាងឆ្វេង ។ ការរៀបចំទីកន្លែងរាំពុំមានអ្វីលំបាកទេ គឺមានតែតុមួយតូច និងថូផ្កា ឬជើងផ្កាដែលមានស្លឹក និងផ្កាស្រស់ៗមួយប៉ុននោះ សម្រាប់ឱ្យអ្នករាំដើរព័ទ្ធជុំវិញ ។ ពេលមិនទាន់រាំ ប្រុសៗឈរ ឬអង្គុយនៅម្ខាង ស្រីៗនៅម្ខាង តុផ្កានៅកណ្ដាល ។ ពេលផ្ដើមលេងអ្នក

វាយស្គរចាប់រោទ៍រន្ទើនបីបទ ដើម្បីប្រជុំគ្នាផង និងបើកពិធីផង ។ អ្នកកាន់ត្រឡោកក៏ចាប់ក្រឡុកតាមចង្វាក់ស្គរ ។ នៅត្រង់ចុងកន្ទុយបទមួយឃ្លាៗគេក្រឡុក ត្រឡោករោទ៍ឡើងម្ដងទៀត ។

ពេលចាប់ផ្ដើមប្រុសម្នាក់ឡើងរាំបើកឆាក រួចហើយងក់ក្បាលហៅប្រុសៗគ្នាឯងឱ្យបានច្រើននាក់ចេញរាំដង្ហែគ្នា ។ រាំបានមួយជុំ ពួកគេទៅឈប់នៅខាងមុខស្រីៗ រួចលើកដៃសំពះ ។ ឯស្រីៗត្រូវសំពះ ឬងក់ក្បាលតបវិញ ហើយចេញមករាំពីក្រោយ ឬរេទៅខាងឆ្វេង ឬទៅខាងស្ដាំដៃរបស់ប្រុស ។ ឃើញគេរាំបានច្រើនជុំហើយ អ្នកច្រៀងធ្វើឱ្យចង្វាក់កាន់តែញាប់ឡើងៗ ។ អ្នករាំក៏កាន់តែរាំញាប់តាមចង្វាក់ដែរ ។ លុះអ្នកវាយស្គររោទ៍ស្គរឡើង អ្នករាំឈប់បែរមុខមករកគ្នា ឈរសម្រួលដងខ្លួន សំពះលាគ្នាទៅវិញទៅមក ទើបដើរចេញពីកន្លែងរាំ ។ បើពុំមានចម្រៀងថាសទេ អ្នករាំត្រូវច្រៀងព្រមជាមួយនឹងក្បាច់រាំផង អ្នកអង្គុយ ឬឈរត្រូវជួយច្រៀងផងដែរ ។ កាលណាអ្នកវាយស្គរចាប់ផ្ដើម អ្នករាំក៏ចាប់ផ្ដើមរាំ និងច្រៀងក្នុងពេលជាមួយគ្នានោះតែម្ដង ។

## សំណួរ

១. តើរបាំរាំវង់ពីបុរាណ មានឧបករណ៍ភ្លេងចាំបាច់អ្វីខ្លះ?

២. តើអ្នករាំវង់ស្លៀកពាក់ដូចម្ដេចខ្លះ?

៣. នៅពេលលេងរបាំរាំវង់ តើគេរៀបចំទីកន្លែង និងសម្ភារៈដូចម្ដេចខ្លះ?

៤. ចូរស្រង់គុណកិរិយាបំណែបក្នុងអត្ថបទឱ្យបានពីរពាក្យ ។

៥. ចូរអ្នករៀបរាប់លំនាំនៃការលេងរបាំរាំវង់នេះឡើងវិញ ។



# ពាក្យស្លោក សុភាសិត និងពាក្យបណ្ដៅ



សុភាសិត

១. ចេះពីរៀន មានពីរក

២. តក់ៗពេញបំពង់

៣. សឹមៗកុំបំបោល

ពាក្យស្លោក

១. ព្យាយាមគង់បានសម្រេច

២. សាមគ្គីជាកម្លាំង

៣. វិន័យនាំមកនូវសេចក្ដីថ្លៃថ្នូរ

៤. ការងារជាកំណប់ទ្រព្យ

៥. រក្សាព្រៃឈើគឺរក្សាជីវិត

ពាក្យបណ្ដៅ

៦. កំប៉េងកំប៉ោះ កំប៉េងឥតដោះ ចិញ្ចឹមកូនរស់ ។ គឺសត្វអ្វី?

៧. មានជើងមិនចេះដើរ មានស្លាបមិនចេះហើរ មានមាត់មិនចេះនិយាយ ។ គឺអ្វី?

៨. ក្ងក់ដូចកទុង ក្ងង់ដូចកត្បាត រកស៊ីសង្ឃាត រកពោះដាក់គ្មាន ។ គឺអ្វី?

៩. កាន់កន្ទុយញាក់ខ្សែ អាចម៍មួយស្រែមិនស្អុយសោះ ។ គឺអ្វី?

១០. កាត់កឥតឈាម កាត់ដៃឥតម្រាម ពុះទ្រូងឥតថ្លើម ។ គឺអ្វី?

## សំណួរ

១. ចូរប្រាប់ន័យរបស់សុភាសិតទាំងបី ។

២. ចូរបកស្រាយន័យរបស់ពាក្យស្លោកខាងលើ ។

៣. ចូររកចម្លើយរបស់ពាក្យបណ្ដៅខាងលើ ។

៤. ចូរពិភាក្សារកសុភាសិតនិងពាក្យបណ្ដៅរបស់ខ្មែរយើងមួយចំនួនទៀត ។



## សំណេររៀបរាប់លំនាំនៃការលេងល្បែងប្រជាប្រិយ

អ្នកបាននិយាយរៀបរាប់លំនាំនៃការលេងល្បែងប្រជាប្រិយមួយចំនួនរួចមកហើយ ដូចជា ល្បែងគ្រប់មាន់ ល្បែងចោលឈូង ល្បែងលាក់កន្សែង... ។

ឥឡូវនេះ ចូរអ្នកសរសេរលំនាំនៃការលេងល្បែងទាំងនោះឡើងវិញ ទៅតាមលំនាំខាងក្រោម ៖

- ពេលវេលានិងទីកន្លែង
- អ្នកចូលរួមលេង
- គ្រឿងប្រដាប់សម្រាប់លេង
- របៀបលេង
- អត្ថប្រយោជន៍នៃការលេងល្បែងនេះ ។




# បំណងប្រាថ្នាដើម្បីជោគជ័យ



មនុស្សម្នាក់ៗត្រូវមានការតាំងចិត្តយ៉ាងមុតមាំនិងខិតខំប្រឹងប្រែង តស៊ូ អំណត់ព្យាយាម... ធ្វើសកម្មភាពគ្រប់យ៉ាង ដើម្បីធ្វើឱ្យបំណងប្រាថ្នារបស់ខ្លួនឈានដល់គោលដៅនិងសម្រេចបានជោគជ័យ ។ ការលោភលន់ និងការធ្វើតាមតែចិត្ត នាំឱ្យមានមហន្តរាយដល់ខ្លួនឯងដល់អ្នកដទៃនិងសង្គមជាតិជាក់ជាពុំខាន ។ ក្នុងមេរៀននេះ អ្នកនឹងបានសិក្សាអំពីអត្ថបទ ។

ជាពិសេស អ្នកនឹងបានសិក្សាបន្ថែមទៀតអំពី៖

- សេចក្ដីលម្អិតសំខាន់
- កាលអាកាសនិងតួអង្គ
- តម្លៃអប់រំនៃរឿង
- ការនិយាយសង្ខេបចំណុចសំខាន់ៗនៃរឿង
- ការតាងល្បះជាប្រអប់តាមទម្រង់ល្បះទោល
- សំណេររឿងនិទានដែលមានកាលអាកាសច្រើន ។



# ការតាងល្បះជាប្រអប់

អ្នកធ្លាប់សិក្សារួចមកហើយ អំពីប្រភេទល្បះទម្រង់ល្បះទោលនិងការតាងល្បះជាចង្កោម ឬមែកធាង ។

ក្នុងមេរៀននេះ អ្នកសិក្សាអំពីការតាងល្បះជាប្រអប់បន្តទៀត ។

- ចូរអ្នកសង្កេតល្បះខាងក្រោម៖

ឧទាហរណ៍ទី ១ ៖ សុខាទៅសាលារៀន ។

ឧទាហរណ៍ទី ២ ៖ អុំជាទៅស្រែដើម្បីភ្ជួរដី ។

ការតាងល្បះទោលជាប្រអប់

ល្បះទី១




ល្បះទី២




តាមឧទាហរណ៍ទី១ យើងឃើញថា ល្បះទី១មានទម្រង់ ៖

ល្បះ → កន$_{១}$ + កិ + កន$_{២}$

សុខា(កន$_{១}$) + ទៅ(កិ) សាលារៀន(កន$_{២}$)

កន      កកិ

តាមឧទាហរណ៍ទី២ យើងឃើញថា ល្បះទី២មានទម្រង់ ៖

ល្បះ → កន១ + កិ + កន២ + កមធ

អ៊ុំជា($ន_១$) + ទៅ(កិ) ស្រែ($កន_២$) ដើម្បីភ្ជួរដី(កមធ)

កន      កកិ

ឧទាហរណ៍ទី៣ : សោភាច្រៀង ។

ឧទាហរណ៍ទី៤ : ដាណោគិតដល់អនាគត ។

ល្បះទី៣ :

| សោភា | ច្រៀង |
| --- | --- |
| $កន_១$ | កិ |

ល → $កន_១$ + កិ

ល្បះទី៤ :

| ដាណោ | គិត | ដល់អនាគត |
| --- | --- | --- |
| $កន_១$ | កិ | កមធ |
| | កកិ | |

ល → $កន_១$ + កិ + កមធ

# លំហាត់

- ចូរប្អូនតាងល្បះខាងក្រោមជាប្រអប់ ៖
  1. ដារ៉ាហាត់ប្រាណ ។
  2. សុភីដេរខោអាវ ។
  3. សំនិយាយជាមួយសុខ ។
  4. ខ្ញុំរៀនដើម្បីអនាគត ។



# ប្រវត្តិទាមទារឯករាជ្យជាតិខ្មែរ

[...] "ព្រះមហាក្សត្រនៃយើង ព្រះអង្គបានទ្រង់ចិញ្ចឹមព្រះរាជហឫទ័យរកឯករាជ្យឱ្យប្រទេស ជាឯករាជ្យពិតៗមិនក្លែងក្លាយ ។ ព្រះអង្គចិញ្ចឹមព្រះរាជហឫទ័យប្រយ័ត្នប្រយែងក្នុងចំណុចនេះជានិច្ច សូម្បីតែកងទ័ពជប៉ុនមកប្រកាសឯករាជ្យឱ្យក្នុងឆ្នាំ១៩៤៥ ហើយក៏ព្រះអង្គមិនទ្រង់ព្រះសណ្ដាប់ ហើយទាមទារ សុំឱ្យរាជការព្រះចៅអធិរាជជប៉ុនប្រកាសបញ្ជាក់ឯករាជ្យនេះពីលើទៀត តែរាជការជប៉ុនមិនធ្វើព្រោះដឹងថាជាការក្លែងក្លាយ បោកប្រាស់ ។ តពីសន្ធិសញ្ញា " Modus Vivendi " ដើមឆ្នាំ១៩៤៦មក ព្រះអង្គទ្រង់ព្យាយាមតស៊ូទាមទារដោយព្រះអង្គឯង តាមផ្លូវទូតផង និងតាមផ្លូវអន្តរជាតិផង ឱ្យបានកេតនភណ្ឌបណ្ដើរៗដើម្បីទាមទារឯករាជ្យឱ្យប្រទេស ។

ខាងផ្នែកយោធា ព្រះអង្គទ្រង់ទាមទារយកបានតំបន់ស្វយ័តកងទ័ព គឺខេត្តសៀមរាប កំពង់ធំ ក្នុងឆ្នាំ១៩៤៩ និងខេត្តបាត់ដំបងក្នុងឆ្នាំ១៩៥២ ។

គឺតំបន់ស្វយ័តនេះហើយ ដែលជាមូលដ្ឋានសំខាន់ ជាស្ពានឆ្ពោះទៅរកឯករាជ្យបរិបូណ៌មកឱ្យប្រទេសជាតិ ។

ឆ្នាំ១៩៥២ នាថ្ងៃទី ១៥ ខែមិថុនា មានព្រះរាជសារមួយផ្ញើទៅជូនរាស្ត្រ ព្រះអង្គទ្រង់សន្យានឹងយកឯករាជ្យឱ្យរាស្ត្រឱ្យបានបរិបូណ៌ ។

ក្រោយពីបានរៀបព្រះពិធីសពព្រះអង្គម្ចាស់ក្សត្រី គន្ធបុប្ផាហើយ ព្រះអង្គទ្រង់យាងទៅប្រទេសបារាំង ដើម្បីចរចាជាមួយលោកប្រធានាធិបតី វ៉ាំងសង់ អូរីយ៉ូល (Vincent Auriol) រួចយាងទៅកាណាដា រួចទៅអាមេរិកនិងជប៉ុន ។ ពេលព្រះអង្គយាងមកវិញ នៅថ្ងៃទី១២ ខែមិថុនា ឆ្នាំ១៩៥៣ ព្រះអង្គធ្វើជាយាងធ្វើព្រះទស្សនកិច្ចធម្មតា នៅតាមខេត្ត ពីខេត្តសៀមរាប រហូតដល់បាត់ដំបង ប៉ោយប៉ែត ហើយយាងចេញទៅបាងកកក្នុងថ្ងៃទី១៣ ខែមិថុនា ឆ្នាំ១៩៥៣និងយាងត្រឡប់មកប្រទេសយើងនៅថ្ងៃទី ២០ ខែមិថុនា ឆ្នាំ១៩៥៣ ។

លុះព្រះអង្គយាងត្រលប់មកវិញ ព្រះអង្គទ្រង់ប្រថាប់នៅតំបន់ស្វយ័តរហូត ។ កាលៈទេសៈនោះ ទ្រង់សព្វព្រះរាជហឫទ័យបង្កើតចលនាជីវពល ។ នេះហើយដែលធ្វើឱ្យរាជការបារាំងសែសយល់ថា បើមានកងកម្លាំងជាតិកើតឡើង ហើយសាយភាយពេញព្រះនគរដូច្នេះឃើញថាលែងស្រួលគាបសង្កត់ប្រទេសខ្មែរបានទៀតហើយ ។

ទាំងអស់នេះហើយ តាមសម្តេចវ៉ាំងវរៈវៀងជ័យ ដែលថា " កម្លាំងជាតិពីក្រោយព្រះមហាក្សត្រ ក្នុងការងារព្រះនយោបាយព្រះអង្គ ជាមូលហេតុប្រាស្រ័យទាក់ទងគ្នាទាំងអស់ឱ្យយើងបានរំដោះជាតិអំពីនឹមអាណានិគមក្នុងគ្រានោះផង ។ [...]

"ព្រះបាទសម្តេចព្រះនរោត្តម សីហនុវរ្ម័ន ព្រះមហាក្សត្រយើង ប្រាកដជាព្រះអង្គបានចាត់វិធានការគ្រប់បែបយ៉ាងត្រឹមត្រូវ ដើម្បីបង្ហំដឹកនាំប្រទេសយើងបានឯករាជ្យពិតៗនៅថ្ងៃទី៩វិច្ឆិកា ឆ្នាំ១៩៥៣ ដោយខ្លួនឯង ហើយការពារបានគង់វង្ស និងរួចផុតពីនឹមអាណានិគមបារាំងរហូតដល់សព្វថ្ងៃ " ។

*(ដកស្រង់ខ្លឹមសារពីសៀវភៅ សន្និសីទស្តីពីព្រះរាជបូជនីយកិច្ចទាមទារឯករាជ្យជូនប្រទេសកម្ពុជាថ្ងៃ១០ខែវិច្ឆិកាឆ្នាំ១៩៦៧ទំព័រ ៨-១១)*

## សំណួរ

១. តើអត្ថបទខាងលើនេះនិយាយពីអ្វី?

២. តើអ្នកណាជាអ្នកទាមទារនិងស្វែងរកឯករាជ្យជូនប្រទេសកម្ពុជា?

៣. តើការទាមទារឯករាជ្យជាតិបានពេញបរិបូណ៌នៅថ្ងៃណា? ខែណា? ឆ្នាំណា?

៤. តើបំណងប្រាថ្នារបស់ព្រះបាទនរោត្តម សីហនុ បានសម្រេចជោគជ័យដែរឬទេ? ព្រោះអ្វី?

៥. តើទិវាឯករាជ្យជាតិប្រព្រឹត្តទៅនៅថ្ងៃណា ខែណា? ហើយមានអត្ថន័យដូចម្ដេច?



# រឿង ត្រីចំពុះដាវ



កាលពីព្រេងនាយ មានត្រីចំពុះដាវជាច្រើន មកនៅកកកុញក្នុងទឹកសមុទ្រ ជុំវិញប្រទេសសិង្ហបុរី ។ រលកសមុទ្រធំៗ បាននាំត្រីទាំងនោះមកក្បែរឆ្នេរ ។ អ្នកស្រុកមិនហ៊ានចុះហែលទឹក ឬដើរកម្សាន្តតាមឆ្នេរឡើយ ដោយខ្លាចត្រីសាហាវទាំងនោះមកចាក់សម្លាប់ ។ អ្នកនេសាទក៏ត្រូវឈប់រកស៊ីដែរ ដោយខ្លាចត្រីចំពុះដាវកាត់សំណាញ់និងចោះទម្លុះទូក ។

ទីបំផុត ស្ដេចប្រទេសសិង្ហបុរីសម្រេចថាត្រូវរកវិធានការណាមួយ ដើម្បីកំចាត់ត្រីចំពុះដាវឱ្យអស់ ។ ស្ដេចបញ្ជាឱ្យទាហានរៀបជាជួរតាមឆ្នេរសមុទ្រ ដើម្បីសម្លាប់វាចោលនៅពេលវាឡើងមកតាមទឹករលក ។ ពួកទាហានត្រៀមខ្លួនជាស្រេច ម្នាក់ៗសុទ្ធតែប្រដាប់ដោយលំពែងនិងខែល ។

លុះទឹកជោរមក ទាហានទាំងអស់បានប្រុងប្រៀបចូលប្រយុទ្ធ ប៉ុន្តែពួកគេប្រយុទ្ធមិនទាន់ពេលទេ ព្រោះត្រីចំពុះដាវបានលោតឡើងលើ ហើយចាក់សម្លាប់ពួកគេដោយចំពុះដែលមានរាងដូចដាវ ។ ទាហានជាច្រើនបាត់បង់ជីវិត ហើយមួយភាគធំទៀតត្រូវរបួស ។ ស្ដេចបាន

បញ្ជាទាហានមួយជួរ ហើយមួយជួរទៀតឱ្យចូលទៅជំនួស ប៉ុន្តែអ្នកទាំងនោះទទួលវាសនាដូចអ្នកមុនដែរ ។ ព្រឹត្តិការណ៍បែបនេះចេះតែបន្តទៅទៀត ។

នៅពេលហេតុការណ៍នេះបានកើតឡើង មានក្មេងប្រុសម្នាក់កំពុងតែមើលមកពីចម្ងាយ ដោយកែវភ្នែកភ្លឺមុត ។ ទីបំផុត វាបានចូលទៅជិតស្តេច ហើយទូលថា ៖

ហេតុអ្វីក៏ព្រះអង្គទុកឱ្យពួកទាហានទាំងនេះស្លាប់យ៉ាងនេះ?

ស្តេចឆ្លើយតប ៖

អានាង! តើឱ្យអញធ្វើអ្វីកើតក្រៅពីនេះទៀត ។

ក្មេងនោះទូលស្តេចថា ៖

បើព្រះអង្គតម្រៀបដើមចេកតាមឆ្នេរសមុទ្រវិញ ត្រីទាំងនោះមុខជាបញ្ឈប់សកម្មភាពវា ហើយក៏គ្មានមនុស្សស្លាប់តទៅទៀតដែរ ។

ស្តេចភ្ញាក់ព្រើតនឹងសំណើដ៏ឈ្លាសវៃរបស់ក្មេងនេះ ។ ស្តេចក៏បញ្ជាឱ្យពួកទាហានកាប់ដើមចេកជាច្រើនយកមកតម្រៀបជាជញ្ជាំងតាមឆ្នេរសមុទ្រមួយរំពេច ។ ពួកទាហានទាំងនោះក៏ប្រតិបត្តិតាមបញ្ជាស្តេចភ្លាម ព្រោះមានចម្ការចេកមួយយ៉ាងធំនៅក្បែរនោះ ។

បន្តិចមក ទឹកសមុទ្រក៏បោកមកដល់ទៀត ។ ទឹកសមុទ្រមានពណ៌សព្រាតលាយឡំដោយត្រីចំពុះដាវមីរដេរដាស ។ រលកសមុទ្រជះមកលើជញ្ជាំងដើមចេក នាំយកត្រីចំពុះដាវជាច្រើនមកផង ។ លុះរលកសមុទ្រថយមកវិញ ត្រីចំពុះដាវចាក់ជាប់នៅស្រទបចេកទន់ៗរាប់ពាន់ក្បាល ។ ពួកទាហានក៏នាំគ្នាកាប់យកតាមទំនើងចិត្ត ។ ការណ៍នេះចេះតែប្រព្រឹត្តទៅរហូតទាល់តែគ្មានត្រីចំពុះដាវមួយសោះ នៅក្នុងទឹកសមុទ្រ ។

ស្តេចរីករាយណាស់ ដោយទតឃើញត្រីចំពុះដាវស្លាប់ផុតពូជ ហើយប្រជាជនបានប្រកបរបរនេសាទនិងមកលេងកម្សាន្តតាមសមុទ្រតាមបំណងប្រាថ្នាដូចដើមវិញ ។

*(ដកស្រង់ពីកម្រងអត្ថបទអក្សរសិល្ប៍ក្រសួងអប់រំ ឆ្នាំ១៩៨៤ជាប្រភេទរឿងព្រេងរបស់ប្រទេសសិង្ហបុរី ទំព័រ៥៩-៦១)*

## សំណួរ

១. តើរឿងនេះមានប្រភពមកពីណា?

២. តើតួអង្គណាជាតួអង្គឯក និងតួអង្គរង?

៣. ហេតុអ្វីបានជាស្ដេចបញ្ជាឱ្យពួកទាហានសម្លាប់ត្រីចំពុះដាវ?

៤. តើបំណងប្រាថ្នារបស់ស្ដេចក្នុងការបញ្ជាឱ្យពួកទាហានសម្លាប់ត្រីចំពុះដាវ បានសម្រេចជោគជ័យដែរឬទេ? ព្រោះអ្វី?

៥. ចូររកកាលអាកាសនៃរឿង ។

៦. តើរឿងនេះមានតម្លៃអប់រំដូចម្ដេច?



# គោលបំណង



មុននឹងមានគោលបំណងអ្វីមួយ យើងត្រូវតែរំពឹងគិតពីលទ្ធភាព សមត្ថភាព និងផលប្រយោជន៍ជាក់លាក់ ។ យើងមិនគួរមានគោលបំណងបែបរវើរវាយ ឬលោភលន់ បណ្ដោយទៅតាមភ័ព្វព្រេងនោះទេ ។ ការមានគោលបំណងច្បាស់លាស់ ជាការចាប់ផ្ដើមការអភិវឌ្ឍខ្លួនឯងយ៉ាងពិតប្រាកដ ព្រោះយើងបានដឹងច្បាស់ថា តើយើងត្រូវអភិវឌ្ឍខ្លួនឯងដើម្បីអ្វី? គោលបំណងជាចម្លើយប្រាប់ថា យើងចង់ក្លាយខ្លួនទៅជាអ្វីខ្លាំងបំផុត នៅក្នុងដំណើរជីវិតរបស់យើង ហើយយើងនឹងព្យាយាមគ្រប់មធ្យោបាយ ដើម្បីសម្រេចគោលបំណងនោះ ។

គោលបំណងត្រូវតែជាអ្វីដែលយើងអាចមើលឃើញយ៉ាងច្បាស់លាស់ មិនស្រពេចស្រពិល ។ យើងមិនមែនគ្រាន់តែមានគោលបំណងថា ចង់ក្លាយខ្លួនជាមន្ត្រីរាជការថ្នាក់ខ្ពស់ម្នាក់ ឬក៏ចង់ក្លាយជាម្ចាស់ក្រុមហ៊ុនអ្វីមួយ ដោយស្រពេចស្រពិលនោះទេ ព្រោះគោលបំណងបែបនេះ ប្រើការមិនទាន់បានឡើយ ។ គោលបំណងដែលនឹងអាចយកជាការបានពិតប្រាកដទាល់តែយើងបញ្ជាក់ឱ្យច្បាស់លាស់ថា យើងចង់ក្លាយខ្លួនជាមន្ត្រីរាជការថ្នាក់ណា? បម្រើការនៅក្រសួង

ណា? ឬបើកក្រុមហ៊ុនអ្វីមួយ ? ការកំណត់គោលបំណងច្បាស់លាស់តែងតែធ្វើឱ្យយើងអភិវឌ្ឍខ្លួនឯងបានយ៉ាងត្រឹមត្រូវ និងតម្រង់ឆ្ពោះទៅរកគោលដៅបានដោយងាយ ។ឧបមាថា យើងចង់ក្លាយខ្លួនជារដ្ឋមន្ត្រីក្រសួងការបរទេស យើងត្រូវតែខ្នះខ្នែង ស្វះស្វែងរកចំណេះដឹង ដែលទាក់ទងនឹងការទូត និងខិតខំរៀនភាសាបរទេសឱ្យបានស្ទាត់ហ្វឹកហាត់និយាយចរចាឱ្យបានជំនាញ និងមានបដិភាណល្អ មានភាពឈ្លាសវៃក្នុងការឆ្លើយតប ។ បើមិនដូច្នោះទេក្រោយពីយើងអាចបានទទួលតំណែងនេះ យើងអាចធ្វើការងារខុសឆ្គង ។ ជាការពិតណាស់ប្រសិនបើយើងគ្មានចំណេះដឹង គ្មានសមត្ថភាពក្នុងផ្នែកនេះពិតៗទេនោះ ឱកាសសម្រេចគោលបំណងក៏មិនងាយនឹងកើតមានដែរ ព្រោះអ្នកដែលគាំទ្រ ឬតែងតាំងយើងតែងគិតថា តើយើងអាចធ្វើការងារនោះបានដែរឬទេ? បានកម្រិតណា?

គោលបំណងដែលយើងជ្រើសរើស ដើម្បីជាសេចក្តីសង្ឃឹមដ៏ខ្ពស់បំផុតរបស់យើងនោះត្រូវតែជាអ្វីដែលយើងស្រឡាញ់ជាទីបំផុត និងចង់បានយ៉ាងពិតប្រាកដ ។ វាអាចនៅខ្ពស់ដែលមិនអាចឈោងដល់ តែយើងមិនគួរនឹងរារែកចិត្តឡើយ ។ បើយើងគិតថា យើងនឹងត្រូវលះបង់ពេលវេលាអស់មួយជីវិត ដើម្បីឱ្យបានមកនូវអ្វីដែលយើងបានប៉ងប្រាថ្នាទុកនោះ យើងក៏គួរតែព្យាយាមអភិវឌ្ឍខ្លួនឯងឱ្យឆ្ពោះទៅក្នុងផ្លូវដែលយើងបានតាំងចិត្តទុក ក្នុងចន្លោះពេលរវាងពី១០-២០ឆ្នាំ ។ អ្នកខ្លះ អាចសម្រេចគោលបំណងបានក្នុងវ័យជរា ។ អ្នកខ្លះទៀត ថ្វីបើមិនបានសម្រេចគោលបំណងដូចដែលបានតាំងចិត្តទុកក៏ពិតមែន តែគេអាចឈានទៅដល់ក្បែរតំណែងដែលតាំងគោលបំណងទុក គួរជាទីពេញចិត្តដែរ ។ ឯអ្នកខ្លះទៀតត្រូវបរាជ័យក្នុងជីវិតឈានទៅមិនដល់គោលបំណង ឬសូម្បីតែចូលទៅក្បែរក៏មិនបានផង ។

ការសម្រេចគោលបំណងបាន ឬមិនបានអាស្រ័យលើកត្តាជាច្រើន មានដូចជា

- តើយើងមានការតាំងចិត្តពិតនិងមានការព្យាយាម ពុះពារឧបសគ្គកម្រិតណា?
- តើយើងមានចំណេះដឹងនិងសមត្ថភាពគ្រប់គ្រាន់ដែរឬទេ?
- តើយើងបានធ្វើអំពើល្អ ឬសាងបារមី សន្សំទុកបានច្រើន ឬតិចប៉ុនណា?
- តើយើងបានអភិវឌ្ឍខ្លួនឯងឆ្ពោះទៅកាន់គោលបំណងដែរឬទេ?
- តើយើងមានឱកាសដែរឬទេ?

ទោះជាយ៉ាងណាក្ដី មនុស្សដែលមានគោលបំណងក្នុងជីវិតប្រសើរជាងមនុស្សដែលបណ្ដោយឱ្យដំណើរជីវិតរបស់ខ្លួនងាករេទៅតាមអារម្មណ៍ ឬទៅតាមការប្រែប្រួលរបស់សង្គម ។ តែក៏គួរឱ្យចម្លែកខ្លាំងណាស់ដែរ ដោយមានមនុស្សជាច្រើនបណ្ដោយឱ្យដំណើរជីវិតរបស់ខ្លួនរសាត់អណ្ដែតទៅតាមភ័ព្វព្រេងដោយមិនដឹងខ្លួន ។

យើងត្រូវតែអភិវឌ្ឍខ្លួនឯង ដែលជាបឋមត្រូវជ្រើសយកគោលដៅនៃជីវិត ហើយបើបានប៉ងប្រាថ្នាយ៉ាងមុតមាំពីយុវវ័យ នោះឱកាសដែលនឹងអាចសម្រេចគោលបំណងបានក៏នឹងមានកាន់តែច្រើន ព្រោះយើងមានពេលវេលាក្នុងការសិក្សា ស្រាវជ្រាវយកចំណេះដឹងដើម្បីអភិវឌ្ឍខ្លួនឯងឆ្ពោះទៅកាន់គោលដៅរបស់យើង ។

*(ដកស្រង់ និងកែសម្រួលពីសៀវភៅ "ការអភិវឌ្ឍខ្លួនឯង" ឆ្នាំ២០០២របស់លោក ច័ន្ទឫទ្ធិ ទំព័រទី១២-១៥)*

## សំណួរ

១. ហេតុអ្វីបានជាយើងត្រូវមានគោលបំណង?

២. តើគោលបំណងបាននាំមនុស្សម្នាក់ៗ សម្រេចបានជោគជ័យទាំងអស់ ឬយ៉ាងណា? ព្រោះអ្វី ?

៣. តើអ្នកគួរធ្វើដូចម្ដេច ដើម្បីឱ្យគោលបំណងរបស់អ្នកសម្រេចបានជោគជ័យ?

៤. ចូរសង្ខេបគំនិតសំខាន់នៃអត្ថបទខាងលើឡើងវិញ ។



# រឿង ទម្លាប់របស់លោក ប៊ូ ផុង



ចូរអ្នកស្តាប់រឿង "ទម្លាប់របស់លោក ប៊ូ ផុង" ។ ពេលស្តាប់ ចូរអ្នកកត់ចំណាំសេចក្តីលម្អិតសំខាន់ៗនៃរឿង ហើយឆ្លើយនឹងសំណួរខាងក្រោម ៖

## សំណួរ

១. តើលោក ប៊ូ ផុង មានទម្លាប់ដូចម្តេច?

២. តើលោក ប៊ូ ផុង បានព្យាយាមកែទម្លាប់អាក្រក់របស់គាត់បានសម្រេចជោគជ័យដែរឬទេ? ព្រោះអ្វី?

៣. តើអ្នកយល់ថា ការរកមធ្យោបាយកែទម្លាប់អាក្រក់របស់លោក ប៊ូ ផុង តាមរយៈអ្នកបម្រើជាការត្រឹមត្រូវដែរឬទេ? ព្រោះអ្វី?

៤. តាមយោបល់អ្នក តើអ្នកគិតថាមធ្យោបាយណាល្អជាង?

៥. តើរឿងនេះមានតម្លៃអប់រំដូចម្តេច?

៦. ចូរសង្ខេបអត្ថបទរឿងឡើងវិញ ។



# ការនិយាយសង្ខេបរឿង

ដូចម្ដេចហៅថា ការសង្ខេប ?

ការសង្ខេបជាការនិយាយឬសរសេរបំព្រួញឱ្យបានខ្លី ដោយសម្ដីផ្ទាល់ខ្លួន ដោយលើកយកតែចំណុចសំខាន់ៗ គំនិតសំខាន់ៗ ឬព្រឹត្តិការណ៍សំខាន់ៗមកបង្ហាញ ។

អ្នកធ្លាប់បានសិក្សារួចមកហើយអំពីសេចក្ដីលម្អិតសំខាន់ គំនិតសំខាន់របស់អត្ថបទឬរឿង ។ ការស្គាល់សេចក្ដីលម្អិតសំខាន់ក៏អាចជួយអ្នកឱ្យមានការងាយស្រួលក្នុងការនិយាយសង្ខេបចំណុចសំខាន់នៃអត្ថបទ ឬរឿងឡើងវិញដែរ ។

ក្នុងមេរៀននេះ អ្នកនឹងសិក្សាពីការនិយាយសង្ខេបចំណុចសំខាន់នៃរឿងប្រាប់គ្នាទៅវិញទៅមកក្នុងថ្នាក់ ។

ចូរអ្នកអានអត្ថបទរឿង ត្រីចំពុះដាវ ក្នុងអំណានទី២ឡើងវិញ រួចសង្ខេបរឿងនេះ ។

## លំហាត់

សកម្មភាពក្រុម ៖

ក្រុមនីមួយៗជ្រើសរើសរឿងណាមួយ ដែលធ្លាប់បានសិក្សាយកមកនិយាយសង្ខេបឡើងវិញឱ្យត្រឹមត្រូវ ។



# សំណេររឿងនិទានដែលមានកាលអាកាសច្រើន

អ្នកធ្លាប់សិក្សារួចមកហើយអំពី កាលអាកាសនៃរឿង ។

កាលអាកាសរឿង គឺពេលវេលានិងទីកន្លែងដែលប្រព្រឹត្តនៅក្នុងរឿង ។

រឿងនិទានមួយដែលមានកាលអាកាសច្រើន មានន័យថា មានពេលវេលាច្រើនខុសៗគ្នា ហើយទីកន្លែងរឿងដែលប្រព្រឹត្តទៅក៏មានច្រើនផ្សេងៗគ្នា ទៅតាមគំនិតរៀបចំតាក់តែងរបស់អ្នកនិពន្ធផងដែរ ។ ជួនកាល អ្នកនិពន្ធប្រាប់កាលវេលាច្បាស់លាស់ មានបញ្ជាក់ថ្ងៃ ខែ ឆ្នាំ ពេលព្រឹក ល្ងាច យប់ ។ល ។ ជួនកាល អ្នកនិពន្ធប្រាប់ពេលវេលា ពុំច្បាស់លាស់ដូចជា កាលពីព្រេងនាយ កាលដើមឡើយ គ្រានោះ ថ្ងៃមួយ ល្ងាចនោះ ព្រឹកនោះ ។ល ។ ឯការបង្ហាញទីកន្លែង ជួនកាលនៅក្នុងព្រៃ ក្នុងនគរ ក្នុងភូមិ ផ្ទះ ឋានលើ ឋានក្រោម ឋាននរក ឋានមនុស្ស... ជាដើម ដែលមើលទៅឃើញច្រើនប្លែកៗ គួរឱ្យចាប់អារម្មណ៍ ។

- ចូរប្អូនអានអត្ថបទរឿងខាងក្រោម រួចរកកាលអាកាសនៃរឿង ៖

## ១. រឿង បុរសចាក់ស្មុគ

កាលពីដើម មានបុរសម្នាក់ចេះចាក់ស្មុគ ។ បុរសនោះចង់បានខ្ញុំបម្រើមកប្រើ ក៏ឡើងទៅចាក់ស្មុគលើចុងត្នោត ហើយគិតតែម្នាក់ឯង៖

" បើអញចាក់ស្មុគបានមួយលក់បាន១០សេន បើអញចាក់ស្មុគបានមួយពាន់នឹងលក់បាន១០០រៀល រួចអញលោះមនុស្សប្រើ បើប្រើមិនបានដូចចិត្ត អញនឹងធាក់ វាយវា" ។

បុរសនោះមិនគ្រាន់តែគិតក្នុងចិត្ត ក៏ងារដៃ លើកទាំងជើងធាក់ធាងត្នោតរបូតខ្លួនធ្លាក់ពីលើចុងត្នោត តែបានដៃប្រវាចាប់ស្លឹកត្នោត ក៏នៅតែកតោកៗ ដូចជាគេព្យួរ ។ គ្រានោះមានទ្រមាក់ដំរីម្នាក់ជិះដំរីមកជិត បុរសនោះស្រែក៖

អ្នកអើយ បើអ្នកជួយដាក់ខ្ញុំពីចុងត្នោតបាន ខ្ញុំសុខចិត្តបម្រើអ្នកអស់មួយជីវិត ។

ទ្រមាក់ដំរីឮហើយមានចិត្តត្រេកអរ ក៏បរដំរីចូលទៅក្រោមដើមត្នោត ឈរលើខ្នងដំរី រឹងដៃតោងជើងបុរសនោះជាប់ ។ ជើងបុរសញ័រដូចជាអង្រួនខ្នងដំរី ដំរីក៏ដើរទៅ ។ ទ្រមាក់ក៏ជាប់ព្យួរជាមួយបុរសនោះទៅ ។ ពេលនោះ មានទំពែកបួននាក់ដើរស្វែងរកខ្ញុំបម្រើទៅបម្រើប្រពន្ធគ្រប់គ្នា លុះដើរមកដល់ក្រោមដើមត្នោត ទ្រមាក់ និងបុរសចាក់ស្មុគស្រែក ៖

លោកអ្នកអើយ ជួយខ្ញុំឱ្យបានរួចពីចុងត្នោតនេះ យើងខ្ញុំសុខចិត្តទៅបម្រើលោកអ្នកអស់មួយជីវិត ។

ទំពែកបួននាក់ឮហើយត្រេកអរណាស់សមដូចចិត្តប្រាថ្នា ក៏យកសំពត់ចងកខ្វែងទល់មុខគ្នាជាបួនជ្រុងហើយស្រែក៖ ចូរអ្នកទាំងពីរទម្លាក់ខ្លួនមកចុះ ។

បុរសចាក់ស្មុគនិងទ្រមាក់ដំរីទម្លាក់ខ្លួនមកលើសំពត់ ដែលចងជាប់នឹងទំពែកទាំងបួន ។ ទំពែកទាំងបួនទង្គិចក្បាលគ្នាស្លាប់ទាំងបួននាក់ទៅ ។ ទ្រមាក់ដំរី និងបុរសចាក់ស្មុគឃើញទំពែកទាំងបួននាក់ស្លាប់ដូចនោះ ភ័យណាស់ ទៅនិយាយនឹងយាយចាស់ម្នាក់៖ បើយាយគិតដូចម្ដេចឱ្យបានសុខ យើងទាំងពីរនាក់នឹងនៅបម្រើយាយអស់មួយជីវិត ។

យាយចាស់ត្រេកអរណាស់ ។ ដោយប្ដីខ្លួនទៅកាប់ចម្ការឯព្រៃ គាត់ប្រាប់ទៅអ្នកទាំងពីរ៖

អ្នកទៅយកខ្មោចទាំងបួនមកដាក់ក្នុងផ្ទះចង់រុំឱ្យស្រេចទៅ!

រួចយាយចាស់ឱ្យយកខ្មោចមួយចេញពីផ្ទះ គាត់ស្រែកយំខ្លាំងៗ ។ អ្នកស្រុកសួរគាត់ក៏ប្រាប់ថា ប្ដីគាត់ស្លាប់ ។ អ្នកស្រុកក៏ជួយយកខ្មោចនោះទៅដុត យាយចាស់ប្រាប់បញ្ជាក់ ៖

សូមអ្នកទាំងអស់ដុតធ្វើឱ្យល្អ ត្បិតប្ដីខ្ញុំគាត់ស្រឡាញ់ខ្ញុំណាស់ កាលគាត់នៅរស់ ។

លុះគេយកខ្មោចទៅដុតរួចហើយ យាយចាស់ស្រែកថា ប្ដីគាត់ទៅផ្ទះទៀតហើយ ។ អ្នកស្រុកក៏ទៅយកមកដុតទៀត ។ លុះដុតគម្រប់បួនលើក តាចាស់ប្ដីយាយចេញពីព្រៃខ្លួនប្រឡាក់សុទ្ធតែធ្យូង ។ អ្នកស្រុកឃើញក៏តាំងស្រែក៖ អែយ៉ាគាត់ត្រឡប់មកវិញទៀតហើយ ។

អ្នកស្រុកនាំគ្នាចេញទៅចាប់តាចាស់យកទៅដុតស្លាប់ទៅ ។

*(សម្រួលមកពីប្រជុំរឿងព្រេងភាគ៥)*

# ២. រឿង ម៉ៅស្វិត

កាលពីដើម មានអ្នកមានម្នាក់ឈ្មោះ ម៉ៅ ជាមនុស្សកំណាញ់ក្រៅតម្រា ។ អ្នកផង តែងហៅគាត់ថា " ម៉ៅស្វិត " ព្រោះគាត់រិះសព្វរិះគ្រប់ មិនដែលហូបឆ្ងាញ់ មិនដែលស្លៀកពាក់ថ្មីមិនដែលចូលបុណ្យទាន រហូតដល់គ្រួសារគាត់រស់ក្នុងសភាពត្បិតត្បៀត ទ្រីស្តិស្ទួរជានិច្ច ។ អ្នកស្រុកនិយាយពីគាត់៖

" តាម៉ៅអើយ! ទៅជុះកាន់ដំបងទៅជាមួយផង ទុកវាយរុយ " ។

ថ្ងៃមួយ ម៉ៅស្វិតទៅទារបំណុលពីគេនៅត្រើយម្ខាង ។ ដល់មាត់កំពង់ គាត់សួរទៅអ្នកចម្លង៖

ឱ្យខ្ញុំដោយសារទៅផងអ្នក?

**អ្នកចម្លងឆ្លើយតប៖**

- គ្មានកន្លែងអង្គុយទេ ។
- ខ្ញុំអង្គុយនៅបាតទូកក៏បានដែរ ។

អ្នកចម្លងទូកដខ្ជិលឆ្លើយតប គាត់ក៏ឡើងទៅអង្គុយនៅបាតទូក ។ ដល់ពេលចេញដំណើរ អ្នកចម្លងរុញទូកចេញពីកំពង់ រួចលោតឡើងលើទូក ។ ដោយទូកឃ្លោង គាត់ភ្លាត់ជើងរកកលដួល ក៏ជ្រលួសដៃច្រត់ក្បាលម៉ៅស្វិត ។ ម៉ៅស្វិតឡើងមុខក្រហមហើយស្រែក៖

ម៉េចបានជាអ្នកឯងច្រត់លើក្បាលអញ?

**អ្នកចម្លងឆ្លើយតបវិញ៖**

បាទ ! ថ្នាក់ឥតថ្លៃលើទូកវាតែប៉ុណ្ណឹង!

## លំហាត់

ចូរអ្នកសរសេររៀបរាប់រឿងនិទានណាមួយដែលអ្នកធ្លាប់បានសិក្សាកន្លងមក ដែលរឿងនោះមានកាលអាកាសច្រើន ។ ពេលចាប់ផ្តើមសរសេរ ចូរអ្នកអនុវត្តតាមការណែនាំមួយចំនួន ដូចខាងក្រោម៖

១. ជ្រើសរើសរឿងណាមួយ ដែលមានលក្ខណៈល្អជាងគេ ហើយទាក់ទងនឹងបំណងប្រាថ្នាដើម្បីជោគជ័យ

២. សរសេរឃ្លា ល្បះដោយប្រើប្រាស់ពាក្យសម្តីរបស់អ្នកផ្ទាល់

៣. សរសេរតាមលំនាំរឿងនិទាន ដោយមានការផ្តើមរឿង ចំណោទបញ្ហារឿង កាលអាកាសរឿង និងសេចក្តីបញ្ចប់ឱ្យបានត្រឹមត្រូវ

៤. ប្រើប្រាស់ពាក្យប្រាប់លំដាប់កាលឱ្យបានត្រឹមត្រូវ តាមលំដាប់នៃព្រឹត្តិការណ៍រឿង

៥. ប្រើប្រាស់ពាក្យពេចន៍សាមញ្ញ ងាយអាន ងាយយល់ ហើយត្រឹមត្រូវ មិនមានកំហុសអក្ខរាវិរុទ្ធ

៦. មានលំដាប់លំដោយគំនិតត្រឹមត្រូវ តាំងពីដើមដល់ចប់ ។

# អក្សរកាត់ក្នុងសៀវភៅនេះ

| | |
|---|---|
| កិ | កិរិយា |
| កំ.សំ | កំណត់សំគាល់ |
| គុ | គុណនាម |
| គុណ | គុណកិរិយា |
| ចំ | ចម្លើយ |
| ទំ | ទំព័រ |
| ន | នាម |
| និ | និបាតសព្ទ |
| បា | បាលី |
| សំ | សំស្ក្រឹត |
| ព.ប | ពាក្យបារាំង |
| បាសំ | បាលី សំស្ក្រឹត |

# បទានុក្រម

## ក

| | | | | |
|---|---|---|---|---|
| កញ្ញា | [កាញ់-ញ៉ា] | ន | (បា) | ស្រីក្រមុំ ស្រីជំទង់។ |
| កតញ្ញូតាធម៌ | [កៈតាញ់ញូតាធ័រ] | ន | (បា) | សេចក្តីដឹងឧបការគុណដែលអ្នកដទៃបានធ្វើដល់ខ្លួន។ |
| កថា | [កៈថា] | ន | (បាសំ) | ពាក្យសម្តី ពំនោល ការសម្តែង។ |
| កថាខណ្ឌ | [កៈថា ខាន់] | ន | (បាសំ) | សង្កាត់ ផ្នែក ប៉ែកនៃកថា។ |
| កប្ប | [កាប់] | ន | (បា) | កាលដែលតាំងនៅយូរអង្វែង។ |

| | | | | |
|---|---|---|---|---|
| កម្មសិទ្ធិ | [កាំ ម៉ៈសិត] | ន | (បា) | វត្ថុដែលសម្រេចតាមអំណាចច្បាប់ថាជារបស់ខ្លួនដាច់ស្រេចហើយ។ |
| កល | [កល់] | ន | (សំ) | ឧបាយយ៉ាងល្អិត ល្បិច។ |
| កល្យាណមិត្ត | [កល់.យ៉ាន-មិត] | ន | (បា) | មិត្តល្អ មិត្តត្រឹមត្រូវ។ |
| កសិកម្ម | [កៈសិ កាំ] | ន | (បា) | ការភ្ជួររាស់ ការងារធ្វើស្រែចម្ការ។ |
| កសិករ | [កៈសិ.ក] | ន | (បា) | អ្នកធ្វើកសិកម្ម អ្នកធ្វើស្រែ។ |
| កសិដ្ឋាន | [កៈសិ.ឋាន] | ន | (បា.) | កន្លែងធ្វើកសិកម្ម កន្លែងធ្វើស្រែ។ |
| កាតព្វកិច្ច | [កា.តាប់.ពៈកិច.] | ន | (បា) | កិច្ចដែលគួរធ្វើ ការងារដែលត្រូវតែធ្វើ។ |
| កាយវិញ្ញាណ | [កាយ.វិញ.ញាន] | ន | (បា) | សេចក្ដីដឹងច្បាស់នូវអារម្មណ៍។ |
| កាលបរិច្ឆេទ | [ប.រិុចឆែត] | ន | (បាសំ) | ពេលកំណត់។ |
| កិត្តិយស | [កិត.តិ.យស់] | ន | (បា) | យសស័ក្តិដែលល្បីទូទៅ កេរ្តិ៍ឈ្មោះដ៏រុងរឿង។ |
| កិត្តិសព្ទ | [កិតតិ.សាប់] | ន | (បាសំ) | ស្ញូរសរសើរ។ |
| កិត្យានុភាព | [កិត.ត្យា.នុ.ភាប] | ន | (បា) | អានុភាពនៃកេរ្តិ៍ឈ្មោះ។ |
| កូលេស | | ន | (ពប) | អនុវិទ្យាល័យ។ |
| កេណ្ឌ | [កែន] | កិ | | ប្រមូលហៅរកដោយអាជ្ញា។ |
| កេតនភណ្ឌ | [កេ.តៈន័ះភាន់] | ន | (បា) | របស់ដែលទុកដូចជាទង់សម្រាប់ជាតិ ឬសម្រាប់ប្រទេស វត្ថុដ៏ឧត្តុង្គឧត្តម។ |
| កេរ | | ន | | សំបាច់របស់ដូនតា ឬមាតាបិតាជាដើម។ |
| កេសរផ្កា | [កែ.ស-] | ន | (បាសំ) | លំអងផ្កា។ |
| កំណែន | | ន | | ការកែន។ |

| | | | | |
|---|---|---|---|---|
| កំសាន្ត | | កិ | | សម្រាកចិត្ត លំហែចិត្ត។ |

# គ

| | | | | |
|---|---|---|---|---|
| គង់វង្ស | [-វង់] | កិ ឬ គុ | | គង់ពូជវង្សនៅមិនសូន្យ ប្រពៃណីនៅដូចដើម។ |
| គតិបណ្ឌិត | [គៈតិបន់ឌិត] | ន | (បា) | គតិរបស់បណ្ឌិត ប្រាជ្ញាញាណរបស់អ្នកប្រាជ្ញ។ |
| គណបក្ស | [គៈណៈ ប៉ាក់] | ន | (បាសំ) | ក្រុម ពួក បន។ |
| គិរីបព្វតា | [-ប័ប.ពៈតា] | ន | (បាសំ) | ភ្នំ។ |
| គុណធម៌ | [គុណៈ ធ័រ] | ន | (បា) | ធម៌ដែលមានដំណើរចម្រើនសេចក្ដីសុខទុក្ខ សេចក្ដីល្អ ល្អបរិសុទ្ធ។ |
| គុណភាព | [គុណៈភាប] | ន | (បា) | ភាពល្អ ភាពប្រសើរ របស់ដែលមានអានុភាពស័ក្តិសិទ្ធិ។ |
| គុណវិបត្តិ | [គុនវិបាត់] | ន | (បា) | ខ្វះសេចក្ដីល្អ គ្មានផលប្រយោជន៍។ |
| គុណូបការៈ | [គុណូប៉ះការៈ] | ន | (បាសំ) | សេចក្ដីទំនុកបម្រុង អនុគ្រោះដោយគុណ។ |
| គោបាល | | ន | (បាសំ) | អ្នកចិញ្ចឹមគោ។ |
| គ្រឹះស្ថាន | | ន | (បាសំ) | ទីផ្ទះ ទីកន្លែងផ្ទះ លំនៅទាំងមូល។ |
| គ្រោះ | | ន | (បាសំ) | ដំណើរល្អ ឬអាក្រក់។ |

# ឃ

| | | | | |
|---|---|---|---|---|
| ឃានវិញ្ញាណ | [ឃានវិញញាន] | ន | (បា) | សេចក្ដីដឹងច្បាស់អារម្មណ៍តាមច្រមុះ។ |
| ឃោសនា | [ឃោស្នា] | ន | (បា) | ការប្រកាសផ្សាយដំណឹងឱ្យឮសាយសុស។ |

## ច

| | | | | |
|---|---|---|---|---|
| ចក្រវាល ឬ ចក្កវាឡ | [ច័កក្រវ៉ាល] | ន | (បាសំ) | លោកធាតុ គឺភ្នំជាកំពែងព័ទ្ធជុំវិញនៃពិភពលោកទាំងមូល។ |
| ចក្ខុវិញ្ញាណ | [ច័ក.ខុវិញ.ញាន] | ន | (បា) | ការដឹងច្បាស់នូវអារម្មណ៍តាមរយៈភ្នែក។ |
| ចង្ហូរ ឬចង្ហួរ | | ន | | ជ្រលងទឹកតូច។ |
| ចចេស | | កិ | | ទទូចធ្វើបំពានលើបម្រាម។ |
| ចីរកាល | [ចេរកាល] | ន | (បាសំ) | កាលយឺនយូរ កាលដ៏យូរ។ |
| ចៃដន្យ ឬចៃដន់ | [ចៃដន់] | នឬ កិ | (សំ) | ហេតុការណ៍កើតឡើងដោយមិនបានគិតទុកជាមុន។ |
| ចៅអធិការ | [ចៅអៈធិកា] | ន | | ភិក្ខុជាមេវត្ត។ |

## ឆ

| | | | | |
|---|---|---|---|---|
| ឆន្ទៈ | [ឆ័ន. ទៈ] | ន | (បា) | សេចក្តីប្រាថ្នា បំណង ការយល់ព្រម។ |
| ឆ្មើង | | គុ | | ដែលប្រកាន់ខ្លួន រពើតរពើង។ |

## ជ

| | | | | |
|---|---|---|---|---|
| ជន្ទៀស | [ជន់លៀស] | កិ | | ធ្វើឱ្យជៀសចេញ។ |
| ជាងសូនឆ្នាំង | | ន | | ជាងធ្វើឆ្នាំងដី ឬក្អមដី។ |
| ជិវ្ហាវិញ្ញាណ | | ន | (បា) | សេចក្តីដឹងរសជាតិដោយសារអណ្តាត។ |
| ជិតស្និទ្ធ | [ជិតស្និត] | គុ | (បា) | ជិតជិតណាស់ ស្និទ្ធស្នាល។ |
| ជីពជន្ម | [ជីបជន់] | ន | (បាសំ) | ជីវិត។ |

| | | | | |
|---|---|---|---|---|
| ជ្លួ | | គុ | | ដែលអាក្រក់ ដែលឆ្គងមិនសូវស្គាល់ក្តីគួរសម។ |
| ជោគជ័យ | [ជោកជៃ] | ន | (បា) | ការទទួលជ័យជំនះ លទ្ធផលល្អលើកិច្ចការអ្វីមួយ។ |

## ញ

| | | | | |
|---|---|---|---|---|
| ញាតិសន្តាន | [ញាត.សន់.ដាន] | ន | (បាសំ) | ត្រកូលជាប់ជាសាច់ញាតិ។ |

## ដ

| | | | | |
|---|---|---|---|---|
| ដង្កៅ | | ន | (ចិ) | មេជំនួញ អ្នកមានទ្រព្យសម្បត្តិច្រើនតាមរយៈការធ្វើជំនួញ។ |
| ដើមចម | | ន | | ដើមហេតុដែលជាធំក្នុងដំណើររឿងអ្វីមួយ។ |
| ដំឡាន់ | | គុ | | ដែលនិយាយមិនច្បាស់។ |

## ឋ

| | | | | |
|---|---|---|---|---|
| ឋិតថេរ | | គុ | (បាសំ) | ដែលស្ថិតនៅយូរអង្វែងខ្ជាប់ខ្ជួនមាំមួន។ |

## ត

| | | | | |
|---|---|---|---|---|
| តង្វាយ | [តង់វ៉ាយ] | ន | | វត្ថុដែលគេថ្វាយ។ |
| តណ្ហា | [តន់.ហា] | ន | (បា) | ចំណង់ សេចក្តីប្រាថ្នា តម្រេក។ |
| តេជ | [ដេច] | ន | (បាសំ) | កម្លាំង អំណាច អានុភាព។ |
| ត្រាជូ | | ន | | ឈ្មោះជញ្ជីងមួយប្រភេទមានសង្រែកពីរមានធរណីកណ្តាល។ |

4

## ថ

| | | | | |
|---|---|---|---|---|
| ថនិកសត្វ | [ថៈនិកៈស័ត] | ន | (បាសំ) | ពួកសត្វចិញ្ចឹមកូនដោយទឹកដោះ។ |
| ថវិកា | [ថៈវិ.កា] | ន | (បា) | ប្រាក់ លុយ។ |
| ថ្វាយ | | កិ | | ប្រគល់ បូជា ជូន អោយ។ |

## ទ

| | | | | |
|---|---|---|---|---|
| ទស្សនៈ | [ទ័ស.សៈនៈ] | ន | (បា) | ការឃើញ ដំណើរយល់ឃើញ។ |
| ទស្សនវិជ្ជា | [ទ័ស.សៈនៈវិចជា] | ន | | វិជ្ជាដែលសិក្សាពីទស្សនៈនានារបស់អ្នកប្រាជ្ញធំៗ។ |
| ទស្សនិកជន | [ទ័ស.សៈនិកៈជន់] | ន | | អ្នកឃើញ អ្នកមើល អ្នកទស្សនា។ |
| ទស្សនីយភាព | [ទ័ស-សៈនីយៈភាប] | ន | (បា) | អ្វីៗដែលគួរឱ្យចង់មើល។ |
| ទាសករ | [ទាសៈក] | ន | (បា) | ខ្ញុំកំដរ។ |
| ទិវាពលកម្ម | [ទិ.វា.ពល់កាំ] | ន | (បា) | ថ្ងៃធ្វើការងារ។ |
| ទិវារាត្រី | | ន | (បាសំ) | ទាំងយប់ថ្ងៃ។ |
| ទិសឧត្តរ | [ទឹស.អ៊ុត.ដ] | ន | (បា) | ទិសខាងជើង។ |
| ទុក្ខធុរៈ | [ទុក-ធុរាក់] | ន | (បា) | ការជំពាក់ដោយសេចក្តីព្រួយ សេចក្តីលំបាក។ |
| ទុច្ចរិត | [ទុច.ចៈរ៉ិត] | ន | (បាសំ) | ការប្រព្រឹត្តអាក្រក់ទាំងកាយ វាចាចិត្ត។ |
| ទុទ្ទិដ្ឋិនិយម | [ទុ.ទិត.ឋិ.និយំ] | ន | (បា) | ការមើលឃើញអ្វីៗទាំងអស់សុទ្ធតែអាក្រក់ ការយល់ឃើញមិនត្រឹមត្រូវ។ |
| ទុរភិក្ស | [ទុរៈភឹក] | ន | (បាសំ) | ការអត់ឃ្លានគ្មានអាហារបរិភោគ។ |

| | | | | |
|---|---|---|---|---|
| ទេសចរ | [ទេសៈច] | ន | (បា) | ជនអ្នកធ្វើដំណើរលំហែកំសាន្ត។ |
| ទេសចរណ៍ | [ទេសៈច] | ន | (បាសំ) | ដំណើរលំហែកំសាន្ត។ |
| ទេសភាព | [ទេសៈភាប] | ន | | ភាពរបស់ប្រទេស បែបបទរបស់ស្រុកភូមិ ដែលប្រកបដោយធម្មជាតិ គឺទឹកដីព្រៃ ព្រឹក្សាជាដើម។ |
| ទោសៈ | | ន | (បា) | ការប្រទូស្ត កំហឹង។ |
| ទ្រមឹង | | កិ | | ស្ងៀមឈឹងមិនស្តី មិននិយាយ ធ្មឹង។ |

## ធ

| | | | | |
|---|---|---|---|---|
| ធញ្ញជាតិ | [ធ័ញ.ញៈជាត] | ន | (បា) | ជាតិស្រូវ ស្រូវគ្រប់ប្រភេទនិងស្រងែ ពោតជាដើម។ |
| ធម្មជាតិ | [ធ័ម.មៈជាត] | ន | (បាសំ) | សភាវៈ សភាពកើតឯង។ |
| ធម្មយាត្រា | [ធ័ម.មៈយាតត្រា] | ន | (បាសំ) | ការធ្វើដំណើរជាក្បួនដោយសន្តិធម៌ផង។ |

## ន

| | | | | |
|---|---|---|---|---|
| និមន្ត | [និមន់] | កិ | (បា) | ដើរ ត្រាច់ចរ។ |
| និមិត្តរូប | [និ.មិត.តៈរូប] | ន | (បា) | រូបជាគ្រឿងសម្គាល់ឬវត្ថុជាតំណាងអ្វីមួយ។ |
| នីរសារ | [និរៈសា] | ន | (បា) | អ្នកនាំសារ។ |
| និហរណ៍ | [នីហៈរ៉ន់] | ន | (បា) | ការនាំយកវត្ថុទៅលក់នៅប្រទេសក្រៅ។ |

## ប

| | | | | |
|---|---|---|---|---|
| បក្សាបក្សី | [ប័ក.សា.ប័ក.សី] | ន | (បាសំ) | សត្វស្លាបឈ្មោលញីទាំងឡាយ។ |
| បង្ការ | | កិ | | រារាំង ប្រុងប្រយ័ត្ន ការពារមុន។ |

| | | | | |
|---|---|---|---|---|
| បច្ចាមិត្ត | [ប៉ុច ចាមិត] | ន | (បា) | អ្នកប្រឆាំង សត្រូវ។ |
| បច្ចេកទេស | [ប៉ុច.ចេកៈទេស] | ន | (បាសំ) | ចំណេះដឹងផ្នែកមុខវិជ្ជាអ្វីមួយដាច់មុខ។ |
| បញ្ញា | [ប៉ុញ.ញ៉ា] | ន | (បា) | សេចក្តីដឹងទូទៅ សេចក្តីដឹងកើតអំពីការរៀន។ |
| បញ្ញាពលកម្ម | [ប័ញ.ញ៉ាពល់កាំ] | ន | (បា) | ការងារដោយបញ្ញា។ |
| បញ្ហា | [ប័ញ ឬប៉ុញហា] | ន | (បា) | ពាក្យ ឬសេចក្តីដែលមានអាថិកំបាំង ប្រស្នា ចំណោទ។ |
| បដិសណ្ឋារ | [ប៉ៈដិសន់ឋារៈ] | ន | (បា) | ការរាក់ទាក់ ទំនាក់ទំនង។ |
| បណ្ណាការ | [ប័នណាកា ឬប៉ុន-] | ន | (បាសំ) | ជំនូន ភ័ស្តុភារ តង្វាយ។ |
| បណ្ណាល័យ | [ប៉ុនណាល៊ៃ] | ន | (បាសំ) | កន្លែងទុកសៀវភៅសម្រាប់អាន។ |
| បព្វតា | [ប័ប.ពៈតា] | ន | (បាសំ) | គិរី ភ្នំ។ |
| បរទេស | [បរ៉ៈទេស] | ន | (បា) | ប្រទេសដទៃ ឬអ្នកប្រទេសក្រៅ។ |
| បរិសុទ្ធ | [បរ៉ិសុត] | គុ | (បា) | ដែលស្អាត ដែលឥតសៅហ្មង។ |
| បរិវារ | [បរ៉ិវ៉ា] | ន | (បាសំ) | អ្នកចោមរោមកំដរ អ្នកហែហម។ |
| បរាជ័យ | [ប៉ៈរ៉ាជៃ] | ន | (បាសំ) | ដំណើរចាញ់គេ ការចាញ់។ |
| បរិស្ថាន | [ប៉ៈរ៉ិឋាន] | ន | (បាសំ) | ធម្មជាតិនៅជុំវិញខ្លួនយើង។ |
| បវេសនកាល | [ប៉ៈវេសៈន៉ៈកាល] | ន | (បា) | ពេលដែលសិស្សត្រូវចូលរៀនវិញ។ |
| បាណកសត្វ | [ប៉ាន៉ៈកៈស័ត] | ន | (បាសំ) | សត្វល្អិតផ្សេងៗដូចជដង្កូវ កណ្តូប កំពោងជាដើម។ |
| បាតុកម្ម | [ប៉ាតុកាំ] | ន | (បា) | ការលើកគ្នាដើរដង្ហែជាក្បួនដើម្បីសម្តែងសេចក្តីមិនពេញចិត្តចំពោះអំពើអ្វីមួយ។ |

| | | | | |
|---|---|---|---|---|
| បាតុភូត | [ប៉ា តុភូត] | ន | (បា) | ហេតុការណ៍ដែលកើតឡើងពិតប្រាកដជាក់ស្ដែង។ |
| បារមី | [បារៈមី] | ន | (បាសំ) | គុណជាតិដ៏ល្អដែលបុគ្គលគួរបំពេញ។ |
| បារម្ភ | [បារ៉ម] | ន | (បាសំ) | ដំណើរនឹកថប់ ឬនឹកព្រួយជាមុន។ |
| បុប្ផា | [បុបផា] | ន | (បា) | ផ្កាទាំងឡាយ ផ្កាច្រើនប្រភេទ។ |
| បុព្វជន | [បុបពៈជន] | ន | (បាសំ) | មនុស្សជំនាន់មុន ជនជំនាន់មុន។ |
| បុរីទេសចរណ៍ | [បុរីទេសៈច] | ន | (បា) | មណ្ឌលលំហែកំសាន្តចិត្ត។ |
| បូជនីយកិច្ច | [បូជៈនីយៈកិច] | ន | (បាសំ) | កិច្ចដែលគួរបូជា។ |
| បុរាណស្ថាន | [បូរ៉ានឋាន] | ន | (បាសំ) | ទីកន្លែងចាស់ៗ ដែលមានតាំងពីយូរមកហើយ។ |
| ប៉ើងរ៉ើង | | គុ | | ដែលស្ដើងរ៉ើងៗ។ |
| បេតិកភណ្ឌ | [ប៉េតិកៈភាន់] | ន | (បាសំ) | ទ្រព្យសម្បត្តិ ឬកេរមតិកមានជាប់តមកពីខាងឪពុក។ |
| ប្រជារាស្ត្រ | | ន | (បាសំ) | មនុស្សប្រុសស្រីដែលរស់នៅក្នុងប្រទេស។ |
| ប្រណម្យ | [ប្រណាំ] | កិ | (សំ) | សំពះ លើកដៃផ្គុំម្រាមទាំងដប់។ |
| ប្រណីត | [ប្រណិត] | គុ | (បាសំ) | ដែលល្អឥតខ្ចោះ ដែលស្រស់ត្រចង់។ |
| ប្រមាថ | [ប្រម៉ាត] | កិ | (សំ) | មើលងាយគេ បៀតបៀនគេ។ |
| ប្រវ័ញ្ច | [ប្រវ៉ាញ់] | កិ | (បាសំ) | បោកប្រាស់ ឆបោក បញ្ឆោត។ |
| ប្រសាសន៍ | [ប្រសាស] | ន | (សំ) | ពាក្យសម្ដី ពាក្យផ្ដែផ្ដាំ ពាក្យបង្គាប់។ |
| ប្រាង្គប្រាសាទ | [ប្រាងប្រាសាត] | ន | (បាសំ) | ប្រាសាទដែលមានកំពូលខ្ពស់សងជាជាន់ថ្នាក់។ |
| ប្រាជ្ជ(ព្រោក) | [ប្រាច-] | កិ | (បាសំ) | និយាយច្រើនពីនេះពីនោះមិនចេះចប់។ |

| | | | | |
|---|---|---|---|---|
| ប្រាជ្ញា | [ប្រាចញ៉ា] | ន | (បាសំ) | ការយល់ដាក់ច្បាស់។ |
| ប្រាជ្ញា | | ន | (សំ) | ការប៉ង ការតាំងបំណង។ |
| ប្រារព្ធ | [ប្រារប់] | កិ | (បាសំ) | តាំងផ្ដើម ផ្ដួចផ្ដើម ផ្ដងជាមុន។ |
| ប្រាសាទសិលា | [-សិឡា] | ន | (បាសំ) | ប្រាសាទថ្ម។ |
| ប្រឹក្សា | [ប្រឹកសា] | កិ | (សំ) | ពិគ្រោះគ្នា ។ |

## ផ

| | | | | |
|---|---|---|---|---|
| ផលិតកម្ម | [ផៈលិតៈកាំ] | ន | (បា) | ការបង្កើតឱ្យបានជាផលឡើង។ |

## ព

| | | | | |
|---|---|---|---|---|
| ព័ត៌មាន | [ព័រដ៏មាន] | ន | (បាសំ) | ដំណឹងផ្សេងៗ។ |
| ពលរេហ៍ | [ពល់លៈរេ] | ន | (បា) | ពួកទាហាន។ |
| ពសុធា | [ពៈសុធា] | ន | (បាសំ) | ផែនដី ពិភពលោក។ |
| ពាក្យពេចន៍ | | ន | (បាសំ) | ពាក្យសម្ដីផ្សេងៗ ពាក្យសម្ដីដែលមានថ្វីមាត់។ |
| ពាណិជ្ជកម្ម | [ពានិចជៈក័ម] | ន | (បាសំ) | ការរកស៊ីលក់ដូរ ជំនួញរបស់ប្រទេស។ |
| ពាណិជ្ជករ | [ពានិចជៈក] | ន | (បាសំ) | អ្នកប្រកបរបរជំនួញ។ |
| ពាធា | | កិ | (បាសំ) | បៀតបៀន សម្លាប់។ |
| ពិចារណា | [ពិចារៈណា] | ន | (បាសំ) | ការត្រិះរិះ ការរំពឹងគិត។ |
| ពិដោរ | | គុ | (បា) | ដែលមានក្លិនក្រអូបល្អ ដែលក្រអូបសាយ។ |
| ពិរោធ | [ពិរោត] | កិ | (បាសំ) | ខឹង ក្រេវក្រោធ។ |

| | | | | |
|---|---|---|---|---|
| ពិសិដ្ឋ | [ពិសិត] | គុ | (បាសំ) | ដែលល្អក្រៃលែង ដែលប្រសើរខ្ពង់ខ្ពស់។ |
| ពិស្តារ | [ពីស ស្តា] | ន | (បាសំ) | សេចក្ដីល្អិតល្អន់ សេចក្ដីទូលាយ។ |
| ពុទ្ធដីកា | [ពុតដីកា] | ន | (បាសំ) | ព្រះបន្ទូលព្រះពុទ្ធ។ |
| ពំនៀរ | | ន | | ពៀរ ដំណើរចងពៀរ។ |
| ព្យាបាទ | [ព្យាបាត] | ន | (បាសំ) | ដំណើរចងចិត្តនឹងធ្វើអ្នកដទៃឱ្យវិនាស។ |
| ព្យាយាម | | ន | (បាសំ) | ការខិតខំប្រឹងប្រែង ដំណើរខ្មីឃ្មាត។ |
| ព្យុហយាត្រា | | ន | (បាសំ) | ដំណើរលើកជាក្បួនទ័ពហែចេញទៅ ដើម្បីគោលបំណងអ្វីមួយ។ |
| ព្រឹត្តិការណ៍ | [ព្រឹត តិកា] | ន | (បាសំ) | ហេតុការណ៍ដែលកើតមានឡើងជាធម្មតា។ |
| ព្រះខ័ន | [ព្រះខាន់] | ន | (បាសំ) | ដាវ ឬកាំបិតរាងវែងមានស្រោម។ |
| ព្រះជន្ម | [ព្រះជន់] | ន | (សំ) | អាយុជីវិតជនដែលមានគុណធម៌ខ្ពង់ខ្ពស់។ |
| ព្រះទ័យ | [ព្រះទៃ] | ន | | ទឹកចិត្តរបស់ស្ដេច។ |

## ភ

| | | | | |
|---|---|---|---|---|
| ភមរជាតិ | [ភៈមៈរៈជាត] | ន | (បាសំ) | សត្វល្អិតពួកកន្លង់ឃ្មុំ។ |
| ភស្តុតាង | [ភ័សតាង] | ន | | គ្រឿងសម្គាល់របស់ជាតឹកតាង។ |
| ភាជន៍ | [ភាច] | ន | (បាសំ) | ថាសសម្រាប់ដាក់ភោជនាហារ។ |
| ភាតរភាព | [ភាតៈរ៉ៈភាប] | ន. | (បាសំ) | សេចក្ដីរាប់អានដូចជាបងប្អូន។ |
| ភារកិច្ច | [ភារៈកិច] | ន | (បាសំ) | កិច្ចធុរៈរវល់។ |
| ភោគទ្រព្យ | [ភោកទ្រ័ប] | ន | (បាសំ) | សម្បត្តិធម្មជាតិ។ |

# ម

| | | | | |
|---|---|---|---|---|
| មច្ឆជាតិ | [ម័ច.ឆះជាត] | ន | (បា) | ពួកត្រីទាំងឡាយ ទាំងពួង។ |
| មជ្ឈដ្ឋាន | [ម័ច.ឈ័ត.ឋាន] | ន | (បាសំ) | ទីកន្លែងកណ្តាល មណ្ឌលកណ្តាល។ |
| មណ្ឌុកសត្វ | [ម័ន-ឌុក-ស័ត] | ន | | ប្រភេទសត្វលោតដូចជាកង្កែប គីង្គក់។ |
| មតិ | [មះតិ] | ន | (បាសំ) | គំនិត យោបល់ ពាក្យសម្តី។ |
| មធ្យោបាយ | [ម័តធ្យោបាយ] | ន | (សំ) | ដំណើរទំនងដ៏សមគួរសម្រាប់ធ្វើកិច្ចការអ្វីៗ ឱ្យសម្រេចតាមគោលបំណង។ |
| មនសិការ | [មះនះសិការះ ឬកា] | ន | (បា) | ដំណើរយកចិត្តទុកដាក់ខ្ពស់។ |
| មន្តអាគម | [មន់អាគំ] | ន | (បាសំ) | វិជ្ជាខាងសូត្រផ្លុំស្ដោះដោយប្រើពាក្យ ស័ក្តិសិទ្ធិសម្រាប់សូត្រប្រសិទ្ធីឱ្យកើត សុខសួស្តី។ |
| មន្ទិល | | ន | | ដំណើរសៅហ្មង សេចក្តីពិភាល់។ |
| មនោសញ្ចេតនា | [មះនោ.ស័ញ ចេតះនា] | ន | (បាសំ) | សេចក្តីរិះគិតក្នុងចិត្ត ការទទួលនូវអារម្មណ៍ ដែលមកប៉ះនឹងចិត្ត។ |
| មរតក ឬមត៌ក | [មះរះដក់] | ន | [បាសំ] | ទ្រព្យដំណែលរបស់បុគ្គលស្លាប់។ |
| មរណភាព | [មះរះណះភាប] | ន | (បាសំ) | សេចក្តីស្លាប់។ |
| មហាជន | [មះហាជន់] | ន | (បាសំ) | ជនដ៏ប្រសើរ។ |
| មហាបុរសជាតិ | [មះហាប៊ុរ័ស់ជាត] | ន | (បា) | អ្នកមានគុណបំណាច់ធំធេងចំពោះជាតិ។ |
| មហាវិទ្យាល័យ | [មះហាវិតទ្យាល៍យ] | ន | (បាសំ) | សាលារៀនថ្នាក់ឧត្តមសិក្សា។ |
| មាគ៌ា | [មារគា] | ន | (បាសំ) | ផ្លូវ វិថី ថ្នល់។ |
| មាតាបិតា | [មាដាបិដា] | ន | (បាសំ) | ឪពុក ម្តាយ។ |

| | | | | |
|---|---|---|---|---|
| មារយាទ | [មារៈយាតឬមាយាត] | ន | (បាសំ) | សណ្ដាប់ធ្នាប់ របៀបបែបបទ។ |
| មួនទួន | | ន | | រឹងមាំ។ |
| មេត្តាធម៌ | [មេត.តា.ធ័រ] | ន | (បាសំ) | ធម៌ទ្រទ្រង់សេចក្ដីរាប់អានគ្នា។ |
| មោទនភាព | [មោទៈ ទៈ ភាប] | ន | (បា) | សេចក្ដីអំណួត ។ |
| ម្រឹគីម្រឹគា | [ម្រឹកគីម្រឹកគា] | ន | (សំ) | ពួកសត្វចតុបាទញីឈ្មោលទូទៅរស់នៅក្នុងព្រៃ។ |

## យ

| | | | | |
|---|---|---|---|---|
| យន្តការី | [យន់តៈការ៉ី] | ន | (បាសំ) | អ្នកកាន់ម៉ាស៊ីន អ្នកជួសជុសម៉ាស៊ីន។ |
| យាត្រា | [យាត.ត្រា] | កិ | (បាសំ) | ដើរចេញទៅ ចេញចរ។ |
| យានអវកាស | [យានអៈវៈកាស] | ន | | ប្រភេទយន្តហោះពិសេសម្យ៉ាង ដែលគេជិះទៅកាន់ភពផ្សេងៗ។ |
| យុត្តិធម៌ | [យុត-តិ.ធ័រ] | ន | (បាសំ) | សេចក្ដីត្រឹមត្រូវ។ |
| យុទ្ធវិធី | [យុត.ធៈវិធី] | ន | (បាសំ) | កលឧបាយក្នុងពេលប្រកួតប្រជែង ល្បិចដើម្បីយកជ័យជំនះ។ |
| យុវតី | [យុវៈតី] | ន | (បា) | ស្ត្រីក្រមុំ។ |
| យុវជន | [យុវៈជន់] | ន | (បា) | ជនកម្លោះ។ |
| យុវវ័យ | [យុវៈវ៉ៃ] | ន | (បាសំ) | វ័យកម្លោះក្រមុំ។ |

## រ

| | | | | |
|---|---|---|---|---|
| រចនា | [រៈចៈន៉ា] | កិ | (បាសំ) | ច្នៃលំអ។ |
| រដ្ឋ | [រ័ត] | ន | (បា) | ដែនដី ប្រទេស។ |

| | | | | |
|---|---|---|---|---|
| រត្ន ឬរតនៈ | [រៈតៈនៈ] | ន | (បាសំ) | កែវ ត្បូង ពេជ្រគ្រប់ប្រភេទ។ |
| របៀន | | ន | | ចំណេះដែលចេះមកពីរៀន។ សិល្បសាស្ត្រ វិជ្ជាការ អាគមគាថា។ |
| រមណីយដ្ឋាន | [រៈមៈនីយៈថាន] | ន | (សំបា) | ទីកន្លែងគួរឱ្យរីករាយ គួរឱ្យសប្បាយ។ |
| រហោឋាន | | ន | (បាសំ) | ទីស្ងាត់ កន្លែងដែលគ្មានមនុស្សនៅ។ |
| រឧស្មាន | [រៈអោស.ឋាន] | ន | (បាសំ) | សេចក្តីសៅហ្មង ក្តៅក្រហាយ។ |
| រិទ្ធិឬឫទ្ធិ | [រិត] | ន | (សំ) | សេចក្តីសម្រេច អំណាច។ |
| រុក្ខជាតិ | [រុក.ខៈជាត] | ន | (បា) | ដើមឈើ។ |
| រុងរោចន៍ | [រុងរោច] | គុ | (បាសំ) | ដែលរុងរឿង។ |
| រូបារម្មណ៍ | [រូប៉ារំម៉] | ន | (បា) | អារម្មណ៍ដែលលេចចេញជារូប។ |

## ល

| | | | | |
|---|---|---|---|---|
| លក្ខណសម្បត្តិ | [ល័កខៈណៈសំប័ត] | ន | (បា) | សេចក្តីមានគ្រប់លក្ខណៈ ការគ្រប់គ្រាន់ដោយលក្ខណៈ។ |
| លង | | កិ | | ល្បង។ |
| លទ្ធផល | [ល័តធៈផល់] | ន | | ផលនៃការងារដែលបានសម្រេច ផលដែលបានសម្រេចហើយ។ |
| លាមក | [លា.មក់] | ន | (បា) | អាចម៍។ |

## វ

| | | | | |
|---|---|---|---|---|
| វឌ្ឍនធម៌ | [វ័ត ឍៈនៈធ័រ] | ន | (បាសំ) | ធម៌ដែលនាំឱ្យកើតសេចក្តីចម្រើន។ |
| វឌ្ឍនភាព | [វ័ត.ឍៈ នៈភាប] | ន | (បាសំ) | សេចក្តីរីកចម្រើន ការលូតលាស់។ |

| | | | | |
|---|---|---|---|---|
| វណ្ណៈ | [វ៉ាន់.ណៈ] | ន | (បាសំ) | ពូជពង្ស ពណ៌សម្បុរ។ |
| វណ្ណកម្ម | [វ៉ាន់.ណៈកាំ] | ន | (បាសំ) | ស្នាដៃ ស្នាព្រះហស្ត។ |
| វន្ទា | [វ័ន.ទា] | កិ | | ថ្វាយបង្គំ សំពះ គំនាប់។ |
| វប្បធម៌ | [វ័ប.ប៉ះ.ធ័រ] | ន | (បាសំ) | ការផ្សាំបណ្ដុះចំណេះវិជ្ជានិងប្រាជ្ញាស្មារតីឱ្យបានចម្រើនឡើង ដោយវិទ្យាសាស្ត្រឬសិល្បៈផ្សេងៗ។ |
| វាងវៃ | | គុ | | ដែលមានប្រាជ្ញាវាងកេលកុងទាំងរហ័សផងទៀត គឺដែលឈ្លាសវៃ ដែលដឹងផ្លូវដឹងឧបាយ។ |
| វាយោ | | ន | (បា) | ខ្យល់។ |
| វាសនា | [វា.ស្នា] | ន | (បាសំ) | សំណាង ភ័ព្វព្រេង។ |
| វិចារណញ្ញាណ | [វិចារៈណ័ញញាន] | ន | (បា) | ប្រាជ្ញាជាគ្រឿងត្រិះរិះរកហេតុផលឱ្យឃើញច្បាស់ ឬឱ្យស្គាល់ខុសត្រូវ។ |
| វិចិត្រករ | [វិចិត ត្រះក] | ន | (បាសំ) | ជាងគំនូរ ឬអ្នកគូរឆ្លាក់រូបភាព។ |
| វិជ្ជមាន | [វិច.ជះ មាន] | គុ | (បាសំ) | ដែលកំពុងមាននៅឡើយ។ |
| វិញ្ញាណ | [វិញ.ញាន] | ន | (បាសំ) | ធម្មជាតិដឹងច្បាស់នូវអារម្មណ៍។ |
| វិញ្ញូជន | [វិញ.ញូ.ជន់] | ន | (បាសំ) | អ្នកប្រាជ្ញ។ |
| វិទ្យាសាស្ត្រ | [វិត.ទ្យា.សាស] | ន | (បាសំ) | គម្ពីរប្រាប់វិជ្ជាផ្សេងៗ។វិជ្ជាមួយប្រភេទដែលគេរកឃើញដោយការលៃផ្សំ មានការផ្សំធាតុជាដើម។ |
| វិធីសាស្ត្រ | [វិធីសាស] | ន | (បាសំ) | ក្បួន ឬបែបបទធ្វើអ្វីមួយ វិធីធ្វើអ្វីមួយ។ |
| វិនាសអន្តរាយ | [វិនាសអន់តៈរ៉ាយ] | កិ | (បាសំ) | អន្តរាយយ៉ាងសម្បើម ខូចខាតយ៉ាងច្រើន។ |
| វិនិច្ឆ័យ | [វិ.និច.ឆៃ] | កិ | (បាសំ) | ជម្រះក្ដី កាត់ក្ដី។ |

| | | | | |
|---|---|---|---|---|
| វិប្បដិសារី | [វិប.ប៉ះដិសារ៉ី] | ន | (បាសំ) | សេចក្ដីទឹកស្ដាយក្រោយ។ |
| វិមាន | | ន | (បាសំ) | លំនៅ។ |
| វិស្វករ | [វិះស្វៈ ក] | ន | (សំ) | អ្នកបច្ចេកទេសថ្នាក់ឧត្ដម អ្នកបច្ចេកទេសផ្សេងៗ អ្នកមានចំណេះជំនាញក្នុងវិជ្ជាណាមួយ។ |
| វិស្សមកាល | [វិះសះមះកាល] | ន | (បា) | ឱកាសឈប់សម្រាកមិនធ្វើការ ឬឈប់សម្រាកពីរៀន។ |
| វីរជន | [វីរៈជន់] | ន | (បាសំ) | អ្នកក្លាហាន អ្នកអង់អាច អ្នកពូកែ។ |
| វៀរ | | កិ | | លើកលែង តម ឈប់ខាន។ |
| វេទនា | [វេ.ទះនា] | គុ | (បាសំ) | ដែលលំបាកលំបិន ដែលក្រតោកយ៉ាក។ |
| វេរា | | ន | (បាសំ) | ពៀរ។ |

## ស

| | | | | |
|---|---|---|---|---|
| សក្កទេវរាជ | [ស័កកះទេវះរាច] | ន | (បា) | ស្ដេចទេវតា។ |
| សក្ការៈ | [ស័ក.ការ៉ះ] | ន | (បាសំ) | សេចក្ដីគោរព ការធ្វើបដិសណ្ឋារៈ ដោយគោរព។ |
| សង្គម | [សង់គំ] | ន | (បាសំ) | ការជួបជុំគ្នា ការរាប់រកគ្នា ការប្រមូលរួមផ្ដុំមនុស្សសត្វ។ |
| សង្ហា | [សង់ហា] | គុ | | ដែលរុងរឿង ដែលមានរូបល្អ អង់អាចឆើតឆាយ ស្រស់។ |
| សង្ហារិម | [សង់.ហា.រិម] | ន | (បា) | ទ្រព្យ ឬវត្ថុប្រើប្រាស់ ឬគុបតែងលំអដែលអាចលើកយកទៅមកបាន។ |
| សច្ចា | [ស័ចចា] | កិ | (បា) | ប្រកាសពាក្យសច្ចៈ សំបូងសង្រ្វង។ |

| | | | | |
|---|---|---|---|---|
| សញ្ជាតិ | [ស័ញជាត] | ន | (បាសំ) | ដើមកំណើត។ |
| សត្តវិទ្យា | [សាត់.តៈវិត.ទ្យា] | ន | (បា) | វិជ្ជាសម្រាប់រក្សាសត្វ វិជ្ជាពេទ្យសត្វ។ |
| សត្វចតុបាទ | [ចៈតុ.បាត] | ន | (បា) | សត្វជើងបួន។ |
| សត្វពាហនៈ | [ស័តពា.ហៈនៈ] | ន | (បា) | សត្វប្រើសម្រាប់ជិះ ឬទឹមជាមធ្យោបាយជួយកម្លាំងមនុស្ស។ |
| សតិអារម្មណ៍ | [សៈតិអា.រ៉ម] | ន | (បា) | ញាណតោងរំឭកឃើញ។ |
| សន្ធោសន្ធៅ | | គុ | | ដែលភ្លើងឆេះឡើងលើខ្លាំង។ |
| សន្ទេហភាព | [សន់.ទេ.ហ.ភាប] | ន | (បា) | ភាពនៃសេចក្តីសង្ស័យ។ |
| សន្និដ្ឋាន | [សន់.និត.ឋាន] | ន | (បាសំ) | សេចក្តីយល់ជាក់ ការយល់ឃើញសឹប់ ការប្រមូលគំនិតសំខាន់ៗ។ |
| សន្យា | [សន់.យ៉ា] | កិ | (បា) | ប្តេជ្ញា សន្មត។ |
| សប្បុរស | [ស័បឬសប់.ប៉ុរ័ស់] | ន | (បា) | អ្នកប្រព្រឹត្តល្អ បុរសអ្នកស្លូត។ |
| សមត្ថភាព | [សៈម័តថៈភាប] | ន | (បាសំ) | ភាពនៃសេចក្តីអាច ហ៊ាន សេចក្តីមោះមុត។ |
| សមាជ | [សៈម៉ាច] | ន | (បាសំ) | មហាសន្និបាត ឬការប្រជុំនៃមហាជនអ្នកពិភាក្សាអំពីបញ្ហាផ្សេងៗដែលមានផលប្រយោជន៍ជាទូទៅ។ |
| សមូហភាព | [សៈមូហៈភាប] | ន | (បាសំ) | ភាពជាក្រុម ហ្វូង។ |
| សម្បទា | [ស័ម.ប៉ទា] | ន | (បាសំ) | ការសមប្រកប។ |
| សម្មាអាជីវោ | [ស័មម៉ាអាជីវោ] | ន | (បា) | ការប្រកបរបរចិញ្ចឹមជីវិតត្រឹមត្រូវ។ |
| សហាគមន៍ | [សៈ ហៈ គំ.] | ន | (បាសំ) | ការនៅជាមួយគ្នា ប្រជុំភូមិ ឬតំបន់អ្នកស្រុកប្រកបមុខរបរចូលគ្នា។ |

| | | | | |
|---|---|---|---|---|
| សហគ្រាស | [សៈហៈ-] | ន | (បាលំ) | គ្រឹះស្ថាន គឺអង្គការរបស់រដ្ឋ ឬឯកជនសម្រាប់ទទួលធ្វើការធំៗ។ |
| សហាយ | [សៈហាយ] | ន | | បុរស ស្ត្រីដែលខូចកាចនឹងគ្នា។ |
| សាធារណៈ | [សាធា រៈ ណៈ] | គុ | (បាសំ) | ដែលជាទូទៅ។ |
| សាសនាព្រាហ្មណ៍ | [សា.ស្នាព្រាម] | ន | (បាសំ) | សាសនាដែលពួកព្រាហ្មណ៍និយម។ |
| សាស្ត្រាវុធ | [សាស.ស្ត្រាវុត] | ន | (សំ) | សម្ភារៈសម្រាប់ធ្វើសឹកសង្គ្រាម។ |
| សិប្បករ | [សិប.ប៉ៈក] | ន | (បាសំ) | អ្នកធ្វើជាង។ |
| សុខសាន្ត | [សុក.សាន] | គុ | (បាសំ) | ដែលមានសេចក្តីសុខ។ |
| សុគត | [សុ.គត់] | កិ | (បាសំ) | ស្លាប់។ |
| សុចរិត | [សុចៈរិត] | ន | (បាសំ) | ការប្រព្រឹត្តល្អត្រឹមត្រូវ។ |
| សុជីវធម៌ | [សុ.ជី.វៈធ័រ] | ន | (សំ) | ការរស់នៅដោយល្អ។ |
| សុទិដ្ឋិនិយម | [សុ.ទិត.ថិ.និ.យំ] | ន | (បា) | ការយល់ឃើញថារបស់អ្វីក្នុងលោកសុទ្ធតែល្អ សុខស្រួល ត្រឹមត្រូវ។ |
| សុភមង្គល | [សុភៈម័ងគល់] | ន | (បា) | ការរស់នៅប្រកបដោយសេចក្តីសុខ។ |
| សុភាសិត | | ន | (បា) | ពាក្យត្រូវ ឱវាទត្រឹមត្រូវ។ |
| សុវណ្ណភូមិ | [សុ.វ៉ាន់.ន៉ៈ.ភូម] | ន | (បា) | តំបន់ដែលសម្បូរមាស។ |
| សុវត្ថិភាព | [សុវ៉តថិភាប] | គុ | (បាសំ) | ប្រកបដោយសេចក្តីសុខចម្រើន។ |
| សេដ្ឋកិច្ច | [សេត.ឋៈកិច] | ន | (បា) | កិច្ចការប្រសើរបំផុត មុខរបរដ៏ឧត្តម។ |
| សេពគប់ | [សែបគប់] | កិ | (សំ) | រាប់រកយកជាគ្នា។ |
| សោតវិញ្ញាណ | [សោតៈវិញ.ញាន] | ន | (បាសំ) | ការដឹងច្បាស់នូវអារម្មណ៍តាមរយៈត្រចៀក។ |

| | | | | |
|---|---|---|---|---|
| សំព័ន្ធ | [សំពាន់] | ន | (បាសំ) | ការចងភ្ជាប់គ្នា ដំណើរទាក់ទងគ្នា។ |
| ស្កុកស្គម្ភ | | គុ | (បាសំ) | ដែលរឹងមាំ ដែលសម្បើម។ |
| ស្ថានសួគ៌ | [ឋានសួ] | ន | (សំ) | ស្ថានទេវលោក។ |
| ស្ថានីយ | [ឋាន.នីយ] | ន | (សំ) | ទីសំចត ទីកន្លែងជាលំនៅ។ |
| ស្ថាបត្យករ | [ឋាប៉័តត្យ:ក] | ន | (សំ) | អ្នកកសាង អ្នកបង្កើត។ |
| ស្ថាពរ | [ស្ថាពៈរៈ] | គុ | | ដែលទុកជាបានការ ឥតរើរុះ។ |
| ស្ថិតស្ថេរ | | គុ | (សំ) | ដែលឋិតនៅយូរ ស្ថិតនៅជារៀងរហូត។ |
| ស្មារតី | [ស្មា.រ:ដី] | ន | (បាសំ) | សេចក្ដីនឹកឃើញ ។ |
| ស្មោកគ្រោក | | គុ | | កខ្វក់ ប្រឡាក់ប្រឡូសគួរខ្ពើម។ |
| ស្មោះស្ម័គ្រ | | កិ | | ស្រុះស្រួលជានាទឹងគ្នាដើម្បីធ្វើអ្វីមួយ។ |
| ស្រីខាតលក្ខណ៍ | | ន | | ស្រីឥតលក្ខណ៍ ស្រីគ្មានលក្ខណ៍។ |
| ស្រីគ្រប់លក្ខណ៍ | | ន | | ស្រីដែលបរិបូណ៌ដោយលក្ខណៈល្អគ្រប់យ៉ាង។ |
| ស្វាគមន៍ | [ស្វា.គំ] | ន | (សំ) | ការទទួលដោយសោមនស្ស។ |
| ស្វាមីភក្តិ | [ស្វាមីភ័ក] | ន | (បាសំ) | សេចក្ដីស្រឡាញ់ស្មោះចំពោះម្ចាស់ ចៅហ្វាយនាយ ស្វាមី។ |

## ហ

| | | | | |
|---|---|---|---|---|
| ហត្ថកម្ម | [ហ័ត.ថៈកាំ] | ន | (បា) | ការដែលធ្វើដោយដៃ។ |
| ហត្ថពលកម្ម | [ហ័ត.ថៈពល់កាំ] | ន | (បាសំ) | ការងារដោយដៃ។ |
| ហេតុការណ៍ | [ហែតកា] | ន | (បាសំ) | ដំណើររឿងដែលកើតមានឡើង។ |

# អ

| | | | | |
|---|---|---|---|---|
| អគារ | [អៈគា] | ន | (បាសំ) | មន្ទីរ ផ្ទះ រោង។ |
| អច្ឆរិយវត្ថុ | [អ័ចឆៈរិយ:វ័ត.ថុ] | ន | (បា) | វត្ថុអស្ចារ្យដែលគួរឱ្យកោតស្ញប់ស្ញែង |
| អត្តនោម័តិ | [អ័តតៈនោម៉ាត់] | ន. | (បា) | ការយល់ឃើញតាមគំនិតរបស់ខ្លួន។ |
| អត្តពលកម្ម | [អ័តតៈពល់កាំ] | ន | (បា) | អំពើ ឬកិច្ចការដែលកើតឡើងអំពីកម្លាំងខ្លួនឯង។ |
| អត្តពលករ | [អ័ត.តៈពល់ក] | ន | (បា) | អ្នកបញ្ចេញអត្តពលកម្ម។ |
| អត្តសញ្ញាណជាតិ | [អ័ត.តៈស័ញ.ញ៉ាន.ជាត] | ន | (បា) | គ្រឿងសម្គាល់របស់ជាតិនីមួយៗ។ |
| អធិកអធម | [អៈធឹកអៈធំ] | គុ | (បាសំ) | ក្រៃលែង លើសលន់។ |
| អធិដ្ឋាន | [អៈធិតឋាន] | ន | (បា) | ការតាំងចិត្ត ការតាំងចិត្តប្រាថ្នា ការទឹកផ្សង។ |
| អធិបតី | [អៈធិប៉ៈដី] | ន | (បា) | ប្រធាន ប្រមុខ។ |
| អធ្យាស្រ័យ | [អ័ត.ធ្យាស្រៃ] | ន | (សំ) | សេចក្ដីសន្ដោស ការមិនប្រកាន់ទោស។ |
| អនាគត | [អៈន៉ាគត់] | ន | (សំ) | ពេលមិនទាន់ទៅដល់។ |
| អនាម័យ | [អៈន៉ាម៉ៃ] | ន | (បាសំ) | ដំណើរចាកផុតពីរោគាព្យាធិ ឬឥតជំងឺ។ |
| អនុគ្រោះ | [អៈនុគ្រោះ] | កិ | (បាសំ) | លើកលែងឱ្យ។ |
| អនុញ្ញាត | [អៈនុញញ៉ាត] | កិ | (បា) | យល់ព្រម បើកសិទ្ធិឱ្យ។ |
| អនុនាវីឯក | [អៈនុ.នាវីអែក] | ន | (បា) | នាយទាហានជើងទឹកថ្នាក់សក្តិ៣។ |
| អនុម័ត | [អនុម៉ាត់] | កិ | (បាសំ) | យល់ព្រម ស្របតាម។ |

**យើងបម្រើសេវាកម្ម :**

- អភិវឌ្ឍសៀវភៅនិងសម្ភារឧបទេស
- បោះពុម្ព
- ចែកផ្សាយដល់សាលារៀន

**WE SERVE :**

- Book and teaching-aid development
- Printing
- Distribution to schools




មានលក់សៀវភៅសិក្សាគោលសម្រាប់សិស្សនិង សម្រាប់គ្រូ សៀវភៅហ្វឹកហាត់ សៀវភៅអំណានបន្ថែម សម្ភារឧបទេស ព្រមទាំងសម្ភារការិយាល័យគ្រប់មុខ !

Selling textbooks, teacher´s manuals, workbooks, supplementary readers, teaching-aids and stationary !




